# រឿងរាមកេរ្តិ៍

នៃ

# តាចក់

## HISTOIRE DU REAMKER

*RECIT RECUEILLI ET PRESENTE*
*PAR*
*F. BIZOT (E. F. E. O.)*

*PHNOM-PENH 1973*

## អារម្ភកថា

រឿងរាមកេរ្តិ៍នេះ ជារឿងរៀបរៀងឡើងដោយពាក្យសំដីនិយាយ គឺមកពីខ្ញុំបានអញ្ជើញលោកតាម្នាក់ឱ្យថ្លែងរឿងនេះឱ្យខ្ញុំស្តាប់ ហើយខ្ញុំថតសំលេងគាត់ទុក ។លោកតានោះឈ្មោះ **ចក់** អាយុប្រមាណ ៧០ ឆ្នាំ ជាតិភូមិគាត់នៅ **អង្គរ** ខេត្រសៀមរាប. ឥឡូវនេះគាត់អនិច្ចកម្មទៅហើយ ។

ក្នុងការបោះពុម្ពរឿងនេះ ខ្ញុំពុំបានកែប្រែផ្លាស់ប្តូរពាក្យសំដីនៃលោកតា **ចក់** ឱ្យមកតាមពាក្យសម័យឥឡូវនេះទេ ទាំងប្រយោគ និងឃ្លានៃពាក្យសោត ក៏ទុកនៅដូចដើមទាំងអស់ ទោះបីប្រយោគនោះ ឃ្លានោះពិបាលស្តាប់យ៉ាងណាក៏ដោយ ។ ក៏ប៉ុន្តែពាក្យណាដែលយើងអាចសរសេរតាមអក្ខរាវិរុទ្ធ ក្នុងវចនានុក្រមខ្មែរបាន យើងក៏សរសេរតាម ។

តាមការណ៍ពិត ពាក្យនិយាយ តែងខុសពីពាក្យសរសេរ ។ ពាក្យនិយាយគេនិយាយតាមភាសាអ្នកស្រុក. គេនិយាយឱ្យតែស្តាប់បាន ស្តាប់យល់ ។ ពាក្យសរសេរគេសរសេរតាមអក្ខរាវិរុទ្ធ ដែលមានក្នុងវចនានុក្រមខ្មែរ គេសរសេរដោយគិតដល់ពាក្យគួរប្រើ ឬមិនគួរប្រើ ស្តាប់បាន ឬស្តាប់ពុំបានជាមុន ។

មួយទៀត អក្សរបូរាណ គឺអក្សរដែលគេសរសេរពាក្យពីបូរាណ គេរមែងសរសេរតាមសំលេងមនុស្សបូរាណ ។ អក្សរសម័យថ្មី គឺអក្សរដែលគេសរសេរពាក្យសម័យថ្មីនេះ គេសរសេរមិនគិតដល់សំឡេងទេ ។ ព្រោះហេតុនោះ បើយើងសរសេរពាក្យតាមអក្ខរាវិរុទ្ធសម័យថ្មី នាំឱ្យបាត់សំឡេងគឺសំដីលោកតា **ចក** ឬបើយើងសរសេរពាក្យតាមសំឡេងលោកតា **ចក** នាំឱ្យខុសរបៀបប្រើក្នុងសម័យថ្មីនេះ ។

ការណើដែលខ្ញុំពុំបានកែពាក្យ កែឃ្លា កែប្រយោគរបស់លោកតា **ចក** ឱ្យមកជាពាក្យងាយស្តាប់ ងាយយល់ ឬកែឱ្យត្រូវតាមសម័យថ្មីនោះ ព្រោះត្រូវរក្សាទុកនូវឯកសារដើម សម្រាប់ជាសម្បត្តិ រកហេតុផល រកទំនៀមទម្លាប់ខ្មែរ រកប្រពៃណីខ្មែរ ជារបស់ជីដូនជីតា គឺបុព្វបុរស ដែលសព្វថ្ងៃនេះ មានការបាត់បង់អស់ជាច្រើន ។ សូម្បីតែអ្នកចេះចាំពិតប្រាកដនូវរឿងរាមកេរ្តិក្នុងសម័យនេះ ក៏យើងមិនងាយរកបានទេ ។ ម្ល៉ោះហើយរឿងរាមកេរ្តិនេះ ស្ទើរតែរលប់បាត់ទៅហើយ ។

សូមជំរាបថា : លោកតា **ចក** ដែលនិយាយរឿងរាមកេរ្តិនេះ បើយើងបានស្តាប់គាត់ផ្ទាល់ យើងនឹងពិរោះចាប់ចិត្ត ព្រឺរោម ព្រឺស្បែក បើគេស្តាប់គាត់និយាយគ្មានងាកស្មារតីទេ ។ ក្នុងចិត្តយើងចាបអារម្មណ៍ខ្លាំងហាក់ដូចជាសុបិន្តឃើញនូវរឿងនោះៗមកប្រាកដនឹងភ្នែកយើង ។

ថ្ងៃទី ១២ ខែវិច្ឆិកា ឆ្នាំ ១៩៧៣

លោក **ចឹហ្សូត៍**

# រឿងរាមកេរ្តិ៍

១- រឿងរាមកេរ្តិ៍ជារឿងអនេកបរិយាយ មានតាំងអំពីមុនព្រះពុទ្ធសាសនា តាំងអំពីកើតទឹក កើតដី មានឥសីប្រាំបីទិស គឺឥសីណារ៉ត. កាឡៃយកត. មុខបួន. ភ្នែកភ្លើង. មហាមេឃមុនី. កាឡៃយកោត. ព្រះកាណិសព្វមុនី ព្រះក្រិស ។

ឥសីទាំងអស់នេះបានបង្កើតទឹក បង្កើតដី ព្រះពៃស្រពណ៍ មានអង្គព្រះព្រហ្មទាំងពីរដណ្តប់មកជំនុំគ្នាថា : កើតទឹក កើតដី កើតសព្វគ្រប់ហើយ នឹងរកអ្នកឯណា ទ្រទឹកទ្រដីបាន យល់ឃើញថា បុត្រព្រះពាយមានរិទ្ធិមានអំណាចណាស់ ទ្រទឹកទ្រដីបាន ហើយអង្គព្រះព្រហ្មខ្លះថា មានជំពូកបុព្វកាសនាគ មានរិទ្ធិណាស់ នឹងទ្រទឹកទ្រដីបាន បើដូច្នោះហើយឱ្យជំពូកបុព្វកាសនាគទៅប្រឡងរិទ្ធិជាមួយនឹងបុត្រព្រះពាយ បើអ្នកឯណាមួយមានជ័យជំនះ ត្រូវអោយទ្រទឹកទ្រដីទាំងអស់ ម្លោះហើយជុំពូបុព្វកាសនាគ ហោះទៅកំពូលភ្នំព្រះសុមេរុ យកកន្ទុយវាត់វ័ណ្ឌ ព័ន្ធជាប្រាំពីរជុំ បើកពពារបាំងសែងព្រះអាទិត្យ ឱ្យងងឹតផែនដី កើតជាសេចក្តីអស្ចារ្យកោលាហល រីឯបុត្រព្រះពាយជិះសេះស មាត់តែងច្រាល់ "មាត់ក្រហម" ព្រះហស្តមួយកាន់ព្រះសែងថ្លា "ព្រះខ័ន្ធ" ព្រះហស្តមួយទៀតណាកាន់អំកោងកែវ

សំរាប់ផ្ទុំ ម្លោះហើយបុត្រព្រះពាយផ្លុំកែវ កើតជាខ្យល់ព្យុះសង្ឃរារុកចូលក្នុងពោះនាគឮដូចផ្គរក្នុងដើមឆ្នាំ កក្រើកទឹក កក្រើកដី ព្រៃព្រឹក្សាខ្យល់ហួត ខ្យល់ហែងក្នុងពោះនាគ រីងទឹកក្នុងពោះនាគ ស្ងួតក្រៀមស្រកា នាគឱនសិរសាសំយុងកចុះ បុត្រព្រះពាយដៃមួយកាន់ព្រះសែងថ្លា ដៃមួយចាប់ព្រះសិរសាអារផ្តាច់សុរងធ្លាក់ចេញ នាគស្រែកផ្តាំថា : ក្បាលអញបើបុត្រព្រះពាយចោលកាលណោ សូមអោយបែកជាបី ក្បាលមួយ ឱ្យទៅកើតឯឋានសួគ៌ ក្បាលមួយទៀតណា កើតឯឋានកណ្តាល ក្បាលមួយទៀតទៅកើតឯឋាននរគរវិថី ។ ក្បាលឋានកណ្តាល កើតជានាងដាវដារ៉ា ដើរសុំកូនពាឥសីទិសទាំងប្រាំបី ឥសីទាំងប្រាំពីរថាឱ្យបានៈ តែកូននាងឯងគ្មានរិទ្ធិទេ ត្រូវទៅសុំឥសីមហាកាឡៃកោត ទើបនាងទៅសុំឥសីមហាកាឡៃកោត ទើបលោកសូនគុលិកាពីរ ដណ្តប់ជុំ រូចនាងស៊ីទៅនឹងត្រូវកើតបានជាកូនដប់ពីរនាក់ ។

២- និយាយអំពីអង្គព្រះឥសូរ ដែលគង់លើភ្នំកៃលាស់បព្វតា មានទេវតាទៅគាល់ព្រះអង្គព្រះឥសូរមួយល្វាចប្រាំរយ ហើយទៅអង្អែលក្បាលននកៈអកង្ខមាសូរ ក្បាលគាត់ទំពែករលីងរអស់ ក៏សង្វៀញ៉រញាក់ បាត់លើសិរសាអកង្ខមាសូរថា អញនឹងទ្រាំទ្រយល់ជាពុំបាន ទៅក្រាបទូលអង្គព្រះឥសូរថា : ទេវបុត្តទេវតា អង្អែលក្បាលខ្ញុំច្រើនណាស់ សុំម្ចាស់ទ្រង់ព្រះ



មេត្តា ព្រះឥសូរថា ននកៈអកង្ខមាសូរអោយចង្អុលដៃមក អញនឹងអោយសិល្បនិច្ច អកង្ខមា សូរហុចចង្អុលដៃទៅ ព្រះឥសូរសេពមន្តព្រះគាថាស្តោះដាក់ចង្អុលដៃ បើមានទេវតាឯណាមកអង្អែលក្បាល អោយចង្អុល ពេលនោះទេវតាទាំងប្រាំរយ ឡើងទៅគាល់អង្គព្រះឥសូរ ទៅអង្អែលក្បាលននកៈអកង្គមាសូរ អកង្ខមាសូរក៏ចង្អុល ក៏ប៉ើងទេវតាទាំងប្រាំរយនោះឯណើនក្រៅកណ្តាប់ចក្រវាល ពេលក្រោយទៀតក៏ស្ងប់ស្ងាត់មិនមានអង្គទេវតាយក្សឯណា ទៅគាល់ឡើយ ហើយព្រះឥសូរនិយាយទៅកាន់នា-រាយណថា ព្រះអណុចអូនអើយ មិនឃើញទេវបុត្រយក្សឯណាចូលមកគាល់យើងទៀតឡើយ ព្រះនារាយណ៍ឆ្លើយតា ល្ងាចម្សិលមិញននកៈអកង្ខមាសូរ វាចង្អុលទេវបុត្រ ទេវតាប៉ើងទៅឯកណ្តាប់ចក្រវាល ព្រះឥសូរឆ្លើយថា អូនអើយបងមិនហ៊ានទៅទេ ក្រែងវាចង្អុលខ្លួនបងទៅនៅក្រៅកណ្តាប់ចក្រវាល ដូច្នោះក៏រត់ទៅនៅនឹងហ្វូងក្របីទាំងប្រាំរយ អកង្ខមាសូរដ៏ដឹងថា ម្ចាស់លើត្បូងសិរសារត់ចោលបូរី ម្ងោះហើយក៏ឡើងទៅលើឋានព្រះឥសូរ រួចចង់នាងកោគវតីស្រីសុជាតាឧមាទ័យ នាងក៏ដឹងខ្លួនថាអកង្ខមាសូរចង់ស្នេហា នាងឆ្លើយថា ប្រសិទ្ធិសួសអើយ ព្រះភស្តាព្រះស្វាមីរត់ចោលហើយ អញរំពឹងតែឯង បើឯងស្រឡាញ់អញ ត្រូវឯងរាំរបាំតាម

អញ បើអញរាំចាក់ក្បាច់ទៅត្រង់ណា ឯងធ្វើតាមអញ រួចក៏ពួកទេវតាលេងភ្លេង នាងក៏ចាប់រាំក្បាច់របាំ អកង្គមាសូរក៏រាំតាម នាងក៏ចាក់ក្បាច់មកចំភ្លៅរបស់នាង អកង្គមាសូរគេរាំចាក់ក្បាច់មកចំភ្លៅរបស់គេ ភ្លៅក៏បាក់ផស់ អង្គព្រះនារាយណ៍ស្ទុះភ្លែត ដៃមួយកាន់ព្រះសែងថ្លា ដៃមួយចាប់ព្រះសិរសា អារផ្តាច់ព្រះសិរសាធ្លាក់ចេញ អកង្គមាសូរក៏លើកដៃអង្វរថាមកសម្លាប់ខ្ញុំអ្វីកណ្តាលរុងរឿង អញទុកអាឯងពុំបាន អាចោរក្បត់អញសំលាប់ឯងក្នុងពេលនេះហើយ អកង្គមាសូរថាបើព្រះអង្គសំលាប់ខ្ញុំ ខ្ញុំសុំមុខបួន ដៃប្រាំបីដូចអង្គព្រះនារាយណ៍អង្គ ព្រះនារាយណ៍ឆ្លើយថា អញមិនអោយឯងមុខបួន ដៃប្រាំបីដូចអញទេ អញអោយឯងមុខដប់ ដៃម្ភៃ ម្លោះហើយក៏កាត់នន្ទកៈអកង្គមាសូរ ចោលទៅធ្លាក់ឯនគរថាវឡាក់សា-ខៀម ទៅកើតជារាពលណ៍មុខដប់ដៃម្ភៃ ជាកូននាងដាវដារ៉ា ប្រពន្ធថាវឡាក់សាខៀម ត្រូវជាចៅព្រះព្រហ្មមានបងប្អូនដប់ពីរនាក់ ។

(ពាក្យពោល)

"ដេងណោះ ក្រុងរាពណាសូរ ពូជពង្សអំបូរ នឹងព្រះព្រហ្ម. អាសូរត្រីមុខ. អាសូរត្រីកាយ. មហាកាយយក្សា. វិរុលមេឃ. វិរុលចម្បាំង ភុក្កិការ. កុម្ភ័ណ្ឌ. កុំប៉ាន់. ភគ្គទេស. កុរេប៉ាន់. វៃរាពណិ. មូលព្រះលាំ ។"



ម្តាយចែកកុវ៉េប៉ាន់ បានបុស្បុក រាពណ៍បានឆ័ត្រជ័យរាពណ៍ ក៏ដណ្តើមបុស្បុក អំពីកុវ៉េប៉ាន់ កុវ៉េប៉ាន់ ក៏បើកបុស្បុកទៅឋានព្រះឥសូរ ។

៣- និយាយអំពីនាង កោគវតីស្រីសុជាតាឧមាទ័យ និយាយថាព្រះអណុជអូន ព្រះភស្តាព្រះស្វាមីរត់ចោលបូរីទៅយូរថ្ងៃ ចូរប្អូនទៅតាមព្រះជេដ្ឋាព្រះរៀមបង ដែលលះទៅនឹងហ្វូងក្របីទាំងប្រាំរយអង្គនារាយណ៍ហោះទៅដល់ហ្វូងក្របីទាំង ប្រាំរយ ក្លែងភេទជាស្រីទេពអប្សរល្អក្រៃចូលទៅក្នុងហ្វូងក្របីទាំងប្រាំរយ អង្គព្រះឥសូរឃើញភ្លាមនិមិត្តជាអង្គព្រះឥសូរភ្លែតចាប់ទេពអប្សរជាប់ អង្គព្រះនារាយក្រឡាខ្លួនពុំទាន់ កាមព្រះឥសូរធ្លាក់ហើយចាប់ជាប់នឹងបោលទៅឋានសួគាល័យ អង្គព្រះឥសូរថាកុំចោលនឹងឆេះសូគាដប់ប្រាំមួយជាន់ បើចោលលើផែនដីកើតជាភ្លើងប្រល័យកល្បឆេះផែនដី បើចុះគិតយ៉ាងណា ត្រូវផ្ញើទៅនឹងបុត្រព្រះពាយ ព្រះពាយបក់បោកមិនអោយកាមព្រះឥសូរធ្លាក់ដល់ដី ។

៤- និយាយអំពីនាងកែមចាន់ ជាប្រពន្ធឥសី នាំគ្នាទៅចាំសិល្បអោយនាំចាំនៅសាលា តាបសមកពីព្រៃកាលណានិយាយប្រាប់នាងថាឃើញកិន្នរឃើញទេវតា ឃើញព្រះឥន្ទ្រ ឃើញព្រះព្រហ្ម នាងកែមចាន់

(បាត់ដំបង ហៅកាលកាញ) ថាអផ្សុកណាស់ លោកតាមិនដឹងនៅបាន ។ អញចំរើនឈានបានសិល្បនេះ នាងអោយចង្កូលដៃមកអញប្រសិទ្ធិអោយនាង នាងកែបចាន់ក៏អោយចង្កូលដៃមក តាបសក៏ប្រសិទ្ធិហើយ បើនាងអផ្សុកចង្កូលទៅឯណាបាន ដូចសេចក្ដីប្រាថ្នា ។ តាបសក៏ទៅទ្រង់សិល្បចំរើនឈានវិញ ក្នុងព្រៃហេមពាន្ត នាងទៅចាំសាលា លុះដល់អផ្សុកចង្កូលទៅឋានព្រះឥសូរ ព្រះឥសូរធ្លាក់មកស្រឡាញ់នាង ថ្ងៃក្រោយនាងចង្កូលទៅឋានព្រះព្រហ្ម ព្រះព្រហ្មក៏ធ្លាក់មកស្រឡាញ់នាង ថ្ងៃក្រោយទៀតចង្កូលទៅឋានព្រះអាទិត្យ ព្រះអាទិត្យចុះមកស្រឡាញ់នាង យូរលង់បន្តិចទៅនាង កែមចាន់ ក៏ទ្រង់គភ៌ តាបសមកពីព្រៃក៏ឆ្ងល់ថា ឱនាងកែមចាន់អញមិនដែលទៅប៉ះពាល់នាងសោះ ហេតុដូចម្ដេចក៏នាងទ្រង់គភ៌ តាបសក៏គិតពិចារណាថា ឱនិស្ស័យអញពីដើមនោះឯង ដែលរាំរែងបន្តិច១ វាមិនបាត់ម្លោះហើយទាល់គ្រប់ខែដប់ព្រះវស្សា ប្រសូត្រកុមារទាំងពីរពង្ស មានសម្បុរបីម្នាក់ ១ ប្រសូត្រចាកផ្ទៃព្រះមាតា តាបសខំឧស្សាហ៍ត្រេកអរណាស់ បីបមថ្នមពរ នាងស្វាហាយខឹងថា លោកតាកូនឯងពុំពរ ពរកូនគេ តាបសក៏ឆ្ងល់ក្នុងចិត្ត ដល់ហើយក៏នឹកឧទ្ទិសថា បើមិនមែនកូនអញ អញបោះទៅក្នុងទឹក អោយកើតជាស្វា សូមទឹកហូរគួចទៅជាប់នឹងខ្សាច់



ប្រាំពីរពណ៌ ឯបាតសមុទ្រ រួចក៏បោះទៅ តាបសវិលវឹងមកសាលាវិញ នាងកែបចាន់ សួររកកូន ថានាងអើយកូននោះអញបោះទៅក្នុងស្ទឹង ទឹកវាហូរគួចទៅហើយ នាងកែបចាន់គិតថា រឿងរ៉ាវអស់ទាំងនេះ គ្មាននរណាក្រៅអំពីនាងស្វាហាយ ក៏ដាប់បណ្ដាសាអោយង៉ែង រកស៊ីជាប់គួថនឹងថ្មដា លុះត្រាព្រះលោកមកទើបង៉ែងរួចអំពីថ្មដា ។

និយាយអណិសព្រហ្មក្ដៅក្រហាយនិត្យនៅពុំបាន បើកព្រះនេត្រ ឃើញស្វាទាំងពីរនៅនឹងបាតសមុទ្រ ក៏ថា ឱកូនបិតា មហាឥសីបោះមកក្នុងបាតសមុត្រ ក៏ជ្រែកមហាសមុទ្រ មកពរយកបុត្រទាំងពីរពង្ស ទៅដល់ឋានព្រហ្ម ហើយក៏យកផ្កាខាសខឹម ពីឋានព្រហ្មមកបាចអោយកើតជានគរមួយធំ ហៅថា នគរខាសខឹមបូរី អោយស្វាទាំងពីរនៅ ។ ស្វាបងអោយឈ្មោះថាពាលី ប្អូនឈ្មោះថាសុគ្រីព ហើយជប់ឃុនទល ឃុនទិល និងពលស្វាជាច្រើន ហើយពលស្វាខាសខឹមបូរីប្រមាណប៉ែតសិបអក្ខោ ។

៥- និយាយពីនាង ស្វាហាយដែលជាប់គួថនឹងថ្ម ព្រះពាយបក់កាមព្រះឥសូរទៅដល់នាង នាងក៏ទាំងក៏ហាមាត់ស្វាប បុត្រព្រះពាយឆ្លើយថា នាងហាមាត់មកអញអោយអាវុធទិព្វ នាងហាមាត់មកព្រះពាយក៏បញ្ចូល

កាមព្រះឥសូរ ចូលទៅជ្រួតជ្រាបរស់រាង្គកាយ ចាប់តាំងអំពីថ្ងៃនោះទៅ នាងក៏ទ្រង់គភ៌ ដល់ខែដប់គ្រប់វស្សាប្រសូត្របុត្រាល្អឆើតឆាយ ។

និយាយអំពីអង្គក្សត្រាទាំងពីរពង្ស ឥសូរនារាយណ៍ វិលមកឋាន កៃលាសបព្វតាវិញ។ កុរេបាំន់ក៏បើកបុស្បុក ទៅអោយព្រះឥសូរជួយ ឥសូរ រាដៃថា រាពណ៍កុំមក រាពណ៍ក៏ចេះតែទៅពានលើឋានព្រះឥសូរ ១ខ្ទាល់ ណាស់មូលភ្លុកដំរី ពួកវីណាចោលត្រូវដើមទ្រូងរាពណ៍ ពីមុខធ្លុះដល់ខ្នង រាពណ៍ក៏ហោះទៅឋានព្រះព្រហ្ម អោយព្រះព្រហ្មជួយដកភ្លុកដំរីអោយ ព្រះព្រហ្មដកពុំបាន ហោះទៅឋានព្រះឥន្ទ្រ ព្រះឥន្ទ្រដកពុំបាន អោយទៅ ឯវេសកម្មទេវបុត្រ វេសកម្មទេវបុត្រ យករណាពេជ្រទៅអារភ្លុកដំរី ខាងមុខអោយត្រឹមដើមទ្រូង ខាងក្រោយអោយត្រឹមខ្នង កើតជាភ្លុកបាក់ បាក់ នៅក្នុងដើមទ្រូងវា ម្លោះហើយវាត្រូវពូកែតាំងពីថ្ងៃនោះមក វាបរពល ទៅវាយស្ងួតាដប់ប្រាំមួយជាន់ ទេវបុត្រ ទេវតា ទេពអប្សរ បរិវកញ្ញា មហាព្រហ្ម ព្រះឥន្ទ្រា ក៏រត់ទៅនៅកណ្តាប់ចក្រវាល ម្លោះហើយព្រះឥន្ទ្រា នាំស្រីសួគ៌ាមកថ្វាយមួយរយក្នុងមួយឆ្នាំ បានក្រុងរាពណ៍ណាសួរសុខចិត្ត ម្លោះហើយវាដើរស្រឡាញ់សព្វសត្វ រាពណ៍ទៅស្រឡាញ់ដំរីបានកូនមក ឈ្មោះគជរិង គជរី រាពណ៍ទៅស្រឡាញ់ត្រីបានកូនមកឈ្មោះ នាងមច្ឆានព្វ



រាពណ៍ទៅស្រឡាញ់ប្រើសបានកូនមកឈ្មោះ គន្ធព្វបក្សី មួយទៀតគន្ធព្វ បក្សីទៅស្រឡាញ់ត្មាត បានកូនមកឈ្មោះ អាសោបក្សី ទៅស្រឡាញ់មាន់ បានកូនឈ្មោះ ចៅស៊ីផាន់ ទៅស្រឡាញ់ឆ្កែ បានកូនឈ្មោះ នាងសោសុនខា ស្រឡាញ់នាងណាំនៀក បានកូនមកឈ្មោះ ក្វាំមឿង ។

៦- ក្រោយមកព្រះឥន្ទ្រ ទៅទ្រង់សិល្ប វាលបលួចទៅស្រឡាញ់ នាងកោតវតី អគ្គមហេសីព្រះឥន្ទ្រា ស្រាយទ្វារប្រាសាទមិនបាន ប្រែប្រាណ ក្រឡាជាសត្វតុកកែ នៅក្លោងទ្វារប្រាសាទ ពេលនោះព្រះឥន្ទ្រារាយមន្តគា-ថា វារាយតាមលោកផ្ទិរូច ទ្រង់ឈានរាយចង វារាយតាមវាចាំទាំងអស់ ព្រះឥន្ទ្រាលោកចេញផុតទៅ វាស្រាយទ្វារចូលទៅផ្ទឹនឹងនាង វាផ្ទិរូមរស់ រួចវាចេញមកផុត ព្រះឥន្ទ្រលោកនិមន្តមកវិញ ចូលទៅផ្ទឹនឹងនាងទៀត នាងសង្ស័យណាស់ថា ព្រះអង្គមុិញហើយក៏មុិញទៀត ព្រះឥន្ទ្រាថាបងមិន បានមកទេ ទេច្បាស់ជាព្រះអង្គ ថាទេបងមិនបានមកទេ ទេខ្ញុំឃើញជាក់ ស្តែងពិត ជារូបព្រះកស្តាព្រះស្វាមីពិតៗ ព្រះឥន្ទ្រាទ្រង់នូវទិព្វញ្ញាណញេយ្យ យល់ឃើញថា គ្មាននរណាទេ អារាពណ៍ហើយ នាងឆ្លើយថា ខ្ញុំជាស្រីសួគ៌ា មិនអោយប្រុសពី ប្រុសបីកន្លងដើង ខ្ញុំសុំពរព្រះឥន្ទ្រាអត់ដង្ហើម ស្លាប់ចាប់ ជាតិកំណើតកើតជាថ្មី ចូលទៅនៅក្នុងផ្ទៃអគ្គីនាគ ប្រពន្ធរាពណ៍ បើខ្ញុំ

ប្រសូត្រចាកផ្ទៃកាលណា អោយរលាយក្រុងលង្កាបូរី បានប្រាំពីរថ្ងៃអោយរលាយឆេះ ជាប្រពុះផេះ រួចហើយបានគ្រប់ដប់ខែ នាងប្រសូត្រ១ រួចហើយស្រែកយំថា រលាយលង្កា ១ ក្រុងរាពណ៍ឆ្ងល់ណាស់ អស្ចារ្យ ភ្ញុំពួកសេនាដប់ពីរអង្គ ប្រាណេអោយហៅពិភេក ប្រហ៊ិតហោរាមកទាយព្រះរាជបុត្រីកូនអញ ហេតុអ្វីក៏យំ កូនអញថារលាយលង្កា ពិភេកទូលថា រាជបុត្រីនេះតែទុកប្រាំពីរថ្ងៃ កាលណា នគរលង្ការលាយក្លាយជាផេះ ម្លោះហើយក្រុងរាពណ៍ សួរ អោយយកក្អមដាក់កុមារីបណ្តែតទឹកចោលទៅ បណ្តែតបានប្រាំពីរថ្ងៃ មានអង្គទេវតា តាមរក្សាស្រីថ្លៃដាក់ចង្អុលដៃអោយបៀមជញ្ជក់ក្អមនោះអណ្តែតទៅ ជាប់នឹងថ្មដា បៀតអាស្រមឥសី ឥសីមិថុលាថ្ងៃនោះក្តៅក្រហាយនិព្យនៅពុំបាន កាន់ឈើច្រតជំពាមយាមជាប់លើស្មា ឆ្វៀងព្រះនេត្រាឃើញក្អម ជាប់លើថ្ម មើលទៅឃើញទារិកាកុមារី ថាឱចៅស្រីហេតុអ្វីក៏គេយកមកដាក់ក្នុងក្អមបណ្តែតទឹកចោល ឥសីក៏យកនាងកុមារីបីមកទីអាស្រម ដល់ហើយដាក់ព្រះហស្តទាំងប្រាំអោយបៅ ព្រះហស្តនោះក៏ចេញជាជាតិទឹកព្រះថនា ទឹកដោះព្រះមាតា ឥសីអោយឈ្មោះនាងថានាងសេដាចៅស្រី នាងនោះធំឡើងរូបរាងល្អ ដូចស្រីសួគ៌ា ។ ឥសីជប់ធ្នូសិល្ប ឈ្មោះអារិទ្ធិចន្ទផ្លាញថ្លា ប៉ាវគងឃោសនាថា បើរូបណាលើកធ្នូសរ



1.— Il (INDHOJIT) décoche une flèche, donne naissance à des Nāg qui enlacent le singe depuis les pieds, l'enlacent jusqu'au cou . . . ( §. 30 )



2.— SAHANUMĀN s'envole, secoue son corps au-dessus des monuments de la ville Asurā. ( §. 30 )



... puis le corps de nāṅ (PUṄṄAKĀY) flotte dans la fumée, plane rapidement, droit sur le fils de braḥ BĀY... ( §. 32 )



សិល្បរូច នឹងលើកអភិសេកនាងអោយ ។ ព្រះភូមិ ព្រះពាយ ព្រះពៃស្រពណ៍ អង្គទេវតាទាំងពីរដណ្តប់ លើកធ្នូសរ សិល្បពុំរួច មិនតែប៉ុណ្ណោះយក្សមហាក្បាលធំកុំភ្រទា ទាំងរាពណាសូរ ក៏លើកពុំរួច ស្តេចអរិទ្ធករ មួយរយម្តេក៏លើកសរសិល្បពុំរួច ។ រឿងនេះឈប់ស្លេះត្រង់នេះសិន ។

៧- ឋានសួគ៌កើតកោលាហល ច្របូកច្របល់នៅពុំបាន ទេវតាហាមព្រហ្មទាំងមួយម៉ឺនលោកធាតុ មកប្រជុំគ្នាថា ហេតុអ្វីបានជាកើតកោលាហលក្នុងឋានសួគ៌នេះ ថាពីព្រោះតែក្រុងរាពណាសូរ ទូរយសអប្រិយប្រាណ វាមកញាំញីក្នុងស្ថានសួគ៌ខ្លាំងណាស់ ។

ទេពអប្សរបរិវារកញ្ញានៅពុំបាន ព្រះឥន្ទក៏សឹងនាំទៅថ្វាយ មួយឆ្នាំមួយរយៗ បើចុះយើងគិតយ៉ាងដូចម្តេច ថាយើងគិតទៅនិមន្តអង្គព្រះឥន្ទ្រាអោយចុះទៅកើតជាអង្គព្រះនារាយណ៍ ទេវបុត្រ ទេវតាហោះហែរមកច្រើន សល់អង្គព្រះឥន្ទ្រាចុះចាកសួគ៌ ទៅកើតជាព្រះនារាយណ៍ ។ បាននិយាយអង្គព្រះព្រហ្ម ទាំងដប់ពីរ សព្វនៅទេវតា ទេវបុត្រផងទាំងឡាយថាបើដូច្នោះហើយ គួរនាយើងនឹងស្រង់នាគ ពីនព្វមហាសមុទ្រមកធ្វើជាព្រ័ត្រទាញភ្នាល់គ្នា នឹងអាសោយក្ស បើអ្នកណាទាញឈ្នះក៏បានគ្រងពិភពលោក បើអ្នកណាចាញ់ អើក៏សឹងធ្វើជារណបគេ ថាដូច្នោះហើយក៏

ស្រង់នាគពីបាតសមុទ្រ មកធ្វើជាព្រ័ត្រទាញ ផ្សៀងផែនដីព្រៃព្រឹក្សារលក នព្វមហាសមុទ្រ ឮ ឆ១ ឆា១ បែកជាពពុះស្គុះជាព្រះគង្គា កាលណោះមេឃ មីក៏សឹងដ៏និមិត្ត អស្ចារ្យកោលាហលគ្រចូលគ្រចលខ្លាំងក្រៃ ទេវបុត្រទេព អប្សរបរិវកញ្ញា ក៏សឹងដ៏រាំថ្វាយផ្កា ក្នុងពេលនោះ ដែលអាសោយក្សវាបាន ខាងក្បាលហើយ វាទាញនាគនោះឈ្ងុះ និយាយពីសុគ្រីពគិតថា ឱពិភព លោកមួយមូល ឥឡូវនេះនឹងចាញ់អាសោយក្ស បើដូច្នោះហើយអញនឹង លូក្តិតនាគនេះ ថាតេប៉ុណ្ណោះ សុគ្រីពក៏លូកក្តិតនាគ នាគក៏រួញដាច់ខ្លួនជាពីរ អង្គព្រះឥន្ទ្រា ហោះមកកើតជាអង្គព្រះនារាយណ៍ តជាប់ផ្សៀងផែនដី ដូច្នេះ ហើយក៏ធ្លាក់ព្រះខ័នអង្គព្រះនារាយណ៍ ដល់មកសមុទ្រចតុរ័ណ្ណ ព្រះខ័ន នោះក៏សឹងដ៏កាប់ត្រីវិនាសក្សិណក្ស័យ ក្រពើ ឆ្លាម មម្ករនិត្យ នៅពុំបាន ព្រះខ័នក៏សឹងដេញកាប់ស្លាប់ត្រីក្នុងនព្វមហាសមុទ្រ បានសុវណ្ណកច្ឆបា អណ្តើក មាសហុចព្រះខ័នទៅអង្គព្រះនារាយណ៍វិញនោះ "មានផ្ទាំងគំនូរ ព្រះនគរខាងកើត" ដែលព្រះឥន្ទ្រាលោកហោះមក កើតជាអង្គព្រះនារា-យណ៍ ១ នោះលោកចែកជាតិ មកកើតជាអង្គព្រះរាមា ដែលមកកើតជា ព្រះរាមានោះ ពោធិសត្វទាំងបួនព្រះអង្គ សុទ្ធតែទេវបុត្រក្លាហាន មានរិទ្ធី បារមីខ្លាំង ណាស់មកចាប់ប្រតិសន្ធិព្រះរាម មកចាប់ប្រតិសន្ធិទេវបុត្របួន



អង្គមកចាប់ប្រតិសន្ធិនឹងនន្ទាទេវី អគ្គមហេសីព្រះបាទទសរថ ទេវបុត្រ ប្រាំពីរអង្គមកកើតតែរូបព្រះលក្សណមួយមកចាប់ប្រតិសន្ធិ នឹងនាងកុល-កេសី មហេសីព្រះបាទទសរថ និយាយពីទេវបុត្រពីរអង្គនោះ ទៅកើតនឹង នាងប្រពន្ធចុងទាំងពីរនាក់ ពោធិសត្វទាំងបួនអង្គដែលចុះមកកើតដូច្នោះ សុទ្ធសឹងតែមានទេវបុត្រ ទេវតាចុះមកហែរហម ច្រើនមកជួយខាងព្រះ នារាយណ៍រាមា អង្គព្រះព្រហ្មទេវបុត្រទេវតាទាំងមួយម៉ឺនលោកធាតុ សឹង ដ៏ជំនុំគ្នា អោយអង្គព្រះនារាយណ៍រាមា សំឡាប់អាសោនិបាតក្នុងផែនដី កុំអោយទុកពូជពង្ស វង្សផៅសន្តាន ត្បិតអីវាជាអាក្រក់ណាស់ សូគាំឋាន សុខ សូគាំឋានសប្បាយ សូគាំឋានឥតមានទុក្ខ ឥឡូវនេះវាធ្វើអោយទេវ បុត្រទេវតា មហាព្រហ្ម មានទុក្ខ ទេពអប្សររបរិវកញ្ញា ។

ឯកុមារទាំងបួនព្រះអង្គ កាលណាដែលប្រសូត្រចាកចេញមកហើយ បងប្អូនទាំងបួនព្រះអង្គនោះ ព្រះបាទទសរថ គិតថាអើកូនយើង ពូជពង្សា វតារ ជាព្រះមហាក្សត្រហើយ យើងគួរតែស្វែងរកតាបសឥសីណាមួយ ដែលមានសិល្បវិទ្ធី តេជោ តេជះ ឬទ្ធិខ្លាំង ការពារនគរ ចុះព្រះបាទទសរថ លោកនៅនគរណា ថានៅនគរស្រីអយុធ្យា ពោធិសត្វទាំងបួនអង្គកើត ហើយ ព្រះរាមក៏លោកកើតហើយ ព្រះលក្សណ៍ក៏លោកកើតហើយ ព្រះ

ភិរុតក៏លោកកើតហើយ ព្រះសុមុទ្រទ្រុតក៏លោកកើតហើយ ព្រះបាទទស-រថថាកូន កូនមាសព្រះបិតាទាំងបួន អោយទៅរកឥសីឯណាមួយ ដែលមានរិទ្ធិ ហើយទៅរករៀនសិល្ប ពោធិសត្វឱនកាយថ្វាយបង្គំ ព្រះវររាជបិតានាំបងប្អូនដើរពនេចរណ៍ទាំងបួនព្រះអង្គទៅរកឥសី ។

ឈប់ស្លេះត្រង់នេះសិន ។

៨– និយាយអំពីអង្គព្រះឥន្ទ្រា អត់ដង្ហើមស្លាប់តាមនាង មកកើតជាអង្គព្រះនារាយណ៍ រាមាគឺព្រះរាម ជាបុត្រព្រះបាទទសរថ កាលណោះព្រះបាទទសរថមានព្រះជយាបី ប្រពន្ធដើមនាងនន្ទាទេវី មាតាព្រះរាមទីពីរនាងកុលកេសី ម្តាយភិរុត និងសមុទ្រទ្រុត ស្រីលក្ខណ៍អណុជកូននាង "នាងពៅ" ។

និយាយពីពូជពង្ស អង្គក្សត្រាព្រះបាទទសរថរាជា ទៅច្បាំងនឹងវង់ព្រះអាទិត្យ វង់ព្រះអាទិត្យ ក៏បានថ្លែងសរខ្ចេរថព្រះបាទទសរថ ព្រះបាទទសរថក៏បរាជ័យ ប្រពន្ធចុងទាំងពីរក៏លូកដៃធ្វើកង់ ធ្វើកាំឡើងវិញ ទើបបានច្បាំងតតាំងនឹងវង់ព្រះអាទិត្យទៀត វង់ព្រះអាទិត្យបានបាញ់ធ្នូសរកើតជាភ្លើងប្រល័យកល្បឆេះផែនដី ព្រះបាទទសរថបាញ់សរ កើតជាគ្រុឌទៅលត់ភ្លើងប្រល័យក៏រលត់ស្ងប់ស្ងាត់ បានឈ្នះថ័ពវង់ព្រះអាទិត្យ វង់



ព្រះអាទិត្យ ក៏បរាជ័យ ទើបព្រះបាទទសរថមានបន្ទូលថា នាងមានគុណនឹងអញណាស់ កូននាងទាំងពីរអញអោយសោយរាជ្យមុន សន្ធត់ដប់ពីរឆ្នាំ គឺ ភិរុត សមុទ្រទ្រុត ។

៩– និយាយពីអង្គព្រះកុមារទាំងបួនព្រះអង្គ លាព្រះបិតាមាតាទៅរៀនសិល្ប កាលណោះ ព្រះអង្គផ្ទាល់ព្រះបាទាទៅដល់ជើងភ្នំ ព្រះក្រិសមានឥសីភ្លើងបួនព្រះអង្គ មានអាស្រមរៀងគ្នា អង្គព្រះនារាយណ៍រាមាទៅដល់ឱនថ្វាយបង្គំ ហើយឥសីសួរថា កុមារទៅណា ខ្ញុំមកសុំរៀនសិល្បពីលោកតា ឥសីក៏អបអរបើកអោយចៅរៀនតាមចិត្ត ភិរុត ព្រះសមុទ្រទ្រុត ស្រីលក្សណ៍ ធនុជាថ្វាយបង្គំរៀងគ្នា គ្រប់ឥសីទាំងបួនអង្គ គ្រូអា-ចារ្យ ក៏បើកអោយរៀនសូត្រគ្រប់ៗគ្នា ប្រាំពីរទិវាក៏ចេះចប់ ឥសីក៏ជប់ធ្នូសរសិល្បព្រះខ័នជ័យ អោយសរនោះសន្ធត់នាមថា ឈ្មោះអគ្គីវាសផ្លាញផ្លាបើសត្វឯណាត្រូវសរនោះ នឹងកើតកំណត់ជាតិដើមវិញ បើយក្សកើតសត្វកើតយក្សវិញ នឹងរត់ជៀសចេញព្រះចេស្តា ។ ដល់បានសរហើយ រាជកុមារបានសរកាលណាលាអាចារ្យវិលបូរី រីឯព្រះឥសីប្រសិទ្ធិពរជ័យថ្វាយព្រះកុមារដល់ហើយ ក៏ថ្វាយបង្គំព្រះបិតា លុះគង់នៅយូរច្រើនសប្តាហ៍ មាតាបិតាក៏ប្រើអោយយកផលាថ្វាយព្រះគ្រូ ។

១០- និយាយរំពីកូនក្របុំយក្សទាំងប្រាំរយ ទៅរំរៀព្រះឥសូរលោក ជាប្តី ព្រះឥសូរក៏ដឹងកាលណា ស្រវាយកបាយពំនូតចោលទៅកូនក្រមុំយក្ស ទាំងប្រាំរយ ស្រីយក្សក៏ក្លាយកើតទៅជាសត្វកាក្ខនាសូវ ភ្នែកភ្លើងជើងដែក ចំពុះពេជ្រនាំគ្នាហើរតំរង់ព្រៃហេមពាន្ត ទៅប្រទះឥសីភ្នែកភ្លើងទាំងបួន អង្គ ឥសីនេះហើយជាគ្រូព្រះកុមារទាំងបួនអង្គ ម៉ែងហែកយាសយូរចែក គ្នាស៊ីជាចំណើ ឥសីក៏ភ័យខ្លាច រត់ចូលអាស្រម សត្វក៏ទុំបណ្តក់បណ្តើរគ្នា ខ្លះរកស៊ី ខ្លះទំចាំ ហើយហៅថា ឥសីចេញមក ។ ឥសីក៏ស្រែកថា អញដឹងហើយ ហងទាំងរស់គ្នា ឥសីនិត្យនៅគ្រប់ប្រាំពីរទិវា សត្វក៏ហើរ ទៅរកស៊ីអស់គ្មានសល់ ។ ពេលនោះព្រះកុមារ យាងដល់សាលាស្រែក ហៅតា ទាំងបួនអង្គ ពេលនោះតាច្រឡំស្រែកមកកាន់ព្រះកុមារ អញដឹង ហើយហងទាំងអស់ចង់ស៊ីអញ ព្រះកុមារស្រែកថា ទេខ្ញុំកុរុណាសិស្ស លោកតា ពិតប្រាកដ តាស្រែកថា ឱចៅតា ចៅមករកអ្វី កុដិលោកតា សត្វកាក្ខនាសូវ ទាំងប្រាំរយ ភ្នែកភ្លើង ជើងដែក ចំពុះពេជ្រ វាកាចណាស់ ឆាប់ចូលមក កុមារក៏យកផ្លែផលាទៅថ្វាយលោកតាគ្រប់ៗអង្គ រួចហើយ ក៏សួរថា វាហើរទៅណាក៏ពុំឃើញ លោកតាថា វាទៅព្រៃហេមពាន្តរកស៊ី ចំណី ព្រោះវាឃ្លាន នឹងនិត្យនៅខានពុំបានយូរ ។ ព្រះនារាយណ៍រាមាឡើង



ផែលលើខ្នងអស្សពាហ៍ ស្តាយធ្នូសរ ព្រះខ័នជ័យ រួចឡើងបន្តទាំងបីអង្គ ។ ឃើញកាលណាក៏ដំឡើងសរ ចាប់ព្រះខ័ន មកផ្ទាប់គ្រង់អង្គា លែងខ្វាក ខ្ទ័រខ្ទារ កក្រើកក្រឡាប្រថពី ខ័នចាក់ ខ័នកាត់ ព្រះសិរសាសត្វទាំងប្រាំរយ ធ្លាក់ដល់ដី ក្លាយកើតជាកូនក្រមុំយក្សទាំងប្រាំរយដូចដើមវិញ ។ រួច ហើយព្រះកុមារ ក៏វិលមកទូលឥសីវិញថា ស្លាប់អស់ហើយ កាក្ខនាសូវ ស្លាប់ទៅកាលណា ក្លាយជាកូនក្រមុំយក្ស រួចវិលទៅបូរីវិញ ឥសីក៏អោយ ពរសព្ទសាធុការ ទើបព្រះកុមារលាលោកតាវិលបូរីវិញ ។

១១- កាលណោះ ព្រះកុមារយាងដល់ព្រះនគរកាលណា ក៏ក្រួញ ក្រាបថ្វាយបង្គំព្រះវរបិតា ព្រះមាតា រួចទូលដំណើរឿងព្រះក្សត្រាជួប លោកតាបានសម្លាប់សត្វកាក្ខនាសូវទាំងប្រាំរយ ។ ទើបព្រះបិតាថា យី បុត្រទាំងបួន បិតា ចុះធ្នូសរ ខ័នថ្លា បាខ្លាំងយ៉ាងណាទៅ ចូរបាសាកល្បង ថ្វាយបិតាអោយដឹងចេស្តារិទ្ធីបុត្រ ។ ថាហើយព្រះរាម, ភិរុត, សមុទ្រទ្រុត ស្រីលក្សណ៍ អនុជាទាំងបួនអង្គាថ្លែងធ្នូសរ ក៏ក្រើកទឹកក៏ក្រើកដី សឹង វិញត្រឡប់ជាប្រាំពីរជាន់ ភ្នំព្រះសុមេរុទោរទន់ចុង ភ្នំសត្តបរិភ័ណ្ឌក៏ក្រើក ញាប់ញ័រ សូគាំងដប់ប្រាំមួយជាន់ញាប់ញ័ររញ្ជួញខ្លាំងក្រៃ ទេវបុត្រ ទេវតា មហាព្រហ្មក៏សួរថា សួរស័ព្ទអ្វីក៏ខ្លាំងម្ល៉េះ អង្គទេវបុត្រទូលថា សួរស័ព្ទ

សរព្រះ អ្នកមានបុណ្យប្រាប់ផែនដី "បង្ក្រាបផែនដី" ឋានសិម្ពលី កូនគ្រុឌ ក៏ធ្លាក់មកនៅលើផែនដី, អាសុរា, អាសុរី កិន្នរា កិន្នរី ក៏រត់ចូល ក្នុងរូងភ្នំ ទព្វមហាសមុទ្រជោរជន់ បែកជាពពុះ ស្គុះជាព្រះអង្គា រំងាប់ទៅទីទៃ ១ ដោយតេជះបារមីពោធិសម្ភារ ។ កាលណោះ ព្រះបាទទសរថរាជា ទតយល់ បុត្រទាំងបួនព្រះអង្គ មានរិទ្ធីចេស្តា នឹងរកស្តេចឯណាមកផ្ទឹម ផ្ទេរពុំបាន ។ ម្លោះហើយស្តេចប្រជុំសេនាបតី កុង្សីយ៍ សេវកាមាត្យ នឹងអោយព្រះ ព្រះរាជបុត្រាសោយរាជ្យរម្យ ភិរុត សមុទ្រទ្រុត ទាំងពីរពង្សាអោយ សោយរាជ្យរម្យក្នុងនគរស្រីអយុធ្យា កាលណោះចោមពង្សអង្គព្រះនារា- យណ៍រាមា ចូលថ្វាយបង្គំ លាព្រះបិតាព្រះមាតា យាងត្រេចពនេចរ ព្រះអង្គ មិនអោយព្រះរាជបុត្រា កុំត្រាចទៅណាកូនមាសព្រះបិតា ។ ព្រះនារាយណ៍ រាមា ថ្វាយបង្គំលោមលាច្រើនដងច្រើនគ្រា ព្រះបាទទសរថរាជា បើកព្រះ រាជបុត្រា អោយចេញចរ ។ កាលនោះស្រីលក្សណ៍អនុជា ស្តេចសោយ សោកាយំរត់តាមបង ។ ព្រះនារាយណ៍រាមា ឱនឱបត្រកងព្រះអនុជស្ងួន គ្រងកុំតាមបងទៅ ។ ស្រីលក្សណ៍អនុជា យំអោបបាទាព្រះរាមចោមចៅ ។ ម្លោះហើយ ទើបស្តេចនាំប្អូនពៅត្រាច់ចរសំដៅចេញចាកពីបុរី ។



១២- លុះដើរទៅដល់វាលកឡវត្ត មានដើមរុក្ខជាតិដុះស្រោង ស្រីងមានរែកណ្តឹងយំឆ្លើយគ្នា ស្តាប់ហើយខ្លួនអើយគួរវេទនា ដើរទៅ ដល់ក្លោងទ្វារភ្នំបាំងខែ ។ មានយក្សមួយឈ្មោះ សំប៉ើមក្បាលធំ មានពល ប្រាំពាន់ ឃើញពោធិសត្វដើរទៅក៏ស្រែកថា អាមនុស្សកុំមកលើទីឋាន អញ បើឡើងទៅហើយត្រូវក្សិណក្ស័យ ។ ព្រះនារាយណ៍ឆ្លើយថា ណែអា សុរា ត្រូវជៀសចេញរំពីសេរអញ បើមិនជៀសទេ ត្រូវក្សិណក្ស័យប្រល័យ ជីវិតទាំងអស់ ដូច្នោះក្រុងមារ អសុរា ដកដើមព្រឹក្សា ចូលវាយតយុទ្ធនឹង ក្សត្រក្សាន្ត ព្រះនារាយណ៍រាមា ក៏ចាប់កៅទណ្ឌសរថ្លាបាញ់ក្រុងអសុរា ក្សិណក្ស័យទាំងអស់ ព្រះអង្គនាំស្រីលក្សណ៍ អនុជា ត្រេចចរលីលាអំពីឋាន នោះទៅ ។ ត្រាច់ត្រង់អូរអាងជ្រោះជ្រៅ ចរត្រាច់សំដៅដល់ភ្នំមួយណា ភ្នំនោះហៅភ្នំមយូរា មានយក្សមួយណាឈ្មោះ កុំក្រទា វាមានពលប្រាំម៉ឺន សោត សល់ឃើញព្រះបាទទសពលយាងទៅដល់ ក្រុងមារអសុរាស្រែកថា វើយអាមនុស្សា កុំមកលើឋានមណ្ឌលអញ បើមកហើយក៏នឹងអស់ជីពជន្ម ជីវា ព្រះនារាយណ៍រាមាឆ្លើយថា វើយអសុរា ជៀសអំពីផ្លូវអញ បើមិន ជៀសទេ ក៏នឹងក្សិណក្ស័យជីវិត ថាហើយយុក្សយង់អសុរា ក្រវីដំបងពេជ្រ ឆេះកើតភ្លើង ព្រះនារាយណ៍បុណ្យថ្កើងស្តេចទាញសរជ័យប្រកួតប្រកិត

ប្រុងវាយវៃក្រុងអសុរា ស្តេចមានព្រះបន្ទូលថា ស្រីលក្សណ៍អនុជា ស្ងួនភ្ជាតាមបងអោយជាប់ កាលណោះអង្គព្រះលក្សណ៍ សារត្រវាសព្រះខ័នថ្លាជួយប្រហារយក្សាក្សិណក្ស័យ ក្រុងមារស្រែកហៅពលរំពង មកចោមមកជុំត្រៀបត្រា ព្រះនារាយណ៍រាមា ទាញសរថ្លា បាញ់ក្រុងអសុរាវិនាសក្សិណក្ស័យ ។ ម្ល៉ោះហើយនាំស្រីលក្សណ៍អនុជា នាំចាកលីលារំពីឋាននោះទៅដល់ភ្នំមួយទៀតកូវ ហៅភ្នំបាដែង ។ ស្រីលក្សណ៍អនុជា សុំបងលើលាបួសលើខ្នងភ្នំបាដែង ស្តេចស្អាងចរិយាទុក្ករណ៍ មានស្រីមេម៉ាយយក្សមួយល្អចង់បានពុទ្ធោជាស្វាមីភក្តិ នាងនោះនាមឈ្មោះហៅសោតនខា ចូលចង់ស្នេហា នឹងពោធិសត្វថ្លៃ ព្រះអង្គខ្ញាល់ខ្លាំងណាស់ ស្តេចក្រេវក្រោធា ដៃមួយចាប់សិរសា ដៃមួយកាន់ព្រះសែងថ្លា នឹងអារព្រះសុរងធ្លាក់ចេញ នាងសោភនខា លើកដៃអង្វរព្រះលក្សណ៍ កាត់ច្រមុះ កាត់ស្លឹកត្រចៀកតិចៗ ហើយទៅក្រាបទូលក្រុងខរ អសុរាថា មានមនុស្សា ធ្វើបាបខ្ញុំក្រៃ ក្រុងខក្រេវក្រោធពិរោធសោះសា ស្តេចប្រើអសុរាទៅទូងស្គរទ័ព ទូទៅដំបន់ពលមារចេញមកត្រៀបត្រា យក្សយង់អសុរីថា ហៃអស់ភានចូលទៅចោមចាប់មនុស្សអប្រិយ ម្លោះហើយ ពួសួរស័ព្ទដូចសូររន្ទះគគ្រាំ ឯអាក្រុងអសុរា ហោះមកច្រើនក្រៃ ស្រីលក្សណ៍អនុជាប្អូនភ្ជា



ក្រាបទូលព្រះរៀមចោមចៅ យក្សយង់ហោះមកត្រសងខ្ទួលខ្មៅ ព្រះអង្គបាញ់សរទៅកុំនៅរង់រេរា កាលណោះព្រះនារាយណ៍រាមា ស្តេចបាញ់សរថ្លាត្រូវអង្គនៃអសុរី ស្លាប់ពលវិនាសក្សិណក្ស័យ ក្រុងខអសុរី ក៏ក្រេវក្រោធាត្រីដំបងពេជ្រកើតភ្លើង ពាសពេញវេហាស៍ ព្រះនារាយណ៍រាមា បាញ់សរកើតជាទឹករលត់ភ្លើងយក្សា ម្ល៉ោះហើយក្រុងខរ ត្រីដំបងពេជ្រអោយកើតជាររន្ទាក់ពេញវេហាស៍ ព្រះនារាយណ៍រាមាបាញ់សរកើត ជាព្រះខ័នកាត់វិនាសគ្នាសល់ ក្រុងខរតយុទ្ធនឹងព្រះនារាយណ៍ព្រះអង្គ ក៏ថ្លែងសរត្រូវត្រង់អង្គអសុរា ក្ស័យក្នុងព្រីក្សា វិនាសក្សិណក្ស័យ ។ ព្រះនារាយ៍រាមានាំស្រីលក្សណ៍អនុជាប្អូនភ្ជាត្រាច់ចរអំពីនោះទៅ ។

១៣- និយាយអំពីសមានុមាន ប្រសូតកាលណា វារខ្វេសខ្វាសៗក៏ឃើញព្រះអាទិត្យរះទំទែង សួរមាតាថា សត្វអ្វីក៏ក្រហមម្ល៉េះ ម្តាយប្រាប់ថានោះហើយជាចំណីបាឯង ក៏ភ្លែតទៅជាប់នឹងចន្ទោលព្រះអាទិត្យភ្លាមដំដៅព្រះអាទិត្យក៏រលាយខ្លួន សហានុមានធ្លាក់មកភើញផែនដែនពសធាសល់រោមមួយ ហៅថារោមពេជ្រ អង្គព្រះអាទិត្យដែលគង់លើរាជរថពេជ្រឃើញហាក់ដូចអង្គកូនស្វាស ជាប់នឹងជន្ទោលតែងតោង ធ្លាក់បាត់ទៅព្រះអាទិត្យក៏យកទឹកកុន្ទីកែវច្រួចតាម កើតជារូបសហានុមានធាត់ធំ ហោះ

សំដៅចំអង្គព្រះអាទិត្យ ចាប់កងរាជរថថា អញស៊ីឥឡូវ ព្រះអាទិត្យថា ស្វាសឈប់សិន បើឯងចង់ស៊ីហាមាត់ទៅ ម្ល៉ោះហើយស្វាសហនុមានហាមាត់ នឹងស៊ីអង្គព្រះអាទិត្យ ព្រះអាទិត្យក៏ស្តោះដាក់កណ្តាលវង់មាត់ហនុមាន ក៏កើតជាភ្លើងប្រាំពីរវង់ នៅក្នុងមាត់ហនុមាន ហោះមកថ្វាយបង្គំម្តាយ នាងស្វាហាយក៏ថា កូនណ្ហើយម្តាយមិនទាន់បានចែកទ្រព្យរបស់អោយកូន ឥឡូវម្តាយនឹងចែកទ្រព្យរបស់នេះ កេរ្តិ៍ពីជីតាបាឯង ហ្ល៉ោះហើយនាងក៏យកកន្ទល់ពេជ្រទាំងគូរ "ត្បិតសៀតត្រចៀក" បើអ្នកមានបុណ្យបារមីមើលឃើញ អ្នកគ្មានបុណ្យមើលពុំឃើញ។រូចម្តាយផ្តាំថា បាឯងមានម្ចាស់បាឯង មុខខៀវមួយមុខសមួយ នេះបាឯងត្រូវចាំបណ្តាំម្តាយ ។ មានមួយថ្ងៃ ហនុមានលាម្តាយទៅស៊ីត្រួយអំពិល ទទួលព្រះនារាយណ៍រាមានាំស្រីលក្សណ៍អនុជា ដើរទៅដលនាដើមអំពិល ក៏នាំគ្នាផ្ទុំសំរាកកាយហនុមានមើលទៅឃើញ ចាប់ចិត្តស្រឡាញ់ ពោធិសត្វទាំងពីរព្រះអង្គដូចជាអង្គព្រះឥន្ទ្រាមួយ ដូចអង្គទេវបុត្រមួយ នេះហើយសមពង្សវង្សល្អណាស់នឹកឃើញម្ចាស់មុខខៀវមួយ មុខសមួយ នេះហើយដឹងម្ចាស់អញ ម្ល៉ោះហើយក៏ចង់ប្រឡងរិទ្ធិ បើម្ចាស់អញមានរិទ្ធិ បើមិនមែន គ្មានរិទ្ធិទេ ដូច្នោះហើយសសហនុមាន ក៏បូតស្លឹកអំពិលមកគ្របលើអង្គព្រះនារាយណ៍រាមា



ស្រីលក្សណ៍អនុជា ក៏ឃើញស្វាសវាបូតស្លឹកអំពិលទំលាក់មកលើបង មើលទៅឃើញកន្ទល់ហនុមានប្រផ្លេកល្អភ្លឺថ្លា អង្រួនដាស់ព្រះជេដ្ឋា ព្រះរៀមបងស្វាសវាបូតស្លឹកអំពិល ទម្លាក់មកលើបង ព្រះអង្គមើលទៅឃើញស្វាសល្អក្រៃ ឃើញកន្ទល់ទាំងសងខាងមានព្រះឱង្ការថា ព្រះអនុជអូនស្វាសនេះមានរិទ្ធិខ្លាំងក្រៃ បើស្វាសមានរិទ្ធិមែន ចាំបងថ្លែងសរថ្លា បើស្វាមានរិទ្ធិជៀសរំពីសេរបងបាន ទើបព្រះរាមថ្លែងសរទៅ ហនុមានក៏គេចលុះព្រាសរជ្រៀតខ្ទេចស្លឹករអំពិល ក៏ចុះមកសំពះអង្វរអោយព្រះរាមបញ្ឈប់សិនព្រះអង្គក៏បញ្ឈប់សរ ទើបហនុមានសុំព្រះរាមធ្វើជាសេនា ទោះយាងទៅទីណាក៏ទៅតាម ព្រះអង្គក៏ពនេចរត្រាច់ទៅទៀត អោយហនុមានលីធ្នូសរព្រះអង្គយាងទៅមុន ស្រីលក្សណ៍អនុជាយាងកណ្តាល ហនុមានមើលទៅស្រីលក្សណ៍អនុជា ប្អូនភ្ញារូបដូចស្រី ហើយមិនកោតមិនខ្លាចក្រែង យកចង្អុយធ្នូទៅចាក់លេងល្បែងស្វា ថ្លែងពីព្រះលក្សណ៍សារទូលព្រះជេដ្ឋាព្រះរៀមបងទូលថា ហនុមានយកចង្កួយកៅទណ្ឌមកចាក់ខ្ញុំ ព្រះនារាយណ៍រាមាក៏ឃាត់ថា បាហនុមានកុំចាក់គេ ស្រីលក្សណ៍អនុជាប្អូនអញ ថាហើយដើរក្រោយបណ្តោយគ្នា ហនុមានចាកទៀតច្រើនដង ច្រើនគ្រា ដើរទៅដល់ក្រោមមណ្ឌលដើមព្រះជ្រៃ ពោធិក្សត្រថ្លៃស្តេចនិន្ទ្រា ហើយហៅទៅ

ស្រីលក្សណ៍អនុជា ប្អូនណើ្អយ រោមារបស់អញអ្នកណាទាញដាច់ សហនុ-មានចូលភ្លាមថ្វាយបង្គំថា ខ្ញុំសុំទាញអោយដាច់ ព្រះនារាយណ៍រាមាត្រកូញរោមពេជ្រ បើឯងទាញដាច់អញចងអោយ ថាហើយព្រះអង្គក៏ចងអោយទូវមន្តគាថា ហនុមានស្មាសថា រោមប៉ុណ្ណេះ ចេះយកមកចងអញ តែពុំហ៊ានឮមាត់នឹកក្នុងចិត្ត លុះចងជាប់ហនុមាន ស្ទុះភ្លែត រោមវែងត្រដែតទៅឆ្ងាយក្រៃ ហនុមានសង្ស័យក្នុងចិត្តថា រោមនេះក៏វែងឆ្ងាយអស្ចារ្យ រួចហើយរោមរួញមកវិញអោយឆាប់ក្រៃ ហនុមានដិមុខ ដិមាត់ អុកគូថ អុកក្បាលស្ទើរបាក់ជើង បាក់ដៃ ប្រឹងអស់សរសៃទប់ពុំឈ្នះ ច្រើនដងច្រើនគ្រាជាគំរប់បីដង ម្តងនេះមិនហ៊ានទាញនៅឆ្ងាយ ម្លោះហើយគិតផ្លោះហោះទៅអាកាស រោមពេជ្រកន្ត្រាក់អុកគូថនឹងដីឈឺអស់ ស្ទើរសរសៃខ្ទេចខ្ទីម្លោះហើយហនុមានក៏ក្រាបថ្វាយបង្គំ កំឡាំងខ្ញុំស្ទើរមួរផែនដី ទាញរោមមួយសរសៃក៏ពុំដាច់ នេះហើយហៅសិល្បបារមី ស្តេចមានបុណ្យ ហនុមានក៏បាក់បបខ្លួបខ្លាចតាំងពីថ្ងៃនោះតទៅ ព្រះនារាយណ៍រាមា មានព្រះបន្ទូលហៅស្រីលក្សណ៍អនុជជាប្អូនពៅ អូនណើយរោមបង បើអូនទាញដាច់ប្អូនទាញទៅ ស្រីលក្សណ៍អនុជាទាញរោមព្រះនារាយណ៍រាមាដាច់ ក៏ចេះតែបោច១ទៅ ទើបហនុមានឃើញស្រីលក្សណ៍អនុជា ក៏នឹកឃើញថា ឱនេះឯង



អ្នកមានបុណ្យទាំងពីរព្រះអង្គនេះ ហើយជាម្ចាស់របស់អញ ម្លោះហើយក៏ក្រាបថ្វាយបង្គំ សុំចំណុះចុះចាញ់ សូមស្រឡាញ់គ្នាអោយដូចជាប្រសូត្រពោះតែមួយ ។ ព្រះនារាយណ៍រាមា ឃើញហនុមានថ្វាយបង្គំស្រីលក្សណ៍អនុជា ក៏ត្រេកអរក្នុងព្រះទ័យ រួចហើយស្តេចទាំងបីអង្គា ព្រះនារាយណ៍-រាមា ស្រីលក្សណ៍អនុជា រាជក្របីស្វាស ត្រាច់ពនេចរប្រាំពីរថ្ងៃគត់ ដល់នគរមិថិលាបូរី ។

១៤- ថ្លែងអំពីឥសីមថិលា បាវពងឃោសនាអោយលើកសរជ័យទេវបុត្រ ទេវតាច្រើនក្រៃ ព្រះពាយ ព្រះភិរុណ ព្រះអគ្គី យក្សយង់ក្រុងអសុរា ក្រុងរាពណ៍ភារា ក៏ចូលមកត្រៀបត្រា មកលើកធ្នូសរថ្លា ពុំរួចឡើយស្តេចអារិទ្ធីករណ៍ទាំងមួយរយម្តៃ មកលើកសរជ័យមិនបានដូចចិត្ត លើកគ្រប់ទាំងប្រាំពីរថ្ងៃលើកពុំរួច ធាក់ហើក៏ក្រើកទឹក ក៏ក្រើកដី ល្បីខ្ទ័រខ្ទារខ្លាំងក្រៃ បើលើករួច នឹងអភិសេកអោយចៅនាងសិតា ល្អណាស់ដូចស្រីសូគា ថ្មីមផ្ទេរពុំបាន ទេវតាសព្វឋាន គយគន់សព្វថ្ងៃ ។ កាលណោះអង្គព្រះនារាយណ៍រាមាក្សត្រក្សាន្តធិបតី ដល់ដើមពោធិជ្រៃ ព្រះអង្គទ្រង់ផ្ទំ ស្វាសហនុមានច្របាច់បាទា កាលណោះឮសូរសុព្ទរំពង មនុស្សផងគឹកកងមកសរជ័យ ពពួកទេវតា មនុស្សាច្រើនក្រៃ ក្រុងយក្សអសូរី ក៏មកលើកនឹងគេ

ដែរ កក្រើកដល់ក្សត្រា អង្គព្រះនារាយណ៍រាមា មានព្រះបន្ទូលថា ហៃស្រី-លក្សណ៍អនុជប្អូនភ្ងា សូរស័ព្ទគគ្រឹកគគ្រេង សូរស័ព្ទភ្លេងល្វេងល្វើយ ប្អូនអើយទៅមើលគេ គេធ្វើបុណ្យអ្វី ? ព្រះលក្សណ៍ប្អូនភ្ងា ថ្វាយបង្គំលាបងទៅមើលគេលើកសរតឹកកង លើកអស់កម្លាំងវាសោគេឈប់ អោយគ្រាន់តែ កក្រើកក៏គ្មានកក្រេីក ស្រីលក្សណ៍អនុជា យកមេជើងទៅចុចមើលសរ គ្រាន់តែប៉ះ សរវិលជាប្រាំពីរជាន់ ស្មានថា សរនេះបើអញលើកល្មមនឹងកម្លាំងអញ ម្លោះហើយអញកុំលើក អញទៅថ្វាយបង្គំសម្ដេចព្រះរៀមបង ថាហើយក្សត្រក្សាន្តក៏វិលវឹងផ្លូង ក្រាបទូលព្រះបងថា គេលើកសរជ័យបើអ្នកណាលើករួច ឥសីអភិសេកអោយនាងសិតាក្សត្រី ជាចៅឥសី លោកនឹងអភិសេកអោយព្រះនារាយណ៍រាមា ក៏ទ្រង់ជ្រាបថា អូនណើយយើងនឹងទៅលើកធ្នូសរសិល្ប រួចទាំងបីអង្គា ក៏ត្រេចចរត្រសងដល់ទៅឥសីក្រាបថ្វាយបង្គំបីដង ឥសីថា ចៅទៅលើកធ្នូសរសិល្ប បើចៅលើករួច និងលើកអភិសេកអោយ ព្រះនារាយណ៍រាមា ក៏ចាប់សររំពីពោកមាស ចាប់តែដៃមួយក៏ល្មមនឹងកម្លាំងព្រះអង្គ នឹងបាញ់ទៅឋានសួគ៌ា ដល់ប្រាំមួយជាន់ឥសីរាព្រះហស្ត ថាកុំបាញ់ឆេះឋានទេវបុត្រ ឆេះឋានទេវតា ឆេះឋានព្រះឥន្ទ្រាមហាព្រហ្ម ម្លោះហើយនឹងបាញ់ទៅព្រៃហេមពាន្ត ឥសីស្រែកថា



បាញ់ទៅព្រៃហេមពាន្តអន្តរធានសត្វគ្មានសល់ ទើបព្រះទសពល ទូលព្រះឥសីថា អោយខ្ញុំបាញ់ទៅឋានណាទើបគួរសម ឥសីថាបាញ់ទៅនគរក្អែក ក៏ឆេះនគរក្អែកប្រាំពីរយប់ ប្រាំពីរថ្ងៃ ក្ដានស្រោកស្រាន្ត ខ្ទ័រខ្ទារញាប់ញ័រផែនដី កក្រើកសួគ៌ាញាប់ញ័រខ្លាំងក្រៃ ទេវបុត្រទេវតា និត្យនៅពុំបានចរចុះចាកឋាន មកនៅដោយដើមពោធិជ្រៃ យក្សយង់ក្រុងអសុរចាកចោលពីព្រៃហេមពាន្ត ។ កាលណោះឥសីមិថិលា ស្ញប់ស្ញែងបារមីតាព្រះនារាយណ៍រាមាថា ហៃចៅតា ចៅកុំទៅណាចាំតាអភិសេកអោយព្រះនារាយណ៍រាមា ថ្វាត់ថ្វាយបង្គំ ឥសីឧត្តមប្រណម្យទូលថា សូមប្រោសមេត្តាចៅសុំនៅផង នឹងស្រីលក្សណ៍អនុជប្អូនក្លា ស្ងួនគ្រង ស្វាសមួយផងទាំងបីអង្គា កាលណោះសិតាកល្យាណ ទតយល់ក្សត្រក្សាន្តត្រឹមត្រូវព្រះទ័យ ព្រឺព្រួចកាន់កួចមេត្រី នឹងព្រះនរបតីពិតពេញចិន្តា នាងនៅស្ងៀមស្ងប់ពុំពូវាចា នឹងបរមសាលាដែលដាក់ពុទ្ធរូប ។ កាលណោះឯអង្គព្រះនារាយណ៍រាមា មិនទាន់បានឃើញរូបាសិតាកល្យាណ ក្សិណណោះក្សត្រក្សាន្តចង់ឃើញរូបបា ឮតែទេវតាសរសើរស្រីថ្លៃ អូនណើយវេលានេះបងត្រេកអរក្រៃ នៅនឹងឥសីទាំងបីអង្គា ។ ឥសីថាចៅតានៅនឹងសាលានាងនៅអោយស្ងៀម តានឹងទៅបេះផ្កាអភិសេកអោយអ្នក ថាហៃព្រះ

នារាយណ៍រាមា តាទៅបេះផ្កា កុំទៅប៉ះពាល់នាងឡើយ ចូរចៅឯងចាំបណ្តាំពាក្យតា ព្រះនារាយណ៍រាមា កុំអោយទៅប៉ះពាល់នាងទាល់តែសោះ ផ្កាហើយឥសីចាប់ឈើច្រត់ដំពាម ពាក់លើស្មា ហត្ថាត្រវីហោះទៅព្រៃហេមពាន្ត បេះផ្កាមន្ទាទិព្វហាហង្ស ត្រយ៉ង់ មារតី ផ្កាយិតថោ ឥសីហោះទៅយូរហើយ ឯអង្គក្សត្រាចង់ឃើញរូបបា នាងសិតាកល្យាណ សួរពួកអ្នកយាមអារគមនាក់ខ្ទាក់ខ្មៀយ អោយយាមនាង លោកតាទុកនាងត្រង់ណា ពួកគមគាត់ខ្ទាក់ខ្មៀយទូលថា ម្ចាស់សិរសា ខ្ញុំមិនហ៊ានប្រាប់ទេ ខ្ញុំខ្លាចលោកតាព្រះនារាយណ៍ឆ្លើយថា បើឯងប្រាប់វាញ អញធ្វើឯងអោយបាត់គបពាក់ខ្ទាក់ខ្មៀយកាលណោះ ឯអង្គក្សត្រាសូត្រមន្តពាថា យកទឹកទៅព្រោះអោយបាត់គមពាក់ខ្ទាក់ខ្មៀយ កាលណោះ អ្នកយាមទូលថា បើចង់ឃើញនូវអង្គនាងណា នាងនាថនៅត្រង់ពុទ្ធរូបច្រើន អង្គព្រះនារាយណ៍រាមាស្តេចយាងទៅកាន់នាង កាលណោះក្សត្រក្សាន្តពុំស្គាល់នាងឡើយ ស្តេចវិលមកវិញ សួរអ្នកយាមទៀត មិនឃើញនាងឡើយ ឃើញតែពុទ្ធរូបអ្នកយាមទូលថា សូមអង្គក្សត្រា ដើរចង្អុលភ្នែក បើចង្អុលត្រង់ពុទ្ធរូប មិនប៉ប្រិចភ្នែកឡើយ បើត្រង់នាងហើយ នាងភ្ញាក់ស្ទុះរត់ ។ ព្រះអង្គទៅមើលនាងទៀត ដើរចង្អុលគ្រប់អង្គ ស្តេចចង្អុលត្រង់ទៅចំនាងហើយ នាងភ្ញាក់



ស្ទុះរត់ ព្រះអង្គចាប់ផុតមិនបាននាងឡើយ ទើបក្សត្រត្រាណត្រើយលងលោមមេត្រី បួនណើយស្វែងចេញពីបូរី ស្ទះស្វែងរកស្រីថ្លើមថ្លៃឧត្តមជាប់គ្រប់លក្ខណ៍ប្រសើរមានរូបសក្តិសម ថាហើយព្រះបរមចាប់ឱបនាងជាប់ លួងលោមមេត្រីប្រាថ្នាការលោកិយរួមរស់នឹងនាង ដឹងដល់ឥសីក្នុងព្រៃហេមពាន្ត ថាយើព្រះនារាយណ៍រាមានៅក្នុងសាលារួមរស់នឹងនាងឱ ! ចៅដីតាមិនបានជាប់គ្នា លំបាកទៀតហើយ ធម្មតាជាក្សត្រជេដ្ឋាខុសបទ អោយកាន់អំណត់ខន្តីមិនបាន ឥសីហិចហោះពីព្រៃហេមពាន្តកាច់ផ្កាសឹងបានដូចព្រះសន្ទត ដល់ព្រះបរមសាលា ព្រះភក្ត្រស្ងួតស្ងប់ក្សត្រាក្សត្រីទាំងពីរអង្គា ចូលមកវន្ទាព្រះបរមឥសី លោកមានពុទ្ធដីកាព្រះនារាយណ៍ចៅតា តាឃាត់មិនបាន ចៅមិនបានសុខទេ ព្រាត់ប្រាស់គ្នាហើយ ចៅអើយចូលអោយជិតតាប្រសិទ្ធិពរអោយ ក្សត្រាក្សត្រីឱនករសិរោ ថ្វាយវន្ទាលោកគ្រូអាចារ្យ ឥសីប្រសិទ្ធិពរថា អោយចៅជុំគ្នាកុំព្រាត់ប្រាស់ ។ នេះអភិសេករួចហើយ នៅជុំក្នុងសាលាទាំងអស់ព្រះរាមលោកផ្ទំ នឹងនាងសិតា ក្សិណនោះកូនស្វា លបមើលក្សត្រក្សាន្តព្រះអង្គថៃថើបសព្វប្រាណ សហនុមានមកថើមជើងឈើព្រៃ ។ រឿងត្រង់ណោះស្លេះទុកសិនមិនទាន់ចរចា ។

១៥- និយាយពីឥសីបួនព្រះអង្គនៅទីរងជើងភ្នំកម្មាបរពត ឥសីទាំងបួនព្រះអង្គចេញទៅលេងព្រៃ ឃើញនាគទាំងប្រាំមួយនៅស្រឡាញ់ផ្លែ ឥសីទាំងបួនព្រះក៏ដេវ្យលត្មេះនាគថា សត្វតិរច្ឆាន នាគទាំងប្រាំមួយក៏ខ្មាសឥសីណាស់ ឥសីថ្លៃល្ងាចហើយក៏វិលមកទីអាស្រមវិញ ។ នាគទាំងប្រាំមួយក៏គិតគ្នាថា កាលពីថ្ងៃមិញ ខ្មាស់ឥសីអស្ចារ្យ យើងប្រាំមួយទៅសម្លាប់ឥសី វេលារាត្រីស្ងាត់ នាគទាំងប្រាំមួយ ក៏ចូលទៅក្នុងអាស្រមតាឥសីព្រួសកំសួលពិសទៅក្នុងពាងតាឥសី កាលណោះក្រុងនាគីក៏វិលមកវិញគ្រប់ប្រាណ កាលណោះមានកង្កែបញីមួយនៅទីរងជើងពាងរវាង តាឥសីដឹងអស់អាថឥតបី ម្ល៉ោះហើយនាងកង្កែបគិតថា អញនៅសព្វថ្ងៃពឹងអ្នកណោ ពឹងតែលោកតាមុនីឥសី ឥឡូវនេះនាគីទាំងប្រាំមួយវាមកព្រួសទឹកក្នុងអាងតា នាងកង្កែបពិចារណាហើយក៏គិតថា អញស៊ូស្លាប់មុនលោកតាចុះ ថាហើយនាងកង្កែប ក៏លោតចូលពាងលោកតា ពិសនាគក៏ចុកនាងកង្កែបក្ស័យ លុះលង់ព្រឹកព្រាងស្វាងកាលណោ ព្រះឥសីតាចេញចាកព្រះអាស្រមមកសោយព្រះសុទន្តភត្រ្តា ឃើញនាងកង្កែបអណ្តែតប៉ែលប៉ោល ឥសីទ្រង់ឈានញាណញ្ញេយ្យដឹងថ្ងៃម្សិលមិញ នាគមុខីអញទៅសើចវា វាមកខ្ចិវខ្ចាញ់ មកសំលាប់អញក្នុងរាត្រី មុខគួរអាស្ចូរ



នាងកង្កែប ឡើងលោតក្ស័យមុនអញ ថាហើយឥសីក៏ចាក់ទឹកចោលផ្សងអធិដ្ឋានសិល្បភ្លាម ដែលបានចំរើនឈានសិល្បវិស័យ សុំប្រោះនាងកង្កែបអោយកើតជាកុមារី ថាហើយឥសីសូត្រមន្តព្រះគាថា យកទឹកកុន្ទីកែវស្រោចត្រង់អង្គប្រាណនាងកង្កែប ក៏ក្លាយកើតឡើងនាងកុមារី ឥសីថ្នាក់ថ្នខំរក្សា ដាក់ព្រះនាមនាងថា មន្ទោគិរី លុះព្រះជន្មនាងបានដប់ប្រាំរូបរាងស្អាតស្អំល្អអស្ចារ្យ ដូចស្រីទេវតានៅសួគិសុខ ឥសីព្រហ្មរោទ្រង់កើតទុកក្នុងកងកិលេសពុំទាន់ដាច់ ដុច្នេះបើខំតែទុកនៅពុំបាន ថាហើយឥសីឱនឱបក្រសោបនាងថា ហៃចៅស្រី តានឹងពនាងទៅថ្វាយព្រះឥសូរថាហើយហិចហោះផ្លោះត្រសែត អណ្តែតខ្លួនដល់ឋានព្រះឥសូរ ឥសីប្រសិទ្ធពរថា អាត្មាភាពយកនាងមន្ទោគិរីមកថ្វាយមហារាជ ព្រះឥសូរក៏តែកអរ សាកសួរចៅរៅចាត់ប្រាសាទមួយអោយនាងនៅល្អចញ្ចែង ឥសីចំរើនព្រះពរ លាព្រះឥសូរវិលអាស្រម ។ រឿងនេះស្ងេះសិនមិននិទានឥសីទ្រង់ញាណដល់អាស្រម ។

១៦- យើងនិយាយអំពីអាយក្សមួយធាត់ធំ នាមឈ្មោះយក្សតុកកែ ពេលនោះយង់យក្សថា អញកម្របានទៅគាល់ព្រះឥសូរ ថាហើយយក្សផ្លោះហោះទៅដល់ ដ៏ឡើងទៅគាល់ឥសូរា តុកកែយំថា តុកកែ យក្ស

ក៏ឆ្លើយថា ព្រះករុណាវិសេសតុកកែ ព្រះករុណាវិសេស ក៏មើលទៅពុំឃើញអង្គព្រះឥសូរឡើយ ឃើញតុកកែហើយវាយមួយដៃផ្ទង ក៏វៀចប្រាសាទព្រះឥសូរទាំងអស់ អាយក្សតុកកែដឹងហើយក៏ហិចហោះចាកឋាន លង់លុះព្រឹកព្រាងស្វាងសម័យ បក្សាបក្សីយំសព្ទសាន្ត អង្គព្រះឥសូរតើនចាកទែនបន្ទំ ទតមើលប្រាសាទវៀចទាំងអស់ ព្រះឥសូរអស្ចារ្យណាស់ ក្នុងពេលនោះហេតុអ្វីក៏ប្រាសាទអញវៀច ម្ល៉ោះហើយប៉ាវគង ទូងភេរីហៅអស់យក្សយង់អ្នកណាដំរង់ត្រង់ប្រាសាទ នឹងអគ្គមហេសីរើសតាមចិត្ត ទៅលើរូបនាងណាមិនថាដែរ ។ ពេលនោះលាន់ព្ទទូទៅដល់ក្រុង ទសមុខយក្សា បានដឹងថាព្រះឥសូរលោកប៉ាវគង ឃោសនា ក្រុងទសមុខមារ ចាប់ដំបងផ្លែកផ្លោះហោះត្រដែត ដល់អង្គព្រះឥសូរហើយ ឱនកាយថ្វាយបង្គំ ទូលថាព្រះអង្គមានការអ្វី អោយទូងភេរីទូទៅដល់ពលមារផងទីទៃ ព្រះឥសូរមានព្រះបន្ទូលថា ក្រុងទសមុខមារ ក្នុងវេលារាត្រីល្ងាចមិញ មិនដឹងជាសត្វអ្វីធ្វើអោយវៀចប្រាង្គប្រាសាទ បើអ្នកណាដំរង់ត្រង់ល្អស្អាត និងអោយមហេសីមួយរើសតាមចិត្ត កាលនោះក្រុងទសមុខមារ ដំរង់ឋានព្រះឥសូរល្អដូចដើម កាលនោះឥសូរទតមើលយល់ ជាល្អដូចដើម ទើបបន្ទូលទៅកាន់ទសមុខមារថា រើសតាមចិត្ត ម្លោះហើយក្រុងមារ ក៏លោភលន់ពន់



ពេកក្រៃ ទៅចាប់យកស្រីថ្លៃឆ្នើមព្រះនគរ មិនខ្លាចព្រះឥសូរ ស្តេចរឹងរិទ្ធិចាប់យកតាមចិត្តមិនខ្លាចក្រែង ម្ល៉ោះហើយហិចហោះផ្លោះវេហាស៍ អង្គព្រះនារាយណ៍ ក៏បន្ទោសព្រះជេដ្ឋាថា ព្រះរៀមបងមិនគួរសោះ អោយឆ្នើមព្រះនគរស្តេចទីមួយ ពេលនេះខ្ញុំព្រួយមិនសុខចិត្ត បើលើស្នំឯណាមិនថាទេ ទៅលើនាងរក្សារាជបូរី រក្សាអស់ស្រីមិនដូចគេ ថាហើយអង្គព្រះនារាយណ៍ផ្លែកផ្លោះហោះត្រដែត ស្ទាក់អោយមុនរាពណ៍រាជភារា និមិត្តជាសួនច្បារផ្កាដំណាំ ចាប់គល់ឡើង ចុងទៅក្រោម ថ្លែងពីក្រុងមារពមហេសីកំពូលផែនដីក្នុងព្រះនគរ ដាក់ត្រឹមចង្កេះភ្លើងឆេះក្រុងមារ ដាក់ត្រឹមស្មារកើតជាភ្លើងឆេះ ដាក់ត្រង់ណាៗ ភ្លើងឆេះគ្មានសល់ បានតែលើកដាក់លើទូលលើព្រះសិរសា ក្រុងមារក៏ទូលហោះកាត់សួនច្បារស្រែកថា តាចាស់ម្តេចក៏ដាំយកចុងទៅក្រោមគល់ឡើងលើ វាមិនដែលបានស៊ីទេ ឆោតណាស់មិនមើលគេរាល់គ្នា តាចាស់នារាយណ៍ក៏ឆ្លើយ ក្រុងមារឯងមិនឆោតទេឬយកស្រីភ្លើងឆេះមកឱបព ដាក់លើចង្កេះភ្លើងឆេះចង្កេះ ដាក់លើស្មាភ្លើងឆេះស្មា ដាក់ត្រង់ណាក៏ភ្លើងឆេះត្រង់ណោះ ឃើក្រុងរាពណ៍ឆោតអ្វីដល់ម្ល៉េះ អោយយកទៅដូរវិញទៅ កាលពីម្សិលមិញឥសីយកទៅថ្វាយឥសូរយកនាងមន្ទោគីរីស្រស់ស្រី ល្អដូចជាស្រីសួគ៌ា ក្រុងទសមុខមារក៏បានស្តាប់

ពាក្យតាចាស់ ដូច្នោះហើយមិនហ៊ានយូរឡើយ វិលវឹងមកដល់អង្គព្រះឥសូរ ថ្វាយទៅវិញ ក្រាបថ្វាយបង្គំក្សត្រថ្លៃវិសេស ខ្ញុំយកមកជូននាងមួយទៀត នាមឈ្មោះមន្ទោគីរី ដែលជាអគ្គមហេសីថ្វាយម្សិលមិញ អង្គព្រះឥសូរបាន ស្តាប់ហើយត្រេកអរឥតស្បើយក្នុងចិន្តា ថាឱក្រុងរាពណ៍តាមចិន្តាឯង ចុះបើ ចង់បានមួយទៀតតាមចិត្តថាក្រុងរាពណ៍ ក៏ទៅចាប់នាងមន្ទោគីរី ក្សត្រីទេវី អរចិន្តា ត្រជាក់រឿងរិទ្ធិឥតឧបមា ថៃថើបភត្ត្រាអស់អង្គស្រី ថ្នាក់ថ្នមបមបី រាជកញ្ញា ហោះលើអាកាសទៅត្រដែត ហោះទៅលើឋានស្តេចពាលី ពរាជ នារីស្រីកញ្ញា ពាលីទតឃើញ ស្តេចយក្សា ពស្រីកញ្ញារំលងបូរី ស្តេចពាលី ក្រេវក្រោធភិរាធសោះសា អានេះចិត្តធំហានក្លាអាអប្រិយ មិនដឹងរឿងរិទ្ធិ មានបារមី ក្រុងគ្រុឌយក្សយង់ស្តែងចេស្តា ថាហើយហោះទៅយកកន្ទុយ វាយវ៉ាត់ កន្ទុយរួមរិតពីជើងដល់ក យកដៃទះតប់ប៉ះកញ្ញា ក្រុងរាពណ៍ ហើមមុខហើមមាត់ក៏ស្រែកថា ហេតុអ្វីយកកន្ទុយរួមរិតដល់ស្មា យកប្រពន្ធ របស់គេធ្វើជាអ្វី ពាលីខឹងណាស់ ស្រែកថា អារាពណ៍ចិត្តធំក្រៃ វាលពេញ ផែនដីដ៏មិនហោះទេ អាងបានមហេសីស្រីរូបស្អាត ហោះកាត់ត្រង់លើ នគរគេ រើយអាកំឡៅខ្លៅសាមាន្យ ម្តេចឡើយអាហ៊ានមកលើនគរគេ ជីវិតអាឯងក្ស័យប្រល័យអាត្មាអញ នឹងផ្តន្ទាអោយក្ស័យប្រាណ ប៉ុន្តែពេល



នេះ អញរុះអញរើ អោយអារូចខ្លួន ទៅវិញ មហេសីនោះមិនល្អចិញ្ចែង អញយកខ្លួនអញវិញល្អចិញ្ចែង អញយកខ្លួនអញវិញវិញមិនអោយឯង ក្រុងរាពណ៍ស្រែកយំទូលទុក្ខ ពុំមានស្បើយ ស្តាយព្រះរាជមហេសីស្រីកញ្ញា ហើមមុខហើមមាត់អស់អង្គប្រាណ ហោះវិលទៅឋានព្រះឥសូរវិញ ដល់ ហើយម៉ប៉ម៉ាយថ្វាយបង្គំ ឥឡូវនេះខ្ញុំពអគ្គមហេសី ដល់ស្តេចពាលីដណ្តើម យកបាន សុំព្រះអវិតានយកមកអោយខ្ញុំ ព្រះឥសូរស្តាប់ហើយថា អើឯង ចិត្តធំ អញចង់ទុកអោយងំគ្រប់បីខែ ចាំដល់ថ្ងៃក្រោយអញហៅអោយស្តេច ពាលីយកអោយមក លុះលង់ដល់គំរប់គ្រប់បីខែ ក្រុងមារប្រាណប្រែមកទូល ព្រះឥសូរវិញ សុំអោយស្តេចពាលីពមន្ទោគីរីយកមកអោយខ្ញុំ ថាហើយ ទើបរង្គព្រះឥសូរស្តេចរុងរិទ្ធិ ប្រើរាជអាមាត្យទៅ អញ្ជើញស្តេចពាលី ពាលីក៏ហោះមកថ្វាយបង្គំ ក្សត្រក្សាន្តភិរម្យឥសូរា ដាក់ភ្នែកក្រឡេកឃើញ ស្តេចពាលី ទើបមានព្រះបន្ទូលស្តេចទូលថា ម្តេចឯងហានក្លាយកប្រពន្ធគេ យកមកអោយពេវិញទៅស្តេចពាលី ពាលីទូលអង្គ ព្រះឥសូរា ចិត្តវាហាន ក្លាធំម្ល៉េះទេ វាពមហេសីស្រីកញ្ញា ពានលើប្រាង្គប្រាង្គនគររបស់ខ្ញុំ ព្រះឥសូរ ឆ្លើយថា ថ្ងៃក្រោយរាពណ៍ឯងកុំពានលើនគរគេ ម៉េចឯងមិនយកមហេសី មកអោយគេវិញ ។ ពាលីឆ្លើយថា មិនបានទេ ចំនួនបីខែទម្ងន់ហើយ

ព្រះឥសូរថា គ្រប់ខែហើយ ឯងត្រូវយកមកអោយគេ បើដូច្នោះខ្ញុំត្រូវវះយកកូនខ្ញុំវិញ ម្ល៉ោះហើយពាលីទៅពយកនាងមន្ទោគីរី មកវះយកកូនយកព្រះខ័នជ័យវះពោះនាងមន្ទោគីរី និយាយពីព្រះកុមារ នៅក្នុងផ្ទៃត្រូវកន្ទុយដាច់ជាពីរ រួចអោយនាងមន្ទោគីរីអោយទៅរាពណ៍វិញ ស្តេចពាលីនោះវិញ បីកុមារដល់នគរខះខីមបូរី ចាត់អោយស្រី១យកទៅបំបៅ ម្ល៉ោះហើយមេនំមេនាង ថែរក្សាអង្គត់កុមាររាជបុត្រពៅ ម្ល៉ោះហើយចងអង្រឹងយោលបន្ទូងពអង្គត់លេងតែរាល់ថ្ងៃ ។

១៧- យើងនិយាយពីក្រុងរាពណាសូរទូមុខ ខឹងណាស់ មានទុក្ខតែរាល់ថ្ងៃ ម្ល៉ោះហើយ ផ្លែកផ្លោះហោះមកនគរខះខីមបូរី ដល់ហើយក្លែងក្លាយនិមិត្តជាក្តាមគ្រោង មកគៀបអង្គត់រាជកុមារ ស្រីស្នំក្រមការក៏ផ្អើលលាន់ ខ្លះថាសត្វក្តាមគ្រោងក៏ធំណាស់ ខ្លះរត់ទៅទូលស្តេចពាលី ពាលីក៏មកមើលក្តាម ដឹងដោយសញ្ញាចិត្តគិតថាក្តាមនេះ មិនគឺអ្នកឯណា គឺអារាពណ៍ ម្ល៉ោះហើយចាប់ និងបោកធ្វើធ្វើទុក្ខម្នេញ រាពណ៍ភ័យណាស់ក្រឡាខ្លួនធ្វើរាពណ៍វិញ ពាលីទោម្នេញចាប់រាពណ៍ចង ម្តងនេះគិតសំឡាប់អោយសាបសូន្យ ម្ល៉ោះក្រុងរាពណ៍រើពុំរួច អស់ពួកស្រីស្នម ក្រមការពួកកងសេនាច្រើនវឹកវរ មកមើលក្រុងមារច្រើនយល់ថា យើមុខមាត់អារាពណ៍សំបើមណាស់



សុំអម្ចាស់កុំទុកវា ក្រុងមារភ័យគិតជីវិតបង់ ខំលុតជង្គង់អង្វរករ ខ្លះវាយខ្លះធាក់ដួលផ្ទាប់ផ្ងារ អ្នកខ្លះឆ្លើយថាកុំទុកវាឡើយ ចិត្តវាមិនរាង មិនខ្លាចសោះ ទុករអាទុរយសដូចម្តេចបាន ម្ល៉ោះហើយក្រុងរាពណ៍ ឱនកាយថ្វាយបង្គំ ស្តេចពាលីជាធំ ព្រះអរតាន អាណិតតែទុកជីវិតខ្ញុំចុះ ខ្ញុំសុខចិត្តមកនៅជាមួយ ជាជើងអង្រឹង ប្រាំពីរថ្ងៃ ពៀងពរកុមារបន្ទូងលេង បន្ទឹងរាំរេកំសាន្តសុខ ស្តេចពាលីបើដូច្នោះអញទុកបានអោយឯងមកនៅ ខ្ញុំជើងអង្រឹងប្រាំពីរថ្ងៃ ថាបើមិនដូច្នោះជីវិតក្ស័យ បើឯងមកជាខ្ញុំកូនអញរួចពីក្ស័យ បកនៅប្រាំពីរថ្ងៃរោយរូចខ្លួន ម្ល៉ោះហើយក្រុងរាពណ៍ក៏រាបខ្លួនបកនៅចំនួនប្រាំពីរថ្ងៃ ។ ហៃបាអង្គត់ បាឯងជាបុត្រនាងមន្ទោគីរី អញត្រូវជាជនកឪពុកចុងបាឯង ។, និយាយពីក្រុងរាពណាសូរ បំរើស្តេចពាលីនៅខ្ញុំជើងអង្រឹងប្រាំពីរថ្ងៃ រួចហើយស្តេចពាលី ថាក្រុងរាពណាសូរ ឯងគ្រប់ចំនួនហើយ វិលទៅវិញទៅ នគរបូរីគង់នៅដូចដែល ។ និយាយអំពីសម្តេចព្រះនារាយណ៍រាមា នៅក្នុងនគរមិថិលា នេបនឹងសិតា កល្យាណ ថ្ងៃមួយអង្គព្រះក្សត្រក្សាន្ត ផ្គូកចង់ទៅលេងព្រៃឧទ្យាន នឹងស្រីលក្សណ៍អនុជាប្អូនភ្វាស្ងួនគ្រង ស្វា មួយផង ទាំងបីអង្គា កាលនោះសិតាយសបក្សា ស្តេចចេញយាត្រាមកជួបនឹងក្សត្រក្សាន្ត សិតាយសទូលថា អង្គព្រះក្សត្រា ហេតុអ្វី

ចាកឋាន អង្គព្រះក្សត្រក្សាន្តទ្រង់ព្រាស់ថា យើងបានរាជសិតានៅនគរមិថិលា ជាចៅមហាឥសី ពេលនេះយើងចេញមកលេងព្រៃ ថាហើយនាំសត្វបក្សី ស្តេចវិលវឹងវៃរកអាស្រម ស្តេចយកបក្សីជាមិត្តសំឡាញ់ ពេលនោះសិតាយស លាផ្គងត្រឡប់មកហោង ដល់រូងបព្វតា ក្រោយនោះព្រះនារាយណ៍ក្សត្រា នាំវត្ថរាជសិតា ចេញទៅលេងព្រៃ នាំស្រីលក្សណ៍អនុជា ស្ងួនព្រេងមាន ស្វាសមួយផង ទាំងបួនអង្គា ។ រឿងព្រេងនេះស្លេះសិនមិនចរចា ។

១៨- និយាយពីក្រុងទសមុខរាពណា ចង់ចេញមកលេងព្រៃហេមពាន្ត ថាហើយអាសូរា ហៅយក្សាមហារីក ថារើយបងមហារីក ចូរនាំយើងចេញទៅលេងព្រៃ ហោះដល់ទៅភ្នំមួយនៃ ភ្នំនោះនាមឈ្មោះភ្នំមយរាតិហោល័យ ថ្លែងពីអង្គនារាយណ៍ក្សត្រថ្លៃ ស្តេចត្រាច់ក្នុងព្រៃប្រឹក្សាករណ៍ ទាំងបួនអង្គាលីលាលេង គន់ស្តាំ គន់ឆ្វេង ក្នុងព្រឹក្សព្រៃ ថ្លែងពីក្រុងទសមុខអប្រិយ ឃើញព្រះអង្គត្រាច់ចរ នាំព្រះអគ្គមហេសីក្រុងរាជាអប្រិយក៏គិតថា អញនេះចង់បានប្រពន្ធអាមនុស្សា នេះហើយសិតាចៅឥសី ល្អលើសស្រីឋានសួគ៌ា បែរមុខមកនិយាយនឹងមហារីកអសូរា សុំបងប្រែក្រឡាបញ្ឆោតវា បងឯងក្លែងជាប្រើសមាស ស្នែងដូចគេវាស់



សឹងកែវថ្លៃថ្លា ក្រចកជើងដូចពេជ្រថ្លៃ រោមវាល្អក្រៃដូច កែវមរកតភ្នែកវាដូចកែវមណីរត្ន ប្រើសនោះក៏ត្រាច់រកស៊ីដោយផងព្រៃ ងើបងើយផ្ទៀងឯង ឥតមានភ័យ ដើរមកដំរង់ត្រង់អង្គក្សត្រថ្លៃ កាលនោះនាងសិតាទតយល់ប្រើសមាសល្អក្រៃ ក្រាបទូលក្សត្រថ្លៃ ដេញចាប់អោយខ្ញុំព្រះនារាយណ៍រាមាស្តេចវែងសង្ស័យ ប្អូនអើយ បងក្រែងអសុរីប្រាណប្រែក្រឡា បើសិនជាប្រើសព្រៃ ហេតុអ្វីក៏ពុំរត់ ក្រែងតែយោបល់យក្សយង់អសុរា ប្រើសឮដូច្នោះស្ទុះរត់ទៅធ្លា ក្រែងអង្គក្សត្រាស្តេចវែងសង្ស័យ ឯនាងសិតា សោយសោកាល័យ ទូលអង្គក្សត្រថ្លៃ ចោមចាប់អោយខ្ញុំ ព្រះនារាយណ៍ឆ្លើយថា អូនកុំសោយសោកាយំ ប្រើសនេះបងធានាចាប់អោយ ថាហើយព្រះអង្គក៏ដេញប្រើសយក្សា ដល់ឆ្ងាយប្រើសនោះស្រែកថា ស្រីលក្សណ៍ប្អូនភ្ញាប្រើសដេញជលបង ព្រះលក្សណ៍អធិស្ឋានផ្តាំផ្សង សូមអោយលោកនាងគង្គឹងគ្រប់គ្រង នាំស្វាសមួយហោងទៅជួយបងប្រាកដ ព្រះអង្គបាញ់ប្រើសកាឡា ត្រូវនឹងសរក្សត្រា ក្លាយជាយក្សយង់ ថ្លែងពីក្រុងទសមុខមារ ស្ទុះមកក្រទាស្រវារកនាង រកមិនចេះឃើញ ។ ព្រះលក្សណ៍រត់ទៅឱបបង មហារីកយង់ឃ្នង ក្សិណក្ស័យមហិមា ឯណាសិតាកល្យាណ ស្រីលក្សណ៍អនុជាឆ្លើយនឹងក្សត្រក្សាន្ត នាងសិតាកល្យាណ

ផ្ញើនឹងនាងគម្ពីង ព្រះនារាយណ៍ស្រែកថា ទៅជឿអ្វីវានាងគម្ពីងល្ងង់ពេយ នាងគម្ពីងខឹងណាស់ បើកឡើងស្រឡះអោយរាពណ៍ឃើញអង្គ ក្រុងរាពណ៍ស្រវាឱនឱបថ្នាក់ថ្នម ក្រសោបហោះលើអាកាសសា សំដៅទៅនគរលង្កាបូរី ទៅប្រទះនឹងសិតាយសបក្សី លាតស្លាបបាំងថ្លែងងងិតដូចយប់ ក្រុងរាពណ៍រកផ្លូវទៅមិនឃើញ អលងករេវានៅនឹងក្លោងទ្វារច្រកភ្នំធំក្រៃ ក្សិណណោះអារាពណ៍អប្រិយអត្តមហោសីក្លើអញ អញមិនខ្លាចអាឯងទេ ខ្លាចតែក្រោមព្រហស្តនាង រាពណ៍ចាប់ភ្លឹកបានបូតព្រះទំរង់ពេជ្រ រួចចោលបក្សីបាក់ស្លាបចង្រ្កាងព្រះអាទិត្យរះភ្លាម ស្វាងអស់មេឃា ក្រុងរាពណ៍លីលាត្រាច់ទៅបូរី ។

យើងថ្លែងពីព្រះនារាយរាមា ស្តែងស្តេចលីលាមករកកន្លែងដែលព្រះអនុជាលាក់នាង រកពុំឃើញនាងឡើយ សោយសោកពុំស្បើយដល់ដួលសន្លប់ សូន្យសព្ទបាត់ស្មារតី ស្រីលក្សណ៍អនុជាប្អូនភ្ងា ឱបបងបមបីត្រកងពុំភ្ញាក់ខ្លួនឡើយ សន្លប់ទាំងពីរពង្ស ហនុមានក្បែតក្បង់ទឹកលុបមុខព្រះភគ្គា ព្រះពាយបក់បោកព្រះពកផាត់ ខ្លាយខ្ចាត់ក្លិនផ្កាដូងដកម៉ែ ក្លិនក្លែបក្រអូបក្រៃ ក្សត្រថ្លៃតើនពីទីនិទ្រា ថាស្រីលក្សណ៍អនុជា យើងកុំរាប់គ្នាជាបងជាប្អូនឡើយ ប្អូនឯងទៅឋានណាក៏ទៅចុះ



ឯបងនេះបែកពីប្អូនត្រឹមនេះហើយ បើតាមមហេសីយល់ពុំបាន បងមិនវិលថ្កានទីអាស្រមឡើយ ហើយព្រះនារាយណ៍រាមា ត្រាច់សំដៅនាំស្វាសមួយទៅជាសេនា ស្រីលក្សណ៍អនុជាប្អូនភ្ងាមើល តាមបង ស្តេចត្រាច់ត្រសងនឹងកូនស្វា អ្នកខំរត់តាមមិនអោយទាន់ ក្នុងព្រះទ័យអាក់អន់តឹងឱរា ទឹកនេត្រាសស្រោក់ហូរសស្រើម ល្បើសល្អំក្នុងកាយា ទូញថាឱព្រះជេដ្ឋាព្រះរៀមបង ស្តេចត្រាច់ចោលប្អូនទៅឋានណា ទូញភ្លាមយាងតាមកម្មកាយ ឆោមឆាយកន្សែងថ្លែងសោកា ជោរផលនេត្រាស្រក់សស្រាំខំរត់តាមបងទៅពីក្រោយបណ្តោយគ្នា ឯព្រះរាជាដល់មណ្ឌលដើមព្រះជ្រៃប្របមាត់ស្រះស្រង់បែកត្រឈៃ ព្រះលក្សណ៍ក្សត្រថ្លៃមិនហ៊ានជិត ឈរតែពីក្រៅទតមើលបង មិនហ៊ានសារសង នឹងក្សត្រា ព្រះនារាយណ៍ផ្ទំសោយសោក សែនសល់អមោក្សរកសិតា ថាឱផ្កាឈូកក្នុងស្រះស្រីក្លិនក្លាយដូចស្រីរត្នសិតា ស្តេចស្តែងសោកាសន្លប់លង់ ស្រីលក្សណ៍ប្អូនភ្ងាអាណិតបងសោយសោកយំ ក្នុងព្រៃទូរគមពុំមានស្បើយ ព្រះនារាយណ៍ភ្ញាក់ខ្លួនហើយផ្ទូកព្រះទ័យដែលគេដាំបាយដូចម្តេចនៃ ក្សិណនោះក្សត្រថ្លៃកល់ជើងក្រានឱសមួយឆ្នាំងមួយដាក់មិនជាប់ ព្រះលក្សណ៍មកផ្ទាប់ជិតព្រះបង ព្រះរៀមព្រះជេដ្ឋា បើដាក់ឱសបីជាប់ដូចសេចក្តីប្រាថ្នា ឱសមួយឆ្នាំងមួយមិនដែល

ជាប់ទេ ព្រះរាមគិតគ្នេរថា ត្រូវហើយ ទាល់តែដាក់ឱសបីដាប់ជាប់ពិត ហៅប្អូនមកជិតដូចសព្វដង បើអញគិតធ្វើទ័ព ធ្វើគ្នាតិចមិនបានទេ បានតែគ្នាច្រើន និងប្អូនបង ម្ល៉ោះហើយបាត់ក្រោធហៅប្អូនមក ដើរមកជុំគ្នាកុំព្រងើយ ថាហើយសោយសោគពុំបានស្បើយ ដើរបានប្រាំពីរទិវា ក្សត្រថ្លៃដើរដល់ល្ហាងភ្នំមួយហើយ ។ រឿងត្រង់ស្លេះទុកមិនចរចា ។

និយាយពីរសុរាវរសមុខមារពនាងសិតាដល់នគរលង្កាបូរី បើយក្រុងទសមុខមារប្រជុំយោធា ពីរដណ្តប់អង្គប្រាណ ទាំងពិភេតប្រហិតហោរា ទូលក្សត្រក្សាន្តថា ទុកមិនបានក្នុងរាជបូរី បើទុកកាលណាកើតភ្លើងប្រល័យកប្បឆេះរាជបូរី ។ ក្រុងរាពណ៍ក៏ប្រើអស់នាម៉ឺនមុខមន្ត្រីសេនាបតីអោយរៀបដំណាក់ យកនាងទៅដាក់សួនតុសិត អោយរៀបតែងបុស្បុកនៅរុងរុង ។

១៩- និយាយពីព្រះរាមស្តេចដល់ល្ហាងភ្នំ ក្លោងទ្វារបួយធំផ្លូវទៅលង្កា ឃើញសិតាយសសត្វបក្សា បាក់ទាំងស្លាបធ្លាក់ដល់ដី សិតាយសទូលថា ព្រះបពិត្រ ព្រះអង្គមានរិទ្ធីមានបារមី ស្តេចជួយខ្ញុំផងម្ចាស់សិរសី វាលួចមហេសីព្រះអង្គបាន វាចោលខ្ញុំបាកលស្លាបធ្លាក់ដល់ដី នឹងព្រះទំរង់ពេជ្រអង្គក្សត្រី វាបួត្រពីដៃចោលខ្ញុំត្រូវ ព្រះរាមឆ្លើយថា ក្លើកុំ



ភ័យ យើងតអោយជាប់ដូចពីដើម សិតាយសឆ្លើយថា តកុំអោយមានស្នាម បើមានស្នាមហើយប្តូរតែស្លាប់ ព្រះរាមឆ្លើយថា យើងអ្នកត ធ្វើអោយតំណនៅប៉ុនសក់ សីតាយសឆ្លើយថាមិនព្រមទេ មានស្នាមហើយខ្មាស់គេស៊ូតែស្លាប់ចុះ សក់មួយច្រៀកជាដប់ក្លើព្រមទេ ឃើញហើយខ្មាសគេស៊ូតែស្លាប់ ក្លើអើយទាញព្រះខ័នមកអារផ្តាច់សុរ៉ាំងអញមក អស់ហើយររញ្ជរៀនពីគ្រូររញ្ជបក បើដូច្នោះខ្ញុំមិនយកទេ សីតាយសថា ក្លើរើយកាត់សុរ៉ាំងចាក់នឹងចុងសរបាញ់ទៅសូគ៌ា ព្រះនារាយណ៍រាមាក៏កាត់ព្រះសុរ៉ាំងចាក់នឹងចុងសរថ្លៃងផ្សង ទៅឋានសួគ៌ាដប់ប្រាំមួយជាន់ ទៅកើតជាស្តេចគ្រុឌនាម ហៅថា ព្រះបាទឡិសតី បើព្រះនារាយណ៍រាមាមានក្រអ្វីក្តីរ៉ាប់ចុះមកជួយ ។

២០- និយាយអំពីហឹង្សាសួរ ជាកូនព្រះឥសូរ ហើយហ្វូងក្របីទាំងប្រាំរយ ឈ្មោលកាលណា ត្រូវសំឡាប់ចោលទាំងអស់ បើកូនមេទុកទាំងអស់ ក្សិណនោះមានមេក្របីកូនម្តង ពិចារណាថា កូនក្នុងផ្ទៃបើសិនជាឈ្មោលមិនរស់ទេ បើកូនមេទើបរស់នៅ ថាហើយក៏ដើរចូលទៅក្នុងព្រៃ លុះវេលាឈឺផ្ទៃពួនប្រសូតកូន នាំកូនបំពាត់ពួនក្នុងព្រៃពាត់ទៅឆ្ងាយម្តងបន្តិច១ កូនក្របីក៏សួរថា ហេតុអ្វីមាតាមិននាំខ្ញុំទៅ

ចូលហ្វូងនឹងគេ មេប្រាប់ទៅថា ទៅមិនបានទេ ដ្បិតអីបាកូនកាចពោស់ បើកូនឈ្មោលសំឡាប់អស់ បើកូនមេបានរស់នៅ ម្ល៉ោះហើយមេក្របីនាំកូនពួនក្នុងព្រៃជ្រៅបំពាត់អោយស៊ីស្មៅ លុះបានធំនាមឈ្មោះទោភី តឿនម្តាយទៀតថា យើងលួមទៅនៅនឹងគេ ម្តាយថាទៅមិនបានទេ ត្រូវរៀនសិល្បសិន អោយកូនទៅរៀននឹងដើមកន្ទួតប្រាំពីរថ្ងៃ ទៅរៀនពីដើមក្រសាំងប្រាំពីរថ្ងៃ ផងអោយរុះរោយវិចត្រូវគ្រប់ផ្លែ ទើបបបួលម្តាយម្តង ទៀតថាទៅនៅនឹងហ្វូងជាមួយគេ ម្តាយថាទៅមិនបានទេ ត្រូវរៀនស៊ីស្មៅ អស់ប្រាំពីរបឹង ផឹកទឹកអោយបានប្រាំពីរបឹង ម្ល៉ោះហើយទោភីខំសង្វាតរៀនតាមម្តាយបានរហូត លុះឡើងកធំខ្លាំងហៅហាន ទើបបបួលម្តាយបាន ចរចូលហ្វូង ។ មហិង្សាសូរ ឃើញហើយបោលដំរង់ ថាអាណាចង់យកប្រពន្ធរបស់អញ ។ ទោភីគិតថា មិនជល់ទេ យកក្បាលរង ពួសូរខ្លាំងក្រៃ ដូចរន្ទះទាំងប្រាំពីរសែន ពេលនោះមហិង្សាសូរ ក៏បាក់ក ។ ទោភីចៅព្រះឥសូរមិននៅនឹងហ្វូងទេ ដើរត្រេចរំលងក្នុងហេមពាន្ត ប្រាំពីរយប់ ប្រាំពីរថ្ងៃ ក៏ដល់នព្វមហាសមុទ្រ (សមុទ្រប្រាំបួនខ័ណ្ឌ ) ទោភីហែលមិនផុត វិចដីបាតសមុទ្រកើតជាកោះ អោយទឹករាក់ហើយដេកនៅ ព្រឹកព្រាងហែលទៅទៀត ដល់ត្រើយសមុទ្រឃើញឥសី ទោភីស្រែកហៅ រើយអាតា ចុះមក



លេងគ្នាអោយដឹងឈ្មោះល្បី ឥសីថា ឯងឈ្មោះអ្វី ? ខ្ញុំឈ្មោះទោភី ឥសីថាឯងកំចង់លេងនឹងមនុស្សចាស់ បើឯងលេងនឹងឥន្ទព្រហ្មទេវតា ឯងបានឈ្មោះ ថាលេងនឹងមនុស្សចាស់ បើឯងចាញ់អញថោក ទាបណាស់ គ្មានឈ្មោះសាយសុះគ្មានឈ្មោះល្បី បើឯងចង់ច្បាំងហែល បណ្តោយទឹកទៅនគរខះខឹម ពាលីនៅទីនោះឯង ក្របីហែលតាមបទ ស្ទឹងទៅដល់នគរខះខឹមបូរី ឡើងទៅដល់ច្បារស្តេចពាលី ពលស្វាចោមរោមជើងក្របី ខ្លះរត់ទៅទូលស្តេចពាលីថា មានមហិង្សាមកពីណា មកជល់សួនច្បាររលាយអស់ ម្ល៉ោះហើយពាលីក្រឡេកឃើញ ទោភីរាជក្របី ទាញខ័នសរជ័យដើរតំរង់ ទោភីក៏បោលបោះពួយដំរង់ ដល់ទៅច្បាំងគ្នាអស្ចារ្យក្រៃកក្រើតទឹក កក្រើកដី ព្រៃព្រឹក្សា កក្រើកសួគ៌ាដប់ប្រាំមួយជាន់ ទេវបុត្រទេវតា និត្យនៅពុំបាន ហិចហោះចាកឋានដោយដើមពោធិព្រៃ ព្រះអាទិត្យសុរិយា ព្រះចន្ទ តារា អស់រស្មី មើលអ្នកទាំងពីរ ច្បាំងគ្នាល្អក្រៃ ពាលីគ្រវីព្រះខ័នជ័យ វិលដូចចក្រវិស័យ វិលផែនដី ក្របីគ្រវីស្នែងវិលដូចចក្រ ម្ល៉ោះហើយច្បាំងពីព្រឹកដល់ថ្ងៃត្រង់ គ្មានបង្អង់សោះដល់ទៅកំលាំងខ្សោយឈប់សួរគ្នា យើងកុំច្បាំងលើផែនដី ផ្អើលសត្វបក្សីនៅពុំបាន ម្ល៉ោះហើយយើងចូលទៅច្បាំងក្នុងគុហា អោយដឹងចេស្តារិទ្ធិបារមី និយាយពីសូត្រីព

សៀតព្រះខ័នហោះតាមបងដល់ទៅទ្វារគុហា ពាលីផ្តាំថា អូនអើយបើឃើញឈាមខៀវ មកកាលណាគឺឈាមបង អោយយកថ្មដាសទ្ធប់ទ្វារគុហាអោយស្លាប់ទាំងអស់គ្នា នៅក្នុងគុហានោះម្តង ពេលនោះអស្ចារ្យឮសូរស័ព្ទផ្គរទិសប្រាំបី ផ្លេកបន្ទោរគគ្រាមរលាមភ្លឺស ធ្លាក់ភ្លៀងចុះមកទឹកច្រើនក្រៃនិយាយរំពីពាលី និងក្របី ច្បាំងគ្នាប្រាំពីរថ្ងៃមិនដឹងចាញ់ឈ្នះ ហើយយេប់សួរគ្នាថា ឯងខ្លាំងនឹងអ្វី ពាលីឆ្លើយថា អញខ្លាំងនឹងទេវតាបកជួយអញពាលីសួរទោភីអោយអស្ចារ្យ ឯងមានកម្លាំងខ្លាំងនឹងអ្វី ? ទោភីឆ្លើយថាអញខ្លាំងនឹងកម្លាំងរបស់អញ ស៊ីស្មៅអស់ប្រាំពីរវាល ផឹកទឹកអស់ប្រាំពីរបឹង គ្មានទេវតាឯណាមកជួយបាន កាលនោះ មានទេវតាដប់ព្រះអង្គទំស្នែងក្របីម្ខាងប្រាំ ទំចុងព្រះខ័នដប់ព្រះអង្គ លុះឮទោភីឆ្លើយទៅថាភ្លេចគុណទេវតា ថាគ្មានជួយ ទេវតា ចុះចាកពីស្នែងក្របីមកទំលើចុងព្រះខ័នម្តៃព្រះអង្គ លុះលង់ច្បាំងគ្នាមួយគ្រាទៀត ពាលីក៏ចាប់ច្រមុះក្របីបាន ហូតយកព្រះខ័នថ្លាកាត់កទោភី កើតជាឈាមខ្លាំងបាញ់ពេញគុហាចេញមកតាមទ្វាឃើញខៀវស សូគ្រីពប្អូនទាញថ្មដា សង្រ្គប់គុហា ចាល់ឈាមពេញ ពាលីមុធហែលឈាមមិនរួចសោះ ស្មានថា ស្មានថាស្លាប់ទាំងអស់ មិនលែងឡើយ ដល់នឹកឃើញក្រោយទៀត ទាញក្បាលក្របី



ឱបងទោភីកំអន់ចិត្ត អាណើតខ្ញុំចុះកុំថាអ្វី បើបងមានរិទ្ធី មានបារមីខ្ញុំសុំចុះចាញ់បងឯង ទើបយកក្បាលក្របីមកអធិស្ឋាន បើទោភីបងខ្លាំងពូកែពិតប្រាកដ ខ្ញុំចោលទំលាយអោយធ្លាយទ្វារគុហា ថាហើយក៏ចោលព្រង់ពំរង់ទ្វារ ធ្លាយគុហាហូរឈាមខ្លាំង សូសុគ្រីពប្អូនថា ហេតុអ្វីក៏យកថ្មសង្រ្គប់ សុគ្រីពឆ្លើយថា អស្ចារ្យណាស់ ភ្លៀងផ្គររន្ទះអោយច្រឡំខ្ញុំឃើញឈាមក្របីថាឈាមបង បានជាលើកថ្មដា សទ្ធប់ទ្វារ ពាលីឆ្លើយថាអាឯងក្បត់ ចង់បានបូរីស្រីស្ន័ ថាហើយដកស្រោម ជើងវាយក្បាលសូគ្រីពផ្ទង សុគ្រីពអន់អាក់ក្នុងព្រះទ័យ ធម្មតាកើតជាត្រកូលស្តេចក្សត្រមិនត្រូវអោយនរណាបោកក្បាលនឹងស្បែកជើង ថាហើយក៏ចូលទៅយំក្នុងរូងភ្នំបព្វតា យំនោះច្រើនខែ ច្រើនថ្ងៃ មិនឈប់សោះ ព្រពីកភ្នែកកើតជាដំបូក គ្របខ្លួនទាំងអស់ ។

២១- រួចហើយព្រះនារាយណ៍រាមា នាំស្រីលក្សណ៍អនុជា ចរត្រាច់ត្រសងព្រមទាំងពានរស្វាសមួយផង ដល់ភ្នំមួយហោង នាមហៅដងកុមារមហាបពិត ដល់ហើយស្តេចចូលផ្ទុំប្រាកដ ក្រោមជ្រៃចំហុតមានមែកសាខា ភ្នំនោះ មានល្អាងបព្វតា ព្រះអង្គក្រោកឡើង នឹងសោយព្រះសិទន្តទើបត្រាស់ប្រើអោយព្រះលក្សណ៍ទៅរកគង្គា មកលុបភត្រ្តា ព្រះលក្សណ៍

ទ្រង់យាងទៅតាមជ្រោះភ្នំ ឃើញជ្រោះមួយណាមានទឹកថ្លាល្អ ជ្រោះនោះចេញមកពីច្រកភ្នំ ដែលសុគ្រីពអង្គុយយំ បណ្តាលអំពីហេតុ ព្រះលក្សណ៍ដងមកថ្វាយព្រះរាមា លុបព្រះភក្ត្រាស្អុយដូចគំរង់ ប្អូនអើយទឹកនេះភ្លឺថ្លាល្អយល់យល់យង់ ស្អុយដូចគំរង់មនុស្សស្លាប់យូរហើយ ព្រះរាមអស្ចារ្យឆ្ងាយឆ្ងល់ ព្រះបាទទសពលនាំប្អូនភ្ញា ទាំងបីអង្គាដើរតាមទឹកទៅប្រទះដំបូកមួយនោះ ឮសូរស័ព្ទលួរ១ដូចមនុស្សយំ ព្រះអង្គយកចង្អុយកៅទឡ្ហេសរសើល្បទៅទាត់ឡើងល្បើកឃើញស្វាមួយធំ សួរថា ស្វាសហេតុអ្វីមកអង្គុយយំ សុគ្រីពឧត្តមថ្វាយបង្គំក្សត្រក្សាន្ត បងខ្ញុំនាមឈ្មោះពាលី ច្បាំងគ្នានឹងទោភីក្នុងគុហា ឈាមក្របីនឹងឈាមបងខ្ញុំច្រឡំគ្នា ខ្ញុំយកថ្មដាសខ្ទប់ទ្វារព្រះវៀមាកាត់កក្របីក៏ចោលទ្វារបើក រួចហើយថាខ្ញុំក្បត់យកស្រី យករាជបូរីរបស់ក្សត្រក្សាន្ត ដោះស្បែកជើងបោកក្បាលខ្ញុំ បានខ្ញុំខ្វាសក្សត្រក្សាន្តខ្ញុំមកអង្គុយយំ ថ្វាយបង្គំព្រះបរម ព្រះបាទថ្កើនថ្កាន សុំជួយជាសេនាយានស្តេចទៅឋានណាគង់លើខ្ញុំបាទ សុំព្រះអង្គជួយយកអាសាខ្ញុំផង ព្រះនារាយណ៍រាមាក៏ស្តេចរ៉ាប់រង សុគ្រីពមានខ្នងគ្រាន់ពឹងរក្សា ថ្ងៃក្រោយសុំសំបុត្រនាំសារចេញមកច្បាំង បានឃើញសាព្រះអនុជប្អូនថា ចង់មកច្បាំងនឹងវៀមបង វេលាព្រឹកស្អែកមិនខានឡើយ ព្រឹកហើយក៏ទ្រង់អលង្ការ



ក៏កាន់ព្រះខ័នជ័យមុតថ្លា ហោះកណ្តាលអាកាសា ប្រុងតយុទ្ធនឹងព្រះអនុជ។ និយាយពីសុគ្រីព ប្អូនភ្ញាទៅដល់ជួប មុខនឹងពាលីថា យើជេដ្ឋាព្រះវៀមបងយើងត្រូវប្រឡងអោយដឹង តេជដៃ ពាលីថា ហៃសុគ្រីពចិត្តដូចង្រែអញនឹងកាប់អោយក្ស័យព្រះជន្ម ថាហើយប្រកាប់ប្រចាក់ ប្រឡូកប្រឡាកច្រើនគ្រា ស្មើ ១ តែគ្នា ពុំដឹងចាញ់ឈ្នះ សង្គ្រាមទីពីរ ពាលីមានតេជះសុគ្រីពរត់ប្រាស់ចរចូលរូងភ្នំ ពាលីដឹងហើយក៏វិលវឹងខ្មី ដល់រាជបូរីគង់ដូចសព្វដង ។ សុគ្រីពចេញមក ថ្វាយបង្គំ ព្រះរាមច្បាស់ច្បង ស្តេចថាជួយខ្ញុំ មិនឃើញបាញ់សរផ្សង ទាល់តែខ្ញុំចាញ់បងរត់ចូលរូងភ្នំ ។ ព្រះនារាយណ៍រាមា មានព្រះឱង្ការថា សុគ្រីពឧត្តម មិនដឹងឯណាប្អូនបងដូចគ្នាទាំងអស់ ទើបអញមិនហ៊ានខ្វាចច្រឡំ ច្បាំងមួយទិវាទៀត បើបងឯងស្លៀកខៀវ ឯងស្លៀកក្រហម អោយអញស្គាល់ឯងជាក់ ទើបអញជួយឯងបាន ។ ដល់មួយទិវាពាលីទ្រង់គ្រឿងអលង្ការពណ៌ខៀវទាំងអស់ សុគ្រីពឃើញបងទ្រង់ដូច្នោះឯង រត់ទៅផ្លាស់ទ្រង់ពណ៌ក្រហម ហោះទៅច្បាំងគ្នាពីព័ទ្ធពាក់ ពាលីចាប់ថ្នាក់ ចាប់សុគ្រីពបាន ដៃមួយចាប់ព្រះខ័នថ្លាដៃមួយចាប់សិរសា គិតផ្តាច់សុរ៉ង កាលណោះព្រះនារាយណ៍រាមាច្បាស់ច្បង ស្តេចបាញ់សរសងអារិទ្ធិច័ន្ទ ផ្លាញថ្លា ពាលីក៏ស្តេចចាប់សរថ្លា សួរថា

សរអ្នកណាបាញ់មករករអញ សុគ្រីពឆ្លើយថា សរព្រះសឹងមានពេជះ នឹងរិទ្ធិសរថ្លា ពាលីឆ្លើយថា ប្អូនអើយចៀសចេញ អញបងក្ស័យហើយ ចុះទៅផ្តាំមឿង ផ្តាំមឿងប្រាំពីរ ថ្ងៃក្ស័យព្រះជន្ម ។ ទើបមានព្រះបន្ទូលថា ឱសុគ្រីពប្អូនអើយ ចូរប្អូនមើលស្រីស្នំ ក្រមការ ថែរក្សាព្រះនគរ បងក្ស័យហើយ ទំនាយបងត្រូវក្ស័យនឹងសរព្រះនេះឯង ។ ហើយផ្តាំថា ប្រាំព្រីរថ្ងៃ ផ្តាំផ្កាសោឡិត ផ្កា សាឡី ផ្តាំផ្កាចំប៉ីទួនស្រីមហាហង្ស ផ្តាំរស់ពួកសេនា ស្រីស្នំក្របការ នាម៉ឺនមុខមន្ត្រី ផ្តាំស្រេចកាលណោ សរព្រះនារាយណ៍ ក៏ត្រូវត្រង់ដើមទ្រូង ក្សិណក្ស័យ ។ ដោយទំនាយត្រូវស្លាប់នឹងសរព្រះ ហោងសំបថកាលទៅរៀននឹងមហាឥសី ទាំងពីរនាក់បងប្អូន ប្អូនមិនបានទៅ អោយបងយកដំឡាប់កែមូនចែកផង ឥសីផ្តែផ្តាំថា កុំបើករបស់គេ បើកតែរបស់យើងបានហើយ ។ ដល់មកក្រោមដើមពោធិជ្រៃ ក៏ចង់ឃើញ ប្រពន្ធប្អូនផង បើករបស់ប្អូនហើយ ទេពអប្សរក៏លោតចេញពីដំឡាប់ បងក៏ដេញចាប់ ប្រាថ្នាការលោកិយ ម្ល៉ោះហើយកសេពមន្តបង្រួមដាក់ ទៅវិញដូចដើម ម្ល៉ោះហើយយកមកហុចទៅប្អូន កាលណោះ មនុស្សប្អូន ចាប់មកក្លិនពីរថា ឱដំឡាប់អញមិនមែនសុទ្ធ បងឯងបើកដំឡាប់ទេ បងឯងបើក បងនោះចេះតែប្រកែក ប្អូនចេះតែសួរ បងក៏ស្បត់អោយប្អូន



អោយបងស្លាប់តែនឹងសរព្រះ បានប្អូនទទួលវេលានោះ កាលបើឈ្នះបង ដូច្នេះហើយ ក៏និមន្តព្រះនារាយណ៍រាមា អោយទៅគង់នៅនគរខ៉ះខីមបូរី ក៏ថ្វាយពលពានរប៉ែតសិបអខោ ឃុនទល់ ឃុននិល និលពេជ្រ និលខាន់ សុគ្រីព បារអង្គត់ ។ ព្រះនារាយណ៍រាមា ក៏បានពលស្វា ប៉ែតសិបអខោ ។

២២- និយាយពីព្រះនារាយណ៍រាមា នាំពួកសាកលយោធាទៅ ទាំងអស់ ទាំងស្រីលក្សណ៍អនុជា បាហនុមាន ទៅទាំងឃុនទល ឃុន និល ទាំងបារអង្គត់ នូវសុគ្រីព ស្តេចមានព្រះបន្ទូលអោយរៀបពល ច្រើន ត្រៀបត្រា ដើរក្នុងប្រីក្សា ស្វាច្រើនសល់ ដល់ទៅស្រុកមួយ ហៅសមរភូមិ ជ័យកែវមរកត ស្តែងស្តេចចំហុត ធ្វើពន្លាជ័យ សុទ្ធតែស្វាសច្រើន ត្រៀបត្រា ស្វាខ្លះធាត់ធំ ប៉ុនភ្នំបព្វតា កក្រើកទឹក កក្រើកដី ព្រៃព្រឹក្សា ដល់ហើយអង្គក្សត្រា បោះពន្លាជ័យ ទូទៅ ឮដល់ក្រុងលង្កាបូរី ដឹងអាថិ សេចក្តីថាព្រះរាម ព្រះលក្សណ៍មនុស្សា ។ រឿងត្រង់នេះ យើងស្លេះសិន មិនចរចា និយាយពីនាងសិតា នៅក្នុងអុងម៉ុង្គ ទ្រង់ព្រះកន្សែង ថ្លែងវិយោគ នេត្រា ជោរជោកដាបឱរ៉ា ទួញថា ឱព្រះជលចក្រអក្ខរា ស្តេចមិនមេត្តា ដល់ប្អូនឡើយ បើសិនណាជាស្តេចមិនមកតាមប្អូន ស្រីសុំចាប់កំណើតកើត ជាថ្មី ថាហើយក្សត្រីយ៍សូន្យសព្វសន្ទប់លង់ ពុំមានអ្នកណាឡើយ រក្សា

នាង មានអគ្គមហេសីពិភេក យល់នាងសន្លប់បាត់ស្មារតី នាងដងទឹកយកមកលាងភក្ត្រា ហើយអង្វរថា រាជក្សត្រិយ៍ កុំសោយសោកពេកអោយបែកចិត្ត នាងសិតាភ្ញាក់ ខ្លួនឡើងកាលណោ លានាងស្រីសុជាតាសុំក្សិណក្ស័យ នាងស្រីសុជាតា ឈោមនាងថា ប្អូនមាសបង កុំទាន់ផ្តាច់ជីវិតអោយសូន្យសុង ដ្បិតអីព្រះភស្តា ព្រះស្វាមីតាមនាងមកហើយ នាងសិតាឆ្លើយថា ព្រែងមិនមែនទេដឹង ទេប្រាកដហើយ មកនៅស្រុកសមរភូមិជ័យកែវមរកត អោយប្អូនកំសាន្តសោកឡើយ កុំកើតទុក្ខស្បើយ កំសាន្តសប្បាយទៅ ។ រឿងត្រង់នេះស្លេះទុកសិន ។

២៣- និយាយពីក្រុងទសមុខមារអសុរា ផ្ទំក្នុងក្រឡាទែនបន្ទំយល់សប្តិឃើញ ផ្កាតផេះ និងផ្កាតភ្លើង ជល់គ្នានឹងមាត់សមុទ្រ ដូច្នោះហើយក្រុងមារអសុរា ក៏រលឹកភ្ញាក់ស្មារតីថា ឱសប្តិអញយល់អស្ចារ្យ ត្រាស់ហៅពិភេកអសុរា មកទាយទំនាយសុបិននិមិត្ត ពិភេកអសុរា មកដល់ហើយម៉បម៉ាយថ្វាយបង្គំ ទើបក្រុងមារអសុរា ព្រះអនុជអូន អញយល់សប្តិ ឃើញផ្កាតផេះ ផ្កាតភ្លើង ប្រចឹកប្រជែង ប្រជល់គ្នា តើទំនាយទាយថាកាច ឬ ជា ពិភេកទូលថា មិនទាយទេ ក្រុងរាពណ៍ណាស្ងូរថា អូនអើយទាយចុះ មិនខុសត្រូវ ពិភេកថា មិនទាយស្មោះ ទាយទៅនឹងយល់ខុស

— ... Alors, oncle KAMBAN' l'attrape (SUKKHACARY), la met sur le char royal, part rapidement, conduit les rājasi, les lions fabuleux. Les troupes Yăk escortent le Prince à grand fracas... (§. 41)





— LAK-MN touché par les flèches d'INDHOJIT ( §. 40 )



ព្រះចិន្តា ក្រុងរាពណ៍ថា អូនអើយទាយទៅ បើអោយខ្ញុំទាយ ត្រូវខ្ញុំថា អោយយករត្នរាជសិតា ទៅជូនព្រះរាមវិញ បើមិនយកទៅជូនទេ រលាយក្រុងលង្កា ព្រះរៀមព្រះជេដ្ឋាស្រឡាញ់តែកូនឯង ក្រុងរាពណ៍ខ្ញាល់ណាស់ ដកស្រោមជើង បោកក្បាលពិភេកអសុរា ពិភេកអន់អាក់ខ្ទក់ចិន្តា គិតថា អង្គអញពូជព្រហ្មអម្បូរព្រហ្ម មិនគួរហ៊ានយកស្រោមជើងមកបោកក្បាល ពីថ្ងៃនេះទៅ មិននៅទេ ចូលទៅខាងព្រះនារាយណ៍រាមា បំផ្លាញពូជពង្សអោយអស់គ្មានគង់ អសុរា ថាហើយក៏រត់ចុះចេញ ចូលខាងព្រះរាមាមហាក្សត្រថ្លៃ ដល់ហើយឱនកាយថ្វាយបង្គំ សុំរាប់ជាខ្ញុំមហាក្សត្រថ្លៃ សូមជ្រកកោនព្រះបាទា ជាប្រធាន ទាល់តែអស់អវសាននៃជីវិត ថ្ងៃនោះព្រះនារាយណ៍រាមា ក៏បានឃើញពិភេគអសុរា ក្រាបទូល ក្សត្រាព្រះនរបតី យើងមិនជឿទេអសុរា ក្រែងបាមកអោយនូវយោបល់ ទាល់តែអ្នកស្បថអោយយើងទើបយើងជឿនាក់ ពិភេកថា ត្រូវដុតសំណ ឬស្ពាន់ អោយព្រះភេគសាបៀមនឹងមាត់ បើចិត្តត្រង់ប្រាកដកុំអោយក្តៅ ថាហើយយកសំណស្ពាន់ងជ័រ អោយព្រះភេគសាក៏បៀមទៅ ថាបើចិត្តត្រង់កុំអោយក្តៅ ទើបព្រះចោមចៅអធិស្ឋាន ។ ពិភេកបៀមទៅកាលត្រជាក់ដូចទឹក អសុរាមានរិទ្ធីព្រះឥន្ទ្រា ព្រះនារាយណ៍រាមាជឿជាក់ គ្មានសង្ស័យ

ថាឱមាសថ្លៃ ប្អូនមាសបង បងស្រឡាញ់ស្រីលក្សណ៍អនុជាយ៉ាងណោ ស្រឡាញ់ប្អូនឯងដូច្នោះហោង យើងទាំងអស់គ្នា ដូចជាកើតពីពោះម្តាយតែមួយផង ប្អូនអើយ អញបងគ្មានសង្ស័យ ។ ពិភេកហោរាទូលក្សត្រថ្លៃ ស្បថអោយជឿស្នេជ័យកាត់សិរសា ខ្ញុំស្បថនេះមានខបី ស្បថមួយកុំអោយកើតជាស្រីរូបល្អ ស្បថមួយទៀតកុំអោយកើតជាចៅអធិការ ស្បថមួយទៀតណាកុំអោយកើតជាស្តេចសោយរាជ្យ ។ ព្រះនារាយណ៍ឮហើយ ត្រេកអរក្រៃ ប្អូនអើយនេះហើយហៅពេញត្រូវ ។

២៤- ថាដូច្នោះកូវភ្នំយោធា ពួកអ្នកទាំងអស់ចូរស្តាប់ការ សុទ្ធតែពួកស្វាប៉ែតសិបអខោ គឺរាជក្របីស្រីហនុមាន ទាំងបាសុគ្រីព នូវអង្គត់ ពិភេកហោរាហោរទិព្វចក្ខុ ព្រះនារាយណ៍បន្ទូលថា អ្នកទាំងអស់យើងគិតចង់ផ្តល់យោបល់យ៉ាងណា ឆ្លងទៅលង្កាអោយបានដល់ ពិភេកអសុរាក៏ក្រាបថ្វាយបង្គំ ព្រះបាទអវតារលើត្បូងសិរសា បើព្រះអង្គចងផ្តល់ទាល់តែមានក្បួន ។ ព្រះនារាយណ៍រាមា ទូលទៀតថា ឯក្បួនចងផ្តល់នៅត្រង់ណា ពិភេកអសុរា នៅកេសរជម្ពូពាន នគរនោះក៏ឆ្ងាយក្រៃហោះអំពីព្រឹកទាល់តែសុរិយាទោរទន់ទាបបាំងព្រៃ ទើបបានដល់ ថាហើយព្រះនារាយណ៍រាមាសួរទៅថា បើដូច្នោះ ប្រើអ្នកណាទៅយកបាន ពិភេក



ទូលថា ត្រូវប្រើអង្គត់ និងបាហនុមាន ទៅយកមកបានដូចប្រាថ្នា ថាហើយព្រះអង្គត្រាស់ហៅរាជក្របីពានស្វាសសុទ្ធ បាបុត្រព្រះពាយ សេនាព្រះនារាយណ៍អង្គអវតាន ហើយព្រះអង្គត្រាស់ហៅអង្គត់ អោយទៅនឹងសហនុមាន ហនុមានស្តាប់ម្ចាស់លើសិរសា ត្រាស់ប្រើអាត្មា និងបាអង្គត់ថាហើយ ចាប់ព្រះខ័នពេជ្រមកសៀតសឹក ថ្វាត់ថ្វាយបង្គំព្រះនរបតីហិចហោះ ផ្លេកផ្លោះលើវេហាស៍ រសៀលសុរិយាស្តេចបានដល់ កេសរជម្ពូពានភ្នែកសុទ្ធតែភ្លើង សំឡឹងទៅត្រង់ណារលាយជាពពុះផេះ កាលគ្រានោះស្តេចគង់លើទែនទី លើប្រាង្គមុនីសុវណ្ណា គង់លើទែនតាំងបល្ល័ង្កខ្ពស់ យក្សយង់ទាំងអស់ក្រែងចេស្តា មិនមានយក្សណាហានប្រឡងរិទ្ធិ ហនុមាន បាអង្គត់ ក៏បានហោះដល់ បានយល់ប្រាកដកេសរជម្ពូពានស្តេចនេះចំមហាមានរិទ្ធិ ហោះទៅចូលតាមទ្វារប្រាសាទ ព្រះបាទកេសរជម្ពូពាន គង់លើព្រះទីនាំងបល្ល័ង្កខ្ពស់ ហនុមានហោះដល់ មិនថ្វាយបង្គំយកកន្ទុយថ្វាយវង់ដ៏ច្រើន ដុំអោយខ្ពស់ស្មើបល្ល័ង្ក កេសរជម្ពូពានក៏ទពយល់ ស្វាសសុទ្ធធាត់ធំស្ពឹមស្ពៃ យល់អស្ចារ្យ ភ្នែកខំសំឡឹងអោយឆេះស្វា ហនុមានក៏ហាមាត់អោយជល់គ្នា ៖ ភ្លើងកេសរជម្ពូពាន នឹងភ្លើងហនុមាន ឈ្មួលឆេះក្នុងឋានកេសរជម្ពូពាន ភ្លើង និងភ្លើងជលគ្នា

វេលានោះ ភ្លើងមួយទៅរាំងរាមាអង្គត់ ក្រែងភ្លើងកេសរជម្ពូពាន ឈូលឆេះដល់ កេសរជម្ពូពានក្រេវក្រោធា ក្រោកឡើង ចាប់ចងស្វា ទាំងពីរធ្វើទោស ផ្តន្ទាដាក់ទ្រុងដែក អង្គត់ហនុមានក៏ត្រូវទ្រុង លុះ ព្រះអាទិត្យបាំងជ្រុងសមេរា លុះលង់រាត្រីស្ងាត់ អង្គត់ ហនុមាន បណ្តាច់ ប្រៀបរោង កេសរជម្ពូពានបាន ក៏ហែកទ្រុងដែកចេញមកខ្ចី ហនុមានស្រែក ជា នៃអង្គត់ រួតឡើងទៅទប់កំពូលប្រាសាទ ហនុមានសូត្រសែកសណ្តំ មន្តគាថា អស់ពួកកុម្ភ័យសេនា មិនភ្ញាក់ប្រាណ ត្រូវសណ្តំហនុមាន ទាំងអស់ ទាំងពួកយោធាពលសេនា ពួកកងបរិវារពល ទាំងអស់ត្រូវ សណ្តំ ហនុមាន គ្មានសល់សោះ ម្ល៉ោះហើយទ្រង់គាស់ហែកផែនដី ហនុមាន ក៏ លើកព្រះនគរមកទាំងអស់ អង្គត់ឡើងទប់កំពូលខ្ចី បកដាក់ប្រទាបពន្លា ជ័យព្រះរាមា កេសរជម្ពូរពាន មិនដែលថ្វាយបង្គំអ្នកណាសោះ ក្រាបថ្វាយ តែអង្គព្រះអាទិត្យ ហនុមាន ចូលដល់ថ្វាយបង្គំព្រះរាម សូមអោយព្រះ អង្គប្រែក្រឡា ជាអង្គព្រះនារាយណ៍ ព្រះរាមាបែងភាគមុខបួន ដៃប្រាំបី ព្រះនរបតីប្រែក្រឡា អោយកេសរជម្ពូពានស្វែងបារមីតា សហនុមានស្តេច ស្វាក៏ហែកកែតុ លុះវេលាព្រឹកព្រាងស្វាងសម័យ បក្សាបក្សីយំសព្វសត្វ កេសរជម្ពូពានចាកទែនទី តើនឡើងថ្វាយបង្គំអង្គព្រះអាទិត្យ បើក



ភ្នែកគយគន់សព្វផែនដី ប្លែកទាំងនគររាជបូរី ហេតុអ្វីក៏អណ្តែតដល់ នេះ ថាហើយក្សត្រាអស្ចារ្យក្រៃ នេះគឺបារមីព្រះរាមា បើអញខំតទ័ពច្បាំង នឹងគ្នាជីវិតអញស្លាប់អន្តរាយ គួរអញចុះចូលសុំជ្រកកោន អញនឹងសុំ ថ្វាយកងយោធាទាំងអស់ គ្រួសារទាំអស់គ្នា ទើបអញបានជា បាន សេចក្តីសុខ ថាហើយទើបឱនកាយថ្វាយបង្គំ ក្រាបទូលជា ខ្ញុំក្រោមបាទា ថ្វាយទាំងទ័ព ទាំងកូនចៅ ទាំងខ្លួនរ៉ាប់នៅជាយោធា ព្រះនារាយណ៍រាមា ត្រេកអរក្រៃ មានព្រះបន្ទូលត្រាស់ទៅថា ហៃកេសរជម្ពូពាន អង្គក្សត្រា យើងអោយហនុមានទៅយកអ្នកឯងអោយឆាប់រ៉ា ដ្បិតយើងត្រូវការ ក្បួនចងថ្នល់ កេសរជម្ពូពាន ក៏យកក្បួនតថ្នល់ មកថ្វាយព្រះនារាយណ៍រាមា យើង បានក្បួនគ្រប់អស់ហើយ កុំបង្អង់ឡើយគិតម្ចីម្នា គិតចងថ្នល់ ឆ្លងទៅ ក្រុងលង្កា ថ្វាញក្រុងអសុរាអស់ពូជពង្ស ថាហើយពពួកពលស្វាច្រើនសល់ ជញ្ជូនថ្ម ចងថ្នល់ឆ្លងសមុទ្រ តយុទ្ធគ្នា ស្វាតូចថ្មតូច ស្វាធំថ្មធំ លើកសុទ្ធ តែភ្នំច្រើនត្រៀបត្រា ហនុមានរោមវាចងសុទ្ធតែភ្នំ មកដល់មហាសមុទ្រ ធំរលាស់ខ្លួន ឯភ្នំ នឹងភ្នំត្រូវរណ្តំគ្នា រលកខ្លាំងក្រៃ កក្រើកនគររាពណ៍ រលើងរលំជើងភ្នំបព្វតា សុទ្ធតែពួកស្វាជញ្ជូនថ្ម ជញ្ជូនបានច្រើនក៏ធ្វើ ស្ពាន សុគ្រីព ហនុមាន កេសរជម្ពូពាន សុទ្ធតែមេប្រធាន ជានាយ

គេ ប្រើអស់ពលស្វា ប៉ែតសិបអខោ សុគ្រីព ហនុមាន កេសរជម្ពូពាន នូវមេអង្គត់ ជញ្ជូនថ្មភ្នំមកច្រើនសល់ ទម្លាក់ភ្នំធំ ក្នុងជលសា រលកអស្ចារ្យ កោលាហល ក៏បានពាក់កណ្តាលជិតនឹងដល់ ។

២៥- កាលណោះក្រុងទសមុខអសុរា ជំនុំយោធាដប់ពីអង្គប្រាណ អស្សូរត្រីមុខ អស្សូរត្រីកាយ មហាកាយយក្សា ចូលមកគ្រៀបព្រាពាល់ ស្តាប់សូរសៀង យើងពិតយ៉ាងណោ បរមុស្សចេរផ្តល់ ថាបើយក្រុងរាព-ណោសូរ ត្រាស់ហៅ កុំភិការយក្សា "យក្សខាងជើងទឹក" យើងគិតយ៉ាងណោកុំអោយមនុស្សពេផ្តល់ដល់ កុំភិការក៏ម៉បម៉ាយថ្វាយបង្គំ ក្រុងទសភក្ត្រា ត្រីវិងបងពេជ្រផ្លែកផ្លោះហោះសំដៅ ប្រាស់ខ្លួនដេកទៅស្រូបទឹកសមុទ្រ អោយរីង អោយស្រុតដីស្ងួតអស់ កាលណោះ ស្រុកសមរភូមិជ័យកែវ មរកតញាប់ញ័ររន្ធត់រអោយអស្ចារ្យ ព្រះនារាយណ៍រាមា ឆ្ងល់ណាស់ ហៅពិភេគអសុរា ហេតុអ្វីអស្ចារ្យញ័ររន្ធត់ ពិភេកក៏ដោះក្ការឈ្នួនពីក បូក គុណជើងហោលេខ គុណប្រាកដ ក្រាបទូលព្រះនារាយណ៍ រាមាជាអធិបតី មានយក្សមួយធំក្រៃ ឈ្មោះកុំភិការ ដេកស្រូបទឹកសមុទ្រ អោយទឹករីងហែងហួតស្ងួតក្រៀមអស់ ព្រះនារាយណ៍ត្រាស់ថា បើដូច្នោះយើងប្រើអ្នកណាទៅបំផ្លាញបាន ត្រូវប្រើមាអង្គត់ អោយហោះចំហុតទៅលង្កា



អង្គត់សៀតសិកយកព្រះខ័នថ្លា ហោះហើយប្រែក្រឡាជាផ្តែស្អុយ ដង្កូវចោះប្រប្រុក ធ្លាក់ចុះចូលក្នុងមាត់ អសុរា ដកដង្ហើមមិនរួចធ្លាយទឹកចេញ ទឹកពោរជោរជន់ ជាពពុះ រលកស្នានស្នោះបែកគ្រែងគ្រៀបត្រា ឯយក្សកុំភិការក៏ក្រោករត់ដោះចេញ ។ កើតទឹកដូចដើមវិញ ពានរក៏បានលោតលេងសប្បាយ ។

២៦- គ្រានោះ ហនុមានរើតឆាយ សេនាអង្គព្រះនារាយណ៍ ក៏ជញ្ជូនភ្នំច្រើនសល់ ទំលាក់កណ្តាលសមុទ្រយង់ឃ្នង ចងថ្នល់បៀតដល់ក្រុងលង្កា ក្រុងមារក្តួលក្តៅឱរា ប្រាប់នាងមច្ឆានព្វថា ហៃនាងព្រះរាជបុត្រី នាងឯងទៅហៅពលត្រី ទៅជញ្ជូនថ្មមនុស្សអោយអស់ កុំអោយចងថ្នល់ មកដល់នគរយើងបាន នាងមច្ឆានព្វបានស្តាប់ អង្គព្រះបិតាអវតាន ហៅ ពលត្រីទាំងប៉ុន្មានអោយទៅជញ្ជូនថ្មមនុស្ស ត្រីក្នុងសមុទ្របានស្តាប់ សុវណ្ណី នាងមច្ឆានព្វ ស្តេចត្រីអង្គអាត្មា ត្រីមកទាំងអស់ចូលមកគ្រៀបត្រា កហោ. កម៉ាល់. រាជរ៉ស់. មកពាំថ្មដា ពាំអស់គ្មានសល់ លុះលង់ព្រឹកព្រាងហើយណា បាបុត្រព្រះពាយសេនាព្រះនារាយណ៍ សហនុមាន នាំអស់ពលស្វាត្រួតត្រាមើល ថ្នល់បាត់អស់គ្មានសល់មួយសោះ ឡើយណា សហនុ-មាន ក្រេវក្រោធសោះសា សត្វអ្វីមកពាំថ្មដា ជញ្ជូនអស់គ្មានសល់

ប្រើអស់ពលស្វា អោយវិលមកណោទៅឋានមណ្ឌល ហនុមានជ្រែកនព្វមហាសមុទ្រ នៅថ្មមួយប្រាកដប៉ុនថ្មភ្នំសោះសា ហនុមានទៅពួនលាក់ខ្លួននឹងថ្មដា មានស្តេចត្រីមួយធំប៉ុនភ្នំសោះសា នាមឈ្មោះហៅថា ស្តេចត្រីកម៉ាល់ មកពាំថ្មធំ ហនុមានស្ទុះភ្លែតចាប់ត្រីជិះភ្លាម ដៃហែកស្រកីហើយសួរត្រីថា អ្នកណាប្រើឯងមកយកថ្មអញ ស្តេចត្រីឆ្លើយថា នាងសុវណ្ណបច្ឆាមានសុវណ្ណី ប្រើខ្ញុំមកជញ្ជូនថ្មបនុស្សាទាំងពីរពង្ស ។ ហនុមានយកការនាងសុវណ្ណមច្ឆា នៅត្រង់ណា ព្រះស្តែងប្រាប់អញ ត្រូវឯងនាំអញទៅនាងមច្ឆា និត្យនៅទីឋានត្រង់ណា ? ជិះស្តេចត្រីកម៉ាល់ ទៅដល់ឋាននាងសុវណ្ណមច្ឆា មើលឃើញប្រាសាទមាស ឱកាសច្រាលឆ្អៅ មច្ឆានព្វ នៅនឹងបាតសមុទ្រ ស្វាសហនុមានចូលថ្កាន ចំហុតនេះហើយ ប្រាកដហៅនាងមច្ឆានព្វ (បើកទ្វារប្រាសាទទឹកមិនហ៊ានចូល ) ចូលដល់ចាប់នាងមើលអស់រូបរាង នាងល្អប្រាកដ ប្អូនអើយ បងស្វែងរកស្រីគ្រប់លក្ខណ៍ បងឃើញនូនអ្នកចាប់ចិត្តមេត្រី ហនុមានលោមលួងថា ដួងព្រលឹង អញបងរំពឹងជាអគ្គមហេសី ចូរប្អូនរួមរស់ក្នុងការលោកិយ ហនុមានក៏បានរួមរស់នឹងនាងមច្ឆានព្វ នាងក៏ភ្លេចស្រីស្នំក្រមការហ្វូងទាសី រាជក្របីស្រីហនុមាន ក៏ភ្លេចរាជការក្នុងផែនដី បានរួមមេត្រីនឹងនាងសុវណ្ណមច្ឆា អូន



អើយ អូនស្រីអូនស្រឡាញ់ប្តីប៉ុណ្ណា ? នាងស្រុវណ្ណមច្ឆាថា ស្រឡាញ់ប្រហែលមាតា បិតា ស្នូនគ្រង ហនុមានសួរទៅថា ប្តី និងបិតា ស្រឡាញ់អ្នកណោធ្ងន់ជាង សុវណ្ណមច្ឆាថា ខ្ញុំស្រឡាញ់ប្តី ហនុមានថា បើប្អូនស្រឡាញ់បង ត្រូវនាំហ្វូងត្រីអោយយកថ្មទៅវិញដូចដើម នាងសុវណ្ណមច្ឆានព្វ ក៏ហៅអស់ហ្វូងត្រី អ្នកណាយកថ្មត្រង់ណា អោយយកទៅរៀបវិញ ។ ពេលមួយ ក្នុងពេលរាត្រី ឯអស់ហ្វូងត្រីយកថ្មទៅរៀបវិញបាន សឹងកើតជាថ្នល់បៀតជិតទៅដល់ក្រុងលង្កាបូរី ។

២៧- ក្រុងរាពណ៍ក្តៅក្លួលឆេះឆួលក្នុងឱរា ប្រើទៅយក្សានាមឈ្មោះ កុម្ភណ្ឌ មានព្រះឱង្ការត្រាស់ថា កុម្ភណ្ឌអូនឯង ទៅបំផ្លាញអស់ថ្នល់មនុស្សា កុម្ភណ្ឌយក្សាស្តាប់អស់អវតាន ទាញដំបងពេជ្រហោះធ្យានជ្រៀតជ្រែកជលសា ក្រុងកុម្ភណ្ឌនិមិត្តសុទ្ធតែផលា ផ្លែដោយថ្មដា កូលែនសេរមាន់ ផ្លែគុយធំ ៗ ទំក្រហមអស្ចារ្យ ផ្លែដោយថ្មដាច្រើនក្រៃពេកពន់កុម្ភណ្ឌជ្រែកទៅនៅក្រោមស្ពានថ្មមណ្ឌល បើពានរដើរដល់រលាស់អោយធ្លាក់ទៅកណ្តាលសមុទ្រធំ កាលណោះព្រឹកព្រាងកាលណា ហនុមានក៏នាំអស់ពលស្វាត្រួតត្រាថ្នល់ កេសរជម្ពូពាន មេអង្គត់ ពានរ តូចធំ ស្វាច្រើនសល់ នាំគ្នាដើរដល់ស្ពាននោះណា ពួកស្វារត់បេះ ប្រឡេះផលា

ហនុមានប្រាប់អោយប្រយ័ត្នក្សិណក្ស័យ ស៊ីមួយងាប់មួយ ស៊ីពីរងាប់ពីរ ឱភាណ កុំស៊ីយក្សវាបំពុល ខ្លះក្តិចខ្លះខ្វាំ ខ្លះហៀបទឹងខាំ អស់មួយផលា ព្ ហនុមានថា ស្វាបោចចោលអស់ ដើរទៅទៀតបន្តិច ឃើញស្ពានខ្ពស់ណាស់ ហនុមានមើលកុម្ភណ្ឌបាតសមុទ្រ យកដើមទ្រូងទល់ថ្មខ្ពស់បំផុត គ្រាស់ហៅមារអង្គត់ អោយហុចព្រះខ័ន អង្គត់ក៏ហុចព្រះខ័នជ័យ ហនុមានចាក់ទំលាយថ្មដា ព្រះខ័នមុតថ្លាត្រូវយក្សក្សិណក្ស័យ ស្ពានរាបដល់ដីដូចពីដើមវិញ កុម្ភណ្ឌនោះក្សិណក្ស័យនៅក្រោមស្ពានថ្ម អាធិកម្ម អាធិពលឡាំត្រួតទៅឃើញកុម្ភណ្ឌក្សិណក្ស័យ ទៅក្រាបទូលក្រុងទសភក្ត្រមារថា មាកុម្ភណ្ឌក្សិណក្ស័យទៅហើយ ក្រុងរាពណ៍ថា ឱកុម្ភណ្ឌប្អូនអើយកាលយើងនាំគ្នាទៅវាយឋានសួគ៌ា ឥន្ទព្រហ្មទេវតា ក៏ខ្លាចយើងទាំងអស់ ឥឡូវពេលនេះមកចាញ់ដៃស្វាស ថាហើយក៏គត់ព្រះឱរា សោកាផែនដីនឹងរលុះ ។

២៨- ថ្លែងពីព្រះនារាយណ៍រាមា ស្តេចអោយពលស្វាចងថ្នល់តទៅទៀត កេសរជម្ពូពាន និលឯក និលខាន់ ឃុនទល់ ឃុននិល នូវិសហនុមាន បាសុគ្រីព អង្គត់ ជួបជុំពួកកងសេនា ទាំងពីដណ្តប់អង្គប្រាណ ក៏បានិរះរ៉ុជំនុំចងថ្នល់ ថាដូច្នោះហើយក៏ចងថ្នល់ សហនុមានដៃលេងចត្រង្គជើងវា ចាំទទួលថ្ម ពួកស្វាទាំងប៉ែតសិបអខោ ប្រឹងរត់ប្រសាចជញ្ជូនថ្ម



— Apparition du Yâk AKULKĀLKHINĪ — Ordalie de SETĀ
— INDR transformé en buffle — Arrivée de SETĀ à l'ermitage
— Sept filles célestes viennent assister SETĀ. (§. 72, 73)



— Cadet, Neuy ! Voilà bien le foie de nān SETĀ ! Un foie tellement gros et noir ... ( §. 72 )



កាលណោះ និលឯកកូនកេសរជម្ពូរពាន ក៏បានលីថ្មហុចទៅអោយហនុមាន ហនុមានក៏យកជើង មកឈោង ម្លោះហើយ និលឯកក៏ក្រេវក្រោធ កោលាហល កាប់ចាក់គិតច្បាំងគ្នា ថាយើស្វាសមាក់ងាយអ្វីយើង យកជើងមកឈោងថ្ម យើងនេះពូជពង្សវង្សរាមមហាក្សត្រ ហនុមានថា យើនិលឯកកុំក្រេវក្រោធា ដ្បិតដៃគ្នាកំពុងអុកចត្រង្គ ថាតែម្លោះហើយក៏ច្បាំងគ្នា ។ ព្រះនារាយណ៍រាមាស្តេចបញ្ឈប់អោយពិភេកអសុរា គន់គួរដោយនូវទិព្វចក្ខុ ក៏យល់ថា អ្នកទាំងពីរខែឆ្នាំចាក់គ្នា ធ្វើការយល់ជាពុំបាន ម្លោះហើយអង្គក្សត្រក្សាន្តដាក់ទុក ចាត់និលឯកទៅធ្វើទ័ពបាយ ហនុមានទ័ពសឹក លុះលង់បានដល់ក្រុងលង្កា ម្លោះហើយព្រះនារាយណ៍រាមា ប្រើកេសរជម្ពូពាន អោយធ្វើកងក្រវែល ម្លោះហើយសហនុមានក៏នាំស្វាធំៗ ត្រួតត្រាខាងថ្មល់ ។ ឈប់ស្លេះត្រង់នេះសិន មិនចរចា ។

២៩- ទៅនិយាយពីក្រុងទសមុខមារអសុរា ភ្ញុំពួកសេនាទាំងដប់ថា ព្រះនារាយណ៍រាមា មនុស្សាទាំងពីរ ចងថ្នល់មកដល់នគរយើងហើយបើ ដូច្នោះយើងគិតធ្វើដូចម្តេចអោយបានការ ។ ប្រហិតហោរាថា ត្រូវប្រើអាធិកម្ម, អាធិពលឡាំ, អោយយាមល្បាត ក្រែងមានពួកស្វាសចូលមកប្លម ។ អាធិកម្ម, អាធិពលឡាំ ក៏ជិះរាជសីហ៍មួយម្នាក់ យាមល្បាតឥតមាន

ឈប់ឈរក្នុងនគរក្រៅនគរ បររាជសីហ៍ជិះបញ្ចាំ ។ និយាយពីនាងសិតាកល្យាណសោយសោក គ្មានស្រាកស្រាន្តក្នុងកាយា សូរ្យសាយ័ណ្ហបែរទៀបទៅនាងសិតា ទូលថា សុជាតាបងអើយ អូនមិនរស់នៅ ស៊ូស្លាប់ចាប់កំណើតជាថ្មី បើព្រះជលចក្រអក្ខរា ស្តេចមិនតាមរកយកប្អូនស្រី ខ្ញុំសូមលាក្ស័យថ្ងៃនេះហើយ ។ នាងស្រីសុជាតា ដែលថែរក្សាសិតា យល់ឃើញដូច្នោះហើយ អង្វរថា ប្អូនអើយកុំផ្តាច់ជីវិត ព្រះស្វាមីនៃនាងមកតាមហើយ តើពិភេកហោរាគន់គួរយ៉ាងដូចម្តេច នាងស្រីសុជាតាក៏បើកទិព្វចក្ខុ យ៉ាងដូច្នោះដែរ ។ រឿងត្រង់នេះនឹងស្ងេះនៅ ។

៣០- យើងនឹងថ្លែងទៅព្រះរាមា ទ្រង់ត្រាស់ហៅទៅពិភេកអសុរា រាពណ៍លួចនាងសិតាយកទៅទុកឋានណា ពិភេកអសុរា ក៏ដោះក្តារឈ្នួនពីក បូកគុណតាមភេទយល់អស្ចារ្យ ឆ្លុះយល់ត្រ័យលោកទាំងបីឥតកំបាំង ទើបទូលព្រះអវតាន ដែលរាពណ៍លួចនាងទៅ យកទៅទុកក្នុងច្បារ ទុកនាងជាយាក្នុងអុងមុង្គ ហៅថាបស្សុកជាទីធំណាស់ ។ ព្រះនា-រាយណ៍រាមាព្រាស់ទៅថា ហៃបាពិភេក ពិតយ៉ាងដូចម្តេច ។ ពិភេកហោរាថា អោយត្រាស់ហៅសហនុមាន នាំសារអោយបានទៅដល់នាងសារមួយព្រះទំរង់រត្តន៍ សារពីរប្រាកដព្រះកោសេយ្យា សារមួយគឺនំចំណី



ទាំងផលា បាយទឹកនំចំណើសព្វប្រការ អោយហនុមាន នាំសារទៅអោយនាង ។ ព្រះនារាយណ៍រាមាក៏បានស្តាប់ ពាក្យពិភេកហោរា មានឱង្ការហៅសហនុមាន សហនុមានក៏បានចូលមកថ្វាយបង្គំ ។ ព្រះនារាយណ៍រាមាក៏ត្រាស់ប្រើ ហៃបាហនុមាន អញប្រើឯង នាំសារទៅអោយកែវកល្យាណដែលនៅក្នុងអសោកឧទ្យាន ។ ហនុមានក៏បានស្តាប់ហើយ ដៃចាប់ព្រះខ័នសៀតសឹក វេចសំពាយម្លោះហើយហោះក្លាក្លៀវសំដៅត្រង់ ដល់ទៅមានភ្នំផ្លូវតែមួយ ដែលក្រុងរាពណ៍ យកយក្សទៅដាក់ យក្សនោះធាត់ធំប៉ុនភ្នំសោះសា អោយនាមឈ្មោះថា អាកបិលនោសី ខ្លួនវាជាត្រី ដៃវាជាយក្សក្បាលវាជាយក្ស ។ សហនុមានក៏បានទៅដល់ ក៏ឃើញយក្សនៅយាំងផ្លូវក៏នឹកឆ្ងល់ យីអាយក្សនេះធំណាស់វាឈ្មោះអ្វី អញគិតហោះចូលតាមពោះអាចម៏វា ឱមិនគួរសោះ គ្រឿងបរិក្ខារសុទ្ធតែនំចំណី ម្លោះហើយចោលសំពាយវំលងភ្នំ ហែកស្រកីចេញពីមាត់ភ្លាម ។ យក្សថា យើអស្វាសបើដឹងថាស្វាសកាច់កអាឯង ។ ហនុមានក៏ថា យើអាកបិលនោសី អញបើដឹងជាអាកបិលនោសី ហែកស្រកីអាឯង ថាហើយស្ទុះភ្លែតចាប់សំពាយភ្លាម ហោះភ្លឹងដិរង់ដល់ទៅនាងសិតា កំពុងវិយោគ នាងកំពុងសោយសោកទ្រង់ព្រះកន្សែង ហនុមានក្រាបថ្វាយបង្គំរាជក្សត្រី នាងក៏បានឃើញ

សហនុមាន ក៏មានព្រះសុវណ្ណីថា ហៃបាហនុមានបុត្រព្រះពាយ ថ្ងៃនេះម្តាយបានឃើញបា កូនអើយ ព្រះស្វាមីព្រះជលចក្រអក្ករា ទុក្ខសោកយ៉ាងណា ៗ កូនអើយ ។ ហនុមានទូលថា សុខសប្បាយទាំងអស់គ្នា ប៉ុន្តែសេចក្តីទុក្ខសោយសោកមករកនាង ថាហើយថ្វាយគ្រឿងបរិក្ខា ស្បៃព្រះកោសេយ្យាព្រះទំរង់ បាយទឹកនំចំណីសព្វប្រការ រួចហើយថ្វាយបង្គំលុតលានាងសិតា ហិចហោះយាត្រាមកវិញខ្មី ដល់មកនគរទសមុខមាអសុរី សហនុមាន លរិទ្ធអោយអស្ចារ្យ ដកដើមសួនច្បារផលដំណាំដកហើយ ក៏ដាំចុងទៅក្រោម ។ និយាយពីពួកពល សាកលយោធាក្រុងទសមុខមារ ឃើញស្វាសដកសួនឧទ្យានក្មានសល់សោះ ដកហើយដាំចុះទៅក្រោម ទសមុខមារក្រេវក្រោធសោះសោតខ្លាំងអស្ចារ្យ ស្តេចប្រើរាជអាមាត្យ អោយទៅហៅក្រុងឥន្ទជិតអសុរា មកថ្លែងសរចាប់អោយបានអាមាត្យរូសរាន់ឆាប់ប្រាកដ ទៅហៅរាជបុត្រអសុរា មកហើយថ្លែងសរតាមឱង្ការ កើតជានាគរុំស្វាពីជើងដល់ក ក្រុងមារឆោឡោមកជុំជិត ខ្លះវាយខ្លះដំលំអិតក្រៃ ព្រះពាយបក់បោកមកត្រូវ អង្គសេនាព្រះនារាយណ៍ក៏ក្រោកវៃ ម្ល៉ោះហើយវាយទៀតទន់ដូចសំពត ព្រះពាយបក់មកធាត់ធំក្រៃកើតជាបុត្រព្រះពាយរិទ្ធីសាយ ថាបើឯងចង់សំឡាប់អញ ត្រូវចាប់ចង





អោយយកអញទៅបុកនឹងត្បាល់ ចាប់ចងបានហើយនាំគ្នា សែងយកស្វាសទៅបុកលេងនៅពេញត្បាល់ បុកណាស់កើតណាស់ធំលើសដើម បុកណាស់ប៉ោងណាស់គ្មានងាប់ឡើយ វាផតពោះវាជ្រៅដូចអណ្តូងប្រេង ថាមហាយក្សឯងយក អង្រែមក ម្ល៉ោះហើយក្រុងមារយកអង្រែមកបុកណាស់ខ្លាំងណាស់ប៉ោងលើសដើម ។ ហនុមានឆ្លើយថា បើចង់អោយស្លាប់យកអង្រែដែកធំមកដាក់ ហើយឡើងទំទាំងប្រុសទាំងស្រី ។ ក្រុងយក្សខ្មីក៏ធ្វើតាមនាំគ្នាឡើងទំ ទាំងខ្មៅខ្ចូល យក្សខ្លះតូចធំសក្តិច្រើនក្រៃ នាំគ្នាព្រួតដៃទំអង្រែ ហនុមានធ្វើពោះប៉ោងឡើង អង្រែដួលបាក់កបាក់ចង្កេះ ខ្លះបែកក្បាលបាក់ជើងដៃ យក្សខ្លះក៏ក្ស័យជន្មមរណា ហនុមានក្រោកឡើងស្រែកទៅថា បើឯងចង់អោយអញ ស្លាប់អោយយកសំពត់មករុំខ្លួនយកប្រេងអុជសហនុមានកភេទខ្លួនអោយប៉ុនភ្នំ ប៉ុនអង្គព្រះព្រហ្មនៅសួគ៌ា អស់ពួកបណ្តាក្រមការក្រុងមារយកសំពតមករុំ សហនុមាន រុំទៅ ៗចេះតែខ្វះ ខ្លួនសហ-នុមាន ធំណាស់រុំមិនបានសំពត់ក្នុងវិមានក៏រុំពុំអស់ ខ្លួនមួយព្យាមនៅមួយព្យាម ខ្វះមួយចំអាម រុំមួយចំអាម នៅមួយចំអាម រកសំពត់គ្មានក្នុងនគររាពណ៍ ស្រីស្នំក្រមការ ក៏ស្រាតដោះយកសំពត់មកជួយរុំ ហនុមានក៏មៀងមើលសុដនក្បំក្បោះ (ស្ទូត) ស្បៃស្តើងប៉ើងចេញ ដួងដោះនោះណាទំនេរ

ទៅ សហនុមានទៀងទតមើលទៅ គួរអោយចាប់ចិត្តស្និទ្ធស្នេហា *ហនុមាន* អញមិនដែលឃើញនាងមន្ទោគិរីសោះ ឃើញតែសុដនដួងដោះក្រុមព្រួសារ ម្ល៉ោះហើយហនុមានមានពាក្យថា បើចង់អោយជុំ មានតែភូសានាងមន្ទោគិរី ខឹងណាស់ក៏ស្រាតដោះបោះមកអោយ យកស្បៃនោះមកហ៊ុំរុំខ្លួន ស្បៃនោះក៏រុំហើយជុំខ្លួន ហនុមានមៀងមើល ដោះក្បំក្បោះពិសី មើលដោះពូកស្រី ឃើញទាំងអស់ ប្រាប់អោយមហាយក្សយកប្រេងមកចាក់អុជចុះ ។ ក្បិណេណោះក្រុងមារចាក់ប្រេងអុជ ភ្លើងឆេះសន្ធោសភ្លឺនគរក្រុងមារ ។ សហនុមាន ក៏ហោះរលាស់ខ្លួន លើវិមានក្រុងអសុរា ឆេះប្រាសាទមួយលត់មួយ អោអស្ចារ្យ ភ្លើងឆេះត្រៀបត្រាលើវិមាន ឆេះនគរទសមុខមារជាខ្លាំងក្រៃ លត់បានឯណេះឆេះឯណោះ ឆេះប្រាសាទទាំងអស់ក្នុងវិមាន អុជរួចហើយក៏ហោះចេញ ភ្លើងឆេះ នឹងស្បៃនាងមិនរលត់ឡើយ ឆេះកន្ទុយហនុមានជាខ្លាំងក្រៃ ជាភ្លើងវិស័យស្បៃរបស់នាង ជ្រលក់នឹងទឹកសមុទ្រពុះខ្លាំងក្រៃ ឆ្លាមករ សត្វ ត្រសែក៏ស្លាប់អស់ ក្សិណណោះក្នុងព្រៃនោះមានឥសីចេញមកអោយឃើញ បង្ហាញខ្លួន ហនុមានសួរថា តាឥសី ឯណាមានអណ្តូងប្រេង ឥសីចង្អុលមករន្ធមាត់ វាយកកន្ទុយញាត់រលត់ភ្លើងធ្លានសល់ ស្វាសហនុមានឆ្លើយថា ឥសីពូកែជាងអញ ម្ល៉ោះហើយអញតាម



ទៅល្បងរិទ្ធី ទៅដល់មានសាលាមួយ កើតជាកូនស្វា អង្គុយលើសាលាស្វាតូចពិត សេពមន្ត គាថា កាឡាខ្លួនធំម្តងបន្តិចៗ ធំទៅ ធំទៅ ធំពេញសាលា ម្ល៉ោះហើយ សូត្រមន្តគាថាបាក់សាលាប្រាវ ហនុមានក៏ថា លោកតាឃ្លានបាយណាស់ ឥសីឆ្លើយថា ស្វាសឯងឃ្លានបាយ ម្ល៉ោះហើយអញនឹងសូន្យបាយមួយពំនូត សូធ្យមន្តគាថា បានពូតអោយស្វាស៊ី យើងឯងហាមាត់ទៅអញបញ្ចុក អស់មួយពុំនូតនៅមួយពំនូត ទាល់តែពោះឡើងធំឱបពុំជុំហនុមាន ក៏ឆ្អែតស៊ីពុំអស់ ឥសីថា ហាមាត់ទៅអញបញ្ចុកទៀត ហនុមានឆ្លើយថា ខ្ញុំសុំចាញ់ហើយស៊ីពុំអស់ទេ ហនុមានពោលថា លោកតាខ្ញុំស្រេកទឹកហោស់ ឥសីចង្អុលទៅស្រះអោយហនុមានក្រេប ហនុមានក្រេបហើយក្រេបរីងទឹកមួយស្រះ ឥសីខ្វាល់ណាស់ទាញច្រត់ខ្មៅ សូធ្យមន្តគាថាអានបាលី បោះទៅខ្មីកើតឈើងទាម មាត់ទាំងសងខាងឈាមច្រើនណាស់ យកដៃទៅបេះជាប់នឹងដៃ យកជើងទៅបេះជាប់នឹងជើង សត្វឈើងរ៉ុតជិតខ្លួន ស្វាស្រែកហៅលោកតាមកអោយជួយ ឥសីមកដល់ហើយយកដៃបេះឈើងកើតច្រត់ ស្វាសហនុមានបានក្រោករួច សហនុមានក៏ថ្វាយបង្គំលោកតា ខ្ញុំព្រះករុណាសុំរាងចាលពីថ្ងៃនេះតទៅ ឋានណាដែលឥសីនៅមិនហ៊ានល្បងរិទ្ធីឡើយ ថាហើយក៏ថ្វាយបង្គំលាឥសី វិលវិញមកខ្មី

ថ្វាយបង្គំព្រះរាមា ទូលមួយបានថ្វាយនាងសិតាកល្យាណ នាំសារទាំង ប៉ុន្មាន ក៏បានថ្វាយនាង នាងសោយសោកក្សិកខ្សួលគួរអោយអាណិតម កព្រះបិត្រជាប្រធាន ព្រះរាមត្រេកអរថា ហនុមានយើងបានបាងជា អ្នកនាំផ្លូវ ដឹងទីកន្លែងដែលនាងនៅ ។ ហនុមានទូលមួយថា បានចូលទៅ ក្នុងនគរភាពណ៍ បានបំផ្លាញសួនច្បារផ្កាដំណាំ ឥន្ទជិតថ្លែងសរចាប់បាន យកសំពត់រុំប្រាណ យកភ្លើងអុជអាល ខ្ញុំហោះរលាស់ឆេះវិមានយក្សផង គ្រប់ប្រាសាទកើតទុក្ខា ទូលមួយទៀតណាកាលក្រុងមារអសុរា យកទៅ ដាក់បុកនឹងត្បាល់ អង្រែដែកដួលទៅវាយយក្សាខ្លះស្លាប់ ខ្លះរស់ ដួលបែក ក្បាល ។ ព្រះនារាយណ៍រាមាបន្ទោសហើយត្រាស់ទៅថា ប្រើអោយនាំសារ ទៅអុជនគរគេ ខ្លាចក្រែងកើតហេតុដល់សិតា ទោះហេតុម្តេចម្តានៅពុំបាន ថ្ងៃក្រោយទៀតកុំធ្វើយ៉ាងដូច្នោះ ។

៣១- កាលណោះកន្លងថ្ងៃបីទិវា ព្រះនារាយណ៍រាមាត្រាស់ហៅ អង្គត់ អង្គត់ឮហើយចូលថ្វាយបង្គំ ព្រះអង្គត្រាស់ថា បាអង្គត់ អញប្រើ ចំហុតអោយនាំសារ អោយបានដល់រត្នរាជសិតា ព្រះអង្គទ្រង់អោយ អាមាត្យ យកនំចំណី មកមូលផលា ទាំងស្បៃកោសេយ្យាព្រះទំរង់ វេចជា សំពាយអោយអង្គត់ អង្គត់ ចាប់ព្រះខ័ន កាន់ស្បៀតសឹក វាថយហើយ



ក្រោកកាន់គ្រឿងអលង្ការ អង្គត់ហិចហោះផ្លោះវេហាស៍ រសៀលសុរិយា ទើបបានដល់ហើយឱនកាយ ថ្វាយបង្គំ ថ្វាយសារព្រះទំរង់ព្រះកោសេយ្យា នូវមូលផល្លានំចំណី នាងសួរថា ស្វាសឯងឈ្មោះអ្វី អង្គត់ឱនកាយប្រាប់ទៅ ថា ខ្ញុំនេះឈ្មោះបាអង្គត់ សេនាអង្គព្រះនារាយណ៍ ថាហើយឱនថ្វាយបង្គំ រត្នក្សត្រី វិលវឹងមកខ្មី ហោះសំដៅចូលត្រង់នគរភាពណ៍ស្តេចគង់នៅ អង្គត់ចូលទៅដល់ ភាពណ៍ហើយ ក្រុងភាពណាសួរក៏បានឃើញ ក៏ត្រាស់ថា ហៃបាអង្គត់ បាឯងជាបុត្រនាងមន្ទោគីរី អញត្រូវជាជនកឪពុកចុងបាឯង ហើយពួកស្រីស្នំ ក្រមការ យកអស់នំចំណីដាក់តុមាស យកមកអោយបា អង្គត់ បរិភោគ្គា អង្គត់អង្គុយពែនស៊ីចំណីឆ្អែត ហើយគន់គិតទៅថា មើលទៅស្តេចភាពណ៍ កំពុងទ្រង់លង្ការ នូវព្រះសួរងគ្រឿងសង្វារ អង្គត់ស្ទុះ ភ្លែតចាប់មកុដ កន្ត្រាក់ពីសិរសា ក្រុងភាពណ៍ទាញដំបងពេជ្រ អង្គត់ក៏កែង ត្រូវក្រុងទសមុខមារ ត្រូវកែងអង្គត់ញ៉ូរខ្លួនរន្ធត់សន្ធប់លង់ អស់ពួកស្រីស្នំ ឃុំរំពង យកដៃគក់ទ្រូងកាលណោះណា ទ្រូងទសមុខមារបានភ្ញាក់ខ្លួន ថា អាជូជាតិចិត្តធំក្រៃ គេអោយចំណីបរិភោគ្គា វាហ៊ានធាក់គេអោយមរណា អានេះកុំទុកវាសំលាប់អោយក្ស័យ ថាហើយហៅភត្តនេស អនុជប្អូន ហោះ ពាមអាជូជាតិចោរសាមាន្យ សំឡាប់វាអោយបានកុំទុក ឡើយ ។ ភត្តនេស

ឮហើយចាប់ដំបងពេជ្រ ផ្លេកផ្លោះហោះសំដៅ ហោះលឿនដូចព្យុះ សូរស័ព្ទខ្លាំង អង្គត់ឮហើយដើរមើលក្រោយ ឃើញអស់ពូជពង្សអង្គអសុរា អានេះពាមមកសំឡាប់អញមិនខានទេ យីអញត្រេកអរណាស់បានជួបវាសំអាងមរណាមិនលែងដៃ ថាហើយអង្គត់ហោះវិលវៃ វិលមកក្រោយវិញអោយប៉ះគ្នា ភត្តនេស វាយនឹងដំបងពេជ្រ ក៏គេចផុត អង្គត់ចាប់បានសង្កត់ក កាត់នឹងព្រះខ័នកាន់សិរសា ចោលក្នុងសាគរមហាសមុទ្រ កាលណោះ អាធិកម្ម. អាធិពលឡាំ ក៏បានឃើញ មាភត្តនេស ចាញ់ដៃអាស្វាស កាត់កបោះទៅក្នុងបាតសមុទ្រ បររាជសីហ៍ពីរចំហត ក៏ចូលក្នុងក្រុងលង្កា ដល់ហើយម៉បម៉ាយថ្វាយបង្គំ ក្រុងមារសួរថា ហៃអាធិកម្ម អាធិពលឡាំ ថ្ងៃនេះអញក៏បានឃើញឯង មានការអ្វី អាធិកម្ម. អាធិពលឡាំ ក៏ក្រាបទូល ឥឡូវមាភត្តនេសក្សិណក្ស័យហើយ ។ ក្រុងរាពណាសួរយកដៃគក់ដើមទ្រូង ឱប្អូនអើយ កាលទៅវាយឋានសួរគិដប់ប្រាំមួយជាន់ ទេវបុទ្រ ទេវតា ក៏ផ្អើលអស់ ឥឡូវនេះមកចាញ់ដៃអាស្វាស ថាតែប៉ុណ្ណោះទ្រង់សោកា ។ ថ្លែងពីបាអង្គត់ ខំហោះចំហុពដល់ព្រះរាមាដល់ហើយក៏ម៉បម៉ាយថ្វាយវន្ទា ព្រះបរមភក្តិរាជក្រសត្រ ទូលមួយកាលបានថ្វាយផលនាងនឹងព្រះទំរង់រត្ន ទូលមួយទៀតថា បានចូលនគរក្រុងយក្សា



ទូលមួយកាលរាពណ៍ទ្រង់គ្រឿងអលង្ការ ឆក់មកុដពីសិរសា ទសមុខក្រុងទសមុខមារ ក៏ទាញដំបងពេជ្រ វាយហើយអង្គត់គេចផុតធាក់ដួលផ្ងារ ទូលមួយទៀតណោ ភត្តនេសមកតាមត្រូវនឹងខ័នថ្លា កាត់ដាច់សិរសាចោលទៅមហាសមុទ្រយង់ឃ្នង ។ ព្រះនារាយណ៍រាមាត្រាស់ថា ហៃបាអង្គត់អញប្រើនាំសារ ហេតុអ្វីទៅធាក់គេ ហើយសំឡាប់ពួកកងសេនារបស់គេរើសហានុមាន បាអង្គត់ បើកើតហេតុភេទដល់សិតា អញយកទោសឯងដល់ជីវិតក្ស័យ ។

៣២- ពេលនោះក្រុងទសមុខមារ ក៏ភ្ញុំកងយោធាដប់ពីរអង្គ ប្រាហេអសុរត្រីមុខ អសុរត្រីកាយ មហាកាយយក្សា នៅប្រហ៊ិតហោរាកុម្ភិការ ឥន្ទជិត ជាបុត្រអសុរា ម្ល៉ោះហើយជំនុំគ្នាថា ហេតុដូចម្តេចបានមនុស្សចងថ្នល់មកសំលាប់កងសេនារបស់យើង កើតហេតុភេទមកអំពីរត្នរាជសិតា ។ ក្រុងទសមុខមារមានព្រះរាជមន្ទូលថា អ្នកណាមួយក្លែងកាយាជានាងសិតាបាន ។ កងយោធាសេនាទាំងអស់ថា គ្មានអ្នកឯណាទេ មានតែនាងបុញ្ញកាយ កាលដែលពិភេករត់ចូលទ័ពជ័យ ខាងព្រះរាមព្រះលក្សណ៍មនុស្សា ក្រុងទសភត្រ្តាក៏បាន់យកនាងបុញ្ញកាយ និងចៅសុខចារ្យយកទៅដាក់គុក ។ ក្រុងទសមុខមារ ក៏បានអោយពួកសេនា នាយ

គុក ទៅដោះនាងបុញ្ញកាយមកអោយឆាប់ ពួកនាងគុកក៏បានដឹងការហើយទៅដោះនាងបុញ្ញកាយអោយឆាប់ បញ្ចេញមកហើយ បុញ្ញកាយារាជក្សត្រីចេញទៅស្រង់ព្រះគង្គា យកទឹកអប់ត្រឡប់គន្ធពិដោរ ហើយនាងយកគ្រឿងអលង្ការ មកទ្រង់គ្រឿងព្រះភូសា រួចស្រេចហើយ ក៏យាងទៅកាន់ក្រុងទសមុខមារ ក្រាបថ្វាយបង្គំប្រណមទូលថា ហៅខ្ញុំមកតើមានការអ្វី ។ ក្រុងទសកណ្ឋថា អើក្មួយអើយ អញហៅឯងមក ថាឯងអាចប្រាណប្រែកាឡា ធ្វើជារាជសិតាបានដែរឬអ្វី នាងបុញ្ញកាយទូលថា ខ្ញុំក្លាយបានទាល់តែខ្ញុំទៅបំរើរាជសិតា បានប្រាំពីរថ្ងៃ ក្រុងទសមុខមារថា អើក្មួយអើយ ចូរយកគ្រឿងអលង្ការមកទ្រង់អោយល្អហើយ ទើបទៅបំរើរាជសិតាដែលនៅក្នុងអសោកអុងមុង្គក្នុងឧទ្យាន ។ នាងបុញ្ញកាយាក៏បានស្តាប់ក្រុងទសមុខមារ ដូច្នោះហើយក៏ថ្វាយបង្គំលា មកដល់ហើយក៏នាងយកទឹកអប់ត្រឡប់ទៅគន្ធពិដោរ លាបស្រឡាបរួចហើយ ក៏ត្រឡប់ហោះទៅកាន់អសោកអុងមុងសួនឧទ្យាន ដល់ហើយម៉បម៉ាយថ្វាយបង្គំនាងសិតា នឹងម្តាយរបស់នាង ។ នាងស្រីសុជាតាមួយទិវា ក៏បានឃើញរាជបុត្រីទៅគង់គាល់ដូច្នោះហើយថា អើបុញ្ញកាយកូនអើយ មានការអ្វី ក៏កូនមកគង់គាល់ព្រះមាតា ។ នាងស្រីបញ្ញកាយាក៏ទូលថា អោយខ្ញុំបំរើវត្តរាជសិតាបាន



— . . Braḥ Ang tire la flèche ĀRIDDHICĀND touche droit à à la poitrine le féroce Yāk Asūrā (THĀV CAKKRAVAT') . . . (§. 68)



— ... certaines cueillent des fleurs de lotus... vantent leur cueillette et se réjouissent entre elles ... (§. 72)



ប្រាំពីរថ្ងៃ ម្ល៉ោះហើយក៏នាងខំបំរើ មើលទ្រង់ទ្រាយរាជសិតា ទាំងរូបរាងនាងសិតា ព្រះភក្ត្រល្អដូចវង្សព្រះចន្ទ្រា នាងល្អដូចស្រីសូគាល័យ នាងបុញ្ញកាយទុកព្រះទ័យចាំប្រាកដ លុះគ្រប់ប្រាំពីរថ្ងៃហើយ នាងក៏ក្រាបលាព្រះមាតា នឹងនាងសិតាចេញផុតសួនឧទ្យាន ហើយសូធ្យព្រះគាថា ក្លែងកាយាអោយដូចនាងសិតា ហៀវហោះមកដល់ ក្រុងទសមុខមារ ក៏បានទតយល់ឃើញនាងបុញ្ញកាយា ក្លែងជានាងសិតា ដូច្នោះហើយ ស្ទុះមកជិតនឹងឱបរិត ហើយនាងទូលថា ខ្ញុំមិនមែនជានាងសិតាទេ ខ្ញុំជានាងបុញ្ញ-កាយា ក្រុងទសមុខភក្ត្រា ក៏ដើរមកគង់នៅកន្លែងដើមវិញ ថាអើបុញ្ញកាយអើយ អញនឹងប្រើក្លួយឯង អោយធ្វើជារូបនាងសិតា ស្លាប់អណ្តែតទឹកហើយអោយមានសត្វក្អែកស្រែកកេកកាក ៗ ស្រាវពោះវៀន បុញ្ញកាយាក៏បានស្តាប់ក្រុងទសភក្ត្រា ប្រើអាត្មាដូច្នោះហើយ ក៏ហិចហោះផ្លេកផ្លោះទៅដល់មាត់សមុទ្រ សូធ្យមន្តវិជ្ជាការ កាឡាខ្លួនជានាងសិតាស្លាប់អណ្តែតទឹកទៅ មានក្អែកទាំងពីរចឹកស៊ីពោះវៀន អណ្តែតទៅជាប់នឹងពន្លាជ័យព្រះរាមា បនត្រង់ដែលព្រះអង្គចេញមកស្រង់គ្រឿងក្រអូបគន្ធរស ។ ពេលនោះ ព្រះនារាយណ៍រាមា ថ្លៃអង្ការជ្រៀលជ្រៃព្រះសុរិយា ព្រះអង្គក៏ទ្រង់ហៅសហនុមាន កេសរជម្ពូរពាន បាអង្គត់ និលឯក និលខាន់ និល

ពេជ្រ ស្រីលក្សណ៍អនុជា ពួកពានរស្វាជាច្រើន ហើយព្រះអង្គក៏ទ្រង់យាងទៅវារិនព្រះគង្គា បើកព្រះការតាទតមើលឃើញឈូកសែត ឈូកច្រាល នូវឈូកស ផ្កាក្រមុត ឧត្បល ចង្កុលណី មានក្នុងជលាស័យ ផ្កាព្រាយព្រឹក នឹកដល់សិតាកែវកល្យាណ ប្អូនអើយបើបានរូនមកផង ប្អូនសូរឈ្មោះផ្កាបង បងប្រាយប្រាប់ ថាហើយជលនេត្រស្រក់អង្វរថា ឱកែសរកែកល្យាណ ប្អូនអើយ ទុក្ខបងគ្មានស្រាកស្រាន្ត ថាហើយស្តេចក៏ទត សព្វពន្លាជ័យ មើលទៅឃើញសពនាងអណ្តែតឃើញផាប់នៅ ព្រះអង្គយាងទៅឈ្មៀងមើលជិត ស្គាល់ជាសិតាស្រីវរ-បេក្ខណ៍ ទូនអ្នកក្សិណក្ស័យណាហើយអូន ថាហើយឱនឱបក្រសោបសពដាក់លើពន្លាជ័យ ក្សត្រថ្លៃសោយសោកសន្លប់ ឱបសពនៅលើពន្លាជ័យ ។ ថ្លែងពីស្រីលក្សណ៍អនុជា ឃើញបងឱបសពសន្លប់លង់ទ្ទូញថាឱក្សត្រីស្រីសិតា ម្ចាស់ក្ស័យហើយណាព្រះនាង បើម្ចាស់ក្សិណក្ស័យខ្ញុំក្ស័យផង ឱនឱបត្រកងសន្លប់លង់ជាមួយព្រះបង ទាំងពីរពង្ស ។ ថ្លែងពីហនុមានក៏បានឃើញសព ឃើញស្តេចសន្លប់ទាំងពីរអង្គ ទើបស្រែកហៅថា ហៃមាអង្គត់យើងក្រហើយណាទាំងអស់គ្នា ពួកពលទាំងអស់ក៏បានឃើញក្សត្រាទាំងពីរអង្គសូន្យសព្វសន្លប់លង់ ឃើញសពសិតាស្តេច



ឱបនៅថាយើងក្រហើយ ទាំងអស់គ្នា ថាហើយក្សត្រទាំងពីព្រះអង្គក៏នៅ ។

(ស្មូត) សូរ្យសាយណ្ហៈ ហេតុអើយបែរត្រជាក់ ក្សត្រថ្លៃទ្រង់លក្សណ៍អើយ ស័ព្ទសន្លប់លង់ ព្រះពាយបក់បោកអើយព្រះពាយផាត់ ខ្លាយខ្ចាត់ក្លិនផ្កាអើយដូងដកម៉ៃ ។ ក្លិនក្លែបក្រអែប អើយក្រអូបក្រៃ ក្សត្រថ្លៃក៏ភ្ញាក់តើនចាកនិទ្រា ។

មានព្រះបន្ទូលថា អើរឿងនេះហេតុភេទអ្វី គឺកាលអង្គត់ និងបាសហនុមាន ក៏បានទៅអុជនគរគេ អង្គត់ក៏បានទៅសម្លាប់សេនារបស់គេបានជាគេសម្លាប់រត្នរាជសិតាកែវកល្យាណ អើអ្នកទាំងពីរប្រាណ ក្នុងថ្ងៃនេះអញសំឡាប់បាងឯងហើយ មិនទុកទេ អញក៏សឹងដ៏បានប្រាមប្រាប់មកអំពីថ្ងៃមុនថាហើយ ព្រះនារាយណ៍រាមា ហៅពួកកងសេនា អោយចាប់សហ-នុមាន និងបាអង្គត់ចង សហនុមាន បាអង្គត់ថ្វាយបង្គំព្រះនារាយណ៍ព្រះអង្គកុំទាន់ចាប់ខ្ញុំចងទៅពិឃាត ចាំខ្ញុំពិចារណាអោយច្បាស់សិន អារា-ពណ៍នោះវាមិនហ៊ានសម្លាប់រាជសិតាទេ បើព្រះអង្គពិឃាតខ្ញុំចាំដល់ថ្ងៃក្រោយ ហនុមាននិងបាអង្គត់បើនឹងស្លាប់ នឹងរស់ យើងសុំខ្មោចគេដុតសិន។ ព្រះនារាយណ៍រាមា មានព្រះឱង្ការថា សហនុមានពេលនេះយើងស្របតាមយោបល់របស់បាឯងចុះ ។ ហនុមានបានស្តាប់ព្រះឱង្ការដូច្នោះហើយ ក៏ចាត់

ពូកកង អោយចាំទិសទាំងប្រាំបី បើឃើញសត្វអ្វី ក៏ចាប់អោយបាន អោយខំប្រយ័ត្នប្រាណ មៀងមើលអោយជាក់ ម្លោះហើយសហនុមាន ហៅមាអង្គត់ជ្រែកផែនដី ទៅចាំនៅបាដាល ប្រាប់ទៅគេសវជម្ពូពាន កងក្រវែលយាមល្បាត និលឯក និលពេជ្រ និលខាន់ អោយចាំដុតខ្មោចនាងសិតាកលក្សាណេ កន្ទុយហនុពានក្រាល.............................................

(ស្ទូព) បានុមានអើយចាប់បានបុញ្ញកាយា ដូចភ្នំព្រះសុមេរុបាំងវង់ព្រះចន្ទ្រា ពុំនោះ ដូចរាហ៊ូអើយចាប់បាននៃវង្គព្រះចន្ទ ឱនឱបក្រសោបអើយថើបភគ្គ្រា យកព្រះហត្ថាអើយ អង្អែលដួងដោះ ក្បាំក្បោះពិសី ថាឱអូនអើយបងស្រឡាញ់មាសមិត្ត ស្រីថ្លៃនេះណាកុំបី តូចតន់អន់ចិត្តនឹងបង ។

ធម្មតាជាអ្នកទោស បើគេចាប់បានហើយ ក៏ត្រូវគេចាប់ចង បើបងវាយខ្លួនប្អូនកំស្រែក បងវាយវាយមិនអោយត្រូវទេ វាយតែបង្អុស ថាហើយក៏ពៀង ពបុញ្ញកាយា ហៀវហោះយាត្រាមកថ្កានព្រះពន្លាជ័យព្រះនារាយណ៍រាមា អូនអើយបើមកដល់ព្រះពន្លាជ័យហើយ ប្អូនកសឹងដើរស្រែកអាក្រោស ឃោសនា ថាខ្ញុំរាងហើយ ៗ កុំវាយខ្ញុំខ្លាំងឡើយ បងមិនវាយអូនខ្លាំងទេ បងយកទៅថ្វាយព្រះនារាយណ៍រាមា អោយបានស្ដេចទ្រង់ជ្រាប ប្អូនអើយ ដែលប្អូនធ្វើឧបាយនេះ នរណាប្រើប្អូនមក ថាក្រុង



រាពណាសូរ ទូរមុខអប្រិយប្រាណ ក៏បានប្រើខ្ញុំមកថា អោយខ្ញុំក្លែងជារូបនាងសិតាស្លាប់ ដល់ហើយម៉បម៉ាយថ្វាយបង្គំព្រះបរមភក្តិ ក៏ថ្វាយនាងស្រីបុញ្ញកាយា នេះមិនមែនជារូបនាងសិតា គឺយក្សាប្រែក្រឡាទេ ព្រះអង្គព្រះនារាយណ៍រាមា ស្ដេចក៏បានជ្រាបហើយ មានព្រះឱង្ការថា នាងឯងមានឈ្មោះអ្វី នាងបុញ្ញកាយា ក៏ថ្វាយបង្គំព្រះបរមភក្តិ ខ្លួនខ្ញុំនេះឈ្មោះបុញ្ញ-កាយា ក្រុងទសភគ្គ្រាប្រើខ្ញុំមក អោយខ្ញុំប្រែក្លាជាសិតាស្លាប់ ព្រះនារាយ-ណ៍ ក៏បានសួរថា តើនាងឯងកូនអ្នកណា បុញ្ញកាយាទូលថា ខ្ញុំកូនពិភេកអសុរា ព្រះនារាយណ៍រាមាទ្រង់ជ្រាប ហើយក៏មានព្រះបន្ទូលថា អើគ្នាយើងទាំងអស់គ្នា កុំអោយអ្នកណាប៉ះដៃប៉ះជើងនាងឡើយ បើប៉ះហើយក្រែងអន់ចិត្ត ថាហើយក៏ត្រាស់ប្រើអាមាត្យមួយអោយទៅហៅពិភេកអសុរាមកបញ្ជាក់ការព្រះរាជបុត្រី មែន ឬមិនមែន អាមាត្យក៏បានទៅហៅពិភេកអសុរា ដល់ហើយម៉បម៉ាយថ្វាយបង្គំ អំពីអង្គព្រះនារាយណ៍ ប្រើខ្ញុំមកអញ្ជើញយាងអោយឆាប់ ពិភេកក៏បានស្ដាប់ពាក្យអាមាត្យ មកអញ្ជើញអាត្មា ពុំហានបង្អង់ឡើយ យាងមកឆាប់ បានដល់ព្រះនារាយណ៍រាមាហើយ ក៏ម៉បម៉ាយថ្វាយបង្គំ ឃើញនាងបុញ្ញកាយព្រះរាជបុត្រី សោយសោកាយំ ឱកូនស្ងួនព្រះបិតា នាងមកធ្វើអ្វីណាកូនអើយ ព្រនារាយណ៍បាន

ជ្រាបថាដូច្នោះហើយ បាពិភេកអើយ កូនបាឯងពិត ឬមិនពិត ពិភេកទូលថា ព្រះរាជបុត្រីខ្ញុំពិតហើយណាព្រះអង្គ នេះហើយយោបល់ក្រុងរាពណោសួរ ប្រើនាងមកអោយធ្វើជាសិតា អំណែតក្សិណក្ស័យ ព្រះនារាយណ៍រាមា មានព្រះបន្ទូលថា អោយបាហនុមានជូននាងទៅស្រុក បុញ្ញកាយាស្រុកនាង នៅព្រង់ណា បុញ្ញកាយាក៏បានទូលថា ស្រុកខ្ញុំនៅព្រះជ្រៃសហកោះក្រៃ លង្កា ម្លោះហើយត្រាស់ថា អើបាហនុមាន ជូនបុញ្ញកាយាទៅស្រុកទៅ សហកោះក្រៃ ព្រះជ្រៃលង្កា ស្វាសហនុមានក៏បានស្តាប់ព្រះបន្ទូលដូច្នោះ ហើយ ក៏ត្រេកអរក្រៃ ត្រូវព្រះទ័យពិភេកពិត ផាហើយទ្រង់គ្រឿងអលង្ការ យកព្រះខ័នជ័យមកសៀតស៊កព្រះកាយា ក៏ព្រៀងពក្សត្រី ស្រីបុញ្ញកាយា ហិចហោះផ្លោះទៅកណ្តាលអាកាសា ដូច្នោះហើយ ថៃថើបព្រះភក្ត្រ ហើយ ក៏ថា ហៃទួននាក់បងមិនចោលប្អូនឡើយ អូនអើយបងស្រឡាញ់ប្អូនក្រៃ បងជូនស្រីថ្លៃទៅស្រុក ។

(ស្មូត) ស្វាអ៊ូរអើយតូរនឹងបុញ្ញកាយា បើស្រុកស្រីឆ្ងាយអើយ បងជូន អោយដល់ ថាហើយពៀងពព្រាច់ចរលីលាអើយ ក្នុងអាកាសា ដល់ថ្នល់ ទទឹងដាក់អង្គព្រះនាងអើយអោយឈប់សិនណា ហើយរូមវាសនានឹង



ក្សត្រីថ្លៃ បុញ្ញកាយាថាព្រះរៀមបង សុំព្រះច្បាស់ច្បងអើយ កុំចោលប្អូន ឡើយ ហនុមានថាឱសឱប្អូនអើយបងមិនចោលប្អូនឡើយ លុះអស់អវសាន

ថាហើយយកដៃអង្អែលខ្នង បមបីត្រកងរាជាក្សត្រី អូនអើយបងខំ ទាល់ទាល់នឹងម្ចាស់សិរសាលើត្បូង ធ្វើរាជការបានជាបង ជូនស្រីសង្សារ មិនបានទៅដល់ស្រុកទេ ដល់តែត្រឹមណេះ ហើយនាងបុញ្ញកាយាក៏ថ្វាយ បង្គំហនុមាន ហនុមានលាហើយសឹងដំលាទៀត ស្តេចយាងបានប្រាំពីរ ជំហ៊ាន ថយទៅឱបនៃព្រះនាងវិញ អូនអើយបងមិនដាច់ចិត្តទេ ស្រឡាញ់ មាសមេកែវកល្យាណេ ថាហើយនាងបុញ្ញកាយាថា ព្រះរៀមជេស្ថា អោយ ព្រះអង្គវិលទៅវិញចុះ ខ្ញុំដល់មកត្រឹមណេះ ខ្ញុំក៏ហៀវហោះភ្លៀវផ្លោះ ដល់ទៅស្រុកខ្ញុំ ហៅថាព្រះជ្រៃ ហៅថា សិង្ហៈកោះក្រៃ ព្រះជ្រៃលង្កា ដូច្នោះ បុញ្ញកាយាហោះហើយក៏បែរមើលក្រោយ ហនុមានហោះហើយ ក៏បែរមើលក្រោយ បណ្តោយគ្នាតូរវេទនា អាឡោះអាល័យគ្នាណាស់ ។ សហនុមានក៏បានវិលមកវិញ ចូលទៅម៉បម៉ាយថ្វាយបង្គំព្រះនារាយណ៍ រាមាសួរថា សហនុមានជូននាងទៅដល់ត្រឹមណា ហនុមានទូលថា ទៅ ដល់ថ្នល់ទទឹង ម្លោះហើយស្តេចគង់ជាសុខសាន្ត ។

៣៣- បែរទៅនិយាយពីនាងបុញ្ញកាយាស្រីកញ្ញា ហោះទៅសហ-កោះក្រៃព្រះជ្រៃលង្កា យកគ្រឿងអលង្ការបស់នាងទ្រង់ ហើយយកទឹកអប់ក្រឡុប់ទូវឥន្ទពិដោរ លាបព្រោះព្រះកាយាយាត្រាចរយ៉ៅ មកថ្វាយបង្គំក្រុងរាពណាសូរ ដែលព្រះអង្គត្រាស់ប្រើខ្ញុំទៅមិនបានសំរេច គេយកខ្មោចនោះទៅដុត ខ្ញុំបណ្តែតប្រាណ អណ្តែតតាមផ្សែង គេចាប់បាន គេជូនខ្ញុំមកថ្កានទៅដល់ស្រុក ក្រុងរាពណាសូរក៏បានជ្រាបដូច្នោះហើយក្តៅក្តួលឥតស្បើយដូចភ្លើងឆេះ ប្រើអាមាត្យមួយអោយទៅហៅមូលព្រះលាំ អាមាត្យក៏រូសរាន់ទៅអញ្ជើញមូលព្រះលាំមក មូលព្រះលាំមកដល់ហើយ ក្រុងរាពណ៍ថា ប្អូនអើយយើងគួរលើកទ័ព ទៅវាយអាមនុស្សាក្នុងពេលនេះ មូលព្រះលាំក៏ថ្វាយបង្គំ ហើយក៏លាចុះ ដល់មកទីព្រះលានហើយ អោយអាមាត្យមួយវាយស្គរទ័ព ទូទៅដិបទំពលមារសព្វណាៗអសុបានឮស្គរច្បាស់ ផ្ទុកផ្តើលកន្ទាកាន់គ្រឿងអាវុធ សុទ្ធសឹងមុតថ្លាខ្លះជិះរាជសីហាលឹងទឹងល្បឿនកា ខ្លះជិះល្មាំងល្មាសក្របីខ្លា ខ្លះជិះអូដ្ឋលាច្រើនសល់ ។ ឈប់ស្នេះត្រង់នេះមិនចចារ និយាយពីស្រុកសមរភូមិជ័យកែវមរកត ញាប់ញ័ររន្ធត់អោយអស្ចារ្យ ញ័រគំរប់ប្រាំពីថ្ងៃ ព្រះរាមសង្ស័យក្នុងចិន្តា ម្ល៉ោះហើយហៅពិភេកអសុរា ឬហើយម៉បម៉ាយថ្វាយបង្គំ ព្រះ



នារាយណ៍រាមា ស្តេចបន្ទូលថា ពិភេកអសុរា ហេតុអ្វីភូមិសមរភូមិជ័យញាប់ញ័ររន្ធត់ កក្រើកញាប់ញ័រជាប្រាំពីរថ្ងៃ គួរអោយសង្ស័យអស្ចារ្យណាស់ ពិភេកអសុរាដោះក្តាឈ្នួនពីក បូកភ្នំលេខភេទមកទាំងអស់គ្មានកំបាំងសោះក្នុងចិន្តា ហៅថាហោរទិព្វចក្ក ព្រះនេត្រទិព្វ គ្មានកំបាំងសោះក្នុងពិភពលោក ទូលថា មានយក្សមួយឈ្មោះមូលព្រះលាំ យក្សនោះធាត់ធំអស្ចារ្យ មានរិទ្ធីចំបាំងខ្លាំងក្លាហាន ទេវតាសព្វឋានកោតចេស្តា លើកពលត្រៀបត្រាដប់ពីរសមុទ្រ មកវាយពួកយើងជាការឆាប់ ព្រះនារាយណ៍រាមាសួរថា បើដូច្នោះអ្នកណាទៅតបាន ពិភេកទូលថា គ្មានអ្នកឯណាទៅតបានទេ បានតែព្រះអង្គលើត្បូងសិរសា បានទៅបង្ក្រាបអសុរមារបាន ខានមួយទិវា ឮសូរសព្ទដូចផ្គររន្ទះ គគ្រាំងអាឯអង្គក្សត្រា ក៏រៀបពល ស្រីលក្សណ៍អនុជាប្អូនភ្វា សហានុមាន និលឯក និលពេជ្រ នូននិលខាន់ ពួកស្វាប៉ែតសិបអខោ លើកទ័ពឆាកហោរយកជ័យមានភ្លេងភ្លាត់ ព្រះអង្គគង់សូត្រពុទ្ធឧត្តម ហោះស្ទុះស្ទួយភ្នំចាំចោលយក្សា ព្រះមាតុលីសារថីទេវ-បុត្រ បរសេះប្រៀវប្រុតជមនិះជំនាញ នៃព្រះលក្សណ៍សារ **(ស្ទូត)** *ព្រះមាតុលីសារថីទេវបុត្របរសេះប្រៀវប្រុតជំនិះជំនាញ នៃព្រះលក្សណ៍សារបំផ្លាញពូជពង្សនៃអង្គអសុរា អោយក្ស័យជន្មាដប់ពីរសមុទ្រយង់យួង*

និងយាយពីពូកមូលព្រះលំ លើកទ័ពគគ្រឹកគគ្រេងកក្រើកទឹកកក្រើកដី ទ័ពជាបីជាន់ ទ័ពខ្លះដើរដី ទ័ពខ្លះហោះលើអាកាសា បាំងសែងសូរិយា អាប់អស់រស្មី កក្រើកសូគាល័យ ញាប់ញ័ររញ្ជួយ រលកនព្វមហាសមុទ្រ បោកបែកផ្កាត្រែង បែកផ្សែងផ្សប់ត្រឡប់រោងញាប់ញ័រផែនដី ថ្លែងពីព្រះនារាយណ៍រាមាស្តេចឥតភ័យា នឹងក្រុងអសុរី សហនុមានក៏កេណ្ឌពលបានដប់ពីរសាគរ ពលស្វាសុទ្ធសឹងគង់រអាវុធ កាប់ចាក់មិនមុតមិនហានក្បិណេក្ស័យ បរពលលុះលង់បានដល់ជួបជល់ និងពលយក្ស ច្បាំងគ្នាប្រឡូកប្រឡាក់ប្រកាប់ប្រចាក់ ច្រើនសល់ ពល់ស្វាក៏មានជ័យជំនះឈ្នះអស់ក្រុងមារ កង្វល់ព្រះរាមបាញ់សរឫទ្ធិចាន់ ក៏ក្បិណេក្ស័យប្រល័យជីវិតយក្សយង់ដប់ពីរសមុទ្រយង់ឃ្នង ដល់ដប់ពីរសមុទ្រភ្លាមទៀត បាញ់ប្រាំពីរយប់ប្រាំពីរថ្ងៃ មូលព្រះលាំក៏បានបាញ់សរផ្សេង ឯសរនោះឯងជ្រួសដល់សូគាំ បាញ់សុរមួយទៀតដល់ឋានព្រះឥន្ទ្រា សរយក្សនោះមិនហ៊ានជិតព្រះអង្គ មូលព្រះលាំ ក៏បានបាញ់សរចូលទៀត ច្រើនដងច្រើនគ្រា យក្សយង់ច្រើនសល់ដប់ពីរសមុទ្រច្រើនទៀត ( *បាញ់អស់ដល់ បាញ់អស់ដល់* ) ប្រាំពីថ្ងៃទៀតក្បាលបេក្សនឹងក្បាលសត្វ គោកនព្វមហាសមុទ្រ អង្គព្រះឥន្ទ្រាយកត្រែមាសពីសូគាំសំរាប់ស្តេចគង់ កាលណោះចតុរង្គពលមារ ចូលហ៊ុំត្រៀប





ក្រាបំផ្លាញស្វាស ពួកស្វាគង់អាវុធចិត្តមុតក្លៀវក្លាបំផ្លាញយក្សាវិនាសក្បិណេក្ស័យ អស់ហើយដល់ទៀតចង្អៀតផែនដី ព្រះរាមសង្ស័យហៅពិភេកសោរ ឱពិភេកអសុរាអូន យក្សនេះច្រើនណាស់ តើមកពីណា អស់ដប់ពីរសមុទ្រ ហើយកើតដប់ពីរសមុទ្រទៀត អស់កើត ៗ តើមកពីណាមកពិភេកយកក្តាឈ្នូនមកគន់គូរហើយថា សូមទានក្រាបទូលព្រះអវតានរំពីយក្សាច្រើនសល់ នោះហើយនាងមន្ទោគីរីស្លពល ខ្ទះនោះទំហំប្រាំរយយោជន៍យល់ស្លរម្តងកើតពលដប់ពីរសមុទ្រ ព្រះនារាយណ៍រាមាក៏មានព្រះឱង្ការថា តើបានអ្នកណាទៅយកក្បួនបាន ពិភេកអសុរាថា បានតែសហ-នុមាន ទើបទៅយកបាន ទើបព្រះនារាយណ៍រាមា មានព្រះបន្ទូលអោយទៅហៅសហនុមាន សហនុមានបានស្តាប់ហើយ ក៏ក្រាបថ្វាយបង្គំស្វាសសុទ្ធបុត្រព្រះពាយ អញប្រើបាឯងអោយទៅយកក្បួនស្លពល មន្ទោគីរីព្រះពន្ធភាពណ៍ ហនុមានបានឮហើយក៏ថ្វាយបង្គំ យកព្រះខ័នជ័យមកសៀតសិកព្រះកាយា ហើយហោះផ្លេកផ្លោះទៅក្រុងលង្កា ប្រាណប្រែក្រឡាជរាពណាស្វូរ មុខជុំប់ ដៃម្តែ មានគជងីរដុះកណ្តាលដើមទ្រូង នាងមន្ទោគីរីក៏បានឃើញ ស្មានតែព្រះភស្តាស្វាមីនៃនាង ទៅតជាបចំបាំង ហេតុអ្វីមកព្រែងលោកថ្លោះថ្លោយខូចទ័ពសារមិនបានការ ដូចសេចក្តីប្រាថ្នា សហ-

នុមានក៏ឆ្លើយថា ទ័ពព្រះរាមព្រះលក្សណ៍មនុស្សា ក៏ថយដៃ បងនេះក៏រលឹកនឹងប្អូនស្រី ថាហើយចាប់ឱបក្រសោបនាងមន្ទោគិរី ដាក់លើទែនទីប្រាសាទជ័យ ប្រាថ្នាការលោកិយជាមួយនឹងនាង នាងក៏នឹកក្នុងចិត្តយល់អស្ចារ្យ ប្តីអញប្តូចកើតចំបាំង ពីថ្ងៃណា ខ្លាំងក៏ខ្លាំង ធាត់ក៏ធាត់ ធំក៏ធំ រួចហើយសុំក្បួនស្លពល មកអំពីនាង បៀមក្នុងមាត់បានហើយ ប្រែក្រឡាជសហនុមាន នាងមន្ទោគិរីសោយសោកាយំ សោយសោក សន្លប់បាត់ស្មារតី ពួកយក្សប្រុសស្រី ក៏ផ្អើលឆោរ ខ្លះបីត្រកង ឱបអង្គនាង ថ្លែងពីហនុមានរិទ្ធីសាយ បោះដល់ព្រះនារាយណ៍ ព្រះរាមាហុចក្បួនស្លពល ព្រះអង្គទតយល់យកក្បួនបាន ។

៣៤- ថ្លែងពីទសមុខយក្ស យង់ឃ្នងលើកពលដប់ពីរសមុទ្រចូលព្រៀបព្រា ព្រះអង្គទាញសរថ្លាបាញ់យក្សយង់អស់ដប់ពីរសមុទ្រក៏ស្លាត់សូន្យ ក្រុងរាពណាសង្ស័យណាស់ ពីរនាក់បងប្អូន អូនអើយ បងសង្ស័យណាស់ ក្រែងអង្គព្រះនារាយណ៍ចុះមកច្បាំង បើទ័ពមនុស្សាមិនដែលខ្លាំងម្ល៉េះ ក្រែងតែព្រះនារាយណ៍ទើងរឿងរិទ្ធី ថាហើយប្រើមូលព្រះពលាំទៅលបមើល កាលណោះអង្គព្រះនារាយណ៍លោកមកផ្ទិស្រីលក្សណ៍អនុជាក៏ផ្ទុំ ពិភេកក៏ផ្ទុំអស់ ហនុមាន និលពេជ្រ និលឯក ដេកទាំងអស់មូល



ពលាំវាចូលទៅបានជិត ឃើញកែវកងចក្រដុះនឹងបាទា ព្រះនារាយណ៍រាមាព្រះអង្គផ្ទំលក់ មូលព្រះលាំក៏រាថយក្រោយ មិនហ៊ានអោយពពួកស្វាឃើញ មកក្រាបទូលក្រុងរាពណាសូរ ព្រះជេដ្ឋាព្រះរាម ខ្ញុំឆ្ងល់ណាស់មានកែវកងចក្រដុះបាទា ព្រះនារាយណ៍រាមាកំពុងផ្ទំ និយាយប្រាប់ដូច្នោះហើយ រាពណ៍ថាប្អូនអើយនៅចាំបង បងនឹងហោះទៅភ្នំកៃឡាស់បព្វតាទៅមើលអង្គព្រះនារាយណ៍ លោកចុះមកច្បាំងឬគង់នៅ បារមីព្រះនារាយណ៍រាមា និមិត្តជាអង្គព្រះនារាយណ៍មុខបួន ដៃប្រាំបី ក្រុងរាពណ៍ទៅមើលឃើញ ហើយចុះមកវិញ ប្រាប់ថាអូនអើយ មិនមែនទេ នេះពិតជារាមនុស្សា បងទៅមើលឃើញអង្គព្រះនារាយណ៍ គង់លើភ្នំកៃឡាសបព្វតា នេះចំជាមនុស្សា យើងកុំខ្លាចវា ។ ក្រុងរាពណាសូរ ក៏បបួលមូលព្រះលាំប្អូន ហិចហោះផ្ទោះសំដៅ មកដល់ក្រុងលង្កាបូរី ក៏ចូលទៅដល់ក្រឡារាជបន្ទំ ពួកពលយោធាគាល់ជិតជុំ នាងមន្ទោគិរីចូលក្រាបទូល ថ្ងៃមុនឃើញព្រះអង្គចូលមកស្មោះស្ម័គ្រស្មាគម យកក្បួនពីខ្ញុំស្មានថា ស្វាមីមិនដឹងជាស្វាសពានរចូលមកផ្លួមយកក្បួនហោះទៅ រាជបូរី ។

៣៥- កាលណោះក្រុងទសមុខមារក៏បានជ្រាបក្តៅក្តួលខ្វាល់ណាស់ ដូចគេយកព្រះអគ្គីមកអុជអាល ពុំនោះដូចគេយកពិសសរខ័នថ្លា យក

មកប្រហារផ្តាច់សុរ៉ង់ ត្រាស់ហៅទៅមូលព្រះលាំថា អូនបង បងនឹងប្រើប្អូនទៅហៅក្លើម្រាក់ យក្សនោះធំណាស់ នាមឈ្មោះហៅថា សហតេជះ បើប្អូនទៅហើយនគរនោះឆ្ងាយក្រៃ ហោះឆ្លងអូរ ឆ្លងវាលស្មៅ ឆ្លងកាត់សំដៅបីខែដល់ មូលព្រះលាំ ក៏ខំហោះកាត់សំដៅ ក៏បានដល់ទៅសហ-តេជះ សហតេជះឃើញហើយ ហៅថាអាក្រុងទសភក្ត្រ អាឯងច្បាំងនឹងព្រះរាមព្រះលក្សណ៏ អាណោចាញ់ ឬឈ្នះ មូលព្រះលាំទូលថា ខ្ញុំមិនមែនក្រុងទសភក្ត្រទេ សហតេជះថា អាឯងឈ្មោះអាអ្វី ? ខ្ញុំឈ្មោះមូលព្រះលាំ ជាព្រះអនុជក្រុងទសភក្ត្រមារ ឯងមករកអ្វី ? ព្រះរៀមព្រះជេដ្ឋាប្រើខ្ញុំមកអញ្ជើញព្រះបង អោយឆាប់ប្រញាប់ការ អោយទៅជួយច្បាំង នឹងមនុស្សា សហតេជះឆ្លើយថា ច្បាំងនឹងមនុស្សាប៉ុណ្ណោះមិនអោយឈ្នះអើបើដូច្នោះឯងទៅវិញចុះ ទំរាំអញបរទ័ពតាម ថាហើយសហតេជះយករាជរថមកច្រើនសល់ ទិមរាជសីហ៍ប្រាំរយយោជន៍យល់ មានក្នុងមណ្ឌលបុស្បកស្ន ទាំងប្រាំម៉ឺនដាក់ក្នុងនោះ បរទៅគគុកលើព្រឹក្សា បរទៅលើភ្នំភ្នំរាបដល់ដី បរទៅលើឈើព្រៃល្អិតជាផង់ធូលី យក្សនោះមានដំបងពេជ្រឫទ្ធីថ្លា បើលខាងគល់ស្លាប់ពលទាំងអស់ ពលមានប៉ុន្មានសមុទ្រពុំសល់សោះ បើលខាងចុងរស់ទាំងអស់ ហើយបររាជសីហ៍ កាត់ព្រៃព្រឹក្សា



ឮសូរស័ព្ទសន្ធឹកដូចព្យុះភ្លៀងមា ឮស័ព្ទដូចផ្គររន្ទះខ្លាំងក្រៃ លុះលង់បានដល់មកក្រុងលង្កាបូរី ចូលមកពុំរួចសោះ ក្រុងរាពណ៍ករើកំផែងខាងមុខបរមកសំរុកក្នុងនគររាពណ៍ មកហើយប្រាប់ថា អាទសភក្ត្រា កើតចំបាំងនឹងព្រះរាមព្រះលក្សណ៏យ៉ាងដូចម្តេចទៅ ក្រុងរាពណ៍ឆ្លើយថា ក្លើអើយងាប់ច្រើនណាស់ ងាប់ឡើងខះនព្វមហាសមុទ្រ អាក្រុងទសភក្ត្រារៀបពលទៅ អញជួយច្បាំង ម្លោះហើយមូលព្រះលាំធ្វើទ័ពស្រួច កេណ្ឌកងយោធា បានដលដប់ពីរសមុទ្រ សហតេជះទ័ពហ្លួង( *ទ័ពកណ្តាល*) ក្រុងទសមុខបារធ្វើទ័ពហោន ( *ទ័ពក្រោយគេ* ) ហើយឮកក្រើកទឹកកក្រើកដី ព្រៃព្រឹក្សាកាលណោះស្រុកសមរភូមិជ័យកែវមរកត ញាប់ញ័ររន្ធត់អោយអស្ចារ្យ ព្រះនារាយណ៍រាមាទ្រង់ត្រាស់ហៅពិភេកអសុរា បាពិភេកអសុរាហេតុអ្វីក៏ញាប់ញ័រខ្លាំងម្ល៉េះ ពិភេកអសុរាក៏ឱនកថ្វាយបង្គំ សូមទានក្រាបទូលព្រះអវតា ត្បិតមានយក្សាមួយធំ នាមឈ្មោះហៅថា សហតេជះមានរិទ្ធីខ្លាំងណាស់ លើលោកា ពពួកទេវតាក៏ស្ញប់ស្ញែង ក្រុងរាពណាសូរទៅយកវានោះឯងមកជួយច្បាំង វានោះរឿងរិទ្ធិត្បិតមានដំបងទិព្វ បើលខាងគល់ពលស្លាប់ទាំងអស់ មានប៉ុន្មានសមុទ្រក៏ស្លាប់ដែរ មើលខាងចុងរស់ទាំងអស់ ដំបងនោះពូកែខ្លាំងក្រៃ វិស័យដំបងទិព្វប្រៀបពុំបាន

ព្រះនារាយណ៍រាមា បើដូច្នោះនរណាទៅច្បាំងបាន បានតែហនុមាន និងស្រីលក្សណ៍អនុជា ម្លោះហើយព្រះអង្គទ្រង់ត្រាស់ហៅអនុជប្អូន និងបាហនុមានអោយរៀបទ័ព ស្រីលក្សណ៍អនុជារៀងអស់កងយោធាទ័ព សេនាទាំងពីរដណ្តប់អង្គប្រាណ ក៏បានរៀបទ័ពធំមាំមួន ជាប្រាកដ ពលស្វាប៉ែតសិបអខោ ម្លោះហើយក៏បរទ័ពចេញ សហនុមានក៏បានបញ្ឈប់កងទ័ព ហនុកោរក៏បើកប្រែងកន្ទុយ អោយកើតជាព្រៃហេមពាន្ត អោយបានជួបជុំនពរភាពណ៍ អោយពួកស្វាក៏ពួននៅប្រែងកន្ទុយហនុមាន ដែលកើតជាព្រៃហេមពាន្ត ប្រាមថា ពួកស្វាកំអោយចេញឡើយ បើសហតេជះឃើញហើយ ក៏ក្បិណក្ស័យ ម្លោះហើយសហនុមាន ក៏ដើរបង្ហាញខ្លួនតែមនុស្សបីនាក់ គឺស្រីលក្សណ៍ ព្រះអនុជស្ងួនភ្ងា នឹងពិភេកអសុរា បាហនុមាន ដើរបង្ហាញប្រាណអោយវាមើលឃើញ ដើរមកជិតទល់ទ័ពហើយ សហតេជះខឹងណាស់ក្រេវក្រោធា លុះលាន់មាត់ថា អាក្រុងទសភក្ត្រ មនុស្សពីរបីនាក់ ប្រើអញមកច្បាំង យីអញចាញ់បោកវាមួយគ្រា អានេះកំសោយណាស់ជាងមនុស្សស្រី មនុស្សបីនាក់វាទៅហៅអញមកច្បាំងធ្វើអ្វី ម្លោះហើយញាក់រាជសីបត់មកវិញ ។ ម្លោះហើយមូលព្រះលាំក៏ជេរថា បងអន់អាក់ថ្នាក់ព្រះទ័យរឿងអ្វីបានជាបត់មកវិញ ម្លោះហើយឃាំងរាំងរាមុខរាជសីហ៍ អន់អាក់



ថ្នាក់ព្រះទ័យរឿងអ្វីបានជាវិលមកវិញ សហតេជះថា អញខឹងណាស់នឹងអាទសភក្ត្រ កូនមនុស្សបីនាក់ វាប្រើអញមកច្បាំង មូលព្រះលាំឆ្លើយថាម្ចាស់អើយទ័ពនេះធំណាស់ ហ៊ុនគរលង្កាបានប្រាំពីរជាន់ ទ័ពនេះរឿងរិទ្ធិគ្មានទ័ពណាមកស្មើបាន ចំជាវបឹងរីងហៅហាន នៅក្នុងហេមពាន្តជាច្រើនក្រៃ សហតេជះថា បើដូច្នោះឯងទៅដេញមក អញនឹងលដិបងអោយក្សិណក្ស័យ មូលព្រះលាំក៏ជិះសេះ ហោះចូលក្នុងព្រៃ ដេញអស់ពួកពានរជាច្រើនសល់ពេលនោះរាជក្របីស្រីហនុមាន ក៏បានចូលព្រៃដើរទៅដល់ពិភេកអសុរា ស្រីលក្សណ៍អនុជា បាហនុមានទាំងបីប្រាណ ទៅប្រទះគ្នា ទៅជួបនាយ និងនាយនៅក្នុងព្រៃ មូលព្រះលាំអសុរីក៏ដៀលថា យើអាពិភេកសាថ្មើមខ្មៅ ក្បត់ផែនដី ទៅជួយសង្គ្រាមជួយមនុស្សា អាឯងក្ស័យថ្ងៃនេះហើយអាពិភេក ថាហើយទាញមោងក្រសាក់ សរសិល្បចោលតំរងអង្គពិភេក ស្រីលក្សណ៍អនុជាថាក្ស័យប្អូនពិភេក បើដូច្នោះគួរអញយកបាតជើងទៅរង អោយត្រូវអង្គអញទៅវិញជា ទុកពិភេកហោរាអោយរស់នៅថាហើយព្រះអង្គយកបាទាទៅរង អោយត្រូវមោងក្រសាក់របស់យក្ស ត្រូវហើយក៏ដួលដេកលើភីនផែនដែនពសុធា `។ ហនុមានទៅឱនឱបស្រីលក្សណ៍ អនុជា ខ្ទាក់ក្រិសដែលអង្គព្រះនារាយណ៍លោកអោយ ដុះលាបទៅ

ក៏ជាភ្លាម សណ្ដកមោងក្រសាក់របស់យក្ស ព្រះលក្សណ៍ជាហើយក៏ក្រោកឡើង ហនុមានក្ដៅក្ដួលក្នុងឱរា និមិត្តជាសេះមុខបួន ជើងប្រាំបីប្រាប់ស្រីលក្សណ៍អនុជាជិះលើបង ។ កាលណោះមូលព្រះលាំក៏បិតនៅលើអាកាស ហនុមានគិតថា ស្រីលក្សណ៍អនុជាដើរនឹងដី វាជិះសេះហោះបានជាចាញ់បារមីវាប្រោះព្រួរ បើដូច្នោះតួរអញហោះទៅកាច់កមូលព្រះលាំ ហោះទៅជិតព្រះលក្សណ៍សារ ទាញសរថ្លាបាញ់មូលព្រះលាំ ត្រូវព្រាំធ្លាក់គ្រេង ផ្សៀងផែនដីរាជសីហ៍ដែលសហតេជះបរដួលទាំងអស់ ផ្សៀងរាជរថ សហតេជះក៏លាន់មាត់ថា សួរស័ព្ទអ្វីក៏ខ្លាំងម្ល៉េះ ពេលនោះមូលព្រះលាំក៏ក្សិណក្ស័យនៅក្នុងព្រៃហេមពាន្ត ស្វាសហនុមានបន្ទយ ទ័ពប្រាប់អោយនិលឯក អោយនាំពលដើរក្នុងព្រៃហើយទ័ពពូននៅស្រុកសមរភូមិជ័យកែវមរកត ពួកពលទាំងអស់កុំអោយសល់ឡើយ សហនុមានឯងក្លែងកាយា កើតជាកូនស្វាតូចមួយ ហើយរត់ទៅទទឹងមុខរាជរថសហ-តេជះកំពុងបរ រត់ទៅមកជាច្រើនដង អង្រួនឈើផងអោយញាប់ញ័រសហតេជះ កូនស្វាសអាឯងរត់ធ្វើអ្វី សហនុមានលើកដៃអង្វរក ខ្ញុំខ្លាចធ្នូសរព្រះរាមា គេណ្ហខ្ញុំមកច្បាំងនឹងព្រះរាជា សុំព្រះអង្គជួយយកអាសា កុំយកទោសខ្ញុំឡើយ សហតេជះថា អាកូនស្វា អាឯងឡើងទំលើរាជរថ



អញមក ស្ទុះផ្លោះហោះភ្លែតរត់បញ្ចុំ រត់ទៅរត់មកជាច្រើនគ្រា សហតេជះក៏រាដៃថាឈប់សិន កូនស្វាស្រែកថា ឈប់មិនបានព្រះរាមបាញ់សរមកឥឡូវ អាឯងមកពីក្រោយអញមក អញអោយដំបងលពលព្រះរាមថាហើយសហតេជះ អោយដំបងទៅសហនុមាន ស្វាសបានដំបងកាច់ខ្ទេចខ្ទីស្វាស បររាជរថបន្តិចទៅ ពលព្រះរាមនៅច្រើនសល់ កំពុងតែបរមើលទៅមុខ សហនុមានលូកកន្ទុយរំយក្សាវ រំពីជើងរហូតដល់ក ល្បៀស ១ បែរមើលផាំង ក៏រិតផ្លាប់ ជើងក៏ជាប់ ដៃក៏ជាប់ វាសង្កត់ក សហតេជះក៏ដួលលើរាជរថ ហនុមានសង្កត់ភ្នែកសត្រឡប់ក្រោកពុំរួច ហនុមានធាត់ធំស្ពឹមស្លេ ថាអាចោរជួចង្រៃ អាឯងថ្ងៃនេះពុំលែងឡើយ ថាហើយហនុមានរិតខ្លាំងក្រៃ រុំជើង រុំដៃមកដល់ក សហនុមានសរសេរអក្សរសារាជទូតកន្ទុយវាខំលូតដល់ពន្លាជ័យ បិទសារសំបុទ្រតនឹងចុងកន្ទុយ កាលនោះព្រះសុរិយជ្រេត្រជាក់ អង្គព្រះនារាយណ៍រាមាបើកព្រះការតា (បង្អួច) សារសំបុត្រហនុមានអើតចំព្រះភក្ត្រ ព្រះនារាយណ៍រាមាភ្ញាក់ថា សត្វអ្វីកន្ទុយអើតជិតឡើង ១ បៀតព្រះភក្ត្រ មើលទៅដឹងជាក់ថាជាសាររាជទូតថាឱបាបុត្រព្រះពាយរិទ្ធីសាយដំកន្លង ចាប់អាសហតេជះបានហើយ ប្រាប់អោយពួកពានរស្វារត់ទៅជួយ ចាប់មេទ័ពបានហើយអោយប្រញាប់

ព្រះរាមប្រាប់ពលវេហ៍ស្វាទាំងអស់ មិនអោយសល់សោះ អាប់រត់ទៅជួយ រត់ទៅដល់ហើយ ហនុមានចង្អុលលើបស្បុក ស្លំទាំងប្រាំម៉ឺន ពេលនោះមាន ទុក្ខស្វាចូលសំរុកចាប់យកបាន ស្វាមួយស្លំមួយលេងកំសាន្ត ថៃថើបអស់ ប្រាណនាងកញ្ញា អគ្គមហេសីតូចធំគ្មានសល់សោះ ចាប់មកលេងទាំង អស់នឹងមុខយក្សា ក្រុងយក្សក្រេវក្រោធខ្លាំងក្រៃ បែកផ្ទើមដង្ហើមដូង ហឫទ័យ ចេញឈាមវិស័យមកគ្រប់ទ្វារ ឈាមចេញពីភ្នែក ឈាម ចេញពីច្រមុះ ឈាមចេញពីត្រចៀក ហនុមានហូតព្រះខ័នកាត់កស្តេច យក្សក្សិណក្ស័យ ពេលនោះហោបញ្ជូនក្រមការអោយវិលទៅវិញ រាជសីហ៍ ទាំងប្រាំរយយោជន៍យល់ នៅក្នុងមណ្ឌលកាច់ករស់ កង់កាំរាជរថ ខ្ទេចគ្មាន សល់ សហនុមាននាំគ្រឡប់វិលចេញចរ មកទូលព្រះនារាយណ៍រាមា ស្តេចគង់នៅ ដល់ហើយម៉បម៉ាយថ្វាយបង្គំ ទាំងអស់គ្នា ទូលពីយក្សារឿង រិទ្ធី អសុរាក្ស័យមរណា ព្រនារាយណ៍រាមាត្រេកអរឥតស្បើយថា ឱគ្នាយើង ប៉ុណ្ណេះហើយយល់បានការ ថា ហើយស្តេចគង់ជាសុខសាន្ត ។ រឿងត្រង់នេះ ស្ងេះទុកនៅ ។

៣៦- យើងនឹងថ្លែងទៅក្រុងរាពណា ដឹងថាប្អូនវាក្ស័យ ក្នុងអដ្ឋា មរណាទាំងក្មើមិត្តភក្តិ ទសមុខមារសោយសោកាយំ ទូទំទូទុក្ខឥតមានស្បើយ



ឱសឱប្អូនសំឡាញ់អ្នកមាសបង ។ ថ្លែងពី អធិកម្ម អធិពលឡាំ តែងនាំសា ជិះរាជសីហ៍យោមល្បាតដល់ ហើយម៉បម៉ាយថ្វាយបង្គំ ទសមុខមារជាធំលើ សិរសា បពិត្រ រើយហ្វាស់អវតារ ក្សិណណោះមានស្វាស កាចចង្រៃ មនោ មនះ សោះសា ធាត់ធំស្ពឹមស្លែ បំផ្លាញពូជពង្ស យក្សា ព្រះអនុជក្សត្រា ក្សិណក្ស័យមរណា កណ្តាលទ្រូងព្រៃ ។ ក្រុងទសមុខមារ ក៏បានស្តាប់ អធិកម្ម អធិពលឡាំ ក៏ឆេះឆួលក្តៅក្តួលក្នុងព្រះឱរា ស្តេចសោយសោកាថា ឱព្រះអនុជប្អូនអើយ ពីថ្ងៃនេះទៅ ហើយបងធីកឈាមប្អូន ថាហើយក៏មាន ព្រះបន្ទូលប្រើអាមាត្យថា អោយទៅអញ្ជើញ ឥន្ទជិតអសុរា អាមាត្យ ខំខែងយាត្រា ដល់ហើយក្រាបថ្វាយព្រះបង្គំថា ព្រះវររាជបិតាអោយម្ចាស់ យាងទៅអោយឆាប់ ឥន្ទជិតអសុរាក៏បានស្តាប់ពាក្យអាមាត្យ ហើយក៏ទៅ យកគ្រឿងអលង្ការ មកទ្រង់ស្រេចហើយណា ស្តាយ ធ្នូសរ កៅទណ្ឌចុះចាក ប្រាសាទរាជវិមាន ទេវតាហោះហែដល់មក ឱនថ្វាយបង្គំព្រះវររាជបិតា ក្រុងទសមុខមារឃើញព្រះរាជ បុត្រមកគង់គាល់ដូច្នោះហើយ ប្រាប់ថា ឱកូនអើយម្សិលមិញ មូលព្រះលាំ ឪពុកមាបាក្ស័យហើយ ក្ស័យទាំង សហាតេជះក៏ក្ស័យហើយ កូនអើយបាឯងខំខែងពល ទៅវាយព្រះរាម ព្រះលក្សណ៍ មនុស្សកុំអោយវាលើកទ័ពមកតតាំង ច្បាំងនឹងយើងបានម្នោះ

ហើយ ឥន្ទជិតខំកេណ្ឌកងទ័ពយក្សាចូលមកត្រៀបត្រាក្នុង ព្រះលាន យក្សយង់ច្រើនក្រៃ សុទ្ធសឹងមានរឿងរិទ្ធិហៅហាន សឹងចាប់បារមីចន្ទ្រា កក្រើកញាប់ញ័ររស់សូត៌ា ស្រុកសមរភូមិជ័យ កែវមរកត ញាប់ញ័ររន្ធត់ អោយអស្ចារ្យ ព្រះនារាយណ៍រាមា ត្រាស់ហៅពិភេកអសុរា ពិភេកអសុរា ក៏បានឮព្រះនារាយណ៍ ត្រាស់ហៅអាត្មា ក៏ចូលមកថ្វាយបង្គំព្រះបរមភក្តិ ព្រះអង្គមានព្រះបន្ទូលថា ពិភេកអសុរា អូនគន់ពួរទៅនូវបោរទិព្វចក្ខុ ដែល ដែលកក្រើកញាប់ញ័រខ្ទរផែនដីនេះ តើទ័ពជ័យមកពីណាទៀត ពិភេកឮ ហើយដោះក្តាឈ្នួនមកគន់ពួរ នេះគឺរាជបុត្ររាពណ៍ ឈ្មោះហៅថា ឥន្ទជិត អសុរា ព្រះនារាយណ៍ត្រាស់ថា ពិភេកអើយ បើដូច្នោះ តើប្រើអ្នកណាទៅ តសង្គ្រាម ពិភេកអសុរាទូល អង្គក្សត្រក្សាន្ត ត្រូវបានអង្គស្រីលក្សណ៍អនុជា ទើបនឹងត សង្គ្រាមបាន ក្នុងពេលនោះព្រះនារាយណ៍រាមា មានព្រះបន្ទូល ត្រាស់ហៅស្រីលក្សណ៍អនុជា ស្រីលក្សណ៍អនុជា កាលបើបានស្តាប់ព្រះ បន្ទូលកាលណាដូច្នោះហើយក៏បាន ចូលទៅថ្វាយព្រះបង្គំព្រះរៀមព្រះ ជេដ្ឋា ។ ព្រះនារាយណ៍រាមាកាលបើបាន ដាក់ព្រះនេត្រាទៅ ឃើញ ស្រីល្សណ៍អនុជា ក៏មានព្រះបន្ទូលថា អើស្រីលក្សណ៍អនុជាប្អូនអើយ បងនឹងប្រើទៅតតាំងច្បាំងនឹងយក្សា យក្សនោះនាមឈ្មោះថា ឥន្ទជិត



អសុរា ព្រះរាជបុត្រារបស់រាពណ៍ ទូលព្រះបង្គំហើយក៏រាថយ មករៀបចំ ពួកសេនា ទាំងពីរដហ្គេប់អង្គប្រាណ កេសរជម្ពូពាន និលឯក និលផាត់ ឃុននល់ និលពេជ្រ និលខាន់ យើងនឹងលើកទ័ពចរុរង្គសេនា ទៅវាយពួក យក្សាក្នុងពេលនេះ ពួកស្វាក៏គង់អាវុធចិត្តមុតក្លៀវក្លា ខ្លះកាន់ព្រះខ័នថ្លា ខ្លះក៏កាន់មោងក្រសាក់ សាឡីកី ពួកស្វាអ្នកលេងភ្លេង ខ្លះក៏លេងភ្លេងឡក រែយ៉ាំ ទះសម្ភោរ ហ៊ូទូ ពួកស្វាត្រេកអរក្រៃគ្មានរួញរា បាអង្គត់យកព្រះខ័ន មកសៀតស៊ក នូវកាយា សហានុមានក៏កាន់ព្រះខ័នពេជ្រមុតថ្លា ចាំប្រហារ យក្សយង្សព្រះមាតុលីសារថីទេវបុត្រ បរសេះប្រៀវប្រុត ជំនិះជំនាញ យក្សាព្រះអង្គខែងខំ កងពលចូលដល់ត្រៀបត្រា ទ្រង់ព្រះចិន្តាគ្មានញញើត យក្សាប៉ុនសក់ លុះលង់លើកទ័ពបានទល់មុខគ្នា ដងនេះក្រុងឥន្ទជិតអសុរា គង់លើដំរីព្វារាវ័ណ ដៃប្រាំបី ក្បាលប្រាំបី បាំងនេះទៅនៅក្លឹងក្លស់ ចាំមរ បៃមន់ សែនត្វាន់ សប្បធន់ច្រើនជាន់ (សប្បធន់-ឆ័ត្រ) គងតូច គងធំ ព្វរងំដូចផ្គរលាន់ លើកទ័ពមកទល់ភ្លល់មុខគ្នា ។ ឥន្ទជិតសួរថា អើ ទ័ពនរណា ? ព្រះលក្សណ៍ឆ្លើយថា ទ័ពអញ ឱព្រះលក្សណ៍អើយ ឯង ត្រូវតែអោយបងឯងមកច្បាំងនឹងអញ ព្រះលក្សណ៍ឆ្លើយថា ទេអសុរា មិន ចាំបាច់ព្រះរៀមបងអញមកច្បាំងទេ តែអញបានហើយ ព្រះលក្សណ៍ក៏

ឆ្លើយថា ឱអសុរាអើយ ម្តេចក៏អាឯងមិនយកបងអាឯងមកច្បាំងនឹងអញ ឥន្ទជិត ក៏បានឮដូច្នោះ ក៏ក្រេវក្រោធ ភិរុលភិរោធសោះសា ។ ស្រីលក្សណ៍ អនុជាក៏វ៉ាប់រងទ័ពអសុរាក្នុងពេលនោះ ស្វាពីរបីហែកហួរយូរយាសត្វា ស្វាសោតសឹងគង់អាវុធ យក្សកាប់មិនមុត ក៏ស្វាចូលកាច់កយក្សា ពួកយក្ស និង ស្វាក៏រត់ចូលប្រឡូកប្រឡាក់ច្រើនសល់ ពួកស្វារឿងរិទ្ធិពល ខ្លះដកដើមព្រឹក្សាវាយយក្ស កង្ហល់យក្សស្លាប់គ្មានដល់ ក៏ក្បិណក្ស័យមរណោ អង្គត់រាជាកាបកាតយក្សា បោះទៅសមុទ្រយង់ឃ្នង ពលយក្សស្លោកស្លាប់ អាប់អស់អម្តរមេឃ ឥន្ទជិតអសុរាកាលហោបើ ឃើញពលស្លោកស្លាប់ ដូច្នោះហើយ ក៏បរដំរីពួរាវ៍ណ វិលមកវិញ ឡើងទៅថ្វាយបង្គំព្រះវររាជបិតា ពលគេ គេនៅត្រៀបត្រា ពលឯងមរណាពីរដណ្តប់សមុទ្រយង់ឃ្នង បពិតព្រះវរបិតា ក្បិណោណោះស្វាសកាចក្រៃ ធាត់ធំស្គីមស្លៃ មនោះមនះ សោះសា តែងប៉ផ្លាញពួកពលយក្សា ស្លាប់អស់ត្រៀបត្រា ពុំមានរស់មួយ ឡើយ ក្រុងទសមុខមារបានស្តាបដូច្នោះ ហើយថា ឱកូនអើយ ទៅស្រែក ហៅពួកពលមារ ពលមកច្រើនច្រុះចង្អៀត ឥន្ទជិតកងកេណ្ឌពលទៀត ប្រមាណបានដប់ពីរសមុទ្រយង់ឃ្នង ឥន្ទជិតបរពលរំពង រលឹងរលកសមុទ្រ ជលសា ធាក់ភ្នំដួលភ្នំ ទោះទាំងទេវតាសព្វឋាន មិនអាចហៅហាន



ប្រឡងចេត្តា ដកដើមប្រឹក្សាវាយវ៉ៃ ល្អិតល្អន់ ពពួកស្វាពលយក្សស្រៀវ ស្រែកចំអន់ យក្សខ្លះសំដែងចេស្តាហោះ កណ្តាលអាកាសាអាប់នភាល័យ ថ្លែងពីស្រុកសមរភូមិជ័យ កក្រើកខ្លាំងក្រៃរន្ធត់ញាបញ័រ ថ្លែងពីព្រះ លក្សណ៍ សារសើកទ័ពវិលវិញហើយណា ទូលព្រះជេដ្ឋារៀមបង អំពីរឿង ពេុះទ័ពជ័យរសុរា ។ ព្រះនារាយណ៍រាមាត្រាស់ថា ពិភេកអសុរា កក្រើក រំពើកខ្លាំងក្រៃ ហេតុនេះទ័ពជ័យមកពីណា ពិភេកដោះក្តារឈ្នួនពីក បូករុំយល់ដោយទូវទិព្វចក្ខុ នេះហើយទ័ពឥន្ទជិតអសុរា លើកមកត្រៀប ត្រាទ័ពទៀតហើយ ។ ព្រះនារាយណ៍រាមាព្រះបន្ទូលថា ស្រីលក្សណ៍ អនុជាប្អូនអើយ ទ័ពនេះវាមិនឈប់ឡើយ ប្អូនអើយលើកកងទ័ពយោធា ស្រីលក្សណ៍អនុជាបានស្តាប់ពាក្យបង កេណ្ឌកងយោធាបានពីរដណ្តប់សាគរ ចូលមកត្រៀបត្រា បរទៅអោយជិតលង្កា អោយទល់ទ័ពអសុរា នឹងបាន តទ័ពគ្នា ។ ឥន្ទជិតអសុរាសួរថា នេះទ័ពនរណា ? ព្រះលក្សណ៍ឆ្លើយថា អសុរា ! នេះទ័ពរបស់អញ ។ បើអាមនុស្សាចូលមកវាយគ្នាអោយឆាប់ ព្រះលក្សណ៍ឆ្លើយថា អសុរាចូលមកតយុទ្ធគ្នា ។ និយាយពីសហនុមាន តែងកាប់កាន់យក្សា ស្រឡះអស់មេឃា យក្សស្លាប់គ្មានសល់ឡើយ អធិកម្ម. អធិពលឡាំ កាលណាបើឃើញយក្សស្លាប់ដូច្នោះហើយ បររាជ

សីហ៍ចូលទៅក្នុងក្រុងលង្កាបូរី ដល់ហើយម៉បម៉ាយថ្វាយបង្គំទូលថា ទ័ពគេ តែនៅត្រៀបត្រា ទ័ពឯងមរណាក្សិណក្ស័យស្លាប់អស់ហើយ ក្រុងរាពណ៍ ខ្លាល់ណាស់ ទៅដណ្តើមឆ័ត្រជ័យ ឯនិពររស់ផែនដីដូចយប់សូន្យសុង ក្រុង ចាប់ពានស្មោសអោយបាន ពលវាប៉ុន្មានយើងចាប់អោយអស់ កាលណោះ ព្រះនារាយណ៍រាមា អស្ចារ្យ ថ្ងៃកំពុងរះហើយស្តេចឡើយអនការ ងងិត អស្ចារ្យ កើតយល់សូន្យសុង ហៅពិភេកហោរាមកគន់គូរដោយនូវទិព្វចក្ខុ ភិភេកឆ្លុះយល់ទាយទៅ តាមថ្នាក់ថា ក្រុងរាពណាសួរ ដំឡើងឆ័ត្រជ័យ ងងិតដូចយប់កលកាលរាត្រីឡោមហ៊ុំ សុំព្រះអង្គថ្លែងសរអារិទ្ធិច័ន្ទជាការ ប្រញាប់ ក្រែងគេឡោមហ៊ុំចាប់អស់ពួកស្វាបាន កាលណោះសម្តេចព្រះ អវតានទាញសរអារិទ្ធិច័ន្ទផ្លាញផ្លា បាញ់ទៅកាត់ឆ័ត្រជ័យ ក្រុងទសមុខមារ កាលណោះ សរថ្លាមានរិទ្ធិអស្ចារ្យទៅកាត់ឆ័ត្រ ជ័យធ្លុះធ្លាយគ្មានសល់ កាលណោះព្រះអនុជនាំពល ស្តេចយាងចូលដល់ថ្វាយបង្គំព្រះបង ព្រះ នារាយណ៍អរក្តាត់ថា ហៃប្អូនរត្នអ្នកមាសស្នេហ៍ស្នង ចូររកដំណាក់ សេពសោយក្រាយា ។ ក្សិណណោះ ពលស្វាក៏នៅក្បែមក្សាន្ត ។

៣៧- កាលណោះក្រុងទសមុខមារ ស្តេចក្រេវក្រោធភិរុលភិរោធ សោះសា ស្តេចអោយអាមាត្យទៅអញ្ជើញនៃកុម្ភិការ អាមាត្យរួសរាន់



ទៅដល់ហើយក្រាបថ្វាយបង្គំ ព្រះអវតានលើត្បូងសិរសា មានការបន្ទាន់ កុម្ភិការក៏បានស្តាប់ពាក្យអាមាត្យហើយ ក៏យាងចេញចាកប្រាសាទឋាន បានដល់ហើយក្រុងទសមុខមារមានព្រះបន្ទូលទៅថ្កានថា អញប្រើឯង អោយលើកទ័ពទៅវាយអាមនុស្សា បំផ្លាញពួកស្វាអោយក្សិណក្ស័យ កុម្ភិការ ស្តាប់ហើយក៏បរទ័ពចេញចាកក្រុងលង្ការាជបូរី ស្តេចបរទ័ពជ័យ យក្សាច្រើនសល់ កាលណោះស្រុកសមរភូមិជ័យកែវមរកត ញាប់ញ័ររន្ធត់ អោយអស្ចារ្យ ព្រះរាមក៏ត្រាស់ហៅពិភេកសារ ប្អូនអើយទ័ពមកពីណាចូល មកទៀត ពិភេកទូលថា នេះហើយទ័ពកុម្ភិការប្អូនរាពណ៍ ព្រះនារាយណ៍ រាមា មានព្រះឱង្ការ គួរប្រើអ្នកណាទៅតទ័ពបាន ពិភេកអសុរាថា ប្រើបា សុគ្រីព សុគ្រីពខែងនាំកងពល ចូលមកដល់ត្រៀបត្រាម៉បម៉ាយថ្វាយបង្គំ ព្រះអវតាន រួចហើយក្រាបលាបរពលទៅ បរទៅជួបនឹងពលកុម្ភិការ ឯយក្សនឹងស្វាទលមុខគ្នា កុម្ភិការសួរថា យើពលនរណា ? សុគ្រីពឆ្លើយ ថា ទ័ពរបស់អញ សុគ្រីពសួរថា ឯងឈ្មោះអ្វី ? យក្សាអញនេះឈ្មោះ កុម្ភិការ ។ កុម្ភិការថា ហៃបងសុគ្រីព យើងកុំបាច់ច្បាំងតតាំងអោយ ព្រួយ បើឯងដករាំងកល្បអោយអញមួយ៎ អញរ៉ាប់ចាញ់ សុគ្រីពឆ្លើយថា កុំភ័យ រាំងកល្បនោះដើមវាធំមួយសែនអោប ចុងវាបាំងសែងព្រះអាទិត្យ

ដល់អជដាកាលមណ្ឌល ឫសវាទៅក្រោមចាក់ប្រាំរយយោជន៍យល់សុគ្រីពក៏បានឮកុម្ភិការថាដូច្នោះហើយ ថាអើកុម្ភិការ ឯងកុំព្រួយនឹងរាំងមួយដើម ចាំមើលយើងនឹងដកអោយបាន ដកតាំងពីព្រឹកលុះលង់ដល់ថ្ងៃត្រង់ ម្លោះហើយរាំងកល្បក៏រលើងរលំ សួរស័ព្ទរណ្តំ សូរខ្លាំងក្រៃញាប់ញ័រទាំងផែនដី នគរដទៃក៏កក្រើក សត្វក្នុងព្រៃហេមពាន្តក៏ស្ទុះរត់សត្វដើរ សត្វហើរជើងបួនក្តី ដែលនៅក្នុងព្រៃក៏ផ្អកផ្អើល រលើងរលំដើងភ្នំបព្វតា ព្រះឥន្ទទេវតានៅពុំបាន រលកមហាសមុទ្រជោរជន់បែកផ្កាត្រែងក្នុងវេលានោះឯង សុគ្រីពក៏ថមថយកម្លាំង សោទោរទន់ព្រះកាយា កិម្ភិការស្ទុះភ្លោះហោះភ្លាម ចាប់សុគ្រីព សុគ្រីពក៏តតាំងច្បាំងនឹងកុម្ភិការ យល់ពុំបាន កុម្ភិការប្រុងបីពយកសុគ្រីព ទៅអោយដល់ឋាន កាលណោះព្រះអាទិត្យសូរិយាក៏ពុំរះ យប់ភ្លែតថ្ងៃភ្លែតអោយអស្ចារ្យរះហើយ ងងិតដូចកាលកល់រាត្រី ព្រះនារាយណ៍រាមាអស្ចារ្យក្រៃ ក្សត្រថ្លៃត្រាស់ហៅពិភេកហោរា ហេតុអ្វីងងិតអស្ចារ្យ ពិភេកអសុរាក៏តួរឆ្លះយល់ដោយនៅភេទនិស្ស័យ ពិភេកលើដៃបង្គំថា ឥឡូវយក្សវាចាប់បានបុត្រព្រះសិរិយាបានជាអស្ចារ្យងងិតក្រៃ ព្រះនារាយណ៍ថា ពិភេកសារ តើប្រើអ្នកឯណាទៅយកបាន ពិភេកលើកដៃថ្វាយបង្គំ ត្រូវប្រើមាអង្គត់ និង សហនុមាន



ទើបបានព្រះអង្គទ្រង់ត្រាស់មានវាចា ហៅសហនុមាន បាអង្គត់ បាហោះចំហុតទៅលង្កា ទៅយកសុគ្រីពបុត្រព្រះសូរិយា អោយឆាប់ប្រញាប់ការវិលវឹងខ្មី អង្គត់ សហនុមាន ក៏យកព្រះខ័នសៀតសឹក ព្រះកាយាក្រាបថ្វាយបង្គំអង្គក្សត្រាទៅឆាប់វៃ ហៀវហោះបំប្រុតចំហុតត្រង់តំរង់ក្រុងពរង្គារាជបុរី សូធ្យមន្តព្រះពាថាបំបាំងកាយ នៅចាំក្លោងទ្វារក្រុងយក្សាកុម្ភិការបីសុគ្រីពក៏ចូលទៅ ហនុមានពួននៅចាំក្លោងទ្វារឃើញទះតប់ធាក់យក្សា កុម្ភិការ ក៏សន្លប់បាត់ស្មារតី អង្គត់ស្រែកថា កាត់កទៅកុំទុកវានៅ ក្រែងរស់វិញ' សហនុមានថា កាត់ឯណាបានវាពកៃណាស់ពិភេកហោរាផ្តាំថា បើឈាមមួយដំណក់ស្រក់ដល់ដី កើតជាភ្លើងប្រល័យកល្ប ឆេះផែនដី ហនុមានត៏បីបុត្រព្រះសូរិយា បានដល់មកស្រុកសមរភូមិជ័យកែវមរកត ឡើងទៅថ្វាយបង្គំព្រះរានាយណ៍រាមា ទូលអំពីយក្សាអោយដករាំងកល្ប ព្រះនារាយណ៍រាមាថា បាឯងឆោតអោយគេបោកបានក្នុងសង្គ្រាមជ័យ កុំអីបាក្ស័យជីពជន្មា ។ យើងឈប់ស្លេះមិនចរចា ។

៣៨- ថ្លែងពីកុម្ភិការ ភ្ញាក់ខ្លួនហើយ ហើមមុខហើមមាត់ ឈឺឥតស្បើយ យំហើយទៅទូលក្រុងទសមុខមារ ' ក្រុងរាពណាសួរថា ប្អូនឯងឆោតគ្មានចិត្តក្រេវក្រោធសម្លាប់វា អោយវាធ្វើបាបដល់អុកឡុក ថាហើយ

នាំទៅបង្អកទឹករអាសោ មាននៅក្នុងស្រះអស៊ុរី ទឹករអាសោចូលពោះកាលណា ក៏ខឹងក្រោធ ភិរុលភិរោធសោះសា ហោះទៅយកមោងក្រសាក់ពីឋានព្រហ្ម ព្រះព្រហ្មអោយមោងក្រសាក់មកកុម្ភិការ មុខមោងក្រសាក់ពេលនោះមានច្រែះកាន់ បានហើយហិចហោះទៅនព្វមហាសមុទ្រ តាំងពុទ្ធី (រិទ្ធី) នឹងមាត់សមុទ្រ សំលៀងអោយអស់ច្រែះពីមោងក្រសាក់ បីថ្ងៃមិនទាន់ដាច់រលស់ ពេលនោះកក្រើកដល់ស្រុកសមរភូមិជ័យកែវមរកត ព្រះនារាយណ៍រាមាររស្មារុរហោស់ ស្តេចក៏ត្រាស់ហៅពិភេកហោរា ហេតុអ្វីក៏កក្រើកញាប់ញ័ររន្ធត់ ពិភេកហោរាព្ទបើយក៏ក្រាបទូល ដោយបង្វិលហោរមិព្វចក្កុពពក់បាំង ទូលថាមានយក្សមួយឈ្មោះកុម្ភិការ សំលៀងហោងក្រសាក់ នឹងមាត់សមុទ្រ សន្យាថាបើដាច់ច្រែះ ពីមោងក្រសាក់កាលណាក្រុងលង្កាបូរីក៏លែងសូន្យ មោងក្រសាក់នោះពូកែរឿងរិទ្ធី ព្រះនារាយណ៍ទ្រង់ជ្រាបហើយថា បើដូច្នោះយើងនឹងប្រើនរណាទៅបំផ្លាញបាន ក្រាបទូលអវតាននៅតែបីទិវាទេ ពិភេកហោរាថា បានតែបាហនុមាន ព្រះរាមត្រាស់ប្រើរាជក្របីស្រីពានរស្វាសសុទ្ធ បុត្រព្រះពាយ សេនាអង្គព្រះនារាយណ៍ជាមេទ័ព ។ ហនុមានបានស្តាប់ហើយថ្វាយព្រះបង្គំ ទ្រង់គ្រឿងអលង្ការយកព្រះខ័នថ្លាមកសៀតស៊ក ហើយលឿនស្ទៅសំដៅព្រង់



កុម្ភិការកំពុងហោមពិធីតាំងសិល្ប ហនុមានសូធ្យមន្តព្រះគាថាក្រឡាជាវ៉ែក្តស្លាប់ស្អុយគគ្រុក មានដង្កូវរុករលួយរលំ អណ្តែតតាមរលក ដល់ជិតមកហើយលោតទៅពាក់លើក្បាលកុម្ភិការ កុម្ភិការក៏ភ្ញាក់ដាច់ពុទ្ធី បាត់អំពីវ៉ែក្តស្អុយ កើតជាហនុមានកម្លាំងហៅហាន កាន់ព្រះខ័នថ្លា ប្រយុទ្ធប្រយោងញាំងកុម្ភិការ កុម្ភិការធនទៅពុំបាន ចាញ់ដៃហនុមានចូលរូងភ្នំចូលជ្រោះភ្នំពោមកំពូល ថ្លែងពីហនុមានបុត្រព្រះពាយ ឃើញកុម្ភិការចូលរូងភ្នំ ម្លោះវាទៅអង្គុយនៅរន្ធភ្នំ រន្ធភ្នំធំប៉ុណ្ណា កន្ទុយហនុមានក៏ប៉ុណ្ណោះកើតជាកន្ទុយពេជ្រ ចាក់កុម្ភិការ កុម្ភិការក្សិណក្ស័យមរណា ថ្លែងពីសហ-នុមាន ក៏បានដឹងថា កុម្ភិការក្សិណក្ស័យ ក្នុងរូងបព្វតាដូច្នោះហើយ ក៏ហៀវហោះផ្ទើកផ្ទោះ មកស្រុកសមរភូមិជ័យ អធិកម្ម និងអធិពលឡាំ ដែលបររាជរថយាមល្បាត ឃើញកុម្ភិការក្ស័យក្នុងរូងភ្នំ ដូច្នោះហើយក៏បររាជរថចូលក្រុងលង្កា ម៉មម៉ាយថ្វាយបង្គំក្រុងទសភគ្រ្តា ក្រុងទសមុខមារកន្លងមួយទិវា ក៏បានឃើញ អធិកម្ម អធិពលឡាំ ចូលមកគង់គាល់ ថាអើរអធិកម្ម អធិពលឡាំ អាឯងមកគង់គាល់អ្វីអញ អធិកម្ម អធិពលឡាំក៏បានទូលថា កុម្ភិការក្សិណក្ស័យ ជីវិតនៅក្នុងរូង រទាន់បព្វតា ក្រុងទសភគ្រ្តាថា ឱកុម្ភិការ អូនមាសបងអើយ មិនគួរមកចាញ់ដៃអាស្វាស ។

៣៩- ម្លោះហើយកោះហៅរាពេព្យ អោយទៅអញ្ជើញឥន្ទជិត អសុរាឥន្ទជិត អសុរាបានស្តាប់អាមាត្យដូច្នោះហើយ ករៀបប្រដាប់ស្អាយធ្នូសរជ័យ បរថ្វាយបង្គំព្រះបិតា ដងនេះក្រុងហារមាសមិត្តយល់ក្រុងឥន្ទជិត ជាបុត្រឡើងតាល់អសុរា ទសភ័ក្ត្រត្រាស់ថា ឱកូនមាសបិតា អោយលើកពលយក្សា ទៅវាយរាមនុស្ស អោយក្សិណក្ស័យប្រល័យជីវិត ម្លោះហើយឥន្ទជិតអសុរា ក៏ខែងខំកងពល ចូលដល់ត្រៀបត្រា លើកទ័ពគគ្រឹកគគ្រេង ឆាកហ៊ោរយកជ័យឆោឡោអឹងកង ឈាប់ស្លេះត្រង់ណោះមិនចរចា ទៅនិយាយពីស្រុកសមរភូមិជ័យកែវម៉ែរកត ញាប់ញ័ររន្ធត់អោយអស្ចារ្យ ព្រះនារាយណ៍រាមាអង្គក្សត្រា ហៅពិភេកហោរាមកគន់គូរពិភេកដោះក្ដារឃ្នេនពីក គន់គូរឆ្លុះយល់ដោយហោរទិព្វចក្ខុ ទូលថាគ្មានទ័ពអ្នកណាឡើយ នេះហើយទ័ពឥន្ទជិតអសុរា ព្រះនារាយណ៍រាមាត្រាស់ហៅទៅស្រីលក្សណ៍អនុជា អូនអើយរៀបទ័ព សង្គ្រាមជ័យបរទៅវាយក្រុងយក្សា ស្រីលក្សណ៍អនុជា ក៏ភ្ជុំអស់ពួកពលសេនា ចូលដល់ត្រៀតត្រាថាយើងវាយយក្សាម្ដងទៀត ទៅដល់ទ័ពនិងទ័ពក៏ទល់គ្នា ឥន្ទជិតអសុរាក៏សួរថា ទ័ពនេះទ័ពនណា ព្រះលក្សណ៍សារ ឆ្លើយថាទ័ពអញ ឱព្រះលក្សណ៍ ឯងមិនអោយបងឯងមកច្បាំងនឹងអញ ព្រះលក្សណ៍ឆ្លើយថា



ឥន្ទជិតអសុរា ឯងអោយព្រះបិតាឯង មកច្បាំងនឹងអញទើបសម ម្លោះហើយស្វានឹងយក្ស ក៏កាប់ចាក់ប្រឡូកប្រឡាក់ច្បាំងគ្នា ងាប់យក្សច្រើនសល់ សហនុមានក៏កាប់យក្សា បោះទៅកណ្ដាលសមុទ្រជលសា ក្រុងយក្សាក៏ស្លាប់ច្រើនសល់ និលពេជ្រ និលឯក ក៏កាប់សម្លាប់យក្សា យក្សណាធំមាអង្គត់ ក៏កាប់សម្លាប់យក្សា យក្សក្ស័យមរណាក្នុងមហាសាគរ កាលណោះឥន្ទជិត អសុរា ទៅគាល់ព្រះវររាជបិតា ពលគេនៅត្រៀបត្រាពលឯកមរណាពាសពេញមហាសមុទ្រយង់ឃ្នង ខ្ញុំសូមក្រាបលាព្រះវរបិតាទៅតាំងបុទ្ធីសរនាគកប្បាសថ្លាញថ្លា ថាហើយអសុរាក៏ហោះទៅខ្នងភ្នំភ្នំនោះនាមឈ្មោះហៅភ្នំបាយុដុះ ខ្ពង់ខ្ពស់ធាធំ ចូលទៅតាំងពុទ្ធីនៅក្នុងរូងភ្នំ សរនោះបៀតទុំកក្រើកញាប់ញ័រ កក្រើកដល់ស្រុកសមរភូមិជ័យ ព្រះនារាយណ៍រាមាក្សត្រថ្លៃ ព្រះអង្គអស្ចារ្យ ត្រាស់ហៅពិភេកអសុរា ពិភេកអសុរាក៏បានម៉បម៉ាយថ្វាយបង្គំ ព្រះអង្គមានព្រះបន្ទូលសួរពិភេកហោរាថា ហេតុអ្វីក៏កក្រើកអស្ចារ្យ មានទ័ពអ្នកឯណាលើកមកទៀត ពិភេកឆ្លុះយល់ទូលថា នេះគឺឥន្ទជិតអសុរា ចូលទៅតាំងពុទ្ធីក្នុងរូងភ្នំ បើទុំសិល្បតាំងពុទ្ធីកាលណា លង្កាបូរីក៏លែងសូន្យ ព្រះនារាយណ៍រាមាក៏មានព្រះបន្ទូលថា បើដូច្នោះអោយអ្នកទៅបណ្ដាច់ពុទ្ធីយក្សបាន ពិភេក

អសុរាទូលថា បានតែមាអង្គត់ ថាហើយព្រះនារាយណ៍រាមា ក៏ត្រាស់ហៅបាអង្គត់ បាអង្គត់បាន ឮហើយ ក៏ចូលថ្វាយព្រះបង្គំ ព្រះអង្គត្រាស់ថា អញប្រើបា ទៅបំផ្លាញពុទ្ធីយក្សនៅក្នុងរូងភ្នំ អង្គត់ស្តាប់ហើយក៏ចាប់ព្រះខ័នសៀតសិរ ចាប់គ្រឿងអលង្ការយកមកទ្រង់ ទ្រង់ស្រេចក៏ហោះលើនស្ទៅសំដៅចំដល់ទៅរូងភ្នំ ក្លែងកាយាជាសត្វខ្លាឃ្មុំ ឡើងបញ្ហាឥន្ទជិតអសុរាក៏ភ្ញាក់ភ្លាត់ទតទៅឃើញសត្វខ្លាឃ្មុំ យិតសរជ័យថានឹងបាញ់ ក្លាយកើតរូបអង្គត់ស្វាស ឥន្ទជិតឆ្លើយថា យើអង្គត់ឯងពោះមួយជាមួយអញ កុំអីអញបាញ់ក្ប៉ាលឥឡូវ អង្គត់ឆ្លើយថា ឥន្ទជិតអសុរា ឯងប្អូនអញ កុំអីអញសំឡាប់ឯងឥឡូវ ថាហើយអង្គត់ក៏វិលវឹងមកដល់ស្រុកសមរភូមិជ័យកែវមរកត ទូលអង្គព្រះនារាយណ៍រាមា ខ្ញុំបានទៅបណ្តាច់សិល្បយក្សានៅក្នុងរូងភ្នំបព្វតា ព្រះនារាយណ៍រាមាស្តេចត្រេកអរ ថាអើបាអង្គត់បានដូចសេចក្តីប្រាថ្នា ឥន្ទជិតក៏បានហោះថ្កានព្រះបិតា មានស្វាសកាចក្រៃបណ្តាច់សិល្បសរ ជ័យមិនបានសំរេច ក្រុងរាពណ៍ឆ្លើយថា កូនមាសព្រះបិតាគ្មានអ្វីកំបាំងនឹងវាទេ គ្មាននណាឆ្លុះយល់ទេមកអំពីអាបង អាប្អូនរបស់ឯងកូនអើយ វេលាថ្ងៃស្អែក ត្រូវកូនលើកពលទៅវាយអាមនុស្សាអោយវាក្សិណក្ស័យ ។



៤០- ឥន្ទជិតអសុរា ក៏ខឹងខែងកេណ្ឌពល បានដប់ពីរសមុទ្រសោតសល់ កក្រើកដល់សមរភូមិជ័យដូចដើម ។ ព្រះនារាយណ៍រាមាត្រាស់ថា ហៃបាពិភេកកុំឆ្ងាយពីអញ កក្រើកនេះតើទ័ពនរណាមកទៀតពិភេកអសុរាទូលថា នេះទ័ពឥន្ទជិតអសុរាកូនរាពណ៍ ប៉ុន្តែក្នុងវេលាពេលនេះ អោយព្រះលក្សណ៍ទៅពុំបាន អោយតែហនុមានទើបបានការ នាំពលកងយោធាទៅវាយអសុរា ពេលនោះស្រីលក្សណ៍អនុជាយល់ពុំព្រម ដូចជាឯងល្អមរអាខ្លាចសឹក ធម្មតាជាអ្នកតសង្គ្រាម បើមានទ័ពចូលពេលណាត្រូវតែពេលនោះ ថាហើយព្រះអង្គក៏ថ្វាយបង្គំព្រះនារាយណ៍រាមាពិភេកត្រាស់ថា ហៃស្រីលក្សណ៍អនុជា ប្អូនភ្នាពេលនេះណា អោយប្រយ័ត្នខ្លួន កុំភ្លេចស្មារតី ក្រែងក្រុងអសុរីលួចថ្លែងសរ ថាហើយថ្វាយបង្គំលាព្រះនារាយណ៍រាមា ក៏អនុញ្ញាតិនាំពូកពលសេនា ទាំងពីរដណ្តប់អង្គប្រាណ បរទ័ពទៅបានជួបមុខគ្នា ឥន្ទជិតអសុរាថា ព្រះលក្សណ៍សារពេលនេះលេងគ្នាអោយដឹងតេជដៃ ព្រះលក្សណ៍ឆ្លើយថា អសុរីអញគ្មានភិតភ័យអ្វីសោះចូលមកអាទូរយសអាអប្រិយ អស់ពួកស្វា និងយក្សចំបាប់គ្នា យក្សមួយស្វាពីរខាំអោយក្ស័យ ហនុមានបាអង្គត់ក៏ខំប្រឹងវាយយក្សក្ស័យមរណាស្លាប់គ្មានសល់ ឥន្ទជិតបន្លឺថ្លែងសនាគកប្បាស ត្រូវត្រង់ព្រះលក្សណ៍សារ

ដូលកណ្តាលភីនផែនដែនពសធា ឥន្ទជិតអសុរាក៏រត់ចេញបាត់ ឃុនទល់ឃុននិល ក៏បានដឹងការណ៍ មកថ្វាយបង្គំព្រះរាមាជាប្រញាប់ ព្រនារាយណ៍ប្រាប់ទៅសុគ្រីពភ្លាម ព្រះអង្គយាងគង់យាងមួយរំពេច ឃើញនាគរុំជើងទៅដល់ក ជលនេត្រសោកាល័យ ឱសឱប្អូនអើយសមក្សិណក្ស័យចោលបងម្នាក់ឯងកណ្តាលទ្រូងព្រៃ ពិភេកទូលថា កុំសោកាល័យសូមព្រះបាញ់សរជ័យទៅសួរគ៌ា អោយបានដឹងដល់ស្តេចគ្រុធា ព្រះនា-រាយណ៍រាមា សរសេរអក្សរាបិតនឹងចុងសរ ហើយបាញ់ទៅត្រង់ព្រះបាទឡិសតិ ស្តេចគ្រុធាចាប់សរបានហើយ មើលអក្ខរាស្រីលក្សណ៍អនុជាត្រូវសរនាគកប្បាស ព្រះបាទឡិសតីក៏កេណ្ឌអស់ពួកគ្រុឌ ចុះមកចំហុតច្រើនត្រៀបត្រា ឯសរនាគកប្បាសក៏រលាតអស់ ហើយរត់ផ្លេកផ្លោះចូលបំពង់មាសវិញ ស្រីលក្សណ៍អនុជាបានក្រោកឡើង ព្រះនារាយណ៍រាមានាំស្រីលក្សណ៍អនុជា មកថ្កានស្រុកសមរភូមិជ័យកែវមរកត ។ ក្សិណណោះ ក្រុងយក្សាលើកពលត្រៀបត្រាចូលចំហុត ចូលមកច្បាំងទៀតតាមកំណត់ សន្ធត់ច្បាំងគ្នាដូចសព្ទដង ។ កាលណោះព្រះលក្សណ៍ប្អូន ភ្វាក៏លាបងនាំពលអឹងកងចូលវាយគ្នា ស្វាសសម្លាប់យក្សស្លាប់ច្រើនសល់ដេរដាសពាសពេញទាំងពសុធា សមុទ្រជលសាក៏គោកទឹក ស្លាប់អស់នៅ



តែឥន្ទជិតអសុរា មកទូលព្រះបិតាក្រុងទសភក្រ្ត ពលគេ គេនៅត្រៀបត្រាជាក់ ពលឯងមរណាគ្មានសល់មួយ ព្រះលក្សណ៍សារក៏លើកទ័ពត្រឡប់មកវិញ ឥន្ទជិតអសុរា លាព្រះបិតាទៅតាំងពុទ្ធីទៀត ទៅតាំងពុទ្ធីឯរូងរទាន់បព្វតា ហៅថាឯនើនចក្រវាល តាំងពុទ្ធីសរថ្លា សរនោះនាមឈ្មោះថា សរព្រះព្រហ្មាសផ្លាញថ្លា តាំងសិល្បក្រោមដើមនរុទ្ធាន្ទិ ។

៤១- កាលណោះ ក្រុងទសមុខមារ ភ្ញុំទាំងអស់យោធាដប់ពីរអង្គប្រាណ ហើយក៏មានព្រះបន្ទូលថា តើអ្នកណាមួយក្លែងភេទជានាងសិតាអាមាត្យទូលថ្កានថា មានតែចៅសុកកាចារ បើដូច្នោះអាមាត្យអើយទៅដោះចៅសុភកាចារអោយបានឆាប់ អាមាត្យទៅដល់ប្រាប់នាយគុកប្អូនអោយដោះចៅសុភាកាចារមកអោយឆាប់ នាយគុកក៏បានដោះចៅជាការឆាប់ ម្លោះហើយក៏នាំចៅសុភកាចារមកថ្វាយក្រុងទសភព្រក្តា ។ក្រុងទសមុខ ក៏បានឃើញចៅសុភកាចារមកដល់ដូច្នោះហើយថា ឱចៅសុភកាចារអើយ ឯងនិមិត្តជានាងសិតាបានឬមិនមែន ចៅសុភកាចារទូលថា ខ្ញុំកាឡាខ្លួនបាន បើដូច្នោះហើយឯងត្រូវកាឡាខ្លួនជានាងសិតាទៅច្បាំងនឹងមាកុម្ភណ្ឌ វេលាថ្ងៃស្អែក សុភកាចារក៏បានស្តាប់ហើយ លុះលង់ព្រឹកព្រាងស្វាងស្រឡះ ចៅសុភកាចារកាឡាខ្លួន ជានាងសិតាបានសុទ្ធសាធ

ដូចអង្គព្រះនាង ទ្រង់ទ្រាយល្អល្អះ មើលទៅមុខដូចវង់ព្រះចន្ទ្រា ហាក់ដូចស្រីសួគ៌ាទេវលោក ម្លោះហើយមាកុម្ភណ្ឌ ក៏ចាប់យកដាក់លើរាជរថបំប្រុតទៅ បររាជសីហ៍. សិង្ហ. សីហ៍ពលយក្សគគ្រាក់ហែស្តេចទៅរឿងត្រង់នោះយើងស្ទេះនៅ ។ យើងនឹងថ្លែងទៅព្រះរានាយណ៍រាមា កក្រើកញាប់ញ័រទាំងពសុធា ហៅពិភេកហោរាមកឆាប់រ៉ុយ ពិភេកថ្វាយបង្គំព្រះអវពោធ ព្រះអង្គសួរពិភេកថា ហេតុអ្វីក៏កក្រើកញាប់ញ័រផែនដី ពិភេកទូលថា នេះហើយក្រុងអសុរីកុម្ភណ្ឌយក្សា លើកទ័ពបកច្រើនក្រៃ ព្រះអង្គក៏ទ្រង់ត្រាស់ហៅព្រះស្រីលក្សណ៍អនុជា ហៃប្អូនពុំងាររមាសថ្លើមថ្លៃ ពួកយក្សាលើកទ័ពមកច្រើនក្រៃ ព្រះលក្សណ៍ឆាប់រៃកេឈ្មោយោធា ពលដប់ពីរសមុទ្រសុទ្ធសឹងស្វា កាន់ព្រះខ័នថ្លាចរចូលយុទ្ធ សេនាទាំងពីរដណ្តប់អង្គប្រាណគ្នានរូញរា ត្បិតបានពិលាថ្ងៃនោះហើយ បាអង្គត់នូវហនុមាន កេសជម្ពូពាន និលខាន់ និលឯក និលផាត់ សុទ្ធសឹងរិទ្ធីពលពង្សចតុរង្គយោធាទៅវាយយក្សាអសុរាមារ លើកទ័ពទៅទល់មុខគ្នាកុម្ភណ្ឌយក្សាឆ្លើយថា ព្រះលក្សណ៍ មកច្បាំងធ្វើអ្វី ច្បាំងឥតការរត្នរាជសិតាអញសំឡាប់ថ្ងៃនេះហើយ ដាក់ចៅសុភកាចារលើរាជរថ ខំបរបំប្រុតលើអាកាសសាព្រះមាតុលីសារថីទេវបុត្រ ឡើងបររាជជំនិះជំនាញ នៃព្រះលក្សណ៍ ឯយក្ស



និងស្វាសច្បាំងគ្នាច្រើនសល់ ពួកពង្សាពានរឹងរិទ្ធីសល់ កាប់យក្សកំហល់ក្បិណក្ស័យត្រៀបត្រា ។ កុម្ភកណ្ឌយក្សាថា នៃមនុស្សា ច្បាំងអ្វីឥតការរត្នរាជសិតាក្ស័យថ្ងៃនេះហើយ ព្រះលក្សណ៍ទ្បេងទតមើលទៅ ឃើញនាងសិតានៅលើរាជរថអសុរា ព្រះអង្គស្តេចទ្រង់សោកា ឱបើព្រះបងក្បិណក្ស័យថ្ងៃណាប្អូនសុំក្ស័យផង ថាហើយក្បិណក្សត្រច្បាស់ច្បងហៅថា សបរេុមានមកជួយមើលសិពា សហានុមានក៏បានដឹងការណ៍ ស្រែកហៅថា ព្រះស្រីលក្សណ៍ប្អូនភ្វា ឆាប់ថ្លែងសរទៅកុំនៅរួញរា យក្សប្រែកាឡាទេណោព្រះប្អូន ព្រះលក្សណ៍សែនសោកយោបំទតហើយស្តេចយំទឹកភ្នែក អំភ្លាង សហានុមានប្រើអាមាត្យមួយអោយទៅហៅពិភេកហោរាអោយឆាប់រួសរាន់ អាមាត្យទៅដល់ហើយក៏ថ្វាយបង្គំ បាបុត្រព្រះពាយត្រាស់ប្រើអញខ្ញុំមក អញ្ជើញព្រះអង្គឆាប់យាងមកអោយឆាប់ ពិភេកអសុរាកាលបើបានដឹងការណ៍ ស្តេចយាងប្រញាប់មកដល់កងទ័ពព្រះលក្សណ៍អនុជា ហៅពិភេកអសុរា ជួយមើលសិតាពិតមែនឬអ្វី ពិភេកអសុរាទតមើលសិតា នៅលើរាជរថ ស្តេចទ្រង់ព្រះកន្សែង ថ្វាថ្លែងទៅថា គឺចៅសុភកាចារ កូនអញទេតើ កូនអើយ អើកូន ថ្ងៃនេះ អ្នកក្ស័យស្លាប់ចោលបិតា ពិភេកសោកាសូនសព្ទលុះលង់ កុម្ភណ្ឌឆ្លើយថា វើយអាមនុស្សា អញ

ប្រហារសិតាឥឡូវហើយ ដៃមួយកាន់ខ័នថ្លា អារព្រះសុរងនៃចៅសុភកាចារដាច់ភ្លាម ហនុមានស្ទុះភ្លែតចាប់កុម្ភណ្ឌជាប់ ដៃមួយកាន់ព្រះសែងថ្លា (ព្រះខ័ន) ដៃមួយចាប់ព្រះសិរសា ជើងមួយជាន់ករអារព្រះសុរងធ្លាក់ចេញ ក៏លើកចោលទៅកណ្តាលសាគរ ក្សិណក្ស័យមរណាទាំងនាយ ទាំងពលក្រុងយក្សកំហល់គ្មានសល់មួយឡើយ ពេលនោះអធិកម្ម អធិពលឡាំ ក៏បានទតយល់មាកុម្ភណ្ឌក្សិណក្ស័យ ដោយដៃបាហនុមាន បុត្រព្រះពាយដូច្នោះហើយ ក៏ញាក់រាជសីហ៍ចូលទៅក្រុងលង្កាបុរី ដល់ហើយម៉បម៉ាយថ្វាយបង្គំ ព្រះអវតាន ព្រះចៅលង្កា ក៏បានសួរអធិកម្ម អធិពលឡាំថា ឱអធិកម្ម អធិពលឡាំ ថ្ងៃនេះឯងមកតង់គាល់អញមានការអ្វី អធិកម្ម អធិពលឡាំ ក៏បានទូលថា មាកុម្ភណ្ឌក៏បានក្សិណក្ស័យក្នុងសង្គ្រាម ទសមុខមារបានស្តាប់ដូច្នោះហើយ ក៏ក្រេវក្រោធុភិរោធរោះសា ក្តៅដូចគេយកព្រះកាលទៅអុជអាល ពុំនោះដូចគេយកពិសសរខ័នថ្លា ទៅអារព្រះសុរងអោយធ្លាក់ចេញ ព្រះនេត្រទុំទែងដូចអាគី គគក់ព្រះឱរាសោកាល័យ ឱមាកុម្ភណ្ឌប្អូនអើយ មិនគួរអូនមកក្សិណក្ស័យចាញ់ដៃស្វាសកាព់កបាន ប្អូនឯងរឿងរិទ្ធីល្បីសព្វឋាន ទេវតាក្នុងវិមាន



កោពចេស្តាឥឡូវនេះមកចាញ់ដៃអាស្វាសអោយអាស្រូវកាសខ្មាសទេវតា។ រឿងត្រង់នេះស្លេះទុកសិន ។

៤២- ទៅនិយាយពីឥន្ទជិតអសុរា ខ្វះបីទិវា នឹងទុំសិល្ប កក្រើកញាប់ញ័រខ្ទរផែនដី ស្រុកសមរភូមិជ័យញ័ររន្ធត់ ព្រះនារាយណ៍រាមា ស្តេចអស្ចារ្យ ហៅពិភេកអសុរាមកគន់គូរ ពិភេកហោរាដោះក្តារឈ្នួន ហើយបូកគុណគន់គូរតាមគម្ពីរ ភេទធ្លុះយល់ត្រ័យលោកទាំងបីប្រការ ឥតកំបាំងនឹងព្រះនេត្រទិព្វ អសុរាទៅតាំងពុទ្ធីសរព្រហ្មមាសផ្លាផ្លា ខ្វះបីទិវាសិល្បនឹងទុំ បើកាលណាទុំហើយ ក្រុងលង្កាបូរីក៏លែងសូន្យ នឹងបាញ់សរព្រហ្មមាសឆេះផែនដី កើតភ្លើងប្រល័យលក្សឆេះទាំងអស់ ព្រះនារាយណ៍មានព្រះបន្ទូលថា បើដូច្នោះប្រើអ្នកឯណាទៅ ទើបបានពិភេកក្រាបទូលថា ត្រូវប្រើមាអង្គត់ ព្រះនារាយណ៍រាមាមានព្រះបន្ទូលទៅហៅមាអង្គត់ អង្គត់ឮហើយចូលថ្វាយបង្គំ ព្រះនារាយណ៍រាមាក៏ត្រាស់ប្រើ អញប្រើបាឯងទៅបំផ្លាញពុទ្ធីរាពណ៍ យក្សនោះឈ្មោះឥន្ទជិតអសុរា វាទៅតាំងពុទ្ធីបឹងរូងភ្នំ ឯណើនចក្រវាល ក្នុងរូងភ្នំក្រោមនរុប្លាន្តិ អង្គត់ឮហើយថ្វាយបង្គំ ហើយថយក្រោយចាប់ព្រះខ័នក៏កាន់ហោះផ្លោះទៅលើអាកាសា តម្រង់ជ្រុងភ្នំឯណើនបព្វតា ដល់ទៅ

រូបភ្នំកាលណាកាឡាខ្លួន ជាខ្លាឃ្មុំធំកន្ទ្រាញ ឥន្ទជិតកំពុងភាវាសិល្ប លោតឡើងពីក្រោយខ្នង កន្លងសិរសាឥន្ទជិត ក៏ភ្ញាក់ធ្លាក់សរសិល្ប យិតសរថ្លាបាញ់អាសព្វខ្លា អង្គត់ប្រាណប្រែក្រឡាមកវិញ ឥន្ទជិតថា យើបងអង្គត់ កាលតាំងសិល្បពុទ្ធីមុនក៏បំផ្លាញ ឥឡូវនេះមកបំផ្លាញទៀត អញចង់យិតសរសិល្បបាញ់បំបែកសិរសា អង្គត់ឆ្លើយថា បើឯងបាញ់អញខ្ញុំដាច់ព្រះសុរងឥន្ទជិតពេលនេះ អញយល់ត្បិតបង កុំអីក្សិយក្ស័យប្រល័យជន្ម អង្គត់ឆ្លើយថា អញយល់ត្បិតប្អូន កុំអុីសោះសូន្យក្ស័យជីវាអ្នកទាំងពីរកែរខាន ថាហើយប្រែប្រាណវិលវិង ផ្លងអង្គត់ខំហោះដល់ស្រុកសមរភូមិជ័យ ស្តេចឡើងវិលវៃទូលក្សាត្រក្សាន្ត ខ្ញុំក៏បានទៅបណ្តាច់សិល្បឥន្ទជិតអសុរាបានដូចសេចក្តីប្រាថ្នា ព្រះអវតានព្រះនារាយណ៍រាមាស្តាប់ហើយព្រេកអរក្រៃ ក្សត្រថ្លៃគង់នៅដូចសព្វដង ។ ផ្លែងពីឥន្ទជិតអសុរាហិចហោះមកដល់ក្រុងលង្កា ក្រាបទូលព្រះបិតាទសមុខមារ ដែលទៅតាំងពិធី មិនបានដូចប្រាថ្នាត្បិតមានសត្វខ្លាលោតឡើងពីក្រោយខ្នង យិតធ្នូសរនឹងបាញ់កើតស្វាស ក្រុងរាពណ៍ក្រេវក្រោធពិរោធសោះសា យោបល់ទាំងនេះគ្មាននរណា គឺថាអាបងអាប្អូនរបស់ឯង គ្មានអ្វីកំបាំងនឹងវា



បើពួរក្រុងពលថា វារកឃើញ ហៃកូនមាសព្រះបិតា យើងនឹងតិតការសង្គ្រាមតទៅទៀត ។

៤៣- ម្លោះហើយវាយស្គរទ័ព ក្នុងនគរមារ យក្សហោះមកដល់ត្រៀបត្រាច្រើនចង្អៀត ឥន្ទជិតទៅបើកយកព្វារីណក្បាលប្រាំបី ដីរនោះភ្ញុកធំប៉ុនកង់រាជរថ បាំងនេះទៅនៅក្លឹងក្លសចាមរបៃបង់ សែនត្វាន់សប្បធមិច្រើនជាន់ ឥងតូចឥងធំលេងភ្លេងរងំ ទេវតាហោះហៃត្រៀបត្រា កក្រើកអំពើកសព្វព្រៃព្រឹក្សា រលកទព្វមហាសមុទ្ររន្ធត់សោះសា និយាយពីស្រុកសមរភូមិជ័យកែវមរកត ញាប់ញ័ររន្ធត់សោះសា ព្រះរាមហៅពិភេកអសុរា ពិភេតមកដល់ហើយថ្វាយព្រះបង្គំ ព្រះនារាយណ៍សួរថា ទ័ពនរណាចូលមកទៀត ពិភេកទូលថា នេះគឺទ័ពរាជបុត្ររាពណ៍នាមឈ្មោះឥន្ទជិតអសុរា ព្រះរាមត្រាស់ ប្រើអ្នកណាទៅតសង្គ្រាមបាន ពិភេកទូលថា ព្រះអវតាន ទៅមិនបានមានគ្រោះថ្នាក់ ថាហើយព្រះនារាយណ៍រាមា ហៅស្រីលក្សណ៍អនុជា ចូលមកជិតប្រាប់ថា ថ្ងៃនេះផ្អាកសង្គ្រាម បងមិនអោយប្អូនទៅ សុំអោយប្អូននៅមួយទិវា ស្រីលក្សណ៍ថានៅឈប់មិនបាន ត្បិតអ្វីក្រុងយក្សាក្លៀវក្លាហាន លើកពលរាប់សែនសមុទ្រចូលមកហើយ បើយើងឈប់នៅមិនត នឹងវាឡើយយល់ជាខ្លាស់វា

បរាជ័យ វានឹងថាយើងល្ងាល្ងន់សឹក ថាដូច្នោះហើយអង្គព្រះនារាយណ៍ក៏បានស្តាប់ខិតប្អូនយល់ជាមិនបានដូច្នោះ ក៏ប្រាប់ពិភេកហោរា ពិភេកហោរាបានស្តាប់ ព្រះនារាយណ៍រាមា មានព្រះបន្ទូលដូច្នោះហើយ ក៏ហៅស្រីលក្សណ៍អនុជា ប្អូនភ្ជាមកប្រាប់ប្រាណថា អើស្រីលក្សណ៍អនុជាប្អូនអើយ បើប្អូនមិនឈប់ឡើយ បើបាញ្ញភ្លេងឃើញរបាំ ល្ខោនព្រះឥន្ទ្រានាស្រីសួគ៌ាមករាំ ប្អូនកុំមើលឡើយ បើមើលហើយនឹងមានគ្រោះថ្នាក់ថាហើយត្រាស់ប្រើទៅបាបុត្រព្រះពាយ សេនាអង្គព្រះនារាយណ៍មកប្រាណេប្រាប់ សហានុមានបានមកដល់ ថ្វាយព្រះបង្គំព្រះនារាយណ៍រាមាពិភេកប្រាប់ថា បាហនុមានចូលសង្គ្រាមថ្ងៃនេះ ប្រយ័ត្នការ ក្រែងហានគ្រោះថ្នាក់ត្រូវភិនអសុរា ដ្បិតអីពេលនេះមានគ្រោះថ្នាក់ សហានុមានបានស្តាប់ជាក់ដូច្នោះហើយពុំតំអក់ឡើយ ថ្វាយបង្គំសុំលាពិភេកអសុរា នាំស្វាចូលក្នុងព្រៃបេះផ្លែឈើផងដទៃ គឺល្មុត, មង្ឃុត, ល្មុតសេដា , ពោកប្រេង, ម៉ាក់ប្រាង, មាក់សាង, មាក់ដោក, ផ្លែគុយ, គូលែន, មៀន , សិរមាន់ ស្វាខ្លះបេះបានស៊ីប្រញ៉ាយ ខ្លះលោតសប្បាយពីក្នុងព្រឹកព្រៃ ។ ឈប់ស្ដែះត្រង់នេះអស់និទាន ថ្លែងពីក្សត្រក្សាន្តលើទ័ពជ័យ រំពងរំពើនពីកកងក្រៃ លើកទៅទល់ទ័ព នឹងអសុរា ឥន្ទជិតអសុរាសួរថា ទ័ពនរណា



ទ័ពព្រះលក្សណ៍ឬអ្វី ព្រះលក្សណ៍ថា អើទ័ពអញ អសុរា . អើព្រះលក្សណ៍ឯងមិនអោយបងឯងមកច្បាំងនឹងអញ ព្រះលក្សណ៍សារឆ្លើយថា អើឥន្ទជិតអសុរា ឯងមិនអោយព្រះបិតាអាឯងមកច្បាំងនឹងអញ នែអសុរា ព្រះបិតាឯងគ្មានសល់សត្វអ្វីទេ ស្រឡាញ់ទាំងអស់ ជន្លេន, ឈ្លើង, ស្រមោច, សង្ការ, សត្វក្អែ, សត្វឆ្មា, ព្រះបិតាអាឯងស្រឡាញ់ដែរ ឥន្ទជិតអសុរា ក៏បានស្តាប់ព្រះលក្សណ៍ ថាដូច្នោះហើយ ដៃក៏ចាប់ធ្នូសរព្រះខ័នថ្លា ចូលតតាំងច្បាំងនឹងអង្គក្សត្រា ព្រះលក្សណ៍សារក៏ចាប់សរជ័យព្រះខ័នថ្លា ចូលតយុទ្ធនឹងអង្គអសុរា គ្មានឱនអង្គកោតញញើតឡើយ ឥន្ទជិតក៏វាយវ៉ៃធសំពងមកខ្លាំងក្រៃ អង្គក្សត្រថ្លៃក៏គ្មានខ្លាចអំណាចយក្សឡើយ ហើយយកធ្នូសរជ័យវាយវ៉ៃធសំពង រងយក្សវិញ ឥន្ទជិតកថមថយកម្លាំងព្រះកាយពលយល់ជាតតាំង ច្បាំងនឹងព្រះលក្សណ៍ពុំបានឡើយ ម្លោះហើយក៏ថយដៃវេវារអាមរូញរា និយាយពីពលស្វា និងពលយក្ស ប្រកាប់ប្រចាក់ចំបាប់ប្តា យក្សស្លាប់មរណោរាប់ពុំបាន គោទឹកនព្វមហាសមុទ្រជលសោសោន ក្រុងហានុមានសម្លាប់យក្សបានច្រើនក្រៃ ស្លាប់ពំនរដូចភ្នំសេនាធំៗ ចូលតដៃ ឃុននល់ ឃុននិល ·និខាន់ លើកជើងវាយវ៉ៃធជាន់កយក្ស កេសរជម្ពូពាន មាអង្គត់ ស្តេចគ្មានកត់ស្លុតនឹងយក្សា ប្រុងចាប់

យក្ស បានកាប់នឹងព្រះខ័នថ្លា ក្រុងអសុរាក្សិណក្ស័យប្រល័យជន្ម ទឹកសមុទ្រឆ្អាបសុទឃោម ក្នុងវេលាពេលនោះ ឥន្ទជិតអសុរាយល់ពលមរណោញាណសល់ឡើយ ខំហោះផ្លេកផ្លោះដល់ឋានព្រះឥន្ទ ក្លែងកាយាក៏កើតជាព្រះឥន្ទ្រា នាំស្រីសួគ៌ាមករាំថ្វាយ ទេវបុត្រទេវតាលេងភ្លេងទិព្វពីរោះពេកពិតគួរអស្ចារ្យ ។ និយាយពីស្រីលក្សណ៍អនុជា ឈ្មះទ័ពអសុរាមារពេលនោះណោ សហនុមាននូវពួកស្វា ផ្ដុំក្នុងព្រឹក្សាក្រោមព្រះព្រៃ ឮសូរសព្ទភ្លេងពិរោះសល់ ព្រះបាទទសពលទតនភាល័យ ឃើញព្រះឥន្ទ្រានាំស្រីសួគ៌ាល័យល្អៗពេកក្រៃ ព្រះអង្គភ្លេចខ្លួន ពន់មើលទេពអប្សរល្អក្រៃក្សត្រថ្លៃក៏ទតភ្លេចកាយា ឥន្ទជិតអសុរាក៏លួចថ្លែងសរត្រូវដើមទ្រូងព្រះលក្សណ៍ ដួលដេកលើផែនពសុធា បាបុត្រព្រះពាយស្ទុះភ្លែតកាចកដីរ័ព្វរំពេភ្លាម ឥន្ទជិតភ័យណាស់ វាត់នឹងចង្វាយសរត្រូវព្រង់ចិញ្ចើមបានុមានបានជាសន្លប់ ធ្លាក់មកនៅក្រោមដីរ៍ ធ្លាក់មកលើផែនដីសន្លប់លង់កាលណោះពួកស្វាក៏ភ័យណាស់ រត់មករហ័សទូលព្រះរាមា ដល់ហើយមកក្រាបថ្វាយបង្គំថា ព្រះអនុជប្អូនភ្ងា ត្រូវសរព្រះព្រហ្មាសផ្កាញថ្លាចាញ់អង្គពូជពង្សអសុរា ដួលកណ្ដាលពសុធាសន្លប់លង់ ។ ព្រះនារាយណ៍រាមាដើរមកដល់ ព្រះលក្សណ៍ ឃើញព្រះប្អូនដួលដេក លើភីនផែន





ដែនពសុធាដូច្នោះហើយថា ឱអូនអើយ មកក្សិណក្ស័យប្រល័យជីវិតចោលបង ថាហើយឱបអង្គត្រកងនៃស្រីលក្សណ៍អនុជា ។

*(ស្ដូត) ឱះឱ ! ប្អូនអើយ កាលយើងពីរអង្គា យើងនេះនាំគ្នាចាំសិល្បពីលើ ខ្នងភ្នំពាខែង ឥឡូវនេះកូវអើយ ប្អូនប្រាសចំបែង ចោលបងម្នាក់ឯងអ៊ើងអើយ កណ្ដាលទ្រូងព្រៃ ឱ ! អញនឹងហោះទៅនគរកៃយកេតបូរី បូរអញនឹងហោះទៅនគរស្រីអយុធ្យា ទៅថ្កានមាតាអើយព្រះបិតាអោយលើកពសសង្កា ព្រះស្រីលក្សណ៍អនុជប្អូនភ្ងា ដៃមួយកៀក ដៃមួយដកសរ អើយពីស្រីលក្សណ៍អនុជា ។*

*ឱ! អញបើនឹងដកអើយ សរពីស្រីលក្សណ៍អនុជា ដូច្នោះហើយក៏យល់ជាល្បាចពោះវៀន ពោះវៀននៃព្រះប្អូនមកផង អ្នកក៏នឹងក្សិណក្ស័យប្រល័យចោលបង ថាហើយឱបអង្គត្រកងស្រីលក្សណ៍អនុជា ប្អូនភ្ងាសន្លប់លង់ទាំងពីរពង្សក៏បាត់ព្រះស្មារតី ។*

អធិកម្ម. អធិពលឡាំ កាលបើឃើញព្រះរាមព្រះលក្សណ៍ ព្រមទាំងស្វាសហនុមានក្សិណក្ស័យដូច្នោះហើយ ក៏ញាក់បររាជសីហ៍ ចូលទៅក្នុងក្រុងលង្កាបូរី ដល់ហើយក៏ចូលទៅម៉បម៉ាយថ្វាយបង្គំ ក្រុងទសភក្ត្រា ទូលថា មនុស្សាទាំងពីរ ព្រមទាំងស្វាសក៏ក្សិណក្ស័យអស់ហើយ

ក្រុងទសភក្ត្រក៏ស្រែកថា អើអធិកម្ម. អធិពលឡាំអើយ ឯងឆាប់បររាជសីហ៍ទៅប្រាប់មីសិតា អោយវានៅនឹងអញទៅ ។ អធិកម្ម អធិពលឡាំ កាលបើឮព្រះអវតាន ប្រាប់ដូច្នោះហើយ ក៏ក្រាបថ្វាយបង្គំ ចាប់រាជសីហ៍បើកបរ ផ្លេកផ្លោះហោះទៅក៏បានអសោកអុងម៉ង្គ ឡើងទៅគង់គាល់រាជសិតា កែវកល្យាណ ទូលថា ព្រះនារាយណ៍រាមា ស្រីលក្សណ៍អនុជា នូវស្វាសសុទ្ធបុត្រព្រះពាយ ក្សិណក្ស័យមរណោទាំងអស់ហើយ សូមម្ចាស់ព្រមនៅនឹងម្ចាស់ខ្ញុំទៅ រត្នរាជសិតា កាលណោបើបានស្តាប់អធិកម្ម. អធិពលឡាំ ថាដូច្នោះហើយ ក៏ថាអើអធិកម្ម. អធិពលឡាំអើយ អញស៊ូស្លាប់ចាប់ជាតិកំណើតជាថ្មី អញមិនព្រមនៅនឹងម្ចាស់ឯងទេ ។ អធិកម្ម អធិពលឡាំ កាលបើបានស្តាប់នាងសិតាមានព្រះ សុវណ្ណីដូច្នោះហើយ ក៏ចាប់រាជសីហ៍ផ្លេកផ្លោះហោះសំដៅ ក្រុងលង្កាបូរី ទៅទូលទសភក្ត្រាថា នាងសិតាកល្យាណ ស៊ូស្លាប់ចាប់ជាតិកំណើតសារជាថ្មី មិននៅនឹងម្ចាស់ទេ ក្រុងទសភក្ត្រា កាលណោបើបានស្តាប់ អធិកម្ម អធិពលឡាំ ទូលថាដូច្នោះហើយ ក្តៅក្តួលឆ្អានស្បើយដូចភ្លើងឆេះ អធិកម្ម អធិពលឡាំ ក៏លុតលាក្រោកចាប់យករាជសីហ៍ហើយបើកបរ ។ ថ្លែងពីនាងសិតាកល្យាណ ដែលនៅក្នុងអសោកអុងម៉ុង កាលបើដឹងដំណើងពីអធិកម្ម



អធិពលឡាំ ថាដូច្នោះហើយ ក៏នាងសោយសោកវិយោគថា ឱព្រះភស្តាព្រះស្វាមី បើព្រះក្សត្រថ្លៃក្សិណក្ស័យចោលប្អូនហើយ ទាំងស្រីលក្សណ៍អនុជា ប្អូនភ្ញាមាសបងអើយ បងមិនរស់ទេឡើយ សុំក្សិណក្ស័យ ថាហើយសែនសោយសោកា សូអោយសព្វសន្លប់លង់ ពុំមានអ្នកឯណារក្សាព្រះនាងឡើយ មានតែនាងសុជាតា អគ្គមហេសីពិភេកហោរារក្សាព្រះនាង បើឃើញនាងសន្លប់ដូច្នោះ ក៏យកទឹកមកលុបលាងព្រះភក្ត្រា នាងក៏ដឹងស្វាងស្មារតី ហើយថា អើស្រីសុជាតា បងអើយ ខ្ញុំសូមលាបងស្លាប់ហើយ នាងស្រីសុជាតាសួរថា បងអើយ មានរឿងហេតុអ្វី យ៉ាងណាបានជាបងលាប្អូនក្សិណក្ស័យ នាងសិតាត្រាស់ថា ប្អូនអើយ អធិកម្ម អធិពលឡាំ បានជ្រាបថា កាលពីម្សិលមិញ ព្រះចេស្តាព្រះស្វាមី នឹងស្រីលក្សណ៍អនុជាប្អូនភ្ញា នូវរាជក្របី ស្វាសសុទ្ធបុត្រព្រះពាយ ក្សិណក្ស័យក្នុងសង្គ្រាមជ័យអស់ហើយ នាងស្រីសុជាតា ក៏គន់គូរហោរាដោយនូវហោទិព្វចក្ខុមើលទៅឃើញថ្នាក់នាងទូលថា ត្រូវសរព្រហ្មមាសមែនហើយតែពុំស្លាប់ទេ ព្រះរាមព្រះចេស្តាស្តេចសន្លប់ ស្រីលក្សណ៍អនុជាប្អូនភ្ញាក៏ពុំក្ស័យ នាងសិតាថា បងអើយខ្ញុំសង្ស័យណាស់មិនជឿបងទេ ត្បិតអីអធិកម្ម អធិពលឡាំថា អោយខ្ញុំនៅជាមួយនឹងក្រុងរាពណា នាងស្រីសុជាតា

កាលបើបានស្តាប់ដូច្នោះហើយ ក៏ទូលថាបងអើយបិនបែរទេ បើបងបិរ ជឿប្អូនទេ ត្រូវយើងផ្សងអុងម៉ុង្គ ទៅមើលព្រះសាស្តាព្រះស្វាមី បេព្រះអង្គ ទាំងបីអង្គា ក្ស័យដូច្នោះហើយ សូមអោយសូមអោយអុងម៉ុង្គ ទៅប៉ះនឹង ភ្នំព្រះសុមេរុ អោយបែកជា ប្រាំពីរភាគ យើងទាំងអស់គ្នាក៏ក្សិណក្ស័យ តាមព្រះមហាក្សត្រថ្លៃនោះទើបជា បើព្រះអង្គរស់ជីវិតទាំងរស់គ្នា សូម អោយអុងម៉ុង្គអណ្តែតវាងភ្នំព្រះសុមេរុ ផ្សងបីដងរួចស្រេចកាលណោះអុងម៉ុង្គ ក៏ទោទន់ចុងដល់ដី ងើបឡើងអុងម៉ុង្គក៏អណ្តែត ទៅកណ្តាលអាកាសា ដល់ទៅភ្នំព្រហសុមេរុកាលណា អុងម៉ុង្គក៏អណ្តែតវាងភ្នំព្រះសុមេរុ អណ្តែត ទៅដល់កន្លែងស្តេចទាំងបីអង្គា សូន្យសព្ទសន្លប់ នៅទោទន់ចុងដល់ដីនាង ចុះទៅ ឆ្មៀងនេត្រាឃើញសពហនុមាន ។

ឱះឱ បុត្រព្រះពាយ រិទ្ធីសាយដ៏កន្លង ម្តាយបានឃើញបា ម្តាយ សូមក្ស័យផង កូនអើយម្តាយរងសោយសោកឥតស្បើយ ថាដូច្នោះហើយ ព្រះនាងឱបសពហនុមាន ដល់ទៅសពព្រះភស្តា ព្រះស្វាមីនៃនាងក៏ បានទតឃើញ ហើយក៏នាងសោយសោកា ទោរទន់អង្គកាយា ឱបសព ព្រះភស្តាព្រះស្វាមីសន្លប់លង់ លុះនាងភ្ញាក់ខ្លួនកាលណាក៏ទូញថា :



(ស្ងូត) *ឱះឱ អើយព្រះជលចក្រអគ្គរា ស្តេចក្ស័យជីវ៉ាអើយ ជីវិតសូន្យបង់ ចោលប្អូននៅម្នាក់ឯងអើយ ចំបែងឯកា ស្តែងស្តេចមរណា អើយ កណ្តាលទ្រូងព្រៃ ។*

*ឱះឱ អើយព្រះលក្សណ៍អនុជា សមអ្នកមរណាអើយក្សិណក្ស័យ ចោលបង សោយសោកាហើយអើយ ថ្នាក់ថ្នមត្រកង ទាំងសពព្រះបង នូវស្រីលក្សណ៍អនុជាប្អូនភ្ងា ។*

ថាហើយក៏ឱបសពសន្លប់លង់នៅបៀតព្រះអង្គ នឹងនោះហើយ កាលណោះសម្តេចព្រះនារាយណ៍រាមា លោកក៏បានភ្ញាក់ខ្លួនឡើង ក៏ឃើញ រត្នរាជសិតា ថាឱសិតាកែវមាសបង អូនអើយអូន បងមិនដែលឃើញ មុខប្អូនសោះ មួយទិវានេះ បងក៏បានឃើញមុខប្អូនហើយ អូនអើយព្រះ ប៉យបងហក់ពៃស្បើយ ថាហើយឱនឱបនៃព្រះនាង អង្អែលសព្វសព៌ាង្គ នាងឆោមឆាយ អូនអើយកុំទាន់មក ចាំបងបំផ្លាញពូជពង្សវង្ស អសុរា អោយអស់ប្រាំពីរសន្តានកាលណា បងក៏លើកទ័ពចតុរង្គ ទៅហែរយកនាង មកសោយរាជ្យរម្យក្នុងនគរស្រីអយុទ្យា ។ រត្នរាជសិតាកែវកល្យាណ កាលណាបើបានឮព្រះនារាយណ៍រាមា មានព្រះបន្ទូលថា ដូច្នោះហើយ

ក៏លើកដៃអធិស្ឋានផ្សងសុំអោយអុងម៉ុង្គទៅស្រុក កន្លែងដើមវិញដូចដើម ជាសុខសាន្ត សប្បាយដូចកាលសព្វមួយដង ។

ថ្ងៃងពីពិភេកអសុរា ក៏បាននាំពលស្វាទៅលេងព្រៃ ថ្ងៃនោះកើតអស្ចារ្យក្រៃ ពិភេកក៏សង្ស័យថា គ្នាយើងទាំងអស់គ្នា ម្ចាស់យើងមានក្រហើយក៏នាំពលស្វា ព្រមទាំងផលាចេញមកពីថ្ងៃមកដល់បនសង្គ្រាម ក៏ឃើញរាជក្របីស្រីហនុមាន ក្សិណក្ស័យប្រល័យជន្ម នៅកណ្តាលភឺនផែនដែនពសុធា ឃើញដីរព្វរំណាក៏បាក់កនៅលើបាហនុមាន ហើយពិភេកអសុរា ក៏បានទៅដល់សពប្អូនស្រីលក្សណ៍អនុជា ព្រះនារាយណ៍រាមា ក៏មានព្រះបន្ទូលថា ហៃពិភេកអសុរា បើដូច្នោះតើយើងនឹងគិតធ្វើដូចម្តេច ពិភេកទូលថា គិតបង្អាត់សរក្នុងរាត្រី តែថ្ងៃរះឡើងត្រូវកំដៅព្រះអាទិត្យកាលណាសរព្រហ្មមាសផ្លាញផ្លា ក៏នឹងចាក់រលាយអស់ខ្លួនមនុស្ស ម្ល៉ោះហើយ ពិភេកអសុរា ក៏យាងមកកាន់សពហនុមាន ពិភេកក៏សូធ្យមន្តព្រះគាថា ហៅខ្យល់បុត្រព្រះពាយ សូធ្យរួចកាលណា ព្រះពាយបក់មកចំខ្លួនហនុមាន ហនុមានក៏ភ្ញាក់ឡើង ក្រអាញក្រទា ប្រាប់ថា គ្នាយើងទាំងអស់មានក្រហើយ ពិភេកប្រាប់ថា បាហនុមាន ចូរឯងទៅដកដើមថ្នាំនៅភ្នំ ហើយហនុមានក៏បានហោះទៅដល់កំពូលភ្នំ ភ្នំនោះមានយន្ត



ពេជ្រ ហនុមានឈ្ងោកមើលទៅ ក៏កាត់កហនុមានធ្លាក់ទៅក្នុងជ្រោះភ្នំ ទេវតារក្សាយន្តពេជ្រទាំងបួនព្រះអង្គ ឃើញខ្លួនហនុមានក៏ធាត់ធំ មើលទៅឃើញក្បាលធ្លាក់ទៅក្នុងជ្រោះភ្នំ ទេវតាយកដៃទៅលូកយកក្បាលមកវិញរួចដាក់តនឹងខ្លួន ព្រះពាយបោក ហនុមានក៏ក្រោកថា ទេវតា យើងមកយកដើមថ្នាំប្រញាប់ការ អោយទណ្ឌកម្មទេវតាជួយសែងភ្នំ ម្ល៉ោះហើយបើកទាំងភ្នំស្ពឹមស្ពៃ ពិភេកដើរទៅដកដើមចង្រ្កងស្វា ហនុមានក៏ថា មិនប្រាប់គ្នា ពិភេកអសុរាថា នឹងប្រាប់ឯងម្តេចបាន ម្ល៉ោះហើយប្រើហនុមានអោយទៅរកទឹកដោះរាជសីហ៍ ទឹកដោះខ្លា ទឹកដោះដំរី ហនុមានវិលវៃទៅចាប់សត្វ យកទឹកដោះបានមកគិតដោះបង្អាត់ ប្រើមេអង្គត់ទៅយកថ្មីពីឋានព្រហ្ម អង្គត់ក៏បានហោះទៅឋានព្រហ្ម សុំថ្មដាបង្អាត់សរ ព្រះព្រហ្មអោយថ្មមកអង្គត់ហើយ អង្គត់អោយថ្មមកពិភេកសារ បង្អាត់ហៀបនឹងដាច់កាលណា ព្រះអាទិត្យរះ ពិភេកប្រើហនុមានអោយទៅឃាត់ព្រះអាទិត្យ សហនុមានហោះទៅឋានព្រហ្ម ប្រើអោយអង្គព្រះព្រហ្មមកឃាត់ព្រះអាទិត្យ ព្រះព្រហ្មថា អញមិនហ៊ានទៅឃាត់ទេ ម្ល៉ោះហើយហនុមានទៅឃាត់ខ្លួនឯង ទៅដល់ព្រះអាទិត្យហើយក៏រាដៃថា ឈប់កុំទាន់រះព្រះអាទិត្យ ។ ព្រះអាទិត្យថា ម្ល៉ោះហើយព្រះអាទិត្យក៏បររាជរថភ៊ាវ

ហនុមានស្ទុះភ្លែតទៅចាប់កន្ទ្រាក់កាច់ភ្លាម ក៏ខ្ទេចព្រះរាជរថព្រះអាទិត្យអស កាលណោះព្រះអាទិត្យក៏ឈប់ធ្វើកង់រាជរថ នេះបានសព្វថ្ងៃរះហើយក៏ងងិតទៅវិញ ហនុមានក៏វិលថ្កាន មកទូលព្រះរាមា ស្រីលក្សណ៍អនុជាក៏បានជ្រះរោគា ដើរបាន ព្រះនារាយណ៍រាមាក៏មានព្រះបន្ទូលថា ស្រីលក្សណ៍អនុជាប្អូនភ្ងា ជ្រះរោគអស់ហើយឬនៅឡើយក្នុងប្រាណ ស្រីលក្សណ៍អនុជាក៏ថ្វាយបង្គំព្រះបង ថាខ្ញុំជារោគក្នុងប្រាណរស់ហើយ ព្រះនារាយណ៍រាមាក៏បាននាំស្រីលក្សណ៍អនុជាប្អូនភ្ងា ទូវបាហនុមាន ព្រមទាំងពិភេកអសុរាបាអង្គត់ វិលទៅឯស្រុកសមរភូមិជ័យកែវមរកត‚ដូចដើម ។

៤៤- ដងនោះក្រុងរាពណាសួរពូជពង្សអំបូរនៃព្រះព្រហ្មា ភ្ជុំអស់ចតុរង្គយោធា សេនាអាមាត្យក៏មកគង់គាល់ក្រុងទសភក្រ្តា កាលណោះអធិកម្ម អធិពលឡាំក៏បានដឹងការណ៍ថា ព្រះរាម ព្រះលក្សណ៍មនុស្សានូវស្វាសនោះ វារស់វិញហើយ ម្ល៉ោះហើយក៏បើកបររាជរថរាជសីហ៍ វិលទៅបុរីរាជលង្កាវិញ ដល់ហើយក៏ម៉បម៉ាយថ្វាយបង្គំ ព្រះបរមភក្តិ ទូលអំពីព្រះរាម ព្រះលក្សណ៍មនុស្សា នូវស្វាសហនុមានរស់មកវិញទាំងអស់គ្នា ក្រុងទសភក្រ្តាក៏ប្រើអាមាត្យ អោយទៅអញ្ជើញឥន្ទជិតអសុរា អាមាត្យក៏ក្រោកទៅប្រញាប់រួសរាន់ ទៅអញ្ជើញក្រុងឥន្ទជិតអសុរា ដល់ហើយក៏



ឡើងទៅក្រាបថ្វាយបង្គំទូលថា ព្រះវររាជបិតាត្រាស់ថា អោយព្រះអង្គយាងទៅអោយឆាប់ ឥន្ទជិតអសុរា កាលបើបានឮព្រះវរបិតាត្រាស់ ប្រើអាមាត្យ មកអញ្ជើញដូច្នោះហើយ ក៏យកគ្រឿងអលង្ការ ប្រដាប់ប្រដាធ្នូសរជ័យ ឡើងទៅគង់គាល់ព្រះវររាជបិតា ។ ដងនោះក្រុងមារមាសមិត្តយល់ ក្រុងឥន្ទជិតជាបុត្រឡើងគាល់អសុរា ទើបមានព្រះបន្ទូលថា ឥន្ទជិតកូនអើយ ព្រះរាមព្រះលក្សណ៍មនុស្សា នូវបាហនុមានស្វាសរស់ទាំងអស់ឥន្ទជិតអសុរាបានស្តាប់ពាក្យបិតាថាដូច្នោះហើយ ក៏ក្តៅក្តួលឆួលក្នុងឱរាដូចគេយកព្រះកាលមកអុជអាល ពុំនោះដូចគេយកលំពែងមកជែងចាក់ហាក់ដូចគេយកពិសសរ ខ័នថ្លាមកអារផ្តាច់សុរងធ្លាក់ចេញ ក៏ដឹងខ្លួនថាឱព្រះវររាជបិតា ជីវិតខ្ញុំនេះមិនរស់ទេ ក្ស័យហើយចូលចម្បាំងក្នុងវេលាថ្ងៃស្អែក ថាហើយក៏យំផ្តាំព្រះវររាជបិតា អោយព្រះអង្គមើលស្រីស្នំក្រមការ អគ្គមហេសី ស្នំតូចធំ ក្រមការ ក្រុងអសុរាក៏ថ្វាយបង្គំ ព្រះវររាជបិតាក៏ចុះចាកវិមានមកឋានអាត្មាវិញហើយ លុះលង់ព្រឹកព្រាងស្វាងព្រះសុរិ-យា ឥន្ទជិតអសុរាក៏រៀបពល រាលក្នុងនគរក៏អស់ហើយ នៅតែពលក្នុងព្រៃហេមពាន្ត ម្ល៉ោះហើយទើបវាយស្គរទ័ព ភ្ជុំពលអសុរា បានឮស្គរច្បាស់ផ្អុកផ្អើលក្រទា ក្រតើន តាមស្គរកាន់អាវុធងងាស ខ្វះជិះល្មៀងកា នោសី

លឹងទឹង ជិះអូដ្ឋ ជិះលា ជិះសឹង្ហ នោសី ខ្លះជិះខ្លា ក្របី រមាសភ្លើងច្រាល់ ចូលមកតឹកកង លំពើនលំពងអាប់ទាំងទិសា យក្សយង់អសុរាដប់ពីរសមុទ្រ ។

និយាយពីស្រុកសមរភូមិជ័យកែវមរកត ញាប់ញ័រចំហុតឥតមានស្រាកស្រាន្ត ព្រះនារាយណ៍រាមាស្តេចអស្ចារ្យក្រៃ ហៅពិភេកអសុរាបកឆាប់វៃ ១ ដល់ហើយជៀសជ័យមានព្រះបន្ទូលថា ទ័ពមកពីណាចូលមកទៀតហើយ ពិភេកអសុរាដោះក្ដារឈ្នួនពីក គន់គូឆាប់ខ្មី ឈ្វេងយល់ដោយហោរទិព្វចក្ខុឥតកំបាំងឡើយ ទូលថាគ្មានទ័ពពីណា គឺទ័ពឥន្ទជិតអសុរាលើកមកទៀតហើយ ព្រះនារាយណ៍រាមាត្រាស់ថា នឹងប្រើអ្នកណាទៅតទ័ពបាន ពិភេកអសុរាថ្វាយបង្គំថា មានតែក្សត្រក្សាន្ត អង្គព្រះអនុជាទៅតទ័ពបាន ឥន្ទជិតអសុរាក្សិណក្ស័យមរណា ថ្ងៃនេះឯងព្រះអង្គ ។.

កាលណោះព្រះនារាយណ៍រាមា ត្រាស់ហៅប្អូនភ្ងា ព្រះអនុជក្សត្រថ្លៃ ព្រះលក្សណ៍ចរចូលទៅថ្កាន ថ្វាយបង្គំក្សត្រក្សាន្ត ព្រះរៀមចោមត្រៃស្ដេចត្រាស់ថា ហៃព្រះអនុជប្អូនភ្ងាចូលអ្នកលើកទ័ពទៅវាយយក្សា ឥន្ទ-ជិតអសុរាលើកទ័ពមកទៀតហើយ ព្រះលក្សណ៍ក្រាបថ្វាយបង្គំ រួចហើយលាទៅកេណ្ឌពលច្រើនក្រៃ ភ្ញុំពួកយោធាពល ទាំងដប់ពីរអង្គប្រាណេ



អង្គត់ ហនុមាន កេសរជម្ពូពាន និលឯក និលផាត់ ពលស្វាវាប់លាន បានហើយក្សត្រក្សាន្ត បរទ័ពចេញចរ បរបានមកដល់ទៀងទល់មុខគ្នា ឥន្ទជិតសួរថា នេះទ័ពនរណា អង្គព្រះលក្សណ៍សារឆ្លើយថា ទ័ពយើង ថាដូច្នោះហើយក្រុងឥន្ទជិតអសុរា ក៏ចូលមកវាយចំអង្គក្សត្រា ព្រះលក្សណ៍ក៏រ៉ាប់រងអាវុធយក្ស យកសរព្រហ្មមាសផ្លាញផ្លាវាយត្រង់ចំអង្គយក្សា ឥន្ទជិតអសុរាក៏ថយដៃ ពលស្វា ពលយក្សកាប់ចាក់គ្នាច្រើនក្រៃ ស្វាខ្លះដកដើមប្រីក្សាមកវាយអសុរីក្សិណក្ស័យមរណា ពលខ្លះចំលើហនុមានស្វាសចាប់បានកាប់កាត់ក្សិណក្ស័យ ពេលនោះពូជពង្សអសុរី យក្សយង់ថយដៃក្សិណក្ស័យមរណានៅក្នុងសាគរ មហាសមុទ្រត្រៀបត្រា ពលឥន្ទជិតអសុរា ក៏ក្ស័យទាំងអស់គ្មានសល់មួយឡើយ ឥន្ទជិតថមថយកម្លាំង ក៏ហោះទៅនៅឯស្រទាប់មេឃា ថ្លែងពីព្រះលក្សណ៍សារ ហៅពិភេកមកគន់គូរហោរា ឥន្ទជិតអសុរាធ្វើចំបាំងអំបាញ់មិញ តើយក្សយង់ហោះផ្ដោះទៅឋានណា ពិភេកគន់គូរឆ្លុះយល់ជាក់ ទូលព្រះលក្សណ៍ ហៃស្រីលក្សណ៍អនុជាប្អូនភ្ងា ឥន្ទជិតអសុរាទៅពួននៅស្រទាប់មេឃា ប្អូនកុំទាន់ថ្លែងសរទៅកាន់អសុរា ពិភេកប្រាប់ថា ហៃបាអង្គត់ អ្នកហោះទៅយកតោកមាសឋានព្រហ្ម យកមកទ្រក្បាលឥន្ទិត ត្បិតឈាមឥន្ទជិតអសុរា ស្រក់ត្រូវ

ដីកាលណា កើតជាភ្លើងប្រល័យកល្បឆេះ អង្គត់បានស្តាប់ ដូច្នោះហើយ ពុំហ៊ានបង្អង់ឡើយ ហោះចរយាត្រា ហោះទៅដល់ឋានព្រហ្ម ទូលសុំតោក កេវ្តិ៍ពីជីតា បានហើយហោះចរយាត្រា វិលវិញមកថ្វាយបង្គំ ព្រះនារាយណ៍រាមា ស្តេចអោយហោះទៅទ្រក្បាលឥន្ទជិតអសុរា អង្គព្រះលក្សណ៍ ថ្លែងសរកាត់ក ឥន្ទជិតយក្សយង់ក្សិណក្ស័យមរណាអធិកម្ម អធិពលឡាំ ឃើញដូច្នោះហើយ ក៏ទៅទូលក្រុងទសភក្ត្រអសុរា ប្រាប់ថាឥន្ទជិតអសុរាក្សិណក្ស័យអម្បាញ់ថ្ងៃមិញទៅហើយ ។ ក្រុងទសភក្ត្រក៏បានជ្រាបថា ឱកូនអើយ មិនគួរមក្សិណក្ស័យប្រល័យជីវិត ចាញ់ដៃរាមមនុស្សា កូនអើយ ព្រះបិតា ក៏ក្សិណក្ស័យទៅតាមកូនផង ថាហើយក៏គត់ព្រះឱរា យក្សាក៏សោយសោកកាយំ ម្លោះហើយក៏ កាន់ព្រះខ័នថ្លា ទៅលកេសរសិពា មិនហ៊ានពិឃាតឡើយណា ក៏យាត្រាវិលវិញ ។

៤៥-កាលណោះក្រុងអសុរា ក៏ក្តៅក្តួលឆេះឆួលក្នុងហឫទ័យ រំពឹងតែបាតពលក្នុងភ្នំព្រះសុមេរុ ម្លោះហើយក្រុងមារក៏ជ្រែកផែនដី ទៅយកពួកពលក្នុងភ្នំព្រះសុមេរុ កេណ្ឌកងពលបានចូលដល់ត្រៀបត្រាដប់ពីរសមុទ្រយង់ឃ្នង អសូរត្រីមុខ អសូរត្រីកាយ មហាកាយយក្សា ក៏បរមកវាយព្រះរាម ព្រះលក្សណ៍មនុស្សា ម្លោះហើយក្រុងមារអសុរា ទៅយក



សត្វត្រលុង ( *កូននាងណាំឡើក* ) យកមកបង្ខាំងផ្លូវស្វា ចង្កាមួយទល់ដី ចង្កាមួយទស់អាកាសា កក្រើកញាប់ញ័រស្រុកសមរភូមិជ័យ ព្រះនារាយណ៍រាមាហៅពិភេកអសុរាមកគន់គូ ពិភេកដល់ហើយថ្វាយបង្គំ ព្រះរាមត្រាស់ថា ពិភេកហោរាទ័ពអ្នកណាចូលមកទៀតហើយ ពិភេកអសុរា គន់គូរក៏ឆ្ងុះយល់ គ្មានទ័ពនរណាឡើយ ទ័ពក្រុងមារអសុរា ព្រះរាមឆ្លើយថា បើដូច្នោះនរណាទៅតបាន ពិភេកទូលថា មានតែព្រះអវតាន ទើបទៅតទ័ពនឹងរាពណ៍បាន ពេលនោះអង្គក្សត្រក្សាន្តក៏រៀបទ័ព ក៏ភ្ជុំសេនាដប់ពីរអង្គប្រាណោ អង្គត់ហនុមាន កេសរជម្ពូពាន ទាំងបាសុគ្រីព និពេជ្រ និលខាន់ ព្រះអង្គក៏ទ្រង់បរទ័ពទៅ ដែលរាពណ៍យកសត្វត្រលុងមកឃាំងផ្លូវ ពលស្វាចូលទៅលេបទាំងអស់ វាជុះអាចម៍ ស្វាងាប់គរដូចភ្នំ ព្រះនារាយណ៍រាមាស្តេចឆ្ងល់ណាស់ត្រាស់ហៅពិភេសារ ចូលបាគន់គូរហោរា អោយច្បាស់ ពិភេកដោះក្តារឈ្នួនពីកហើយ ក៏ទូលព្រះអវតានលើត្បូងសិរសា ព្រះម្ចាស់អើយ នេះហៅថា សត្វត្រលុងវាលេប ស្វាជុះអាចម៍មកកាលណា ស្វាស្លាប់គំនរដូចភ្នំ បើហេតុដូច្នេះតើធ្វើម្តេចបាន ពិភេកអសុរាឆ្លើយថា សត្វត្រលុងនេះទំនាយវាត្រូវស្លាប់នឹងសរប៉ាឡាប់ប៉ាកម្ម ព្រះអង្គក៏ទ្រង់ត្រាស់ហៅបាអង្គត់ អញប្រើឯងទៅយកសរប៉ាឡាប់ប៉ាកម្ម អង្គត់សួរថា

សរបាំឡាប់ប៉ាកម្មនៅឋានណា ព្រះនារាយណ៍ត្រាស់ថា នៅឋានព្រហ្មកេរ្តិពីជីតា អង្គត់ក៏ក្សៀវផ្លោះហោះយាត្រា ទៅដល់ឋានព្រហ្មហើយថ្វាយបង្គំសុំសរបាំឡាប់ប៉ាកម្មបានហើយ ហោះចរយាត្រា យកសរមកថ្វាយព្រះនារាយណ៍រាមា ព្រះអង្គបានសរជ័យា ក៏បាញ់ទៅត្រូវសត្វត្រលុងសត្វត្រលុងរលាយខ្លួន ជាពពុះផេះ សរក៏ឆេះក្លាយកើតជាភ្លើង ព្រះនារាយណ៍ ប្រើហនុមានអោយហោះទៅឋានព្រះឥន្ទ្រា សុំទឹកសុរាមរិទ្ធិ ប្រោះមនុស្សបាន ហនុមានស្តាប់ហើយ ក៏ក្សៀវក្លាផ្លោះហោះយាត្រាទៅដល់ឋានព្រះឥន្ទ្រា ក៏ថ្វាយបង្គំសុំទឹកសុរាមរិទ្ធិ ត្បិតពួកពានរស្វាស្លាប់ច្រើនសល់ ព្រះឥន្ទ្រអោយទឹកសុរាមរិទ្ធិ សហនុមានបានទឹកសុរាមរិទ្ធិហើយ ក៏ហោះវិលវឹងចរយាត្រា មកថ្វាយព្រះនារាយណ៍រាមា ស្តេចក៏បានទទួលយកទឹកសុរាមរិទ្ធិហើយ ព្រះសូធ្យសេពមន្តព្រះគាថា ប្រោះស្វាពានររត់ចល់ ត្រូវមួយរស់មួយ ត្រូវពីររស់ពីរ កាលណោះព្រះអង្គសូធ្យសេពប្រោះត្រូវទាំងអស់រស់គ្មានសល់ ពេលនោះក្រុងទសមុខមារ លើកទ័ពដល់ព្រះអង្គក៏រងរ៉ាប់ទ័ពយក្សា កាលណោះក្រុងទសមុខមារថ្លែងសរខ្លាំងក្រៃកើតជាភ្លើងវិស័យឆេះត្រៀបត្រា ព្រះនារាយណ៍រាមាថ្លែងទៅកើតជាសត្វគ្រុឌ លត់ភ្លើងអសុរាមាររលត់អស់ ម្ល៉ោះហើយពួកយក្ស និងស្វា



ចូលកាប់យក្សាស្លាប់ទាំងអស់ អង្គត់ ហនុមាន កេសរជម្ពូពាន បាសុគ្រីពលើកសុទ្ធតែភ្នំចោលយក្សា យក្សស្លាប់ត្រៀបត្រា គ្មានសល់ឡើយ ។ អស្សូរត្រីមុខ អស្សូរត្រីកាយ ក៏ស្លាប់ ហើយទសមុខមារឥតត្រើយនៅម្នាក់ឯង ស្តេចបររាជរថវិលវឹងថ្កាន បានចូលក្រុងលង្ការាជបូរី ។

៤៦- កាលណោះនិយាយពីសម្តេចព្រះនារាយណ៍រាមា អផ្សុកក្នុងព្រះកាយាសន្ធឹកសន្ធៃ អស់កំលាំងខ្លាំងណាស់ ក្នុងកាយកល់ រសាប់រសល់ខ្វល់ព្រះទ័យ ទោះដេកទោះដើរទោះសើចក្តី ទោះសោយចំណីគ្មានរស់ជាតិ អស្ចារ្យក្នុងព្រះកាយានៅមិនបាន ព្រះបាទអវតានត្រាស់ហៅពិភេកអសុរា ពិភេកឮហើយថ្វាយបង្គំអង្គក្សត្រា ព្រះអង្គមានព្រះបន្ទូលថា ព្រះអនុជអូន ខ្លួនបងសព្វថ្ងៃអស់កំលាំងកាយកល់ បើនឹងផ្ទំក៏ពុំបានក្សត្រក្សាន្តមានព្រះបន្ទូលតែម្ល៉ោះហើយ ពិភេកហោរាដោះក្តារឈ្នួនពីកគន់គូរបួកភ្នំតាមជើងហោត ទំនាយថា មិនល្អក្នុងរាត្រី ពេលនេះមានយក្សអសុរា ចូលមកសណ្តំយកក្សត្រាលួចទៅបាន បើព្រះអង្គទៅគង់នៅឋានណាពុំកំបាំង ម្ល៉ោះហើយព្រះនារាយណ៍រាមាស្តេចសោយសោកាពុំមានស្បើយ សហនុមានឃើញម្ចាស់សិរសាសោយសោកដូច្នោះហើយក៏ចូលថ្វាយបង្គំសួរថា ហេតុអ្វីម្ចាស់ទ្រង់ព្រះកន្សែង? ព្រះនារាយណ៍

រាមាក៏ត្រាស់ទៅថា បាបុត្រព្រះពាយអើយ ពិភេកទាយថា ត្រូវមានយក្ស អសុរចូលមកសណ្តំយកទៅបាន បើទៅគង់នៅឋានណាក៏ពុំកំបាំង ។ សហនុមានបានស្តាប់ហើយ ថ្វាយបង្គំក្រាបទូលព្រះបរម កុំព្រួយព្រះទ័យ អោយព្រះអង្គចូលទៅផ្ទំក្នុងហិបមាសចុះ ខ្ញុំសុំហិបមាសព្រះអង្គយកទៅបៀម សូមអោយពួកពានរស្វាសច្រើនក្រែមកចាំយាប ។ ពិភេកទូលទៀតថា ព្រះអង្គមានគ្រោះមួយយប់មួយថ្ងៃ សូមអោយក្សត្រថ្លៃប្រយ័ត្នកាយ បើផ្កាយព្រឹក រះកាលណាស្បើយព្រះគ្រោះ ហនុមាននិមិត្តខ្លួនកាឡាប៉ុនមហាប្រហ្ម ហើយក៏លេបស្រុកសមរភូមិជ័យកែវមរកត ហិបមាសដែលព្រះអង្គផ្ទំដាក់ក្នុងមាត់ហនុមាន ។ ថ្លែងពីស្រីលក្សណ៍អនុជាពុំងាប្អូន ឡើងទៅផ្ទំឱបក្នុងមាត់ហនុមាន ពិភេកអសុរាក៏ឡើងទៅផ្ទំម្ខាងមកព្រះហត្ថាប្រវ៉ាឱបហិប ហនុមានក៏បានចំហរមាត់ទុកប៉ុនក្លោងទ្វារ បើអសុរាមារចូលមកក៏នឹងខាំផ្តាច់កេសរជម្ពូពានយាមល្បាត និលឯកកេណ្ឌពលស្វាច្រើនសល់ អោយមកយាមជុំជាប្រាំពីរជាន់ បាអង្គត់ និលផាត់ និលឯក ឃុននល់ ឃុននិល និលខាន់ អោយឈរយាមខាងក្រៅមួយជាន់ទៀត ដើរប្រាប់គ្នា ឮពាក្យពិភេកអសុរាទាយថា បើផ្កាយព្រឹករះស្បើយព្រះគ្រោះ ។ កាលណោះ និយាយពីក្រុងទសភក្ត្រា ហៅប្រហិតហោរា



មកពន់ពូរថា ព្រះរាម ព្រះលក្សណ៍មនុស្សាគិតការយ៉ាងណាទៀត ប្រហិតហោរាវ្ហះយល់ហើយ ក៏ក្រាបទូលព្រះអវតាន ពេលនេះព្រះរាម ព្រះលក្សណ៍ ពិភេកសារមានគ្រោះមួយយប់មួយថ្ងៃ បើកាលណាផ្កាយព្រឹករះស្បើយព្រះគ្រោះ ក្រុងទសភក្ត្រាកាលណោ បើបានស្តាប់ពាក្យប្រហិតហោរាទាយថាហើយ ស្តេចត្រាស់ហៅវិរុលមេឃ វិរុលចំបាំងបានឮព្រះឱង្ការ ព្រះចៅលង្កាត្រាស់ហៅដូច្នោះហើយ ពុំហ៊ានបង្អង់ឡើយ ចូលមករាប់ ក្រុងទសមុខមារត្រាស់ប្រើរបញ្ជាប់ថា ហៃបាវិរុលមេឃវិរុលចំបាំងរញប្រើពាងទៅចាប់រាមនុស្សា ទៅសណ្តំចាប់វាទាន់រាត្រីស្ងាត់ ប្រហិតហោរាទាយថា បើផ្កាយព្រឹករះកាលណាស្បើយព្រះគ្រោះ វិរុលមេឃ វិរុលចំបាំង កាលណោបានស្តាប់លើត្បូងសិរសា ត្រាស់ប្រើអាត្មា ដូច្នោះហើយ ក៏ក្រាបថ្វាយបង្គំព្រះចៅលង្កា ស្តេចទ្រង់គ្រឿងអលង្ការ ល្អហើយក៏ហោះផ្លេកផ្លោះ មកដល់ភ្នំវិបុលបរពត ភ្នំនោះខ្ពស់ជាបំផុត ទល់អាកាសា វិរុលមេឃ ប្រាប់ទៅវិរុលចំបាំងថា បងឯងកាឡាខ្លួនជាសត្វស្វា សួរការហើយក៏លបមើលវា ខ្លួនខ្ញុំនេះឡើយទៅលើកំពូលភ្នំ យកអំផ្លូងកែវធំមកផ្ទុំអោយកើតជាផ្កាយព្រឹក ។ ថ្លែងពីវិរុលចំបាំងកាឡាខ្លួន លោលោតចូលទៅពពួកស្វាសួរថា ម្ចាស់យើងពេលណោះស្បើយព្រះគ្រោះ ពួកស្វាទាំងអស់

ក៏ប្រាប់ថា បើផ្កាយព្រឹករះកាលណាស្បើយព្រះព្រោះ ស្វាខ្លះថា រវាងរបក
ពីណាមិនដឹង ស្វាខ្លះថា យើរអានេះមកពីហោ មុខមាត់ខុសគេ យីមុខមាត់
ខ្សៀវមិនត្រូវនឹងគេ ស្វាវិរុលចំចាំងប្រាប់ទៅពួក ពានរថា គ្នាទើបមកពីព្រៃ
មិនដឹងអីទេ មកជួយយាមក្នុងពេលយប់ លុះលង់យប់យូរបន្តិចទៅ វិរុល
បេយយក្សាក៏ផ្លុំរំផ្ទុំងកែវ រស្មីភ្លឺសព្វដូចផ្កាយព្រឹក ពួកពានរស្វាអ្នកយាម
ក៏ឃើញហើយថា គ្នាយើងអើយ ភ្លាស់យើងស្បើយព្រះព្រោះ គ្នាយើងទាំង
អស់គ្នាដេកទៅចុះ គ្រានោះពានរដេកច្រើនសល់ វិរុលចំបាំងប្រែពីស្វា
កាឡាខ្លួនជាយក្ស ដូចដើមវិញ សូធ្យមន្តព្រះគាថាកាឡាសព្ទ៌ សូធ្យសេព
អាគមផ្ទុំកើតខ្យល់ ថ្លែងពីវិរុលមេយ យក្សាក៏ហោះមកជួយសព្ទ៌ចាប់យក
ព្រះរាមា ពពួកស្វាពលស្វាពេលនោះ ដេកលក់មិនដឹងខ្លួនទាំងនាយទាំងបាវ
មិនសល់មួយត្រូវសព្ទ៌យក្សាដេកសោះសូន្យ តេ្បីកកាត់ហនុមានស្វាង
ទាំងអស់ ពួកយក្សាក៏ផ្លោះចូលទៅចាប់យកហិបព្រះរាម ចាប់ស្រីលក្សណ៍
អនុជា ខ្លះចាប់ពិភេកហោរា ដៀលថា អាពិភេក អាថ្លើមខ្មៅ ក្បត់រត់ចូល
ទ័ពមនុស្សបំផ្លាញពូជពង្សវង្សាវតាយក្ស ម្លោះហើយអាទាំងបីនាក់ ក្បិណេ
ក្ស័យមរណា យក្សប្រឹងហោះរត់ទាំងអស់គ្នា យកពិភេកសារទៅដាក់ភ្នំ
វន្ទះ ភ្នំនោះជលគ្នាឮខ្លាំងណាស់ បើកាលណាថ្ងៃរះឡើងភ្នំនោះជលគ្នា





ល្អិតជាផង់ធូលី យក្សាដាក់ហើយថា ថ្ងៃរះកាលណាអាឯងកើតជាផេះ
ស្រីលក្សណ៍អនុជាប្អូនភ្ញា វាយកទៅដាក់លើភ្នំពន្លឺពេជ្រ ថ្ងៃរះបន្តិចពេជ្រ
ដុតដល់រជដាកាស រូបមនុស្សរកសាច់រោមាពុំឃើញ ដាក់ហើយក្រុងយក្សា
ថា រវាងរពាយខ្លួន មីហិបព្រះនារាយណ៍រាមាទៅបាតាល ដល់ទៅនគរ
រាវិរាពណ៍ មីទៅដល់ហើយទ្រង់ក្រាបទូលថា ព្រះរាមនេះនៅក្នុងហិប
ពូកែណាស់ សម្លាប់យក្សាអោយសាបសូន្យ វិរយរាពណ៍ឮហើយត្រេកអរ
ក្រៃ ទោះពូកែយ៉ាងណានៃ អោយតែបានមកដល់ដៃអញ ថាហើយប្រើ
អោយយកហិបនោះទៅដាក់ទ្រុងដែក អោយកុម្ភណ្ឌទាំងបួនទៅឈរយាម
បើព្រឹកឡើងកាលណាអញ អោយពួកក្រមការបណ្តាយក្ស ដងទឹកចាក់
ស្រុះព្រះរាម អោយយកខ្ទះមួយធំ មួយរយយោជន៍យល់ ដងទឹកចាក់ស្ងោរ
ព្រះរាម អោយរលួយរលេះគ្មានសាច់ឆ្អឹង រឿងត្រង់ណោះស្លេះទុកសិន ។
ថ្លែងពីសហនុមានត្រូវសព្ទ៌ ព្រះពាយបក់មកចំ ក៏ភ្ញាក់ខ្លួនឡើងក៏លូក
មាត់រកក្សត្របីព្រះអង្គមិនឃើញស្តេចផ្ទុំក៏បាត់សូន្យ ម្លោះហើយហនុមាន
ក៏ភិតភ័យខ្លាំងណាស់ សូធ្យទិព្វមន្តប្រោះពពួកពលស្វាភ្ញាក់ដឹងខ្លួនទាំងអស់
ហើយប្រាប់ទៅថា ពួកយើងទាំងអស់មានក្រហើយ ក្សត្រទាំងពីរពង្សនូវ
អង្គពិភេកអសុរា យក្សាលួចបានក្នុងរាត្រី យើងទាំងអស់គ្នាគ្មាននរណាចេះ

ហោរាគន់គូរខ្លះ កាលណោះមានហោរាមួយ ហោរាចាស់នាមឈ្មោះនិលឯក កូន កេសរជម្ពូពាន សហនុមានហៅមកគន់អោយច្បាស់ថា យក្សយកម្ចាស់ពីរពង្សទៅឋានណោ ពិភេកអសុរាទៅជុំគ្នាឬអ្វី ? និលឯកហោរាក៏គន់គូរខ្លះ យល់ដូចហោរទិព្វចក្ខុជៀងជាក់ទាយថា ព្រះនារាយណ៍រាមាយកទៅនគរបាតាលបូរី ខាងបីទិវាគេនឹងស្ងោរ ស្រីលក្សណ៍អនុជាប្អូនភ្ញាគេយកទៅដាក់លើភ្នំពន្លឺពេជ្រ បើថ្ងៃរះកាលណោហើយ ពេជ្រដុះទល់រជដាកាសមណ្ឌល ករលាយខ្លួនអស់ ឃើញសុទ្ធតែពេជ្រ ពិភេកហោរាយកទៅដាក់នឹងភ្នំរន្ទះប្រជល់ សន្មតថា ថ្ងៃរះកាលណោហើយ ក៏ភ្នំជល់ខ្ទេចល្អិតជាផុយផង់ធូលី សហនុមានក៏បានស្តាប់ដូច្នោះហើយ ពុំយូរឡើយក៏ហោះទៅឋានព្រហ្មសួរថា ព្រហ្មឯណាផ្លូវទៅភ្នំប្រជល់ ព្រះព្រហ្មក៏ប្រាប់ទៅត្រូវត្រង់ហើយ សហនុមានសួរថា ឯណាភ្នំពន្លឺពេជ្រ ព្រហ្មក៏ចង្អុលប្រាប់ទៅត្រូវត្រង់ហើយ ហនុមានសួរថា ឯណាភ្នំបាតាលបូរី ព្រះព្រហ្មក៏ចង្អុលផ្លូវត្រូវត្រង់ហើយ ពុំយូរឡើយសហនុមានក៏ហោះវិលវឹង ទៅភ្នំរន្ទះទៅឃើញពិភេកដេកកណ្តាលពុំភ្ញាក់ឡើយ ម្ល៉ោះហើយសហនុមានសូធ្យមន្តព្រះគាថាយកទឹកក្បេតលាបព្រះភក្ត្រា ពិភេកសារក៏បានភ្ញាក់ព្រះស្មារតីហនុមានប្រាប់ថា នេះក្រុងអសុរី សពព្ណ៌យកពិភេកសារមកដាក់កន្លែងនេះ



ពិភេកក៏ភិតភ័យតក្កហ ហនុមានប្រាប់ថា ហោះតាមរញ្ជមកកុំបង្អង់អីយើងនឹងទៅយកស្រីលក្សណ៍អនុជា ហិចហោះទាំងអស់គ្នាពុំយូរឡើយដល់ទៅភ្នំពន្លឺពេជ្រ ក៏បានឃើញព្រះស្រីលក្សណ៍អនុជាប្អូនភ្ញាពុំភ្ញាក់ ស្មារតីរាជក្របីស្វាសសុទ្ធ ក៏ហោមពុទ្ធិទិព្វមន្ត យកទឹកក្បេតភក្ត្រព្រះអង្គហើយទើបភ្ញាក់ព្រះនេត្រា ទតឃើញសហនុមាន នឹងពិភេកអសុរាសួរថា ហេតុភេទអ្វីក៏យើងមកនៅទីនេះ សហនុមានប្រាប់ថា យក្សយង់ក្រុងអសុរាសពណ្ណ៌យកបាបានទាំងម្ចាស់អវតាន ម្ចាស់សិរសា ជាមួយនឹងពិភេកអសុរាហើយនំហោះហោព្រាហេករកជាឃើញ ពីឃពិភេកអសុរា ហោះពព្រះស្រីលក្សណ៍អនុជ ទៅកន្លែង ទៅបើលពួកពលទាំងប៉ៃព្រសិបអក្ខោ ឯអង្គអញ្ចឹងចែកទៅនគរបាតាលបូរី ទៅតាមយកក្សត្រថ្លៃព្រះរាមា ចាហើយសហនុមាន ក៏ហិចហោះផ្លេកផ្លោះខ្លាំងក្រៃ បានដល់ក្លោងទ្វារផ្លូវទៅនគរបាតាបូរី ចូលតាមប្រហោងឈូកកល្ប មានយក្សមួយដេកចាំឈ្មោះវៃយវេត យក្សនោះធំណាស់ពេញក្លោងទ្វារ សហនុមានគិតថាអញនឹងចូលត្រង់ណោវា ម្លោះហើយចូលតាមត្រចៀក ចេញតាមមាត់ហិចហោះចូលផ្កុកក៏ចេញភ្លាម វៃយវេតមើលតាមឃើញ ឃើញស្វាសយើអានេះចិត្តធំចោរឈ្លានពាន ម្តេចហើយក៏ហ៊ានមកឋានអញ បើដឹងជា

អាស្វាស សម្លាប់អាឯង សហនុមានក៏ឆ្លើយថា អញបើដឹងជាវែវតយក្សា អញកាត់កអាឯង ថាហើយហិចហោះផ្លោះសំដៅ លុះបានដល់ទៅនគរ ពាពាបូរី ហនុមានប្រែកាឡាជាតាយក្ស កាន់ឈើច្រត់ឃើញអស់ពួកស្រីស្នំ ក្រមការ សេទី សេនា អសុរី កាន់ក្អមមកដងទឹកជាច្រើនក្រៃ យកទៅស្នោរក្សត្រថ្លៃព្រះរាមា បើដងបានហើយ គេសុទ្ធតែថ្លឹង បើដាច់សង់វែក បែកក្អមក្តី ក្រុងអសុរីសម្លាប់ប្រាំពីរពូជ ពេលនោះមានយាយមួយ ឈ្មោះយាយតាភាឃូន គាត់ដងទឹកបានហើយ នឹងទូលទៅ សហនុមានស្រែកថា យាយខ្ញុំទៅផង យាយតាភាឃូនថា តាយក្សកញ្ចាស់កុំទៅវ៉ា ការនេះពេរាយ័ត្នខ្លាំងណាស់ ក្រែងស្មាផ្លួមហនុមានស្រែកថាពីរបីដង កាឡាខ្លួនកើតជារុយរបួយទុំពោព៌ក្អម ហោយនោះក៏ផុំក្អមទៅដល់កើតេ ពេធ្មីរកាក់ដេរ ជញ្ជីងប្រាវ និមិតជាខ្មួតទៅស៊ីរុះ បើកាន់ត្រង់ណាផុយទាំងអស់ គេចាប់យាយនោះទៅធ្វើទោស សហនុមានកាឡាកើតជាយក្សកញ្ចាស់ ទៅកាត់អាថិសេចក្តីអោយយាយបានថា ថ្លឹងអ្វីថ្លឹងមិនមើល ជញ្ជីងកំពុកថ្លឹងដែរ បាក់ទៅប្រុងយកទោសា ប្រុងសម្លាប់ឆ្ពាអោយក្សិរេហក្ស័យ ពួកពេជ្ឈឃាតយក្សអត់ទោសយាយ ត្បិតអីជញ្ជីងនោះពុកមែន ថ្លែងពីសហនុមានកាឡាខ្លួន ជាយក្សកញ្ចាស់ ដើរលេងតាមផ្សារសប្បាយណាស់ ស្រែកអាក្រោសថា



នរណោចាប់ព្រះរាមបាន ខ្ញុំនឹងសុំស្នោរហុតទឹកទាំងអស់ មិនអោយសល់សោះមួយដំណក់ កាលណោះឪពុកខ្ញុំចេញទៅលេងព្រៃ ព្រះរាមថ្លែងសរជ័យអោយក្ស័យប្រាណ ខ្ញុំចង់ផឹកឈាមតាមឪពុកខ្ញុំ ។ ពួកអាមាត្យក្រមការ បណ្តាយក្ស ឮហើយទៅក្រាបទូលវៃយរាពណ៍ជាអវតាន មានតាយក្សបួយពាព់រូពប្រាណោថា បើនរណោចាប់ស្តេចព្រះរាមបាន គាត់សុំស្នោរហុតទឹកទាំងអស់ តែទឹកមួយដំណក់មិនអោយសល់ គាត់ខឹងអំពីថ្ងៃមុនព្រះរាមា ថ្លែងសរជ័យា សម្លាប់ឪពុកគាត់ ថាហើយប្រើអាមាត្យប្រញាប់ប្រើអោយទៅចាប់យក្សកញ្ចាស់ អាមាត្យទៅនាំតាយក្សកញ្ចាស់ នាំយកមកថ្វាយវៃរាពណ៍ បានវៃយរាពណ៍សួរថា យើតាឯងអួតស្នោរព្រះរាមា តាយក្សកញ្ចាស់ហនុមាន ថ្វាយបង្គំក្សត្រក្សាន្ត ព្រះអវតាន បើចាប់ស្តេចព្រះរាមបានទុកអោយខ្ញុំ ក្រាបទូល ព្រះបង្គំស្នោរហុតទឹកទាំងអស់ តែទឹកបួដំណក់មិនអោយសល់សោះ ថាហើយវៃយរាពណ៍ ប្រើអាមាត្យអោយទៅលើកទ្រុងដែលដាក់ ព្រះរាមា យកមកអោយតាយក្សកញ្ចាស់ សហនុ-មានបានទ្រុងហើយ ត្រេកអរណាស់ ដាក់ព្រះរាមស្នោរហុតអោយមើលព្រះរាមរិទ្ធីក្រៃ យក្សផងដទៃ សម្លាប់មិនបាន ពួកពលអសុរាចង់ឃើញណាស់ ចេញមករហ័សតែគ្រប់ប្រាណ មកឈរចាំមើលរាប់រយលាន

យក្សផងសាមាន្យក៏ច្រើនក្រៃ បើកាលណាតាយក្សកញ្ចាស់ គាត់លើកដៃសុំចូលមកចុះ មើលអោយជិត ទាំងនាម៉ឺនតូចធំក្រមការ យក្សចូលមកគគាក់ច្រើនចង្អៀត កាលណាលើកស្ទួយហិបព្រះនារាយណ៍កន្ទុយវិល្លេជុំប្រាំពីរជាន់ លើកស្ទួយហោះបានហើយ កន្ទុយបោកយក្សចូលខ្ទះទាំងអស់ច្រើនពេកពន់ យក្សខ្លះក៏ស្លាប់គោកទាំងខ្ទះ ហនុមានប្រែប្រាណព្រះកាយាធាត់ធំ ប៉ុនភ្នំព្រះបព្វតា បីហិបក្សត្រាហើយ ហិចហោះជ្រៀតជ្រែកមកឋានយើង កាលពេលនោះហិចហោះកាត់ព្រៃហេមពាន្ត លុះបានដល់ជ្រៃជ្រែកមែកសាខា ហៅពពួកទេវតាមកឈរយាម ហនុមានប្រាប់ថា អោយប្រយ័ត្នបើកាលណាបាត់ហិបព្រះរាម ទេវតាក្ស័យទាំងអស់ ម្លោះហើយសហនុមានក៏ហិចហោះទៅនគរបាតាបូរីវិញ ថ្លែងពីពពួកទេវតា ខ្លះផ្ទំ ខ្លះក្រោកផ្លាស់ប្តូរគ្នាមិនហ៊ានប្រហែស ហិបព្រះនារាយណ៍រាមា ។ ថ្លែងពីសហនុមានបានហោះទៅនគរបាតាលបូរី ដៃកាន់ព្រះខ័នជ័យស្រែកហៅអាវៃយរាពណ៍ចុះមក យើងវាយគ្នា ក្សិណណោះវៃយរាពណ៍កំពុងក្រេវក្រោធា ឮសហនុ-មានស្រែកហៅដូច្នោះហើយ មិនបង្អង់ឡើយ ទាញដំបងពេជ្រឈរសំឡឹងទល់មុខគ្នា សហនុមានប្រាប់ថា អាវៃយរាពណ៍ អាឯងខំតែមកវាយនឹងអញក្នុងនគរបាតាលបូរី ពួកស្រីស្នំក្រមការ គ្មានសល់មួយ ថាបើដូច្នោះត្រូវឯង



នឹង អញហោះឆ្លងសមុទ្រសត្តខ័ណ្ឌទៅវាយគ្នា ( *សត្តខ័ណ្ឌ = ៧ជាន់* ) ហោះទៅដល់មាត់សមុទ្រ ហើយដកដើមត្នោតកល្បប្រាំពីរដើមវេញតែធ្លុងមួយ វៃយរាពណ៍ឃើញដូច្នោះ ដកដើមត្នោតកល្បវេញតែធ្លុងមួយ សហនុមានប្រាប់ថា អាវៃយរាពណ៍ អាឯងវាយអញមុន ឬអញវាយអាឯងមុន វៃយរាពណ៍ឆ្លើយថា ត្រូវអញវាយអាឯងមុន សហនុមានប្រះដេកទៅធំប៉ុនភ្នំ វៃយរាពណ៍ ប្រឹងយាដំបងវាយហនុមាន ហែកផែនដីចូលផ្លូកដកដំបងវិញផុសឡើងធ្មើម វៃយរាពណ៍មិតដំបងវាយម្តងទៀត ហនុមានហែកផែនដីចូលផ្លូក កាលណាវៃយរាពណ៍ លើកដំបងឡើង ហនុមានក្រោកក្រញ៉ើង ផុសឡើងវិញ វៃយរាពណ៍វាយទៅ ហនុមានហែកផែនដីចូលផ្លូកវៃយរាពណ៍លើកដំបងឡើង, ហនុមានស្ទុះក្រញ៉ើងដូចទែលវិញស្រែកថាអាវៃយរាពណ៍ អាឯងវាយអញក៏ច្រើនដង ត្រូវអញវាយម្តងសងដៃគ្នាអាវៃយរាពណ៍ប្រះខ្លួនដេកទៅធាត់ប៉ុនភ្នំ ហនុមានវាយហើយ ហែកផែនដីចូលដូចគ្នា ហនុមានលើកដំបងឡើង វៃយរាពណ៍ក្រោកក្រញ៉ើងសហនុមានចាប់ក្បាលជាប់ សហនុមានក៏ប្រាប់ថា ក្នុងពេលនេះឯងត្រូវស្លាប់ដៃបួនចាប់ក្បាលដៃបួយចាប់ព្រះសែងថ្លា កាត់ក វតក កាត់ស្មា វាតស្មាបើកាត់ត្រង់ណាវាតត្រង់នោះ ម្លោះហើយហនុមានកាត់ជាច្រើនគ្រាដាច់

ភ្លាមពរ្សែត ជាប់មៅវិញ ជាពីរប៉ីគ្រា កាលបុ្តងនេះបានការ យកភ្លៅទៅដក ដកភ្លៅភ្លាមតភ្លាមវិញ ដឹងដូច្នោះហើយ ក៏សណ្តកជើង មកចាប់យាយ- តាភាឃួន ក្នុងនគរបាតាលបូរី ចាប់យកទៅបានហើយទើបសួរថា យាយ អើយយាយ វៃយរាពណ៍អសុរា វាខ្លាំងនឹងអ្វី? យាយភាតាឃួនលើកដៃ ឡើងថ្វាយបង្គំ គាត់ឆ្លើយថា ខ្ញុំមិនហ៊ានប្រាបទេ បើខ្ញុំប្រាប់ទៅហើយក្យ័យ ប្រាំពីរពូជ សហនុមានថា យាយប្រាប់មកចុះ ខ្ញុំប៉ុណ្ណេះហើយមិនអោយរួច ទេ បើសិនណាជារួច ខ្ញុំវាយវាអោយគោកនព្វមហាសមុទ្រ យាយនោះគាត់ ប្រាប់ថា មិនហ៊ានប្រាប់សោះ បើប្រាប់ទៅហើយខ្ញុំស្លាប់ទាំងអស់ ស្លាប់ទាំង កូនចៅជៅសន្តាន គ្រួសារមានប៉ុន្មានមិនសល់សោះ សហនុមានក៏ថា យាយ តាភាឃួន បើយាយឯងមិនប្រាប់ខ្ញុំកូនកម្លោះយាយឯងឈ្មោះចៅសហកុមារ កើតមកកាលណា ហោរាគេទាយថា នឹងបានសោយរាជ្យក្នុងនគរបាតាលបូរី អាវៃយរាពណ៍វាគិតសម្លាប់កូនយាយឯងថ្ងៃនេះឯង នេះកបចៃខ្ញុំមកទាន់ យាយតាភាឃួនធន់មិនបាន ប្រាប់ក្រុងហនុមាន តបទៅថា វាលក់ដួងចៃ នឹងតាឥសី នៅនឹងភ្នំមយូរាវិទ្យាល័យ ហនុមានក៏សណ្តកជើងមួយទៀត ទៅចាប់តាឥសីដែលនៅ លើខ្នងភ្នំមយូរាវិទ្យាល័យ ចាប់បានមកហើយសួរ ពាសឥសី ឯណាដួងកែវអាវៃរាពណ៍ យកអោយឆាប់ ឥសីថាមិនហ៊ាន



អោយទេ សហនុមានថា បើឥសីមិនអោយ យើងសំលាប់តាឥសីអោយ ក្សិណក្ស័យ ឥសីក៏ភិតភ័យតក់ស្លុតខ្លាំងក្រៃ ប្រាប់រាជក្របីថា ដួងចៃនៅ ក្រោមជើងគ្រាន ហនុមានក៏លូកកន្ទុយចាប់យកដួងកែវមកអោយបាន បាន ដួងកែវហើយដាក់នឹងបានដៃ ហនុមានសួរទៅថា អាវៃរាពណ៍នេះរបស់ នរណា? វៃរាពណ៍ក៏សោកាទ្រង់ព្រះកន្សែងស្រែកយំឮខ្លាំងក្រៃ ទេវតា ភិតភ័យទៅពុំបាន យំផ្តាំស្រីស្នំក្របការ រណ្តូបហោសីតូចធំក្នុងទីឋាន ប្អូនអើយបងក្ស័យហើយណាប្អូនស្រី ឱះឱស្រីស្នំក្រមការទូវហ្លួងទាសាក្នុង បុរី ប្រពន្ធចុង ប្រពន្ធដើមពែងបំរើយក្ខី សែនសោកាល័យគ្រប់ៗគ្នា ក្នុង នគរបាតាលបូរី ឮតែមាត់យំស្ទុំស្ទិតតូចធំយំខ្លាំងក្រៃ នគរនោះសាបសូន្យ ឮតែមាត់យំដូចនគរខ្មោចល្អុះល្ហោចក្នុងចិត្តអាណិតក្រៃ វៃរាពណ៍ផ្តាំហង្សា ហង្សីទូវហង្សព ផ្តាំត្រីក្នុងជលសា ផ្តាំរូចស្រេចកាលណា ហនុមានឈ្លី ដួងចៃ វៃយរាពណ៍ក៏រលាយក្សិណក្ស័យ រាជាក្របីស្រីពានរស្វាសសុទ្ធ បុត្រព្រះពាយសេនាអង្គព្រះនារាយណ៍ ជ្រែកផែនដីបានឡើងមកលើដល់ ឋានយើងហើយ ក៏ហោះកាត់ហេមពាន្ត ដល់ដើមពោធិ៍ជ្រៃហែកបើកមែក សាខាសុំហិបពីទេវតាហោះតទៅទៀត ឯរឿងត្រង់ណេះស្ទេះទុកសិនមិន ចរចា ។

៤៧- និយាយពីកូនអាវៃយរាពណ៍កើតថ្ងៃនោះ ហើយសួរមាតាថា បិតាខ្ញុំលោកយាងទៅណា ម្តាយប្រាប់ថាកូនអើយ ព្រះបិតារបស់អ្នក ហនុមានគេបកសំលាប់ទៅហើយ មហារំអិលកូនយក្សនោះក៏លោះឆ្វេក ផ្លោះតាមហនុមាន សហនុមានក៏បានឮសូរសន្ធឹកសូរស័ព្ទដូចខ្យល់ បែរ មើលទៅក្រោយក៏ឃើញមហារំអិលកូនអាវៃយរាពណ៍ ទុកហិបព្រះរាម ហើយវិលមកតយុទ្ធគ្នា មហារំអិលក៏វាយហនុមានសន្លប់បាត់ស្មារតី ព្រះ ពាយបក់បោកក្រោកឡើងវាយគ្នាទៀត មហារំអិលក៏វាយហនុមានសន្លប់ បាត់ស្មារតីទៅទៀត ព្រះពាយបក់បោកក្រោកឡើងវាយគ្នាទៀត វេលាថ្ងៃ នោះមហារំអិល ក៏វាយហនុមានសន្លប់មួយថ្ងៃប្រាំពីរដង សហនុមាន ចាប់វាមិនបាន ពីព្រោះរអិលណាស់ ឮសូរស័ព្ទគគ្រឹកគគ្រេងខ្ទររខ្ទារខ្លាំង ព្រៃ ឥសីចេញពីព្រៃហើយបង្ហាញខ្លួន សហនុមានយកដីរោយលើ ប្រាណអោយស្វាសដេញ សហនុមានបានឃើញដូច្នោះហើយ ក៏ចាប់ដៃ ស្ទាបស្ទង់ទៅលើខ្លួនមហារំអិល ដីខ្សាច់ក៏ចាប់រឹងរិតជិតអស់ខ្លួន សហនុមាន ចាប់បានឬងទៀតពេញកណ្តាប់ដៃ ទើបយកព្រះខ័នកាន់កាប់កមហារំអិល កូនវៃយរាពណ៍ក៏ក្សិណក្ស័យ ។



៤៨- បាបុត្រព្រះពាយសេនាអង្គព្រះនារាយណ៍ លើកទ្រុងបីហិប អង្គព្រះនារាយណ៍ ហោះមកដល់សមរភូមិជ័យកែវមរកត ព្រះនារាយណ៍ បើកបាំងទ្រង់តើនឡើង ឃើញទ្រុងដែកជា មហាយក្ស ខឹងក្រេវក្រោធ ព្រះពិស្ណុការពារនេះ អានេះកាត់ងារការញលោកល់ ធ្វើអោយអារ៉ាស ព្រមការ អោយអញខ្មាសគេទាំងអស់គ្នា គេថាព្រះរាមាជាប់ទ្រុងដែកជា ជាហើយទើបអង្គព្រះក្សត្រក្សាន្ត ហៅព្រះប្អូនមកបានបង្គាប់ការ អោយ យកទៅពាធាក្នុងព្រៃក្សា កាលណោះព្រះស្រីលក្សណ៍អនុជាប្អូនភ្ជា អង្វរបង សុំទោស តែប្តូររត់ទោសភ័យ ព្រះនារាយណ៍រាមាថា អត់មិនបាន ឯងយក ហនុមានទៅកាប់ក្នុងព្រៃព្រៃ ស្រីលក្សណ៍នុជា បណ្តើររាជក្របីស្រីហន- មាន លុះលង់បានដល់ជើងគិរី ព្រះលក្សណ៍សារឆ្លើយថា បាហនុមាន ឯងកុំប្រែប្រាណអោយធាត់ធំ ក្រែងដឹងដល់ព្រះនារាយណ៍ សម្តេចបង ឯ យើងទាំងពីរមានទោសទាំងអស់គ្នា វេលាថ្ងៃនោះស្រីលក្សណ៍អនុជា លី លាមកថ្វាយបង្គំព្រះរៀមបង ព្រះនារាយណ៍រាមាឃើញហើយ ក៏ទូលថា ព្រះស្រីលក្សណ៍អនុជ អូនសម្លាប់វាសោះសូន្យហើយឬនៅ ព្រះលក្សណ៍ អនុជអូនក៏ឆ្លើយទៅ សូមព្រះចោមចៅអតិទោសា ខ្ញុំយកទៅកាប់បៀត

ជើងភ្នំបព្វតា ក្បិណាក្ស័យជីវ៉ាជីវិតសូន្យ ។ រឿងនេះស្ដេះព្រង់នេះសិន យើងមិនទាន់ថ្លែងចរចា ។

៤៩- និយាយពីសហនុមានខំយាត្រា រកស៊ីក្បែរបព្វតា ប្របជើងភ្នំ ថ្ងៃមួយកាលនោះស្វាហនុមាន ក៏បានរកស៊ីក្រោមជ្រៃសាខា មានស្រះមួយណាក៏ធាធំថ្លាយង់មើលឃើញដី យល់ទាំងហ្វូងត្រីហែលហែបហា កាលណោះថ្លែងពីពិភពនាគក្ដៅក្រហាយ ក៏នាំពូកពលលេងសប្បាយជ្រែកនព្វមហាសមុទ្រមក កាត់ព្រៃហេមពាន្តក្នុងព្រឹក្សា ដល់ជ្រៃសាខាស្រះសប្បាយ ដាក់ភ្នែកក្រឡេកមើលទៅឃើញកូនស្វា តែឯងឯការរង្គុយលេង ស្ដេចនាគចំអន់ថា ឯងហ៊ានច្បាំងនឹងកូនស្វាទេ សេនានាគ? ស្វាសក៏អន់ចិត្តណាស់ យើងមិនចង់ច្បាំងទេនឹងសេនា ចង់ច្បាំងតែនឹងស្ដេចពិភពនាគ ស្ដេចពិភពនាគឮហើយ ហោះរលាស់ខ្លួនដូចគេអង្រួនសព្វទិសា សហនុមានប្រែពីកូនស្វា កើតគ្រុឌបក្សាធំក្រៃកន្លង ស្ទុះទៅចាប់នាគពីកន្ទុយ ក៏រំនឹងដៃអោយដល់ក ហើយចាប់ហែកមាត់អោយក្ស័យមរណា ស្ដេចនាគអង្វរថា លោកអើយ កុំធ្វើទោសខ្ញុំឡើយ សុំទោសា បើសម្លាប់ខ្ញុំទៅហៅថាឥតការ ខ្ញុំសុំអញ្ជើញក្សត្រាទៅសោយរាជ្យនគរខ្ញុំ ម្ល៉ោះហើយ ស្ដេចនាគក៏អង្វរសហនុមាន សូមលោកហោះថ្កានសោយរាជ្យរម្យ ហោះ



ទៅផ្ទះអេររខ្ញុំ សុំអោយលោកសោយរាជ្យរម្យ ររស់ពូកស្រីស្នំក៏ច្រើនសល់ ហនុមានឮហើយក៏ត្រេកអរ ទៅនឹងស្ដេចនាគក៏បានដល់ ស្ដេចនាគអោយសហនុមានសោយរាជ្យជាធំ ចាត់ពូកស្រីស្នំអោយបំរើ ស្រីស្នំព្រមការបណ្ដានាគ ខ្លះរាំខ្លះច្រៀង ខ្លះគក់ប្របាច់ មិនអោយអន់រាក់ថ្នាក់ព្រះម៉យ សហនុមានទៅច្រើនខែ ជាច្រើនថ្ងៃ កាលណោះយកជើងក្រោយមកអេះចៃ ស្នំផងដទៃក៏សើចឆោ ហនុមានខ្មាស់ណាស់ក៏លាស្ដេចនាគដល់មកព្រៃហេមពាន្តដើរឯកោ រឿងនេះស្ដេះទុកនៅ ។

៥០- និយាយពីរាពណាសូរ ក្ដៅក្ដួលឆេះឆួលដូចភ្លើងវិស័យ ដឹងជាវិរយភាពយើប្អូនក្ស័យដូច្នោះ ហើយគគក់ឱរាពុំមានស្បើយថា ឱប្អូនអើយ បងក៏មិននៅ បងនឹងទៅធីកឈាមប្អូនផង ច្បាំងនឹងព្រះរាមាស្ដេចមនុស្សាបើមិនទៅច្បាំងទេ ខ្មាស់ទេវតា សូវមរណាទៅតាមប្អូន ថាហើយក្រុងទសមុខមារ ស្ដេចហោះលីលាទៅកាន់សែងព្រះអាទិត្យ បានដល់ចូលទៅថា នែក្លើ អញមកអោយឯងទៅជួយច្បាំង ដែលអញតតាំងនឹងព្រះរាម ព្រះលក្សណ៍មនុស្សា ។ អញនេះមានរិទ្ធីណាស់ អញមានវ៉ែនតាទិព្វ បើអញមើលទៅត្រង់ណា កើតជាភ្លើងឆេះរលាយអស់ បើអញពាក់បើលទៅត្រង់ភ្នំ ភ្នំនោះរលាយជាពពុះផេះ បើពលច្បាំងមានប៉ុន្មានសមុទ្រ

អញនឹងពាក់វែនតាទិព្វសំឡឹងមើលទៅឆេះស្លាប់ទាំងអស់ ។ រាពណ៍ថា អើបើឯងថាដូច្នោះ ត្រូវឯងទៅជួយច្បាំងអញ ផងកើតតែរាព្រះអាទិត្យ ក៏បររាជសីហ៍មួយវាយយោជន៍យល់ អណ្តែតមកទាំងអស់ឋានកណ្តាល យក្សនោះសោតធំមួយចំបៀងបេយ ទេវតា ព្រហ្មក៏ស្ងប់ស្ងែង បររាជរថទៅលើភ្នំ ភ្នំរាបដល់ដី កក្រើកភ្នួកភ្លាត់ញាប់ញ័រខ្លាំងព្រៃ ក៏ឮសូរថ្មួរ ផ្គរលាន់វិស័យ យក្សផងដទៃក៏ស្ងប់ស្ងែង ព្រះរាមព្រះលក្សណ៍មនុស្ស ។ ក្លើទុកអោយអញ អញនឹងពាក់វែនតាទិព្វសំឡឹងអោយរលាយអោយអស់ កើតជាភ្លើងឆេះ ឆេះជាផង់ធូលីទោះពលមានប៉ុន្មានសែនសមុទ្រ បើអញពាក់វែនតាទិព្វ សំឡឹងមើលទៅស្លាប់ទាំងអស់ កាលណោះចម្បាំងសែងព្រះអាទិត្យលើកពលសត្វរង្គអង្គយោធា បាំងសែងសុរិយាអាប់រស្មី ងងិតដូចកល់កាលរាត្រី កក្រើកស្រុកសមរភូមិជ័យជាប្រាំពីរថ្ងៃ ទើបព្រះអង្គហៅពិភេកហោរាមកគន់គូរ ពិភេកឮហើយទូលថា ព្រះអរពាន ឮានទ័ពនរណាទេ ទ័ពសែងព្រះអាទិត្យ ក្លើរាពណ៍ យក្សនោះរឿងរិទ្ធិ មានវែនតាទិព្វ បើពាក់សំឡឹងទៅត្រង់ណា ក៏រលាយជាពពុះផេះ បើមានពលរាប់សែនសមុទ្រ វាពាក់វែនតាទិព្វទៅ ស្លាប់ទាំងអស់ ព្រះនារាយណ៍រាមាក៏បានស្តាប់ពិភេកហោរាថាដូច្នោះហើយ ថាឱពិភេកប្អូនអើយ រកអ្នកណាទៅ



ពង់ពាល ពិភេកទូលថា មានតែមារអង្គត់ និងបាហនុមាន ទើបទៅតការដូចសេចក្តីប្រាថ្នា ពេលនោះព្រះនារាយណ៍រាមាពាក្យព្រាហៅ ព្រះលក្សណ៍ស្ងួនភ្ងា អនុជស្ងួនត្រង់ ថាប្អូនអើយកាលបងប្រើអោយយកសេនាទៅសម្លាប់ កាប់ហើយឬក៏ទុកនៅ ព្រះលក្សណ៍ទូលទៅ សុំព្រះតេជគុណទៅ ត្រង់ក្រោមបេត្លា មិនបានសម្លាប់ទេ ទុកអោយរស់នៅ ព្រះនារាយណ៍រាមាក៏ស្តាប់ពាក្យស្រីលក្សណ៍អនុជាដូច្នោះហើយ ក៏ត្រាស់ហៅទៅពិភេកហោរាថា ប្អូនអើយ សហនុមាននៅឋានណា ពិភេកហោរាថា ព្រះអរពាន មនុស្សាឬមរមា រកក្រុងហនុមាន រកមិនឃើញព្រាហ្មណ៍សោះឡើយ រកមិនឃើញទេ ថ្វាយព្រះបង្គំ ។ ព្រះនារាយណ៍រាមាថា បើដូច្នោះហើយ ធ្វើដូចម្តេចនឹងបានឃើញ ពិភេកទូលថា បើព្រះអង្គចង់ដើញ រាជក្របីស្រីពានរ ស្វាសសុទ្ធ អោយព្រះអង្គថ្លែងសរអារិទ្ធិច័ន្ទទៅរក ព្រះនារាយណ៍រាមាក៏ទៅចាប់សរអារិទ្ធិច័ន្ទផ្កាញផ្កា សរសេរអក្ខរាបិទនឹងចុងសរ ហើយក៏ថ្លែងសរអោយសរទៅរក ក្នុងសារព្រះនារាយណ៍សរសេរថា ត្បិតមានយក្សមួយធំឈ្មោះសែងព្រះអាទិត្យ លើកទ័ពមីរមិតមកវាយទៀតហើយ ម្លោះហើយព្រះអង្គក៏បាញ់សរអារិទ្ធិច័ន្ទទៅក្នុងព្រៃហេមពាន្ត ឮសូរដូចរន្ទះទាំងមួយសែន សូរស័ព្ទសំចែកដូចហាក់

នឹងបែកព្រៃហោរពាទ្យ ស្រាប់តែសរស្នៅធំពុះហនុមាន សរហនុមានបើរ ទៅឃើញសាររអង្គព្រះនារាយណ៍ មើលទៅដំណើរថាមានយក្សធំណាស់ ឈ្មោះសែងព្រះអាទិត្យ បរពលមកជិតមកវាយទៀតហើយ ម្លោះហើយ សហនុមានក៏ថា ហ៎ ! សរត្រូវអោយស្លាប់ទៅ ត្រូវអោយស្លាប់ទៅ ជាច្រើន ដង រត់តាមសរ សរក៏ចេះតែថយរត់ ហនុមានក៏ចាប់សរបានយកបកបុកខ្លួន អោយស្លាប់ សរនោះចេះតែប្រទាញ មិនព្រមចាក់ ពីរបីដងពីរបីគ្រា ដូច្នោះ ហើយក៏សហនុមានខាំសរ សំដៅស្រុកសមរភូមិជ័យកែវបរកត ក៏ឡើង ទៅថ្វាយបង្គំព្រះរាមា ដូច្នោះហើយព្រះនារាយណ៍រាមាក៏ឃើញ ស្វាស ហនុមានមកគង់គាល់ដូច្នោះហើយ ក៏មានព្រះបន្ទូលថា អើស្វាសហនុមាន មួយទិវានេះ យើងបានឃើញបា យើងមានចិត្តត្រេកអរណាស់ ព្រះ នារាយណ៍រាមា ក៏បានប្រើស្វាសហនុមាន និងមាអង្គត់ អោយទៅច្បាំង នឹង សែងព្រះអាទិត្យ ម្លោះហើយហនុមាននឹងមាអង្គត់ ក៏ហោះលឿនស្ទៅ សំដៅមកជិ ដល់ហើយអង្គត់ហនុមាន ក៏ប្រែប្រែកាឡាជាកូនស្វាមួយតូច មើលទៅខ្លួនក៏ពុរពងរងកើតជាឈាម មើលទៅក្បាលក៏គេកោខ្វែងជើង ក្អែកសាប់នឹងពូថៅ លើកដៃសំពះថ្វាយបង្គំប្រណម្យទៅចំសែងព្រះអាទិត្យ ក៏ទូលថា សូមម្ចាស់ជួយមេត្តា ជួយយកអាសាខ្ញុំផង ព្រះរាមកាចណាស់



ធ្វើបាបខ្ញុំ ប្រើខ្ញុំមកច្បាំងនឹងម្ចាស់ ខ្ញុំថាមិនហ៊ានមកទេ តាំងយកពូថៅមក កាប់ក្បាល វាយខ្ញុំបែកទាំងខ្លួន បង្អត់បាយផងខ្ញុំស្គមណាស់ ម្លោះហើយ សែងព្រះអាទិត្យច្រូចទឹកកុន្ទីមកលើស្វាទាំងពីរក៏ធាត់ធំ ស្វាសទាំងពីរ ឯងឡើងមកលើរាជរថរបស់អញមក ឡើងទៅដល់ហើយរត់បញ្ចុំ សែង ព្រះអាទិត្យក៏ថាឈប់ៗ ស្វាកុំរត់ ស្វាថាទេតែព្រះរាមបាញ់សរមកបែកថ្លើម ស្លាប់ ម្លោះហើយសែងព្រះអាទិត្យដោះវ៉ែនតាទិព្វ អោយទៅសហនុមានថា បើព្រះរាមលើកពលមកអោយសំឡឹងអោយស្លាប់អស់កុំអោយសល់ សហ- នុមាន បានវ៉ែនតាទិព្វ ឈ្លីនឹងបាតដៃក៏ខ្ទេចអស់ ក្សិណណោះមាអង្គត់ស្ទុះ ទៅខាំក ហនុមានខាំចង្កេះ ស្វាទាំងពីរធាត់ធំប៉ុនភ្នំបព្វតា សង្កត់យក្សយង់ អសុរា ក៏ទាញព្រះខ័នថ្លាកាត់ព្រះសុរង បោះទៅកណ្ដាលសមុទ្រយង់ឃ្លង ក៏ចាប់រាជសីហ៍ទាំងប្រាំរយយោជន៍យល់ បោះទៅក្នុងមហាសមុទ្រទាំង អស់ ពលផងតិកកងផ្អើលឆោ អង្គត់ហនុមានដេញកាប់យក្សា ពលផល មរណោក្សិណក្ស័យទាំងអស់ អធិកម្ម អធិពលឡាំ កាលណាបើឃើញ ដូច្នោះ បររាជសីហ៍ហោះទៅកាន់នគរលង្កា ថ្វាយព្រះបង្គំហើយក្រាប ទូលថា ថ្ងៃមិញ ហនុមានស្វាសសម្លាប់យក្សា យក្សស្លាប់ត្រៀបត្រា ពេញក្នុងមហាសមុទ្រ ស្លាប់សែងព្រះអាទិត្យ ស្លាប់ទាំងរាជសីហា ។

៩១- ក្រុងទសភក្ត្រាក៏បានស្តាប់អធិកម្ម អធិពលឡាំ ទូលថាដូច្នោះហើយ ក៏ក្តៅក្តួលក្នុងព្រះឱរា ទើបត្រាស់ហៅរាជសេនា អោយទៅហៅវិរុលចំបាំង អោយទៅស៊ើបមើលយកដំណឹងថ្វាយបង្គំទូលថា ព្រះអង្គតែរត្រៀមពលរួច ព្រាត់ព្រើតរំភើតអារម្មណ៍ ព្រះអង្គការងារទៅនោះណាឆាប់ វិរុលចំបាំងបានឮហើយ ក៏យាងទៅនគរលង្កាបូរីពុំហ៊ានបង្អង់ ដល់ហើយក៏ក្រាបថ្វាយបង្គំ ក្រុងទសមុខការឃើញហើយក៏ហានព្រះឱង្ការ វិរុលចំបាំងបានឮហើយ ក៏យាងទៅនគរលង្កាបូរីពុំហ៊ានបង្អង់ ដល់ហើយក៏ក្រាប ថ្វាយបង្គំ ក្រុងទសមុខហារឃើញហើយក៏ហានព្រះឱង្ការ វិរុលចំបាំងអញនឹងប្រើបាអោយទៅពពាំងច្បាំង នឹងព្រះរាម ព្រះលក្សណ៍មនុស្ស វិរុលចំបាំងបានស្តាប់ហើយ ក៏ថ្វាយបង្គំលា វិលមករៀបទ័ពអស់ពលក្នុងនគរក្រុងលង្កាបូរីដូច្នោះហើយ ក៏បើកយកពលពីក្នុងភ្នំព្រះសុមេរុ យក្សយង់ក្រុងអសុរា ក៏មកតត្រៀបត្រា ដប់ពីសមុទ្រយង់ឃ្លង ក៏កក្រើកស្រុកសមរភូមិជ័យកែវមរកត ព្រះនារាយណ៍រាមាស្តេចអស្ចារ្យ មានព្រះបន្ទូលថា ទ័បពនរណាលើកមកទៀតហើយ ពិភេកទូលឆ្លើយថា ទ័ពវិរុលចំបាំងថាអើពិភេកហោរា បើទ័ពវិរុលចំបាំងនរណាទៅតដែបាន ពិភេកអសុរាក៏ឆ្លុះយល់ដោយនូវហោរទិព្វចក្ខុថា ហានតែបាវរង្គត់ និងសហានុមានព្រោះ



ហើយ សហានុមានក៏តាំងកេណ្ឌទ័ពសារប្រជុំ សេនាទាំងពីរដណ្តប់អង្គប្រាណលើទ័ពទៅទល់ទ័ពនឹងទ័ពយក្សា វិរុលចំបាំងស្រែកថា ទ័ពនរណា ហនុមានស្រែកថា ទ័ពអញហៅសហានុមាន ហនុមានសួរថា តើទ័ពនរណា ? វិរុលចំបាំង ឆ្លើយថា ទ័ពអញ ហនុមានក៏ថា អើវិរុលចំបាំង បើដូចគ្នាហើយលេងអោយអស្ចារ្យ ហនុមានក៏តាំងរងរ៉ាប់ទ័ពអសុរា ក្រុងអសុរាក៏ថយដៃពេលនោះ យក្ស និងស្វាក៏ចំបាប់គ្នា យក្សមួយស្វាពីរ យូរយាសខ្លាំងក្រៃពួកយក្សមរណា ក្សិណក្ស័យវិនាសបាត់បង់នៅក្នុងសាគរ វិរុលចំបាំងដោះខ្លួន ទៅពួននៅបាតសមុទ្រ ពានរស្វាសសុទ្ធហៅពិភេកហោរា យក្សដែលវាមកច្បាំងថ្ងៃមិញ .តើវាទៅពួនឋានណា ពិភេកអសុរាថា វាទៅពួននៅបាតសមុទ្រ និងខ្សាច់ប្រាំពីរពណ៌ សហានុមានក៏ជ្រែកមហានព្វសមុទ្រ ទៅចាប់វិរុលចំបាំង ដៃមួយចាប់ព្រះសិរសា ដៃមួយចាប់ព្រះខ័នថ្វា អារផ្តាច់ព្រះសុរងកចេញ អធិកម្ម អធិពលឡាំ បានឃើញដូច្នោះហើយណា ក៏ញាក់រាជសីហ៍ចូលក្រុងលង្កា ក្រាបទូលម្ចាស់លើត្បូងសិរសា ថាវិរុលចំបាំងក្សិណក្ស័យហើយណា ពលយក្សាមរណាដប់ពីសមុទ្រយង់ឃ្លងក្រុងទសភក្ត្រាយកដៃគក់ដើមទ្រូង ផែនដីដូចរលុះចុះទៅក្រោម ថា

ឪវិរុលចំបាំងអើយ មិនគួរសោះទៅចាញ់ដៃអាស្វាស តពីថ្ងៃនេះស្លាប់ហើយមិនរស់នៅ ។

៥២- កាលណោះ ក្រុងទសមុខមារ ត្រាស់ប្រើអាមាត្យមួយទៅអញ្ជើញវិរុលមេឃ វិរុលមេឃមកដល់ហើយ ក៏ម៉បម៉ាយថ្វាយបង្គំ ក្រុងទសមុខមារ កាលមួយទិវាក៏បានឃើញវិរុលមេឃយក្សាឡើងពាល ព្រះអង្គទេវព្រះឱង្ការថា ណាវិរុលមេឃ អញនឹងប្រើណាទៅពេលនេះព្រះរាម ព្រះលក្សណ៍ វិរុលមេឃស្តាប់ហើយក៏ផយមក រៀបទ័ពយក្សា អសុរា វាយស្គរម៉ៅភ្នំពេញយក្សមកច្រើនសម ក៏លើកទ័ពទៅរបរំលោះសា កក្រើករំពឹកអស្ចារ្យ កក្រើកដល់ស្រុកសមរភូមិជ័យកែវមរកត ព្រះរាមត្រាស់ហៅពិភេកអសុរា នេះទ័ពអ្នកណាកក្រើកខ្លាំង ពិភេកទូលថា នេះទ័ពវិរុលមេឃ បើដូច្នោះ ប្រើអ្នកណាទៅតតាំងច្បាំង នឹងវិរុលមេឃបាន ពិភេកហោរាទៀងទូលទៅថ្កាន បានតែហនុមាន និងមារអង្គត់ អង្គត់ ហនុ-មាន កេណ្ឌកងពលបានដប់ពីរសមុទ្រ បរទៅប្រុងវាយយក្សា ទល់មុខទ័ពគ្នា ហនុមានសួរថា រើយអសុរាយើងលេងគ្នាម្តង វិរុលមេឃថា រើយសហ-នុមាន ថ្ងៃនេះយើងបានមកជួបគ្នាហើយ យើងលេងអោយអស្ចារ្យក្រៃទាំងយប់ទាំងថ្ងៃកុំមានស្រាកស្រាន្ត កាលណោះរាជក្របីសំរុកចូលវាយ



យក្សា សាមាន្យ ស្វាន់ឯយក្សាកាប់ចាក់គ្នា ស្លាប់ស្លោកយក្សាក្នុងមហានគរ វិរុលមេឃ ក៏អស់ពលដប់ពីរសមុទ្រ ប្រែប្រានហោះរត់ក៏ទៅពួននឹងពពុះទឹក សហនុមានក៏ទៅហៅពិភេកហោរាអោយគន់គូរមើលអោយអស្ចារ្យ ពិភេកអសុរាថា យក្សាទៅពួនក្នុងពពុះទឹក ហនុមានក៏តាមទៅរកយក្សាដែលនៅក្នុងពពុះទឹក វិរុលមេឃចេញមកវាយបុត្រព្រះពាយ សេនាអង្គព្រះនារាយ-ណ៍ ក៏សន្លប់ កាលណោះព្រះពាយបក់បោកមកចំ រស់ឡើងវិញហើយក៏ទៅស្រវារកទៀត វិរុលមេឃចេញមកវាយស្វាសទៀត សហនុមានក៏សន្លប់លង់ ព្រះពាយបក់បោកមកត្រូវត្រង់ ហនុមានក៏រស់ឡើងវិញ ស្រវារកយក្សម្តងទៀត វិរុលមេឃក៏ភ័យណាស់ទៅពួននឹងចក ហនុមានទៅស្រវារកទៀត ក៏ចាប់បានវិរុលមេឃយក្សា ដៃមួយហូតព្រះខ័នថ្លា ដៃមួយចាប់ព្រះសិរសាអារផ្តាច់សុរងធ្លាក់ចេញ កាលណោះបាបុត្រព្រះពាយសេនាអង្គព្រះនារាយណ៍លើកទ័ពវិលវិញ ដល់បានដល់ស្រុកសមរភូមិជ័យកែវមរកត ស្តេចក៏ឡើងទៅក្រាបថ្វាយបង្គំព្រះនារាយណ៍រាមាធិបតី ថាបានបំផ្លាញយក្សយង់ក្រុងអសុរី ស្លាប់អស់ក្សិណក្ស័យមរណា កាលណោះព្រះនារាយណ៍រាមាស្តេចត្រេកអរក្រៃ មានព្រះបន្ទូលត្រាស់ថា អើបាអង្គត់ហនុមាន ឯងសម្លាប់យក្សបាន អញឱ្យរង្វាន់ ។

៥៣-ហើយព្រះអង្គគង់នៅជាសុខសាន្ត ថ្លែងពីទសមុខក្រុងមារអសុរាព្រះចៅលង្កានៅពុំបាន កើតទុក្ខទោម្នេញគ្មានស្រាកស្រាន្ត ឆេះឆួលក្នុងប្រាណដូចភ្លើងវិស័យ ពេលនោះក៏ហោះទៅកាន់បង ថាសូមសម្តេចព្រះរាមព្រះជេដ្ឋា ទៅជួយវាយអាមនុស្សាដូចបំណង ទ័ពនោះរបីងរឹងរូសខ្លាំងក្រៃ មានពលស្វាសធាត់ធំហៅហាន សម្លាប់យក្សបានបោះក្នុងជលាស័យ វាមានស្វាសកាចក្រៃធាត់ធំស្ពឹមស្មៃ មនោមនះសោះសា កុរ៉េប៉ាន់ស្លាប់ហើយ យើងកុំបង្អង់យូរឡើយ នាំពលទៅវាយអាមនុស្សា ខំកេណ្ឌយោធាចូលដល់ត្រៀបត្រា ក្សិណនោះយក្សាក៏មកច្រើនក្រៃ បាំងសែងព្រះអាទិត្យងងឹតផែនដី កក្រើកអំពើកសព្ទឋានញ័រស្រុកសមរភូមិជ័យកែវមរកតខ្លាំងក្រៃ ព្រះរាមសង្ស័យក៏ហៅពិភេកហោរា ពិភេកទូលថា គ្មានទ័ពនរណា គឺទ័ពកុរ៉េប៉ាន់បងភាពណិ ថាអើពិភេកហោរាប្អូនអើយបើកុរ៉េប៉ាន់ដូច្នោះហើយ តើយកអ្នកណាទៅតទ័ពបាន ពិ-ភេកទូលថា មានតែបាហនុមានមាអង្គត់ សុគ្រីព និលផាត់ និលឯក កេ-សរជម្ពូវពាន សេនាទាំងពីរដណ្តប់អង្គប្រាណ ទើបលើកទៅវាយក្រុងមារអសុរាក្នុងពេលនោះ ថាហើយកេសរជម្ពូពានកេណ្ឌបាហនុមានកេរវុធ សុគ្រីពទាំងពីរដណ្តប់អង្គក៏ចូលវាយតទ័ពនឹងក្រុងមារអសុរា កាលណោះ



ពានរក៏មានជ័យចេស្តាឈ្នះក្រុងអសុរា ពេលនោះកុរ៉េប៉ាន់ក៏បានទតយល់ពលស្លាប់ត្រៀបត្រា ក៏ទាញដំបងពេជ្រផ្លេកផ្លោះហោះសំដៅ មកតយុទ្ធជាមួយនឹងរាជក្របីហនុមាន ហនុមានក៏រងរ៉ាប់ចាប់អង្គអសុរា ដៃមួយចាប់ព្រះសិរសា ដៃមួយក៏ហូតខ័នថ្លា កាត់ព្រះសរុងចោលចេញ ពលយក្សក៏ក្សិណក្ស័យមរណា ក្ស័យក្នុងមហានគរច្រើនក្រៃសោះសា ហនុមានក៏បានលើកពលចតុរង្គយោធា មកដល់ស្រុកសមរភូមិជ័យដូច្នោះហើយ ក៏ឡើងទៅថ្វាយបង្គំសម្តេចព្រះរាមា ព្រះអង្គក៏មានព្រះហឫទ័យត្រេកអរក្រៃ ។ អធិកម្មអធិពលឡាំឃើញដូច្នោះហើយ ក៏ឡើងទៅគាល់ក្រុងទសមុខមារថា សម្តេចព្រះរៀមព្រះជេដ្ឋា ក្សិណក្ស័យអម្បាញ់ថ្ងៃមិញទៅហើយនឹងដៃអាស្វាស ក្រុងទសភក្ត្រាក៏ទ្រង់ព្រះកន្សែងថ្លែងពិលាប សោយសោកាថា' ឱព្រះជេដ្ឋា ព្រះរៀមបង ខ្ញុំនេះក៏មិនរស់ទេក៏មុខតែក្ស័យផង ។

៥៤-ថាហើយក្រុងមារហោះផ្លេកផ្លោះទៅកណ្តាលជលសា ទៅប្រាប់មច្ឆានព្វ ឱ្យខ្លួននាង ព្រះរាជបុត្រនាង និងក្រុមចតុរង្គអង្គយោធាទៅជួយវាយអាមនុស្សា ។ មច្ឆានព្វមានព្រះសុវណ្ណី ហៅមហារំអិលថា ទៅជួយច្បាំងព្រះជីតារបស់អ្នក មហារំអិលឮហើយក៏កេណ្ឌពលអង្គយក្សានឹង

លើកទៅវាយព្រះរាមព្រះលក្សណ៍មនុស្សា មហារំអិលឮដូច្នោះហើយ ក៏លើករស់កងយោធាទៅវាយព្រះរាមព្រះលក្សណ៍មនុស្សា ទៅបំផ្លាញពូជពង្សពានរស្វា ស្រុកនោះពេលនោះកក្រើករំពើកឱ្យអស្ចារ្យ ព្រះរាមព្រះលក្សណ៍ហៅពិភេកសារថា មានទ័ពពីណាមកទៀតហើយ ពិភេកទូលថាគ្មានទ័ពនរណាឡើយ គឺទ័ពមហារំអិលចៅរាពណ៍ ព្រះនារាយណ៍រាមសួរថា តើឱ្យនរណាទៅតតាំងបាន ពិភេកអសុរាទូលថាគ្រាន់តែឃុននល់ឃុននិល និលពេជ្រ និលខាន់ ក៏អាចទៅតទល់បានម្ល៉ោះហើយក៏លើកពលេចរចេញទៅទល់នឹងពលមហារំអិល ឯពលមហារំអិលនឹងពលស្វាសឃុននល់ឃុននិលក៏មានរិទ្ធីក្រៃ កាប់ចាក់ពលមហារំអិលស្លាប់ក្សិណក្ស័យ មហារំអិលវាយពលស្វាស ។ ឃុននល់ ឃុននិលក៏ទប់ទល់នឹងមហារំអិលក៏ពុំបាន មកទូលសហនុមានថា ត្បិតអីមានសត្វក្បាលជាស្វា ខ្លួនជាត្រី រឿងរិទ្ធីក្រៃរបឹងខ្លាំង ហនុមានឮហើយក៏ហោះទៅឃើញមហារំអិលនៅកណ្តាលចតុរង្គ ហនុមានក៏ចូលតយុទ្ធទាំងពីរពង្ស សហនុមានវាយត្រង់ចំមហារំរិល មហារំអិលគ្មានញញើតរួញរាឡើយ វាយដំរង់ចំហនុមានសួរស័ព្ទខ្លាំង អ្នកទាំងពីរច្បាំងគ្នាគ្មានបង្អង់ ពីព្រឹកថ្ងៃត្រង់គ្មានរួញរា ហនុមានសង្ស័យណាស់ក៏ឈប់សួរ ឯងកូននរណាក៏ខ្លាំងដល់ម្ល៉េះ មហារំរិលឆ្លើយថា



យើងនេះកូនមច្ឆានព្វ ហនុមានក៏ឈប់ថា កូនអើយឯងគ្មានកូនអ្នកណាឡើយ គឺកូនរបស់អញ កាលអញទៅស្រឡាញ់នាងមច្ឆា អញត្រូវជាបិតារបស់ឯង មហារំអិលសង្ស័យណាស់ បើហេតុដូច្នោះចាំខ្ញុំសួរព្រះមាតា បិតាខ្ញុំមែនឬអ្វី? សហនុមានក៏ចាប់ពមហារំអិលទៅនាងសុវណ្ណមច្ឆាដល់ហើយនាងមច្ឆានព្វប្រាប់ថា កូនអើយនេះព្រះបិតារបស់ឯង មហារំរិលក៏ក្រាបថ្វាយបង្គំព្រះបិតា តាំងពីថ្ងៃនេះទៅលែងច្បាំងសោះ ហនុមានក៏ហោះមកស្រុកសមរភូមិជ័យកែវមរកត ដល់ទៅថ្វាយបង្គំព្រះរាមាថា ពួកពលយក្សាក៏ស្លាប់អស់ ទូលថាដូច្នោះគង់សុខសាន្ត ។

៥៥-ក្រុងទសមុខមារហោះទៅព្រៃហេមពាន្ត ពីថ្ងៃមុនយក្សបានស្រឡាញ់ប្រើសព្រៃ បានកូនមកឱ្យឈ្មោះគន្ធាន់គន្ធព្វបក្សី កូនអើយអញនឹងប្រើបាទៅច្បាំងនឹងព្រះរាមព្រះលក្សណ៍មនុស្សា គន្ធាន់គន្ធព្វបក្សីបានឮហើយ កេណ្ឌកងពួកពលសឹងយក្សា នៃរើយអស់ការទាំងអស់អញនឹងប្រើឯងឱ្យទៅច្បាំងនឹងព្រះរាមព្រះលក្សណ៍មនុស្សា កេណ្ឌកងពលយក្ស ចេញមកត្រៀបត្រា ក្រុងមារអសុរាលើកទ័ពកាត់ព្រៃហេមពាន្តម្ល៉ោះហើយក្រុងទសមុខមារហោះ ទៅប្រាប់គជរឹងជតិរីកាលពីថ្ងៃមុនយក្សទៅស្រឡាញ់ដីរី បានកូនមកឱ្យឈ្មោះគជរឹងគជរី ក្រុងរាពណ៍ប្រើថា កូន

ហើយអញប្រើបាទៅវាយព្រះរាមព្រះលក្សណ៍មនុស្សា ទាំងពីរពង្សប្អូនពួក ពានរស្វាសច្រើនសល់ គជរឹងគជរីបានស្ដាប់ពាក្យបិតាហើយ ក៏រៀបពល យក្សយង់ច្រើនសល់ក្នុងហេមពាន្ត អសុរមារហោះកាត់ព្រៃហេមពាន្តបាន ជួបគ្នានឹងពលគន្ធាន់គន្ធព្វបក្សី ឮសូរគគ្រឹកកក្រើកទាំងព្រៃ ស្រុកសមរភូមិ ជ័យកក្រើកញាប់ញ័ររន្ធត់ ព្រះរាមអស្ចារ្យណាស់ហៅពិភេក ហៃបាពិភេក អនុជអូន សូរស័ព្ទអ្វីក៏ខ្លាំងក្រៃ ពិភេកអសុរាលើកដៃថ្វាយបង្គំ នេះគ្មានទ័ព ឯណាឡើយ កូនរាពណ៍លើកទ័ពមកហើយថ្វាយព្រះបង្គំ ទ័ពមួយពីទ័ព គន្ធាន់គន្ធព្វបក្សី (ខ្លួនប្រើសក្បាលយក្សពោធិ៍ពីររូបមនុស្ស) ពីរពេលវីរជាតិ (ខ្លួនបរីក្បាលយក្ស) ព្រះរាមឆ្លើយថា បើដូច្នោះប្រើនរណាទៅបាន ពិភេក សារថា ត្រូវប្រើសេនាទាំងពីរដណ្ដប់អង្គប្រាណ កេសរជម្ពូពាន ទូវ អង្គត់ហនុមាន និលឯក និលខាន់ ឃុនទល់ ឃុននិល ទូវពលស្វាប៉ែតសិប អក្ខោ ថាដូច្នោះហើយក៏ត្រាស់ហៅនិលឯក កេសរជម្ពូពាន និលពេជ្រ និលខាន់ ពួកសេនាទាំងពីរដណ្ដប់អង្គប្រាណ កាលណាព្រះអវតារ ត្រាស់ហៅដូច្នោះហើយ ក៏តឿនអស់ពលពង្សចតុរង្គអង្គយោធា ខ្លះហោះ កណ្ដាលមេឃា ខ្លះដើរនឹងដី លុះបានលើកទ័ពទៅដល់ទល់មុខគ្នា ស្វា ដកដើមឈើវាយវៃធល្អិតល្អន់ អង្គត់ហនុមាន ក៏បានបំផ្លាញអង្គពួជពង្ស



អក្ខោ ពួកយក្សក៏ក្សិណក្ស័យបរលោគ្មានសល់ឡើយ គន្ធាន់គន្ធព្វ ក៏ក្សិណក្ស័យ គជរឹងគជរីក៏ក្សិណក្ស័យ សាបសូន្យអស់ទាំងពពួកពល យក្ស ។

៥៦-ក្រុងទសកណ្ឋបានដឹងដូច្នោះ ហើយក៏ឆេះឆួល អន់អួនក្នុង ឱរា ហើយហោះយាត្រាទៅដល់ពលមួយទៀត ឈ្មោះចៅស៊ីផាន់ ដល់ ទៅចៅស៊ីផាន់ ស្រែកទៅថា អញប្រើបាឯងទៅច្បាំងនឹងមនុស្សា បំផ្លាញ ពលស្វាកុំឱ្យសល់ ពីកាលថ្ងៃមុនយក្សទៅស្រឡាញ់មាន់បានកូនមកឱ្យ ឈ្មោះចៅស៊ីផាន់ (ក្បាលយក្សខ្លួនមាន់) ម្ល៉ោះហើយតឿនអស់ពលពង្ស ចតុរង្គយោធាឮសូរស័ព្ទដូចព្យុះខ្យល់ ក្រុងរាពណាសូរក៏ហោះទៅយក អសុរបក្សី កាលពីថ្ងៃមុនរាពណ៍ទៅស្រឡាញ់ត្មាត បានកូនមកឱ្យ ឈ្មោះអសុរបក្សី ហើយរាពណ៍ប្រាប់ថា អញប្រើឯងទៅវាយព្រះរាម ព្រះលក្សណ៍មនុស្សា អសុរបក្សីក៏លើកអស់ចតុរង្គយោធា ទៅជួបគ្នា នឹងពលចៅស៊ីផាន់ ក៏កក្រើកស្រុកសមរភូមិជ័យ ត្រាស់ហៅពិភេក អសុរាថា ទ័ពនរណាលើកមកទៀតហើយ ពិភេកអសុរា នេះហើយកូន រាពណ៍ កាលរាពណ៍ទៅស្រឡាញ់មាន់ ឈ្មោះចៅស៊ីផាន់ មួយទៀត កាលរាពណ៍ទៅស្រឡាញ់ត្មាត បានកូនមកឈ្មោះអសុរបក្សី លើកទ័ព

មកវាយទៀតហើយ ព្រះរាមត្រាស់ថា ត្រូវប្រើអ្នកណាទើបទៅច្បាំងបាន កាលណោះពិភេកសារ ប្រើកងយោធាអង្គតហនុមាន នូវពលទាំងអស់ ទើបនឹងច្បាំងបាន ព្រះនារាយណ៍រាមាត្រាស់ហៅអង្គតហនុមាន សេនាទាំងពីរដណ្ដប់អង្គព្រាណ ស្ដេចប្រមូលទ័ពបានទៅវាយយក្សា បរទ័ពកាត់ព្រៃហេមពាន្តទៅបានក៏ជល់ទ័ពគ្នា ពពួកស្វាសហនុមាន មិនរួញមិនរា ចូលវាយយក្សាក្សិណក្ស័យ ចៅស៊ីផាន់និងអសុរបក្សី ក៏ក្សិណក្ស័យមរណាក្នុងព្រៃហេមពាន្ត ។ កាលណោះអធិកម្ម អធិពលឡាំ ក៏បានបររាជ័យរត់ចូលទៅក្រុងលង្កាបុរី ដល់ហើយក៏ក្រាបថ្វាយបង្គំ ទូលភក្ត្រា អសុរបក្សីនិងចៅស៊ីផាន់ ក្សិណក្ស័យហើយណា ក្រុងទសភក្ត្រក៏បានស្ដាប់អធិកម្ម អធិពលឡាំ ក៏បានទូលដូច្នោះហើយក្រេវក្រោធភិរុលភិរោធសោះសា ក្ដៅក្លួលក្នុងឱរាដូចភ្លើងវិស័យ ។

៥៧-ម្ល៉ោះហើយក៏ហោះទៅព្រៃហេមពាន្ត ស្រែកហៅថាកានអស់ទ័ពយើងដទៃ អសុរយក្សឮហើយក៏ចេញពីព្រៃ កាន់ដំបងវិលវៃពលមារច្រើនក្រៃ ពលនោះឈ្មោះកាកនាសូរ ពូជពង្សអំបូរនិងពង្សអសុរី ចូលហើយក៏ក្រាបថ្វាយបង្គំ ទុកងារឱ្យខ្ញុំទ័ពអាមនុស្សា ខ្ញុំចូលទៅវាយឱ្យក្ស័យជីវ៉ា ថាហើយបក្សាលើកទ័ពច្រើនក្រៃ សូរស័ព្ទដូចផ្គរខ្ទ័រខ្ទារ



ណាស់នែ លើកចេញពីព្រៃបក្សីច្រើនក្រៃ ថ្លែងពីព្រះនារាយណ៍រាមាស្រីលក្សណ៍អនុជាស្ដេចគង់ក្បែរមក្សាន្ត ព្រះអង្គទូលថ្កានហៅពិភេកហោ-រា ព្យួរព្រៃព្រឹក្សាសាយសព្ទដំបន់ សូរស័ព្ទទ័ពនេះតើទ័ពនរណា ពិភេកឮហើយទូលអង្គក្សត្រា មិនគឺទ័ពនរណា គឺទ័ពកាកនាសូរ ពូជពង្សអំបូរនិងអង្គអសុរា ព្រះនារាយណ៍ឮហើយថា បើដូច្នោះត្រូវឱ្យនរណាទៅច្បាំងនឹងកាកនាសូរបាន ពិភេកអសុរាទូលថា ត្រូវព្រះស្រីលក្សណ៍អនុជា ទើបទៅតទ័ពបាន ស្រីលក្សណ៍អនុជា កាលបើបានស្ដាប់សម្ដេចព្រះរៀមព្រះជេដ្ឋាដូច្នោះហើយ ក៏យកសរអគ្គីវាសផ្លាញផ្លា ស្ដេចខំកេណ្ឌទ័ពបរកាត់ព្រឹក្សា បានដល់ហើយណា ស្ដេចស្ដែងថ្លែងសរ កាកនាសូរក្សិណក្ស័យមរណាត្រៀបត្រា ឯសត្វនោះណាក្បាលវាជាយក្សខ្លួនវាជាសត្វ ។ អធិកម្ម អធិពលឡាំក៏បានឃើញដូច្នោះហើយ ចូលទៅក្រាបទូលក្រុងទសមុខមារថា សត្វកាកនាសូរក្សិណក្ស័យមរណាអស់ហើយ ។ ក្រុងទសភក្ត្រក៏បានស្ដាប់អធិកម្ម អធិពលឡាំ ថាដូច្នោះហើយ ។

៥៨-ក៏ហោះទៅភ្នំកៃឡាសបព៌តា ទៅស្រែកហៅពលស្ដេចបក្សានាមថាហោ សត្វវាយោភក្ស សត្វវាយោភក្សថា ក្រាបបង្គំអង្គម្ចាស់លើត្បូងសិរសា ឯព្រង់ព្រះរាមព្រះលក្សណ៍មនុស្សាថា ព្រះអង្គកុំព្រួយព្រះ

ទ័យ ម្ល៉ោះហើយស្តេចបក្សីលើកទ័ពច្រើនក្រៃ សូរស័ព្ទដូចព្យុះព្យាមោ សូរស័ព្ទដូចផ្គររន្ទះខ្លាំងក្រៃ ញាប់ញ័រកក្រើកផែនដី ស្រុកសមរភូមិជ័យញាប់ញ័ររញ្ជួល ព្រះនារាយណ៍រាមាស្តេចស្តែងរស្មារ្យ ត្រាស់ហៅពិភេកបោរាថា ទ័ពនរណាលើកមកទៀតហើយ ពិភេកអសុរាពន់ធូរជាក់ច្បាស់ ធ្លុះយល់ត្រៃលោកបីប្រការ ទូលថាគ្មានទ័ពនរណា ពីសេចវាយោរភក្សជាព្រះរាជបុត្រទសមុខមាររអសុរា ព្រះនារាយណ៍រាមាឮដូច្នោះក៏សួរថា តើឱ្យទ័ពនរណាទៅតបាន ទើបពិភេកទូលថា ត្រូវនិលឯកកូនកេសរជប្ដពាន ម្ល៉ោះហើយព្រះនារាយណ៍ត្រាស់ថា អើបានិលឯកចូរបាកេណ្ណទ័ពទៅ និលឯកក៏ស្ពាយធ្នូសរសៀតព្រះខ័នថ្លា ហោះកាត់ព្រឹក្សាពានរច្រើនសល់ លុះស្តេចទៅដល់ទល់មុខទ័ពគ្នា ឯស្តេចបក្សាថា អើយអាមនុស្សា យើងលេងគ្នាឱ្យអស្ចារ្យក្នុងរាជមណ្ឌល និលឯកឆ្លើយថា អើយសត្វបក្សាក្សិណក្ស័យមរណា ម្តងនេះមិនឱ្យមានសល់ឡើយ ខ្លួនអញដូចប្រកាលស្រួចស្រេច (ប្រកាល-អាវុធ) តាមផ្តល់ផ្តាច់ជន្មជីវ៉ាជីវិតមីងក្ស័យនឹងព្រហ្មាសសរថ្លា ស្តេចបក្សីឆ្លើយថា ខ្លួនមីងដូចធ្មាតបក្សី ចង់បកពដៃដូចពន្រ្ទ័យ៍ និលឯកឆ្លើយថា ខ្លួនអ៊ីងដូចរពណ្ឌូងនាទី មករូតរិទ្ធិនឹងសមុទ្រជលសា ម្ល៉ោះហើយពួកពានរស្វាស ដកដើមព្រឹក្សាចូលវាយ



នឹងទ័ពបក្សី ថ្លែងពីស្តេចបក្សីចូលមកព្រួតវាយនិងនិលឯកសោះសា និលឯកក៏ទាញកៅទណ្ឌសរថ្លា បាញ់សត្វបក្សាវិនាសក្សិណក្ស័យគ្មានសល់ កាលនោះពួជពង្សពានរ ស្តេចបរពលមកចូលស្រុកសមរភូមិជ័យកែវអេកព ចូលបកថ្វាយបង្គំព្រះនារាយណ៍រាមា ព្រះអង្គទ្រង់ត្រេកអរក្រៃ សុំឱ្យទ័ពជ័យទាំងអស់ មានជោគមានជ័យ អាយុ អាយោសវែងឆ្ងាយ យេបស្នេះត្រង់នេះមិនចរចា ។

៥៩-ថ្លែងពីក្រុងទសមុខមារអសុរា ពលក្នុងព្រឹក្សាក៏អស់មិនសេសសល់ ទ័ពក្នុងនគរក៏គ្មាននៅមួយឡើយ ក្រុងទសមុខមារមានទុក្ខឥតស្បើយ គគក់ឱរាសោកាល្វេងល្វើយ សន្ធឹកសន្ធៃនៅតែម្នាក់ឯង ម្ល៉ោះហើយ ក្រុងទសមុខមារឧបមាបីដូចអ្វី ដូចដើមសាលបូព្រឹក្សឥតមែក ពុំនោះដូចដំរីឥតភ្លុក ក្រុងទសមុខមារស្តេចហោះទៅបើកទ្វារភ្នំព្រះសុមេរុទៅស្រែកហៅពល ។ កាលណោះពលមារបានឮសំឡេងក្រុងមារក៏និត្យនៅពុំបាន ចេញមកពីរដណ្តប់សមុទ្រយង់ឃ្នង ខ្លះកាន់គ្រឿងអាវុធចិត្តមុតក្លៀវក្លា ខ្លះកាន់ដំបងពេជ្រត្រីកើតភ្លើង ខ្លះជិះរមាំងរមាសភ្លើងប្រោល ខ្លះជិះដំរី ខ្លះជិះរាជសីហ៍ អូដ្ឋលាច្រើនក្រៃ សូរស័ព្ទសន្ធឹកភ្លូកភ្លឹកញាប់ញ័រ ដូចផ្គររន្ទះដើមឆ្នាំ រលកទន្លមហាសមុទ្រ (ធ៦-ប្រាំបួនខ័ណ្ឌ)

បែកជាពពុះស្គុះជាព្រះពន្លា រំងាប់ជារលកបោកទៅទីទៃៗ ថ្លែងពីពល អសុរីលើកទ័ពបីជាន់ ទ័ពមួយហោះកណ្តាលអាកាសា ទ័ពមួយទៀត ហោក៏ហោះកាត់កណ្តាលវេហ្សាមា ទ័ពមួយទៀតដើរលើពសុធា ក្រុងទស-មុខមារក៏គង់លើរាជរថ បររាជសីហាស្រទំអស់មេឃា សូរិយារស្មីកើត អស្ចារ្យក្រៃ ទេវបុត្រទេវតាហោះហែអសុរី បើកបរទ័ពមកពាក់កណ្តាល ផ្លូវ ស្រុកសមរភូមិជ័យកក្រើកញាប់ញ័រ រលើងរលំអស់ដើមឈើព្រៃ កើត អស្ចារ្យក្រៃនិត្យនៅពុំបាន សម្តេចព្រះនារាយណ៍រាមា កើតជាអស្ចារ្យ លើសលើសសព្វដង ស្តេចមានព្រះឱង្ការហៅពិភេកហោរា ហៃព្រះ អនុជស្ងួនគ្រង បងអស្ចារ្យចំឡែកប្លែកលើសសព្វដង នេះគឺទ័ពនរណា ? លើសពួកបច្ចាមិត្ត ពិភេកអសុរាក៏បានស្តាប់ព្រះឱង្ការ ថាដូច្នោះហើយក៏ ដោះក្តារឈ្នួនពីក ស្តេចក៏គន់គូរបូកភ្ជុំនូវលេខអត្ថ: ដោយនូវហោរទិព្វ-ចក្តុឈ្វេងយល់ជៀងជាក់ គ្មានទ័ពនរណាឡើយ គឺទ័ពក្រុងទសភក្រ្ត លើកទ័ពមកហើយសុទ្ធតែពួកពលយក្ស ព្រះនារាយណ៍ត្រាស់ថា បើ ដូច្នោះឱ្យអ្នកណាទៅតទ័ពបាន ពិភេកអសុរាក៏ទូលថា ឱ្យអ្នកណាទៅពុំ បាន បានតែព្រះអង្គឯង ថាហើយព្រះអង្គនារាយណ៍រាមា ក៏ហៅភ្ជុំពួក សេនាទាំងពីរដណ្តប់អង្គប្រាណ សហនុមាន បាសុគ្រីព មារអង្គត់ កេសរ



ជម្ពូពាន និលឯក និលផាត់ និលខាន់ ឃុនទល់ ឃុននិល បានយល់ព្រម ទាំងពីរដណ្តប់អង្គប្រាណ ហើយក៏ហៅពលស្វាប៉ែតសិបអក្ខោ លើក ទៅតតាំងនឹងក្រុងទសមុខ ព្រះអង្គគង់លើសុគ្រីពឧត្តម ហោះស្ទុះស្ទួយ ភ្នំប្របោកប្របែកភ្លើងច្រាល ។

**(ស្មូត)** បបណោះក្រុងរាពណាសូរ ពួជពង្សអំបូរនឹងព្រះព្រាហ្មា ស្តែងស្តេចលើក ពលសោកលយោធា រាពណ៍គង់រាជរថ ព្រះរាមគង់លើសុគ្រីពឧត្តម ហោះស្ទុះស្ទួយភ្នំ ប្របោកប្របែកភ្លើងច្រាល ព្រះមាតុលី សារថីទេវបុត្រ បរសេះប្រៀវប្រុតជំនិះ ជំនាញ នៃព្រះលក្សណ៍ ចូលទៅតតាំងច្បាំងនឹងក្រុងរាពណ៍អសុរា កេណ្ឌកង យោធាទាំងដប់ពីរសមុទ្រយំឃ្លុង កាលណោះពលយក្សនិងពលស្វា ក៏បានជួបមុខគ្នា ហើយ ដូច្នោះហើយ ក៏សឹងដ៏ស្វានឹងយក្សកាប់ចាក់គ្នាច្រើនសល់ ។

ក្រុងរាពណាក៏បានជួបមុខទ័ពគ្នាហើយ ក្រុងរាពណាសូរក៏បានថ្លែង សរអេះកើតភ្លើង ព្រះនារាយណ៍រាមាក៏បានឃើញភ្លើង ឆេះកណ្តាលភីន ផែនដែនពសុធាភ្លើងយក្សាក៏ឆេះខ្លាំងក្រៃ ។ ព្រះនារាយណ៍រាមាក្សត្រថ្លៃ ក៏បានបាញ់សរអរិទ្ធីច័ន្ទផ្លាញផ្លា កើតជាស្តេចគ្រុឌបក្សា ទៅលត់ភ្លើង អសុរមារ ភ្លើងកងអគ្គីក៏រលត់ស្ងាត់គ្មានសល់ កាលណោះក្រុងរាពណា សូរ ក៏បាញ់សរមកកើតជាអាវុធត្រៀបត្រា អាវុធក្រុងមារគឺអាវុធព្រះ ខ័នថ្លា អាវុធខ្លះថាក៏កើតជាមូលកន្ទុយ សត្វកន្ទុយជ្រូក អាវុធខ្លះក្លាយ

ជាដំបងពេជ្រ អាវុធខ្លះក្លាយជាដុំថ្មដុំគ្រួស ធ្លាក់ពីកណ្ដាលអាកាសា ប្រុងមកប្រហារអស់ទ័ពជ័យ ព្រះនារាយណ៍រាមាឃើញអាវុធយក្សាច្រើនក្រៃដូច្នោះហើយ ព្រះអង្គថ្លែងសរព្រះពាយវាសផ្លាញផ្លា ផាត់ជាព្រះពាយបក់បោកអាវុធយក្សា ក៏ធ្លាក់ទៅកណ្ដាលសមុទ្រយង់ឃ្នង ម្ល៉ោះហើយក្រុងរាពណាសូរ ស្ដេចបាញ់សរថ្លាទៅកណ្ដាលអាកាសានភាល័យកើតជាភ្លៀងពេញកណ្ដាប់ចក្រវាល ភ្លៀងនោះព្រាប់សុទ្ធតែជាអាវុធភ្លៀងសុទ្ធតែដុំគ្រួសដុំដី ភ្លៀងខ្លះក៏ក្លាយជាលំពែង ព្រះនារាយណ៍រាមាក៏បានឃើញដូច្នោះហើយ ព្រះអង្គក៏បាញ់សរឱ្យកើតជាកំពែងពេជ្រជាប្រាំពីរជាន់ឱ្យអស់ពួកស្វាសក៏រត់ចូល ក្នុងកំពែងពេជ្រ ក្រុងទសភក្ត្រា កាលណោក៏ឃើញដូច្នោះហើយ បាញ់សរព្រហ្មាសផ្លាញផ្លា ឱ្យកើតជាច្រវាក់ពេញវេហា រន្ទាក់ដែករន្ទាក់ពេជ្រប្រុងទាក់ពលស្វា ។ ព្រះនារាយណ៍រាមាឃើញដូច្នោះ ក៏បាញ់ធ្នូសរថ្លា កើតជាព្រះខ័នថ្លា ក៏កាត់ច្រវាក់អន្ទាក់យក្សខ្ចាត់ខ្ចាយ ក្រុងរាពណាសូរ ខឹងណាស់បាញ់សរនាគកប្បាសកើតជានាគដេរដាសពេញមេឃា ប្រុងឱ្យមករុំចោមចាប់ពួកស្វាស ព្រះនារាយណ៍រាមាទតឃើញដូច្នោះហើយ ស្ដេចបាញ់សរសេងអសុរា កើតជាគ្រុឌបក្សាពេញវេហា ឯគ្រុឌនិងនាគប្រចាប់គ្នា គ្រុឌចាប់នាគដាច់



រុះរោយ គ្រុឌខ្លះចាប់នាគបរិភោគ្គារ គ្រុឌខ្លះដេញនាគជ្រែកជលសា ឯសរអង្គអសុរាចាញ់សរព្រះនារាយណ៍រាមា រត់ចូលអំពង់មាសវិញ ក្រុងរាពណ៍ក៏បររាជសីហា ចូលមកត្រៀបត្រាពេញមេឃា ឯពលយក្សនឹងពលស្វា កាប់ចាក់ចំបាប់គ្នា សហនុមានក៏ចាប់យក្សបានច្រើនក្រៃ កាត់យក្សក្បិណក្ស័យបោះក្នុងទព្វមហាសមុទ្រ ឯបាអង្គត់កាន់ដំបងពេជ្ររឹងរៃវាយយក្សក្បិណក្ស័យក្នុងសមុទ្រត្រៀបត្រា កេសរជម្ពូពានចូលវាយយក្សាឃុំនទល់ ឃុំនិលចូលហែកយក្សា យក្សក្ស័យមរណាដប់ពីរសមុទ្រយង់ឃ្នង ។ កាលណោះក្រុងមារអសុរា ទតយល់ពលក្បិណក្ស័យត្រៀបត្រា ក្នុងសមុទ្រជលសាមិនមានសេសសល់ដល់មួយឡើយ ក្រុងទសភក្ត្រា ក្រេវក្រោធពិរោធសោះសា ស្ដេចទាញសរថ្លា ក៏បាញ់តំរង់អង្គព្រះនារាយណ៍រាម សរនោះពុំហ៊ានបៀតព្រះអង្គឡើយណា សរហួសទៅឋានសួគ៌ា ផ្អើលទេវតាសព្វឋានសួគ៌ា កក្រើកញាប់ញ័រនិត្យនៅពុំបាន ស្រីទេពអប្សរបរិវារកញ្ញា មករាំបាចផ្កាថ្វាយអង្គក្សត្រក្សាន្ត កាលណោះ ព្រះនារាយណ៍រាមាស្ដេចទាញសរថ្លា ហៅថាអរិទ្ធីច័ន្ទរឿងរិទ្ធីស្ដេចបាញ់តំរង់ត្រូវត្រង់អសុរា កាលណោះសរថ្លា ក៏ត្រូវរុះដូចក្រឡាសំពោញ់ ក្រុងទសភក្ត្រាស្ដេចហោះលីលា ចូលរាជបុរី ភ្ជុំមន្តគាថា

ពីព្រះឥសូរក៏ជិតសាច់ក៏ជិតស្បែក ផ្លាស់រូបកើតថ្មី ក៏ពេញជាយក្សយង់អសុរី គ្មានឈឺគ្មានភ័យនោះដល់តិចឡើយ លុះមួយទិវាទៀត លើកពលមកដល់ហើយ ស្រែកអាក្រោសឃោសនា រើយអាមនុស្សាយើងត្រូវតែវាយគ្នាទៀត ព្រះនារាយណ៍រាមាយល់យក្សាអសុរាលើកទ័ពមកទៀតហើយ ព្រះអង្គកេណ្ឌកងពលស្វា ពូជពង្សអសុរា ស្តេចរែងសង្ស័យអង្គអញបាញ់សរប្រាំពីរយប់ប្រាំពីរថ្ងៃ ត្រូវអង្គអសុរីគ្មានសល់សាច់ឡើយ ហេតុអ្វីគ្មានក្ស័យ គួរឱ្យសង្ស័យអស្ចារ្យខ្លាំងណាស់ ស្តេចហៅពិភេកអសុរាថា ពិភេកអសុរា ព្រះអនុជអូន បងបាញ់សរអរិទ្ធិច័ន្ទផ្លាញផ្លាត្រូវអង្គពូជពង្សអសុរា ខ្ទេចខ្ទីគ្មានសល់ត្រង់ណា យក្សាសូធ្យមន្តព្រះពាថា កើតជារូបអង្គអសុរា ហើយមានកម្លាំងយក្សខ្លាំងហៅហាន ហេតុអ្វីប្អូនអើយ ពិភេកអសុរាទូលព្រះនារាយណ៍រាមាថា សរត្រូវប្រាំពីរយប់ប្រាំពីរថ្ងៃ សរធ្លុះត្រូវរុះដូចក្រឡាសំណាញ់ សរចាក់រកដួងកែវវាមិនឃើញ បានជាវាមកច្បាំងទៀត មុខវាថ្មីថែស សាច់ខ្លួនស្បែកលោមាគ្មានស្នាមធ្លុះត្រង់ណាឡើយ វាផ្គុំភ្ជុំបានហើយថ្មីឡើងវិញ ខូចភ្លាមជិតភ្លាមដោយបុណ្យបារមីតា ពូជពង្សអសុរាក៏បានមន្តពីព្រះឥសូរ ព្បិតអ្វីសររកដួងកែវវាមិនឃើញ ព្រះនារាយណ៍រាមាមានព្រះបន្ទូលថា ដួងកែវ



ហេតុនៅត្រង់ណាបានជាសរចាក់ទៅមិនដល់ ពិភេកឆ្លើយថា ដួងកែវព្រះរាពណាសូរ វាយកទៅផ្ញើរនឹងឥសីកាឡៃយកោត បានជាសរព្រះរាមរកដួងកែវវាមិនឃើញ បើវាចេញមកច្បាំងនឹងព្រះអង្គហើយមុខវាថ្មីដែល មិនអាចដាច់ស្លាប់ត្រង់ណាឡើយ ព្រះនារាយណ៍រាមាបានស្តាប់ពិភេកអសុរា ទូលថាដូច្នោះហើយ ត្រាស់ថា ប្អូនអើយរករកណាទៅឲ្យបាន ពិភេកអសុរាលើកដៃថ្វាយបង្គំព្រះអង្គបាន បានតែប្រើបាហនុមានឱ្យចូលទៅប្លន់ ហើយឱ្យបាហនុមានចូលទៅសុំក្រុងរាពណាសូរធ្វើឪពុកទើបយកបាន រឿងត្រង់នេះស្លេះទុកសិន ។

៦០ – ថ្លែងពីក្រុងទសមុខហារអសុរា ក៏ខឹងក្រេវក្រោធភិរោធសោះសាហៀវហោះថ្លោះយាត្រា ទៅនគរអសីលសុរិយ៉ន ទៅដល់ក៏ស្រែកឃោសនារស់ពលយក្សា អញមកស្រែកហៅភានឯងឱ្យឯងទៅជួយច្បាំងនឹងទ័ពព្រះរាមព្រះលក្សណ៍មនុស្សា ទ័ពនោះរបឹងរឹងក្រៃណា ទ័ពនោះសុទ្ធស្វាដប់ពីរសាគរ ។ ពលយក្សដប់ពីរសមុទ្រ បានស្តាប់ម្ចាស់លើត្បូងសិរសា ក្រុងទសកណ្ឋត្រាស់ប្រើដូច្នោះហើយ វាយស្គរទ័ពក្ដុំពល ទ័ពព្រួត ទ័ពព្យួន (ទ័ពព្រួត-ទ័ពក្រោយ) ច្រើនណាស់ប្រពូនពេញមុខព្រះលានរបស់ពួកនាយទ័ពកាលស្តាប់សូរសៀងក្តេចៗមិនបានបានពាក្យវាចា

(សម្លៀម សម្បារ សំពោរក្រោធ នេត្រនិលក្រឡោតក្រឡាវង្ស) សុទ្ធសឹងយក្សយង់ពេញវេហាស៍ ចូលមកម៉បម៉ាយថ្វាយបង្គំ ត្រង់ទ័ពមនុស្សាទុកឱ្យខ្ញុំ យក្សយង់មកជុំពេញវេហាស៍ យក្សហោះងងិតស្រទំរស់មេឃាភ្លោះហើយក្រុងទសភក្ត្រា ស្តេចគង់រាជរថបវររាជសីហា ដល់ក្រុងលង្ការាជបូរី វេលាពេលនោះញាប់ញ័រស្រុកសមរភូមិជ័យ ព្រះនារាយណ៍រាមាស្តេចវរស្នារព្រៃកើតចម្បាំងប្រាំពីរយប់ប្រាំពីរថ្ងៃគ្មានស្រាកស្រាន្ត ឥឡូវនេះទ័ពនរណាចូលមកទៀតហើយ ពិភេកព្រះអនុជប្អូនអើយគន់គូរនៅដោយហោរសាស្ត្រ-ស័យ ពិភេកក៏ដោះក្តារឈ្នួនពីកវៃ គន់គូរតាមដោយនៅហោរទិព្វចក្កុក៏ឆ្លុះយល់គ្មានកំបាំង នេះហើយក្រុងទសមុខមារអសុរាលើកមកទៀតហើយ ព្រះនារាយណ៍រាមាបានស្តាប់ហើយ ស្តេចភ្ញុំពលកងយោធា សេនាទាំងដប់ពីរអង្គប្រាណ ពួកពលស្វាទាំងប៉ែតសិបអក្ខោ ស្តេចលើកចរចេញទៅផ្ទាំងទៅបានជួបទល់ដល់មុខម៉ត ។ ក្រុងទសភក្ត្រាជៀវថា អាចោរជួសាមាន្យ បើឯងតចម្បាំងនឹងអញយល់ពុំបាន ឯងនឹងក្ស័យប្រាណគ្មានសល់ឡើយ ព្រះនារាយណ៍រាមាថា វើយអសុរាក្សិណក្ស័យអាត្មាគ្មានសល់ឡើយ ខ្លួនមឹងឯងដូចមោចមមីអប្រិយខឹងខាំដីរ ស្មានថាក្សិណក្ស័យដូចចិន្តា ព្រះនារាយណ៍រាមាជៀវទៅទៀតថា មឹងឯងដូចសំរាបធូលី មករួត



នឹងកងភ្លើងអគ្គី រលួយរលាយខ្លួនជាពពុះផេះ ក្រុងរាពណ៍បានស្តាប់ហើយ ក៏ក្តៅក្តួលក្នុងឱរា ចោលច័ក្រតំរង់ត្រង់ក្សត្រា ព្រះអង្គក៏យកព្រះខ័នផ្កា ទៅគ្រៀងនឹងក្រុងរាពណេ ច័ក្រនិងព្រះខ័នក៏ច្បាំងគ្នា ច័ក្រក្រុងរេវក៏រត់ចេញ ពលយក្សនិងពលស្វាក៏កាប់ចាក់គ្នា ស្វាគង់អាវុធ យក្សកាប់មិនមុត ក្រឡាស់កាប់យក្សវិញ ខ្លះខាំវេកក ខ្លះខាំពោះ ស្វាខ្លះក្រឡាស់ខាំច្រមុះ ពលយក្សកាលណោះ វិនាសក្សិណក្ស័យ ។ ព្រះនារាយណ៍រាមាស្តេចបាញ់អគ្គីវាសផ្កាញផ្កា ត្រូវអង្គក្រុងទសមុខមារអសុរាត្រូវទាំងអស់គ្មានសល់សាច់ត្រង់ណោ ក្រុងអសុរាខ្ទេចខ្ទីគ្មានសល់ ។ ពិភេកមើលទៅសេនាវេហាពេល ស្លាប់អស់គ្មានសល់ក្នុងមហាសាគរ ឃើញតែក្បាលយក្សយង់គោកនព្វមហាសមុទ្រ ។

៦១-ក្រុងទសភក្ត្រាផ្ដុំភ្ញុំរាត្ថា ក៏កើតឡើងជាថ្មី ក្រុងអសុរីហោះទៅនគរអសីលសុរិយ៉ន ទៅដល់មានប្រាសាទមាសថ្លៃថ្លាសំរាប់អង្គអសុរាតែងតាំងឫទ្ធិ ឡោមជុំប្រាសាទសុទ្ធតែស្រះស្រង់ ចិញ្ចឹមសត្វនៀកនៅក្នុងគង្គា ឱ្យជាងធ្វើគន្លឹះទ្វារយន្ត បើអ្នកណាសួរទៅធ្លាក់ទៅក្នុងគង្គា នាងនៀកក៏រុំជិតជុំខ្លួនទាំងអស់ ។ ក្រុងទសមុខមារអសុរា ក៏ចូលទៅក្នុងទីប្រាសាទមាស យកធ្នូសរព្រះខ័នជ័យទៅតម្កល់លើប្រាសាទមាសពត់ព្រះ

ភ្នែនពែនព្រះបាទលើកដៃសំពះភាវនាអក្ខរាគាថា សិល្បសាស្ត្រសិល្បនោះបើភាវនាប្រាំពីរថ្ងៃ ទុំកាលណាក្រុងលង្ការាជបូរីក៏លែងសូន្យ ក្រុងអសុរីក៏លែងក្ស័យ ថ្លែងសរកើតជាភ្លើងប្រល័យកល្បឆេះផែនដី ក្រុងអសុរីមួរផែនដីបាន ម្ល៉ោះហើយសូធ្យគាថាបន្ទុំសិល្ប ម្ល៉ោះហើយក៏របើកកក្រើកទាំងផែនដីញាប់ញ័រខ្លាំងក្រៃមិនស្រាកស្រាន្ត សូត្រ ១៦ ជាន់ញាប់ញ័រខ្លាំងក្រៃ ផែនដីក៏ញាប់ញ័ររន្ធត់ នព្វបបកាសបុប្ផ ក៏ពុះពោរលោរជន់កក្រើកដល់ស្រុកសមរភូមិជ័យកែវមរកត ព្រះនារាយណ៍រាមាស្ដេចស្ងួតស្ងៀមក្រៃហៅពិភេកហោរាបកគន់គួរពិភេកគន់គួររន្ធត់យល់គ្មានកំបាំង លើកដៃថ្វាយបង្គំព្រះរាមានេះហើយក្រុងទសមុខអសុរា ទៅតាំងពុទ្ធិនៅអសីលសុរិយ៉ន បើសិល្បនោះទុំកាលណា ក្រុងលង្កាបូរីក៏លែងសូន្យ ក្រុងទសមុខមារក៏លែងស្លាប់ ព្រះនារាយណ៍រាមា កាលណាបើបានស្ដាប់ពិភេកហោរា ទូលដូច្នោះហើយ ថាឱប្អូនអើយ នរណាទៅបំផ្លាញបាន ពិភេកហោរាឆ្លើយថាបាបានុមាន ព្រះនារាយណ៍រាមាមានព្រះបន្ទូលហៅទៅថាន បាសហនុ-មានអញប្រើឯងទៅបំផ្លាញពុទ្ធិរាពណ៍ ដែលតាំងពុទ្ធិនៅនគរអសីលសុរិយ៉ន សហនុមានបានស្ដាប់ព្រះអរវតានត្រាស់ប្រើអាត្មាដូច្នោះហើយក៏ក្រាបថ្វាយព្រះបង្គំថយក្រោយក្រោកយកព្រះខ័នថ្លា ស្ដេចហោះយាត្រាទៅនគរអសីលសុរិយ៉ន ។ កាលណោះបុត្រព្រះពាយឬទ្ធិសាយដ៏កន្លង



ស្ដេចខំហោះភ្លូងរំពីកោះលង្កា បានដល់ទៅនគរអសីលសុរិយ៉ន កាលណោស្ដេចហូតព្រះខ័នថ្លា ហើយដើរទៅសូតាមទ្វារគន្លឹះយន្ត ក៏ធ្លាក់ទៅត្រង់ស្រះនាងនឿកនៅ សត្វនឿកក៏រុំជិតអស់ទាំងខ្លួនជើងដៃសិរសា ក៏គ្មានឡើយ រិតរុំជិតគ្មានភ្នែកច្រមុះ អ្នកក៏ក្ស័យក្នុងស្រះព្រះគង្គា ក្ស័យគំរប់គ្រប់បីថ្ងៃ កាលណោះអង្គព្រះអាទិត្យ គ្មានរស្មី យប់ហើយថ្ងៃ ៗភ្លឺបភ្លែពខ្លាំងក្រៃកក្រើកស្រុកសមរភូមិជ័យគ្រប់ទិវាពាថ្ងៃ ព្រះនារាយណ៍រាពោ ស្ដេចសង្ស័យ ហៅពិភេកហោរា មានព្រះបន្ទូលថា ហៃពិភេកហោ-រាប្អូន ពេលនេះអស្ចារ្យណាស់ ហេតុអ្វីព្រះអាទិត្យភ្លឺមភ្លែត១ ថ្ងៃយប់១យល់ជាចំម្លែកប្លែកជាងសព្វដង ស្រុកសមរភូមិជ័យកែវមរកត ក៏កក្រើកញាប់ញ័រខ្លាំងក្រៃ អូនអើយបងសង្ស័យណាស់ ពិភេកអសុរា ដោះក្ដារឈ្នួនពីក គន់គូរដោយហោរទិព្វចក្ខុ ក៏យល់ឥតកំបាំងឡើយ ទូលថាបាបុត្រព្រះពាយសេនាអង្គព្រះនារាយណ៍ក៏ក្សិណក្ស័យពាថ្ងៃ ហើយថាដូច្នោះហើយ អង្គព្រះនារាយណ៍រាមា ព្រះអង្គទ្រង់ជ្រាបហើយ ថាឱ! ពិភេកអើយ នឹងប្រើរុកណោទៅយកបាន ពិភេកទូលថា មានតែព្រះអរវតានម្ចាស់លើត្បូងសិរសា ឱ្យព្រះអង្គគង់លើសុត្រីពហោះផ្លោះទៅយកសហនុមានក៏បានដូចសេចក្ដីប្រាថ្នា ព្រះនារាយណ៍រាមា ទ្រង់ជ្រាបដូច្នោះហើយ

មិនយូរឡើយ មានព្រះឱង្ការហៅទៅបាសុគ្រីពមកឱ្យឆាប់សុគ្រីពមកដល់ ហើយឱនកាយថ្វាយបង្គំ ទូលព្រះបរមរាជាធិបតី ព្រះអង្គមានព្រះបន្ទូលថា បាសុគ្រីពជូនយើងទៅយកបាបុត្រព្រះពាយ ព្រះអង្គក៏ឡើងគង់លើសុគ្រីព ក៏ហោះផ្លេកផ្លោះទៅកាន់នគរអសីលសូរីយ័ន ហោះតែមួយជិទាស់ដៃ ក្សត្រថ្លៃក៏បានដល់នគរអសីលសូរីយ័ន ដូច្នោះហើយព្រះអង្គក៏បានទតមើលទៅក្នុងស្រះ ឃើញសត្វឡើកវារ៉ុរិតជិតប្រាណ ព្រះអង្គលុយទៅចាប់ឱបក្រសោបយកមក បានយកព្រះខ័នថ្លាអារសត្វឡើក អារព្រង់ភ្នែក ព្រង់ច្រមុះ ព្រង់ហាត់សព្វអង្គប្រាណ សត្វឡើកក៏ក្សិណក្ស័យប្រល័យជីវិត រលោយជ្រុះអស់ពីខ្លួនប្រាណ ពេលនោះព្រះពាយបក់បោកសព្វខ្លួនប្រាណ ចំសហនុមានបានដល់ខ្លួនប្រាណដឹងស្មារតី ដងណោះ បុត្រព្រះពាយរិទ្ធិសាយដំកន្លង ថ្វាយបង្គំព្រះនារាយណ៍រាមាក្សត្រឲ្យាល់ច្បង ព្រះនារាយណ៍រាមាស្តេចគង់លើសុគ្រីព លោកវិលវិញមកដល់ស្រុកសមរភូមិជ័យដូចសព្វដង ក្រោយនោះហនុមាន បានដំរេងពេជ្រប៉ុនដើមត្នោតសុទ្ធសឹងវាយបាក់ប្រាសាទវិមានក្រុងអសុរី ដាច់ខ្ទួនភាពណ៍ជាពីរជាបី តវិញបាន ក្រុងទសមុខមារដាច់ពុទ្ធិ ក្រុងទសមុខមារក្តៅក្លួលដូចភ្លើងឆេះ ។



៦២-ម្តងណោះទៅតាំងពុទ្ធិក្នុងរូងភ្នំរទាន់បព្វតា ភ្នំនោះហៅថាភ្នំសត្តបរិភ័ណ្ឌ តាំងពុទ្ធិបានពាថ្ងៃ ជាគំរប់ បើទុំពុទ្ធិកាលណា យក្សក្រុងអសុរា មូរផែនដីបាន បាញ់សរកើតជាភ្លើងប្រល័យកល្ប ឆេះទាំងអស់ជ្រុះព្រហ្មទេវតា គ្មាននរណាទើសមុខបាន ហើយត្រូវកក្រើករំពើកសព្វវានផែនដី ក៏ញាប់ញ័ររំជួល ញ័រដល់ស្រុកសមរភូមិជ័យកែវមរកតញាប់ញ័រចំហុតបីទិវា ព្រះនារាយណ៍រាមាត្រាស់ហៅពិភេកសា ប្អូនអើយបងរស្មារ្យណាស់ ញាប់ញ័រខ្លាំងក្រៃ មានអ្នកណាលើកទ័ពភ័យសារមកទៀតហើយ ពិភេកហោរាទូលថាព្រះអវតាន គ្មានទ័ពមកពីណាទេ ព្រះក្សត្រក្សាន្ត នេះហើយក្រុងទសមុខមារ តាំងពុទ្ធិក្នុងរូងភ្នំ បើទុំកាលណាអស្ចារ្យក្រៃ យក្សមូរផែនដីបានទាំងអស់ មនុស្សសត្វក៏ក្សិណក្ស័យមូរផែនដី បើយក្សបាញ់សរកាលណាកើតភ្លើងប្រល័យកល្ប ឆេះទឹកឆេះដីឥតមាននរណាទៅទប់ទល់បាន ព្រះនារាយណ៍រាមាទ្រង់ជ្រាបហើយថាឱប្អូនអើយ ប្រើអ្នកណាទៅបណ្តាច់សិល្បបាន ពិភេកទូលថា មានតែអង្គត់និងសហនុមាន ទៅបណ្តាច់សិល្បយក្សបានដូចសេចក្តីប្រាថ្នា ថាបើយជ្រាបហើយមានព្រះឱង្ការ ប្រើបាអង្គត់និងសហនុមានអញ្ជើញប្រើបាទាំងពីរពង្សហោះទៅថ្កាន ទៅបណ្តាច់សិល្បទសមុខមារអសុរាដែល

តាំងពុទ្ធីនៅក្នុងរូងរទាន់បព្វតា សហនុមានបាអង្គត់ បានស្តាប់ដូច្នោះ ហើយក៏ថ្វាយព្រះបង្គំថយក្រោយក្រោក យកគ្រឿងអលង្ការទ្រង់ព្រះខ័នថ្លា ហើយក៏នាំបាអង្គត់ហោះផ្លេកផ្លោះសំដៅ តម្រង់ចូលទៅក្នុងរូងរទាន់បព្វតា ឃើញក្រុងទសមុខមារភាវនាសិល្ប ហើយយាព្រះខ័នថ្លា យើហ៎!ក្រុងអសុរា អាឯងក្សិណក្ស័យថ្ងៃនេះហើយ ក្រុងមារអសុរាក៏គ្មានស្តាប់ ចេះតែភាវនាសិល្បឱ្យប្រញាប់នឹងបានទុំ អង្គត់ហនុមានក្លាហានណាស់ ក៏ចាប់ចោលក្រុងមារអសុរា ឯក្រុងមារអសុរា ខំភាវនាសិល្ប ភាវនាជួនជាប់ខ្លាំងក្រៃ មិនឱ្យដាច់និស្ស័យសិល្បសាស្ត្រ យក្សខំសង្វាតប្រឹងភាវនា សេ-នាទាំងពីរតាំងបោកប្រាស់ ក្រុងមារអសុរា ក៏គ្មានខឹង ខំប្រឹងភាវនាមិនឱ្យដាច់ អង្គត់ហនុមានធ្វើដូចម្តេចមិនបានសោះ ម្ល៉ោះហើយហូតព្រះខ័នថ្លា កាប់កាត់យក្សាជាបីកំណាត់ យក្សយង់នៅតែក្បាល ខំភាវនាសិល្បមិនឱ្យដាច់ យូរបានបន្តិចតជាប់វិញ ខំតែភាវនាសិល្បមិនឱ្យដាច់ អង្គត់ហនុមានមិនបានសម្រេច យក្សភាវនាមិនឱ្យដាច់ ម្ល៉ោះហើយក្រុងមារអសុរា ភាវនាសរសិល្បថ្លាមិនឱ្យដាច់ សេនាទាំងពីរមិនបានសម្រេចដូចប្រាថ្នា កាប់វាច្រើនដងជាច្រើនគ្រា វាចេះតែភាវនាមិនឱ្យដាច់ សេ-នាទាំងពីរក៏ថយក្រោយ វិលមកពិចារណា យើងនេះនាំគ្នាមកបណ្តាច់



សិល្បយក្សា ធ្វើការយ៉ាងដូចម្តេចវាចេះតែភាវនាបាន បើតែដូចយ៉ាងនេះទៅបង់ពំនិតហើយ នៅតែបីទិវាសិល្បសរអសុរានឹងទុំបាន បើហេតុដូច្នេះយើងពិតយ៉ាងណោ បារអង្គត់ជួយពិចារណា យើងពិតយ៉ាងណាឱ្យដាច់សិល្បបាន អង្គត់ក៏ថាស្រេចតែបាហនុមា ធ្វើម្តេចឱ្យបានដូចប្រាថ្នា ឲក្រុងយក្សាច្មេចភ្លេកខំតែភាវនា ឯយើងទាំងពីរ ធ្វើម្តេចវាក៏ធ្វើចុះ ថាតែប៉ុណ្ណោះហើយពិតព្វា យើងនឹងវិលទៅក្រាបទូលបង្គំ ព្រះនារាយណ៍រាមា ពិតហើយ ពិតថាដោយយោបល់ សហនុមានថា មារអង្គត់កុំឱ្យឆ្ងល់ពាបដោយយោបល់របស់យើង ថាហើយនាំគ្នាហោះផ្លេកផ្លោះវេហាស៍ចូលដល់ក្រុងលង្ការាជបូរី ទៅចាប់អគ្គមហេសីរាពណ៍ទាំងបី គឺនាងមន្ទោលគិរី អគ្គីនាគនូវនាងមន្ទោគិរី ជាមហេសី ចាប់បានប្រពន្ធទាំងបីហោះយកមក កាលណោះក្រុងទសមុខមារ កំពុងភាវនាធមិ ចាប់អគ្គមហេសីទាំងបីដាក់ពីមុខ តាំងចាក់បន្លែងកំផ្លែងលេង ចាក់ពីស្តាំទៅឆ្វេងមិនឱ្យសុខរបូតស្បៃកេសាឃើញដោះដូង ឯនាងទាំងបីអគ្គមហេសីយក្សស្រែកផងយំផងក្នុងកាឡា មើលអង្គក្សត្រាស្ទៀមព្រងើយ តេយកប្អូនស្រីបីរង្គា មកប្រឡែងលេងនឹងព្រះភ័ក្រ , ព្រះអង្គគ្មានអន់អាក់ថ្នាក់ព្រះទ័យ គួរតែខ្មាសឥន្ទ្រព្រហ្មទេវតា ខ្មាសអាមនុស្សាក្នុងផែនដី មិន

គួរឱ្យអាស្វាសចោរចង្រៃ មកប្រឡែងលេងជាល្បែងវា នាងស្រែកនាងយំសោយសោកា មើលអង្គក្សត្រាគ្មានថាអ្វី ឯសេនាស្វាទាំងពីរពង្ស ចាក់ស្ពាំចាក់ឆ្វេងប្រឡែងក្រៃ ក្រុងរាពណ៍ក៏ឆេះឆួលក្នុងឱរា អញនេះជាស្ដេចមហាចក្រ ខ្មាសអាស្វាសណាស់ វាចាប់អគ្គមហេសីទាំងបីមកប្រឡែងលេង លើកថើបពីស្ដាំទៅឆ្វេងឱ្យរន់អាក់ ក្រុងរាពណ៍ងើបឡើងទាញដំបងពេជ្រ វាយស្វាសទាំងពីរឬទ្ធីក្រៃ មានព្រះឱង្ការថា អាស្វាសចង្រៃ ស្វាសមារអង្គត់ក៏ហោះរត់វិលវៃ ដល់ស្រុកសមរភូមិជ័យ ឡើងថ្វាយបង្គំទូលព្រះបរមរាជឧត្តម ទូលមួយកាលចាប់បោកយក្សាវានៅតែភាវទារវ៉ូរទាំ កាប់កាត់សម្លាប់យក្សាជាច្រើនដង យក្សខំភាវនាសិល្ប មិនឱ្យដាច់ ធ្វើការមិនបានស្រេច គិតឧបាយមកចាប់ប្រពន្ធវា ឯក្រុងលង្ការាជបូរី យកទៅប្រឡែងលេងនឹងមុខវា យក្សក្រេវក្រោធា ទាញដំបងវាយ ក្រុងអសុរីក៏ក្រោកដាច់សិល្ប ព្រះនារាយណ៍រាមា បានស្ដាប់ហើយថា បាអង្គត់ហនុមានអើយយើងត្រេកអរក្រៃ យើងភិតភ័យណាស់ ក្រៃងយក្សថ្លែងសរឆេះអស់ផែនដី ឆេះទឹកនព្វមហាសមុទ្រ ឋានទាំងបីឥន្ទ្រព្រហ្មក៏ក្ស័យដូចយើងដែរ ព្រះអង្គក៏គង់ស្ងៀមដូចសព្វដងជាសុខសាន្ត ។



៦៣-យើងទៅនិយាយពីក្រុងទសភក្រ្តា ពអគ្គមហេសីបីអង្គារ មកដល់ក្រុងលង្ការាជបូរី ដាក់នាងទាំងបីលើទែនទីសប្អូនអើយខ្លួនបងមិនរស់នៅទេ ចូរប្អូនមាសមេរក្សាបុត្រា អស់ស្រីស្នំក្រុមបរិវារ ចូរប្អូនរក្សានគររាជ-បូរី បងសូមលាស្រីកែវកនិដ្ឋា ក្រុងទសមុខមារដឹងខ្លួនពីថ្ងៃនេះតទៅថា មិនបានរស់នៅថ្មមរក្សា ថាហើយក្រុងទសមុខមារហោះទៅកណ្ដាលនព្វមហាសមុទ្រពត់ព្រះភ្នែនពែនព្រះបាទស្អាងស្អាត តាំងពុទ្ធីសរថ្លា បើទុំកាលណាឆេះផែនដី ក្រុងអសុរីបន្ទុំសរសិល្ប បៀតមួយខូបជួបសន្និ-យា កក្រើកសព្វទិសាញ័រផែនដី កក្រើកនភាល័យសូតិប្រាំមួយជាន់កក្រើកដល់ឋានអាម៉ែមែនឋានតុសិតនគរទាំងមួយរយម្ភៃ កក្រើកទាំងអស់គ្មានសល់ចន្លោះត្រង់ណាឡើយ ស្រុកសមរភូមិជ័យ ក៏ញាប់ញ័រខ្ទរខ្ទ័រគគ្រឹកពុំមានស្បើយ ព្រះនារាយណ៍រាមាស្ដេចអស្ចារ្យ ថានរណាលើកទ័ពមកទៀតហើយ ថាហើយហៅពិភេកសា ព្រះអនុជប្អូនភ្វាគ្រាឥឡូវ តើមានសត្រូវមកពីទិសណាសឹកសាមសង្គ្រាមជ័យ ទ័ពភ័យសារពិភេកអសុរា ក៏បានស្ដាប់ព្រះអវតាន លើត្បូងសិរសា ត្រាស់ថាដូច្នោះហើយ គន់គូរហោរាដោយនូវហោរទិព្វចក្ខុ ស្ដេចទាយតាមថ្នាក់បូកលេខភ្ជុំថាក្រុងទសបុខមាររអសុរា ហិចហោះផ្សៀវផ្សោះ ទៅតាំងពុទ្ធីសរថ្លា កណ្ដាលមហាសាគរមហាសមុទ្រ ព្រះនារាយណ៍រាមាថា ប្អូន

អើយ យើងប្រើនរណាទៅបំផ្លាញបាន ពិភេកទូលថា ពេលនេះសុំអាក់ខាន នរណាទៅមិនបានដូចប្រាថ្នា ព្រះនារាយណ៍រាមាស្ដេចឆ្ងល់ណាស់ ទើបត្រាស់ទៅកាន់ពិភេកអសុរាទៀតថា ប្អូនអើយបើដូច្នោះហើយពិតយ៉ាងណា ពិភេកទូលថា បើប្រើនរណាទៅមានគ្រោះថ្នាក់ ព្រះនារាយណ៍រាមាស្ដេចភ័យណាស់ ប្អូនអើយពេលនេះបងមិនសុខចិត្តទេ ពិភេកពន់ទូលដោយហោរទិព្វចក្ខុ មើលទៅតាមថ្នាក់យល់ជាក់ហើយទូលព្រះនារាយណ៍ក្សត្រធិបតីកុំព្រួយព្រះទ័យអ្វីឡើយ សិល្បនោះបើបៀតពុំ វាដាច់ខ្លួនវាណោព្រះអង្គ មិនបានដូចសេចក្ដីប៉ងប្រាថ្នា ក្រុងអសុរាដាច់សិល្បពីព្រោះស្រី ។ យើងស្ងេះទុកត្រង់ណោះសិន និយាយពីអាណោសព្រហ្ម មហាព្រហ្មា និត្យនៅឋានព្រហ្មក៏ក្ដៅក្នុងឋានព្រហ្មដូចគេយកប្រកាលទៅអុជអាល ដូចគេយកលំពែងទៅចែងចាក់ ហាក់បីដូចគេយកពិសសរខ័នថ្លានិត្យនៅពុំបាន ទតមកជម្ពូទ្វីបបានឃើញក្រុងទស-ភក្ត្រា ទៅតាំងសិល្បកណ្ដាលនព្វមហាសមុទ្រ បើកាលណាទុំសិល្បវាហើយ ក៏បាញ់សរម្ហូវផែនដី ឆេះទឹកឆេះដីឆេះឋានទាំងបីពុំនៅឡើយ បើដូច្នោះអញពិតយ៉ាងណោ ថាហើយព្រះព្រហ្មបៅទេពហិមពាន្ត ស្រីទិព្វទាំងប្រាំពីរ ។ ឯទេពហិមពាន្តស្រីទិព្វថ្វាយបង្គំអង្គព្រះព្រហ្មា ខ្ញុំនឹង



ហោះលីលាទៅបណ្ដាច់សិល្បក្រុងទសភក្ត្រា ព្រះព្រហ្មក៏ឱ្យពរថា បើនាងទៅហើយឱ្យបានដូចសេចក្ដីនាងប្រាថ្នា ទេពហិមពាន្តក៏បានលាអង្គព្រហ្មាហើយ ក៏ហោះផ្លេកផ្លោះមកដល់នព្វមហាសមុទ្រ បៀតប្រាសាទក្រុងទសមុខមារតាំងពុទ្ធី ទេពហិមពាន្តក៏មានពាក្យវាចា បើក្រុងរាពណ៍នៅត្រង់ណា យើងចូលទៅស្នេហាត្រង់ណោះ ក្រុងទសភក្ត្រា កាលណោបើបានឮវាចា នាងទេពកញ្ញាស្រីទេពហិមពាន្ត ពិរោះគាប់ចិត្តខ្លាំងក្រៃ ក្រុងអសុរីក៏ងើបមើល ឃើញទេពហិមពាន្តក៏ចរចូលមកដល់ ក្រុងទស-ភក្ត្រាក៏ដាច់សិល្ប មានវាចាថា ប្អូនអើយប្អូនចូលជិតមកបងរ៉ា ក្រុងទសភក្ត្រាចាប់ចិត្តមេត្រី ឯទេពហិមពាន្តទាំងប្រាំពីរដឹងក្នុងខ្លួនថា ក្រុងមារអសុរាដាច់សិល្បហើយ ក៏ហិចហោះផ្លេកផ្លោះទៅកាន់ឋានព្រហ្មវិញ ទៅដល់ម៉បម៉ាយថ្វាយបង្គំព្រហ្មា ព្រះព្រហ្មបានសួរមកនាងទាំងប្រាំពីរ នាងអើយ ក្រុងមារដាច់សិល្បហើយឬនៅ នាងលើកដៃថ្វាយបង្គំថា ក្រុងទសមុខមារដាច់សិល្បហើយ ព្រះព្រហ្មក៏ត្រេកអរក្រៃ ។ រឿងត្រង់ណោះស្ងេះទុកសិន ។

៦៤-និយាយពីក្រុងទសមុខមារអសុរីចូលក្នុងលង្ការាជបូរី អសុរីក៏សិទ្ធីសរសង្ការ ក៏ឆ្វាយឆ្វល់ហៀវហោះផ្លេកផ្លោះទៅកោងសមុទ្រ ទៅ

ហៅពលយក្សដែលសេសសល់ប្រមូលភ្នំបានមកច្រើនសល់ យើងនឹងយកទ័ពទៅវាយរាមនុស្សា ពលយក្សាបានស្តាប់ហើយម៉បម៉ាយថ្វាយបង្គំ យក្សយំមកជុំនៅព្រៀបព្រា កាន់គ្រឿងអាវុធចិត្តមុតក្លៀវក្លាចូលទៅបង្អួកម៉ករអសុរក្នុងបូរី ម្នោះហើយពួជពង្សក្រុងអសុរី លើកទ័ពច្រើនក្រៃទៅត្រៀបត្រាឮសូរស័ព្ទសន្ធឹកខ្លាំងអស្ចារ្យ ដូចព្យុះព្យោហាវាភោរុកកក្រើកទាំងត្រៃភព លោកទាំងបី ទេវតាឥន្ទ្រព្រហ្មនៅពុំបានចក្រក្នុងឋានដើមព្រះជ្រៃ ព្រះអាទិត្យសុរិយា ព្រះចន្ទ្រតារាវន្ទាល រស្មីទេពអប្សរបរិវារកញ្ញា មកវាំបាចផ្កាឱ្យជោគជ័យ ។ កាលនោះព្រះនារាយណ៍រាមាធិបតីកក្រើកស្រុកសមរភូមិជ័យ ព្រះអង្គមានព្រះបន្ទូលហៅពិភេកអសុរា អូនអើយហេតុអ្វីក៏អស្ចារ្យ ពិភេកអសុរាក៏ដោះក្តារឈ្នួនពីគគន់តួរអ្នះយល់សាយសព្វហើយ ឆ្លើយថាគ្មានទ័ពនរណោ ពីទ័ពក្រុងទសមុខមារលើកទ័ពមកវាយទៀតហើយ ព្រះអង្គសួរទៅថា ឱ្យនរណាទៅតទ័ពបាន ពិភេកទូលថា ព្រះអវតានបានតែម្ចាស់លើត្បូងសិរសា ។ ព្រះនារាយណ៍រាមាកាលនោះបើបានពិភេក សាទូលថាដូច្នោះហើយ ព្រះអង្គក៏ខំកេណ្ឌកងសកលយោធា ទាំងពីរដណ្តប់អង្គប្រាណ សុគ្រីព ហនុមានមារអង្គត់ កេសរជម្ពូពាន និលឯក និលផាត់ និលខាន់ ឃុននល់ ឃុននិល



និលពេជ្រ ព្រមទាំងពួកស្វាទាំងប៉ែតសិបអក្ខោ ក៏បរកាត់តម្រង់ត្រង់ក្រុងរាពណោសូរ ដល់ជួបមុខគ្នាកាលណា ក្រុងទសភក្រ្តាថា អើព្រះរាមព្រះលក្សណ៍មនុស្សា យើងត្រូវច្បាំងគ្នា លេងគ្នាឱ្យអស់កិច្ចកល ព្រះនារាយណ៍រាមាមានព្រះបន្ទូលថា អើក្រុងមារអសុរា ខ្លួនអញនេះដូចព្រះកាល ស្រួចស្រេចតាមមកផ្តល់ផ្តាច់ជីវ៉ា ជីវិតមឹងក្ស័យឥឡូវណានឹងធ្នូសរខ័នថ្លាពុំលែងឡើយ ក្រុងយក្សាក៏ក្រេវក្រោធពិរោធសោះសាចាប់ធ្នូសរជ័យបាញ់តម្រង់ត្រង់អង្គព្រះចេស្តា សរយក្សពុំហ៊ានបៀតព្រះអង្គដល់ពិរោធឡើយ សរជ្រួសហួសទៅដល់ព្រៃហេមវាសត្វក្នុងអច្វាក៏ផ្អើលលោន់កក្រើករំពើកព្រៃហេមពាន្ត សត្វហើរសត្វដើរនឹងដី ដីរខ្លាឮស័ព្ទសរកាលណារត់រន្ធាន់ ចោលកូនចោលចៅ ថ្ងូចថ្ងូរកគ្នាលាន់ នៅក្នុងហេមវន្ត ក៏ភិតភ័យ កាលណោះព្រះនារាយណ៍រាមា ស្តេចក៏បាញ់សរជ័យ ព្រូវក្រុងអសុរីគ្មានសល់ដល់តិចណោឡើយ បាញ់សរអារិទ្ធិចាន់មិនដែលខុស ត្រូវរុះដូចក្រឡាសំណាញ់គ្មានសល់សាច់ ថ្លែងពីពលយក្សនិងពលស្វាជួបគ្នាកាលណាសុទ្ធចំបាប់ អាខ្លះចាក់អាខ្លះកាប់ យក្សាក្បៀណាក្បែរប្រល័យជន្ម អង្គត់ហនុមានកាន់ព្រះខ័នថ្លាប្រហារយក្សយំរស់គ្មានសល់ និលឯកនិលផាត់កាន់ដំបងពេជ្រ វាយយក្សាខ្ចាំខ្ចេចអស់

ក្បាលសល់ កេសរជប្អូពានសុទ្ធភ្លៃកភ្លើង សព្វឹងឱ្យឆេះពលយក្សា យក្ស យំស្ដោកស្លាប់ ក្ស័យមរណោនឹងគណនារាប់ពុំអស់ឡើយ សហនុមាន ចាប់កាច់ករាជសីហ៍ ដៃចាប់អសុរីកាត់មរណា បោះទៅក្នុងសមុទ្រ យំឃ្លង យក្សាស្លាប់គំនរគរដូចភ្នំ សូគ្រីពចោលភ្នំរណ្ដំព្រៃ ស្លាប់ ក្រុងអសុរីគ្មានសល់ឡើយ ថ្លែងពីក្រុងរាពណោសូរ សូព្រមន្ដព្រះពាថា ភ្ញុំផ្ដិកាលណោ កើតជារូបអសុរី ក្រុងហារថយដៃចាញ់ចេស្ដា យក្សបោះ វិលវឹងទៅព្រៃហេមពាន្ដ ទៅស្រែកហៅពលសកលយោធា ថ្លែងពីអង្គ ព្រះនារាយណ៍រាមាស្ដេចទពយក្សា ស្លាប់ច្រើនព្រៃ ទពយល់ក្រុងទស-ភក្រ្តាថយដោះដៃ ព្រះអង្គលើកទ័ពវិលប្ងូរី ថ្ងៃក្រោយទៀតក្រុងអសុរី កេណ្ឌពលយក្សាច្រើនក្រាសព្រៃ ចូលមកតយុទ្ធនឹងក្សត្រថ្លៃ ព្រះអង្គ ក៏កេណ្ឌពលស្វាប៉ែតសិបអក្ខោ ភ្នំកងសេនាដប់ពីរអង្គប្រាណទូវបាសុគ្រីព អង្គទ់បាហនុមានស្ដេចចរលីលាតម្រង់ទ័ពអសុរី ពួកយក្សនិងពួកស្វាលើក ទ័ពជល់មុខគ្នា ពានរស្វាស ដកដើមឈើវាយ ព្រះនរបតីបាញ់សរថ្លា ព្រួវព្រង់ពីអង្គយក្សអសុរា ព្រួវរុះសព្វសាច់គ្មានសល់ឡើយ ភ្លឺរវែ្លងសាច់ សូតគ្មានសល់ឡើយ ក្នុងខ្លួនយក្សយំសុទ្ធតែប្រហោងសរ ច្បាំងគ្នា ទាំងថ្ងៃទាំងយប់គ្មានឈប់ឈរ ស្រីទេពអប្សរបវរកញ្ញា សឹងរាំបាចផ្កា



ឱ្យពរជ័យ ឥន្ទ្រព្រហ្មទេវតាផ្អើលរីករវល្មសូរស័ព្ទសរ ក៏ខ្លាំងព្រៃ សរ ព្រះនារាយណ៍នឹងសរយក្សា ឮដូចសូររន្ទះទាំងមួយសែន ។

៦៥-ឯយក្សត្រូវសរតម្រប់គ្រប់ប្រាំពីរថ្ងៃ អសុរាមិនក្ស័យនៅដូច ដែល ព្រះនារាយណ៍រាមា ហៅទៅពិភេកសារ ហេតុអ្វីក្រុងអសុរា ត្រូវសររុះដូចក្រឡាសំណាញ់ ហេតុនេះក្រុងមារមិនមរណាក្ស័យ ពិភេក ទូលថា ឯសរជ័យទោក់ឫស រកដួងកែវរាពណ៍មិនឃើញឡើយ ព្រះរាម សួរថា ព្រះអនុជអ្នកអើយ បើដូច្នោះហើយគិតយ៉ាងណា ពិភេកអសុរា ទូលក្សត្រថ្លៃ អារិទ្ធិចាន់សរថ្លា រកដួងកែវវាពុំឃើញឡើយ ដ្បិតអីក្រុង ទសមុខមារ ដកដួងកែវវាផ្ញើនឹងឥសី ឥសីនោះនាមឈ្មោះឥសីកាឡៃយ កោត ព្រះនារាយណ៍រាមាថាពិភេកសា យើងត្រូវប្រើនរណាទៅយក បាន ពិភេកទូលថា ត្រូវតែប្រើបាហនុមានចូលទៅផ្ទួម ឱ្យទៅហើយ ទៅក្រាបថ្វាយបង្គំរាពណ៍សុំធ្វើជាកូន ទើបព្រះអង្គហៅទៅសហនុមានថា ហៃស្វាសសុទ្ធបុត្រព្រះពាយ អញប្រើបាឯងឱ្យទៅក្រុងលង្កាវាជប្ងូរីទៅ សុំក្រុងអសុរីជាបិតា ឱ្យឯងនៅធ្វើការសង្គ្រាមជ័យ សហនុមានឮហើយ ថ្វាយបង្គំ កុំព្រួយព្រះទ័យព្រះអវតាន ខ្ញុំចូលសុំដកដួងកែវឱ្យបាន កុំព្រះ ក្សត្រក្សាន្តព្រួយព្រះទ័យ ថាហើយរាជក្របីស្រីពានរ ថ្វាយបង្គំក្រាប

ហោព្រះអវិពាន យកគ្រឿងអលង្ការមកទ្រង់ហើយ ក៏ហោះភ្លៀវថ្លោះ ទៅក្រុងលង្កាភាជបុរី កាលពោះទៅថ្វាយបង្គំក្រុងទសភក្រ្ត ទសភក្រ្ត ឃើញហើយក៏សួរថា ពានរស្វាសឯងមករកអ្វី ។ សហនុមានក៏ក្រាប ថ្វាយបង្គំ ខ្ញុំមកសុំព្រះអង្គនៅផង ខ្ញុំមកជួយតទ័ពនឹងព្រះនារាយណ៍រាម ហើយទៅព្រះនារាយណ៍រាមកោបមនុស្សទាំងពីរពង្ស បាញ់សរត្រូវព្រះអង្គមិន ញ៉ើយបរលោ ខ្ញុំមកសុំព្រះអង្គធ្វើជាបិតា ជួយច្បាំងនឹងមនុស្សបានប្អូន ក្រុងទសមុខកោរបានស្លាប់ហើយ បានព្រះរាជហឫទ័យត្រេកអរក្រៃ ហើ កូនមកជួយច្បាំងព្រះបិតា ព្រះបិតាអរណាស់គ្មានសង្ស័យ កូនហើយពី ថ្ងៃនេះតទៅ ប្រាសាទមាសដែលមេឃជិតនៅ បិតាឱ្យកូនទៅសោយរាជ្យ ស្រីស្នំក្រមការជាច្រើនក្រៃ ថាហើយក្រុងទសមុខមារ ប្រាប់ស្រីស្រីង្គារ ក្រុងអសុរាឱ្យបំរើសហនុមាន ប្រាំពាន់ឆ្វេងប្រាំពាន់ស្តាំ ឱ្យទៅស្ថិត លើប្រាសាទដែលឥន្ទជិតគង់ ពេលនោះសហនុមានក៏បានទៅសោយ រាជ្យ ប្រាសាទដែលឥន្ទជិតនៅ ស្រីស្នំក្នុងក្រៅក៏ដើរហែរ ខ្លះលើក ក្រយាទៅឱ្យសោយ សហនុមានក៏នៅក្បែរក្សាន្តសប្បាយចិត្ត ។ កាលប មួយទិវា ព្រះនារាយណ៍រាមា ស្តេចក៏លើកទ័ពនិងស្រីលក្សណ៍អនុជា ពលស្វាប៉ែតសិបអក្ខោ ពួសទ្ធីកសូរស័ព្ទខ្លាំងក្រៃ ក្រុងទសភក្រ្តា កាល



បើបានដឹងការថា មនុស្សាទាំងពីរពង្សលើកទ័ព ស្តេចក៏ប្រើអាមាត្រ មួយទៅអញ្ជើញសហនុមានមកថ្កានព្រះបិតា អាមាត្រទៅដល់ហើយក៏ ប៉ប៉ោយថ្វាយបង្គំថា បិតាឱ្យមកអញ្ជើញទៅឱ្យឆាប់ បាបុត្រព្រះពាយ សេនាអង្គព្រះនារាយណ៍ កាលណោបើបានស្តាប់សេនាទូលថាដូច្នោះ ហើយ ក៏ពុំហ៊ានទៅយូរឡើយ ក៏ចុះចាកពីវិមានព្រហ្ម ទាំងស្រីស្នំក្រម ការ ក៏ហែរប្រាំពាន់ឆ្វេងប្រាំពាន់ស្តាំ ឡើងទៅដល់ហើយក៏ថ្វាយបង្គំ ក្រុងអសុរា ក្រុងទសមុខមារ កាលណាបើឃើញរាជក្របីស្រីពានរ ស្វាសសុទ្ធឡើងទៅថ្វាយបង្គំគាល់ព្រះអង្គដូច្នោះហើយក៏ថា កូនមាស ព្រះបិតា មនុស្សាលើកទ័ពមកទៀតហើយ សុទ្ធតែពានរស្វាច្រើន សល់ ។ សហនុមានក្រាបទូលក្រុងទសមុខមារ កុំព្រួយព្រះទ័យា ទុកឱ្យខ្ញុំ ត្រង់ទ័ពមនុស្សាខ្ញុំមិនខ្លាចឡើយ ថាហើយក៏ក្រាបថ្វាយបង្គំលា កេណ្ឌទ័ពយក្សាបានច្រើនសល់ បរទ័ពយក្សាកាត់សំដៅ កាត់ត្រង់ តម្រង់ទៅព្រះនារាយណ៍រាម ព្រះនារាយណ៍រាមានិងព្រះលក្សណ៍សារ ទាំងពិភេកហោរា កេសរជម្ពូពានឃើញទ័ពហនុមានលើកមកដល់ ព្រះអង្គ ក៏បរទ័ពរត់គ្មានសេសសល់ចូលដល់មណ្ឌលរាជឋាន ស្តេចនៅសុខសាន្ត ដូចដើម ហនុមានក៏លើកទ័ពត្រឡប់មកវិញ យក្សយំហិចហោះភ្លៀវ

ផ្លោះចូលបូរីក្រុងអសុរិទ្ធចូលទៅបំបាយថ្វាយបង្គំ ពេលនោះស្វាសុទ្ធបុត្រព្រះពាយលើអាវុធព្រះនារាយណ៍ ចូលទៅថ្វាយបង្គំព្រះបិតា លើកទ័ពទៅច្បាំងរបញ្ញាញ់ថ្ងៃវិញ ទ័ពមនុស្សាក៏លើកទ័ពថយរត់ព្រាត់សាត់ឡើយ ព្រះរាមព្រះលក្សណ៍មនុស្សាទាំងពីរនាក់ នាំពលចតុរង្គថយក្រោយវិញ មិនបានចូលយកវាយទល់គ្នាទេ លើកទ័ពរត់ទាំងពលទាំងនោះ ក្រុងរាពណ៍បានដឹងហើយ ក្រោកអរក្រៃ កូនមាសព្រះបិតាបានជោគជ័យ មនុស្សាភិតភ័យដកទ័ពថយ នេះហើយហៅថាពេញជាកូនឪ កាលមួយទិវាទៀតព្រះនារាយណ៍រាមា លើកពលយោធាមកទៀតហើយសូរស័ព្ទសន្ធឹកខ្លាំងដូចផ្គរ ខ្ទរខ្ទរពន្លឹកពុំបានស្បើយ ពួកពលស្វាលេងឆៃយ៉ាំ វាយស្គរគគ្រាំខ្លាំងពន្លឹក ស្វាខ្លះលោតហក់ពោបែរពាំត្បាល់ ស្វាខ្លះចាក់ក្បាច់បន្លិចមុខឱ្យដាល់ សូរស័ព្ទខ្លាំងក្រៃដូចព្យុះព្យោមា ក្រុងទសមុខមារ បានជ្រាបដូច្នោះហើយ ត្រាស់ហៅហនុមានថា កូនអើយ មនុស្សាទាំងពីរលើកទ័ពមកទៀតហើយ បាកុំបង្អង់ឡើយកូនមាសព្រះបិតា ហនុមានក៏បានស្តាប់ក្រុងរាពណ៍អសុរា ត្រាស់ត្រើរកាព្យដូច្នោះហើយ កេណ្ឌកងទ័ពយក្សាកកក្រើនក្រៃ កាន់ទួនទង់ជ័យចូលទ្រៀបត្រា ខ្លះកាន់ដំបងពេជ្រ ផ្លែកផ្លោះបោះវៃពាស់ ដាវវែងដាវខ្លីចូលកាប់គ្នា ខ្លះដកដើមព្រឹក្សាបើទាំងឫស្សសូរស័ព្ទ



សន្ធឹកដូចជាផ្គរខ្ទរខ្ទរឮល្ងើយខ្លាំងណាស់សា ។ កាលណោះព្រះនារាយណ៍រាមាស្តេចបរពលស្វាត្រឡប់ថយក្រោយ ខ្វះរត់ចូលព្រៃឱ្យអស្ចារ្យ កុំឱ្យក្រុងអសុរាសង្ស័យបាន ព្រះនារាយណ៍រាមាត្រឡប់មកវិញ ពលស្វានោះមិញ ត្រឡប់ថយក្រោយ ស្រីលក្សណ៍អនុជាពិភេកអសុរា សេនាទាំងអស់ក៏វិលវិញ បានដល់ស្រុកសមរភូមិជ័យកែវមរកត ស្តេចឡើងទៅគង់ដូចសព្វដង ថ្លែងពីបុត្រព្រះពាយឬទ្ធិសាយដ៏កន្លង បរពលមកវិញហើយឡើងគាល់ព្រះបិតា ដល់ហើយឱនកាយថ្វាយបង្គំថា អម្បាញ់ថ្ងៃមិញទ័ពមនុស្សាទាំងពីរត្រឡប់ថយក្រោយ មិនបានចូលតយុទ្ធគ្នាឡើយ លើកទ័ពទៅវិញហើយក៏បាត់ស្ងាត់ស្ងៀម ក្រុងរាពណ៍ស្តាប់ហើយត្រេកអរក្រៃ ថានេះហើយកូនឪ កូនមាសព្រះបិតា បិតាឱ្យឋានដែលឥន្ទជិតនៅ ឱ្យកូនឡើងទៅសោយរាជ្យរម្យ មានទាំងស្រីស្នំក្រមការ ស្នំស្និតបរិវារជាច្រើនក្រៃ សហនុមានសប្បាយចិត្តណាស់ នឹងចតុស្តម្ភក្រមការយក្ស កាលមួយទិវាទៀត ព្រះនារាយណ៍រាមាភ្ជុំអស់ពួកពលកងសេនា ស្តេចចរយា-ត្រាមកទៀតហើយ ញាប់ញ័រសន្ធឹក សូរស័ព្ទខ្លាំង ឮសូរស័ព្ទភ្លេងពីរោះល្វេងល្វើយ កេណ្ឌកងពលស្វាបានប៉ែតសិបអក្ខោ ពួកកងសេនាក៏លើកទ័ពស្រួច អង្គព្រះរាជាស្តេចធ្វើទ័ពហ្លួង អធិកម្ម អធិពលឡាំ អ្នក

យាមល្បាតក៏បានឃើញ ព្រះរាមព្រះលក្សណ៍មនុស្សា ស្តេចនាំពលស្វាច្រើនក្រាស់ក្រៃ ឡើងទៅក្រាបទូលក្រុងទសភក្ត្រា ពួកពលមនុស្សាមកទៀតហើយ ក្រុងទសភក្ត្រាត្រាស់ហៅសហនុមានឱ្យអាមាត្រទៅថ្កាន រាជក្របីរាមាត្រ ទៅហើយឱនកាយថ្វាយបង្គំទូលថា ព្រះចៅបេង្គាររសុំឱ្យមកអញ្ជើញព្រះអង្គយាងឱ្យឆាប់ សហនុមានឮហើយទ្រង់គ្រឿងអលង្ការ យកព្រះខ័នផ្កាសៀតប្រញាប់ រួចហើយមកប៉ីរពៅយថ្វាយបង្គំក្រុងទសភក្ត្រា ក្រុងទសមុខមារបានឃើញហើយថា កូនពោសព្រះបិតា ទ័ពមនុស្សាលើកមកទៀតហើយ ហនុមានទូលថាទុកងារឱ្យខ្ញុំកុំព្រួយព្រះទ័យព្រះបិតា ថាហើយថ្វាយព្រះបង្គំលា កេណ្ឌពួកយក្សាមកច្រើនក្រៃ ចេញចាកហោះសំដៅត្រង់អង្គព្រះរាមា ដល់ហើយចូលជិតទល់ទ័ពគ្នា ព្រះនារាយណ៍រាមាលើកទ័ពថយ កាលណោះពលស្វារត់រចល់ ព្រះនារាយណ៍រាមានូវព្រះលក្សណ៍ ពិភេកអសុរា ដើរជាក្រោយទៅកាន់ស្រុកសមរភូមិជ័យកែវមរកត ដល់ហើយព្រះអង្គគង់ជាសុខសាន្ត ។ ថ្លែងពីរាជក្របីស្រីពានរស្វាសសុទ្ធ បរពលយក្សាចំហុតវិលវិញថ្កាន ចូលទៅកាន់ក្រុងលង្ការាជបុរី ថ្វាយបង្គំបិតាដូចសព្ទដង ទូលព្រះអវិពានថា ព្រះបិតាកុំបារម្ភ ព្រះរាមព្រះលក្សណ៍មនុស្សាតាំងពីថ្ងៃនេះតទៅ



ស្តេចមិនហ៊ានលើកទ័ពមកទៀតឡើយ ។ រីពួកសង្គ្រាមជ័យទ័ពភ័យសារតាំងពីពេលនោះកាលណាក៏ស្ងាត់សូន្យ ។ និយាយពីរាជក្រីស្រីពានរស្វាសសុទ្ធ ទៅទូលក្រុងរាពណ៍ព្រះបិតាថា ទ័ពនេះស្ងាត់បាត់ជាយូរហើយ មិនមានទ័ពនរណាចូលមកទៀតឡើយ ខ្ញុំសូមថ្វាយបង្គំលាព្រះបិតា ទៅរកគ្រូអាចារ្យនឹងបួសនេន កាលណោះក្រុងទសភក្ត្រាថា បើបាចង់ទៅបួស ត្រូវទៅបួសនឹងឥសីកាឡៃយកោដ្ឋ សហនុមានបានលាព្រះបិតា ក៏ហោះយាត្រាដល់អាស្រម ដល់ហើយក្រាបថ្វាយព្រះបង្គំ ។ កាលណោះ ឥសីកាឡៃយកោដ្ឋ ដាក់ភ្នែកក្រឡេកយល់ឃើញស្វាសឥសីសួរថា ស្វាសឯងទៅណា សហនុមានថា ព្រះបិតាលោកប្រើខ្ញុំមកសុំគ្រូអាចារ្យបួសជានេន ឥសីកាឡៃយកោដ្ឋសួរថា ព្រះបិតាឯងឈ្មោះអ្វី សហនុមានក៏ប្រាប់ថា ព្រះបិតារបស់ខ្ញុំ ក្រាបថ្វាយព្រះបង្គំ ឈ្មោះក្រុងរាពណាសួរ ឥសីកាឡៃយកោដ្ឋក៏ត្រេកអរ បំបួសស្វាសឱ្យកើតនេនហនុមានបានបួសហើយ អភិប្រាយដោះស្រាយត្រង់រឿងចម្បាំងពិតពុទ្ធដីកាថា ព្រះនារាយណ៍រាមាស្តេចថ្លែងសរ ត្រូវក្រុងរាពណាសួរ រុះដូចក្រឡាសំណាញ់ ត្រូវរស់រោមសាច់ឆ្អឹងឆ្អែង ហេតុអ្វីក៏ពុំក្សិណក្ស័យ ឥសីកាឡៃយកោដ្ឋក៏ប្រាប់ថា នេនឯងកុំសង្កា រឿងត្រង់ណោះ ក្រុង

ទសមុខហាររអស៊ុរី ដកដួងកែវផ្ញើនឹងអញ សរព្រះនារាយណ៍រាមាត្រូវរុះដូចក្រឡាសំណាញ់ ចេញទៅច្បាំងថ្មីទៀត មុខថ្មីចែស ក្រុងរាពណ៍មិនក្ស័យ ច្បាំងប្រាំពីរយប់ប្រាំពីរថ្ងៃមិនក្ស័យប្រាណ បើត្រូវសាច់ស្ងួតត្រង់ណាក៏ផ្សំបានកើតជារូបយក្សាដូចដើមវិញ ។ រាជក្របីស្រីពានរស្វាសសុទ្ធបុត្រព្រះពាយ សេនាអង្គព្រះនារាយណ៍ ទៅបួសនេននឹងឥសីកាឡៃយកោដ្ឋ បញ្ឆោតយកដួងកែវរាពណ៍ ដល់ពេលនោះសួរថាលោកគ្រូអាចារ្យ ខ្ញុំនៃដែលបានឃើញដួងកែវទេ ដួងកែវព្រះបិតា តើល្អយ៉ាងណា មានរូបរាងពណ៌សម្បុរដូចម្ដេច ឥសីកាឡៃយកោដ្ឋ កាលណោះក៏បានស្ដាប់នេនថាដូច្នោះហើយថា អើអ្នកនេនទៅកកាយក្រោមជើងក្រាននោះ នេនហនុមានក៏បានទៅកកាយក្រោមជើងក្រាន បានកាលណោក៏ភ្លឺថ្លាពេញព្រះអាស្រម ពេញព្រះអាស្រមដូច្នោះហើយ ក៏ថ្លារុងរឿងណាស់ថា យី ថ្លាល្អណាស់ មិនដែលបានឃើញដួងកែវ យីដួងកែវព្រះបិតានេះថ្លាល្អណាស់ មានពណ៌សម្បុរភ្លឺពេញព្រះអាស្រម បើដូច្នោះហើយ យើងនិយាយពីបុត្រព្រះពាយ សេនាអង្គព្រះនារាយណ៍រាជាក្របីស្រីពានរស្វាសសុទ្ធ ក៏និម្មិតជាដួងកែវមួយដាក់នឹងបាតដៃ ដួងកែវក្រុងទសមុខមារនោះ យកមកបៀមនឹងមាត់ ដាក់នឹងបាតដៃហើយ



ថា យីគ្រូអាចារ្យ ខ្ញុំមិនហ៊ានកាន់យូរទេ ល្អថ្លាភ្លឺខ្លាំងណាស់ លោកគ្រូអាចារ្យ ខ្ញុំសូមប្រគេនលោកគ្រូអាចារ្យ នេនអើយ នេនយកទៅកកាយកប់នៅក្រោមជើងក្រានវិញទៅ យកទៅកកាយកប់ក្រោមជើងក្រានដួងកែវនោះ ដួងកែវនិម្មិតកាឡាឱ្យដូចជាដួងកែវព្រះបិតា ដួងកែវទសមុខហារយកមកបៀមនឹងមាត់ ដូច្នោះហើយនេនក៏ថ្វាយបង្គំគ្រូអាចារ្យឥសីកាឡៃយកោដ្ឋ ថាខ្ញុំគ្រប់ប្រាំពីរថ្ងៃហើយណា ឥឡូវនេះព្រះវររាជបិតាក្រែងមានទ័ពសឹកសាមសង្គ្រាមជ័យ ទ័ពមនុស្សាចូលមកវាយក្រុងលង្កាខាស់ខឹមបូរី បើដូច្នោះហើយខ្ញុំសូមលាលោកតាសឹក នេះឥសីកាឡៃយកោដ្ឋកាលណោបើឱ្យនេនសឹកដូច្នោះហើយថា អើនៃបាហនុមាន សហនុមានរងទៅជួយធ្វើទ័ពខាងទសមុខហារព្រះបិតារបស់បា ហើយហនុមានបានស្ដាប់ហើយ ក៏ថ្វាយបង្គំព្រះឥសីកាឡៃយកោដ្ឋ ក៏ហោះស្លឹងស្ លៅសំដៅក្រុងលង្កា ខាស់ខឹមបូរី ដល់ហើយក៏ឡើងទៅថ្វាយបង្គំក្រុងទសមុខមារថាខ្ញុំក៏បានទៅបួសនេនបានប្រាំពីរថ្ងៃហើយ លាលោកគ្រូសឹកក្រែងមានទ័ពសឹកសាមសង្គ្រាមជ័យទ័ពភ័យសារមកពីណា នេះខ្ញុំមកក្រាបទូលព្រះបិតា ។ ក្រុងទសភក្ត្រា កាលណាបើបានស្ដាប់ដូច្នោះហើយ ថាអើស-

ហនុមានរើយទៅគង់លើប្រាសាទ ដែលឥន្ទជិតនៅ ស្រីស្នំក្រមការព្រាំពាន់ឆ្នៀងប្រាំពាន់ស្នាំ តែងនឹងហែរឯមអមរក្សា ហើយបំរើបាឯង ។

៦៦-ពេលនោះមួយទិវាទៀត សហនុមារក៏បានមកប៉បហ៉ាយថ្វាយបង្គំក្រុងរាពណាសូរ ថាព្រះនារាយណ៍រាមាព្រះអង្គពូកែណាស់ ប៉ុន្តែខ្ញុំព្រាស់ចាប់បាន ចាប់បាននោះចាប់បានតែបីដងទេ បើខុសរំពីបីដងនោះតែខ្ញុំលែងចាប់បាន ឱព្រះរាជបុត្រកូន ព្រះរាជបុត្រចាប់បាន ? ថាចាប់បាន ឱបើដូច្នោះចាំចាប់ឱ្យព្រះរាជបិតា មានមួយទិវាទៀត ព្រះបិតាបររាជរថ ទៅច្បាំងទៅតតាំងនឹងព្រះនារាយណ៍រាមា ។ ព្រះនារាយណ៍រាមាបានមួយទិវាទៀត ក៏បានបររាជរថមកច្បាំងដូច្នោះហើយ ក្រុងរាពណាសូរក៏បររាជរថទៅទល់មុខគ្នា ហើយវាជាក្របីស្រីពានរ ស្វាសសុទ្ធបុត្រព្រះពាយ ចូលមកថ្វាយបង្គំទសមុខមារថា ព្រះបីតាចាំចាប់ណា ខ្ញុំទៅចាប់ព្រះរាមឱ្យ កាលណោះព្រះនារាយណ៍លោកក៏ខន្តីសច្ចាគ្មាននិយាយាអ្វីទេ រាពណ៍ធ្វើដូចម្តេចក៏ធ្វើចុះ ហនុមានធ្វើដូចម្តេចក៏ធ្វើចុះ ហនុមានស្ទុះភ្លែតពីព្រះរាជរថរាពណ៍ទៅចាប់ព្រះនារាយណ៍រាមា ចាប់ហុចទៅរាពណ៍ ព្រះបិតារអសុរាខ្ញុំចាប់ព្រះរាមបានហើយ ៗ ក្រុងរាពណាសូរមុខដប់ដៃម្ភៃ ភ្លោះហើយវាឱបទាំងដៃម្ភៃ វាខំឱបហើយរឹត ព្រះបិតា



អសុរាជាប់ហើយព្រះបិតាអសុរា ជាប់ហើយ ព្រះរាជបុត្រកូន មិនមែនទេដឹង ខំៗចាប់ឱ្យជាប់ ថាជាប់ហើយព្រះបិតាចាប់ជាប់ហើយ មិនមែនទេដឹង ថាជាប់ហើយ អើបើដូច្នោះខ្ញុំដកដៃ ហនុមានដកដៃភ្លាម ព្រះរាមផ្លូចទៅគង់លើព្រះរាជរថដូចដែលវិញ យីបិតាអសុរា បិតាអសុរាប្រហែសការរឺដល់ម្លេះ នៃនៅតែពីរដងទៀតទេ នៅតែពីរដងទៀតទេណាពេរ្យវខ្ញុំចាប់បានតែពីរដងទៀតទេណោ ថាហើយហនុមានស្ទុះភ្លែតទៅចាប់ម្តងទៀត ចាប់បានហើយឱបជិតហុចទៅរាពណ៍ រាពណ៍ដៃម្ភៃមុខដប់ វាស្រែះដៃទាំងម្ភៃ ដៃទាំងម្ភៃវាស្រែះជិត គ្មានចន្លោះ វាសុត្ធតែដៃរាពណ៍វាខំឱប ខំឱបដូច្នោះហើយហនុមានថា បិតាអសុរាជាប់ហើយបិតាអសុរាថាជាប់ហើយ ជាប់ហើយកូនជាប់ហើយ នៃក្រែងមិនជាប់ដូចមុនទៀត ជាប់ហើយកូន ក្រែងមិនជាប់ដូចមុនដូចក្រោយខ្ញុំមិនដឹងទេ ដូចខ្ញុំទូលព្រះបង្គំស្រេច ខ្ញុំចាប់បានតែបីដងទេ ថាហើយបាហនុមានដកដៃ ព្រះរាមផ្លូចទៅគង់លើព្រះរាជរថដូចដើមវិញ បើព្រះបិតាអសុរា បិតាអសុរានៅតែមួយដងទៀតទេបិតាអសុរា ហនុមានចាប់ទៀតចាប់ព្រះរាមលោកអស់ស្មៀត ចាប់ហុចទៅរាពណ៍ រាពណ៍វាឱបទាំងដៃ វាឱបទាំងជើងវាឱបទាំងក សព្វសុទ្ធតែដៃរាពណ៍ាចាក់ស្រែះកណ្តោញទាំងអស់ រាជក្របីស្រីពានរស្វាសសុទ្ធបុត្រព្រះពាយ សេនាអង្គ

ព្រះនារាយណ៍ថា ព្រះបិតាអសុរាជាប់ហើយ ថាជាប់ហើយ នៃម្តងនេះ ជាទីបណ្តាច់ណោ៎ បើជាប់ជាប់មែនទែនណោ៎ តែជាប់មិនមែនទេបង់ គំនិតហើយពេលនេះបង់គំនិតហើយ ជាប់ហើយព្រះបិតា កូនជាប់ហើយ ថាតែប៉ុណ្ណោះហនុមានហុចទៅរាពណ៍ រាពណ៍ស្រែះកណ្តាញ់ ស្រែះ បើយស្រែះទៀត ខ្លួនព្រះរាមមួយមូល ឃើញតែដៃយក្ស ទាំងអស់វាឱវាវិព ហនុមានដកដៃ ដកដៃភ្លាម ព្រះរាមភ្ញែត ទៅគង់រាជរថដូចដែល ព្រះបិតាអសុរា ៗ នៃ! ពេលនេះហើយព្រះបិតាអសុរា ថាតែដូច្នោះវាទៅគង់លើព្រះរាជរថព្រះរាម ទៅអង្គុយលើរាជរថព្រះរាម ខ្ទាក់ដួងកែវអសុរា មើល មើលមកណោះ មើលមកណោះ កើរ្តណោនេះ ដួងកែវនរណានេះ ក្រុងរាពណាសូរ កាលណាបើបានឃើញដួងកែវអាត្មាដូច្នោះហើយ ក៏ថា ឱកូនអើយ កូនឱ្យមកបិតាមក ឱ្យព្រះបិតាមកកូន ទេអញមិនឱ្យទេ អញមកនេះ អញមកយកក្បាលអាឯងនេះឯង អញមិនឱ្យទេ ម្លោះហើយរាពណ៍មុខវាដប់ មាត់វាដប់ ដៃវាម្ភៃ បើវាយំកាលណាផ្អើលទេវបុត្រ ទេវតា ក្នុងសួគ៌ាល័យទាំងអស់ ម្លោះហើយក៏រាពណ៍អង្វរ កូនអើយ កូនឱ្យមុកព្រះបិតាមក ព្រះបិតាស្មានថាកូនចិត្តត្រង់នឹងព្រះបិតា ប្រាសាទមាសដែលឥន្ទជិតគង់ បិតាឱ្យទៅកូនគង់ ស្នំដែលឥន្ទជិតត្រង



ព្រះបិតាឱ្យទៅត្រង កូនអើយ កូនឱ្យមកព្រះបិតា នែអសុរា អញមិនឱ្យទេ អញមកនេះ អញមកយកក្បាលអាឯង ថាតែប៉ុណ្ណោះ ព្រះនារាយណ៍រាមាលោកក៏ហានព្រះឱង្ការថា អើក្រុងរាពណាសូរ ឯងអស់ប៉ុណ្ណោះហើយ ឯងអស់ប៉ុណ្ណោះហើយវាហ៊ីចុះ អញបញ្ឈប់សរ មិនទាន់ឱ្យក្ស័យមរណាភ្លាមទេ អញអត់ឱ្យប្រាំពីរថ្ងៃ ឱ្យឯងផ្តាំងមឿងប្រាំពីរថ្ងៃ ម្លោះហើយក្រុងកោរអសុរី វាស្រែកយំខ្លាំងក្រៃ បើវាយំតិច ទេវបុត្រទេវតាក៏ផ្អើលតិច បើវាយំខ្លាំង ទេវបុត្រទេវតាក៏ផ្អើលខ្លាំង ទូញទ្រង់ព្រះកន្សែងផ្អែងសោកសោកា យកនាងមនោគិរី អគ្គីនាគ មន្ទោគិរីមកឱបអូនអើយប្អូន បងក្ស័យមរណាចោលប្អូនហើយ មនោគិរីអគ្គីនាគប្អូនអើយ អូននៅរក្សាកូនចៅឯក្រោយ នាងសោយរាជ្យចុះ ក្រុងលង្កាខាស់ខឹមបូរី ក្រុងអសុរីក៏សឹងដ៏យំ សោកស្តាយអគ្គមហេសីបីអង្គា

រាពណ៍ផ្តាំប្រាសាទ (ស្មូត) ឱះឱប្រាង្គប្រាសាទផើតឆាយ ប្រាសាទនៅអាយនៅអែរបន្ថិតចៅ ឱះឱស្រីស្នំក្នុងក្រៅ ស្នំអើយតាល់ណ៉ៅ កុំឱ្យនែនាងកើតទុក្ខ ឱះឱបន្ទោគិរី បងក្ស័យមរណាចោលមាសមិតទាំងបីអង្គាហើយ នៅសព្វាហ៍ទីវាជាប្រាំពីរថ្ងៃ បងនិងក្សិណក្ស័យចោលមាសបិត្តប្រលើង, ថាហើយក៏ពក់ព្រះឱរា សោយសោកាសូន្យសព្ទសន្ធប់លង់ ក្នុងក្រុងលង្កាបូរី គ្មាននរណាទំនេរមួយឡើយ ដៃមួយគក់តទ្រូង ដៃមួយក៏ទូញយាក់លើត្បូងសិរសា ទូញយំរង្វរធំ នគរនោះឧបមាបីដូចអ្វីឡើយ ដូចជា

នគរខ្មោច ប៉ ្លោះហើយក្រុងរាពណាសូរ ក៏សឹងរ៉ែស្រែកយំខ្លាំងក្រៃ ឮរំពូររំសព្វទៅទិសទី ទិសទូទាំងប្រាំបី ទេវបុត្រទេវតា បើរាពណ៍វាថ្ងូរខ្លាំងពេលណាទេវបុត្រទេវតាក៏សើងភ្លើលខ្លាំង បើរាពណ៍វាថ្ងូរតិច ប៉ ្លោះហើយទេវបុត្រទេវតានោះ ក៏មិនសូវតក្កមាទេ ញាប់ញ័រស្ងួតិរាលបំប្រាំមួយជាន់ ព្រៃហេមពាន្តក៏សឹងរ៉ឺស្វិតស្លឹក ។

រាពណ៍ថ្ងៃព្រៃ (ស្ទូត) ពពេលស្ទាយរ៉ែល បក់ពាយ បក់ពរព្រសាយព្រស៊ុំសាខា ផ្កាត់ចោះ ប្រកោះខ្លាយខ្លា ប្រប្រកទ្រៀលស្វាររលៀក ឃ្លាយរ៉ៃ្ល កែវកោពល្បៀបលោព ឡាំងដៃ ព្រឹងព្រួសពោនពៃព្វចពពាលវ៉ៃ ។

រាពណ៍ថ្ងៃត្រី (ស្ទូត) រាហ៊ូ ត្រីពោក្លាំងហាយ កញ្ជុះព្រុះព្រាយ អណ្តែងបាំងាកល់រាំងព្រឹមព្រាញ៉ររៀលលញ្ចុចព្រា កញ្ញូកឆ្លាំងរវា បរ៉ូបែលវិស័យ កន្ត្រប់ត្រមៃប្រឡៃហ្គូងរុក សប្រឹងថ្លាប់នៅខាងចក ឃើញត្រីតួចមកសំយោរបញ្ចិត ព្រុះព្រាយសណ្តាយក្រពាក់ កំករ ខ្ទាន់នៅតួច ស្ទុះស្ទាក់យាលបញ្ចហ្វា ។

រាពណ៍ថ្ងៃសព្វ (ស្ទូត) ហរព្រាជូរហៀ កលំលាកកាកី លោតលោលសព្យាកទៀងទេហើរឃើខ្នាតខ្នាញ់ រកឈើទៀតវិញ ទង់ទាបចុះទំ កាំឈើពាក់ ព្រលក់ព្រស៊ុំសារិកាកែវទំលេងលើរុក្ខា សត្វសេកផ្ទែកផ្ទោះរៀងឆាបមកទំ ផ្សៀងថ្លាប់នៃបនឹងសត្វសារិកា ។ ក្រុងទសមុខមារចាប់តាំងពីថ្ងៃនោះតទៅ ក៏សឹងរ៉ឺឈឺខ្លាំងក្រៃ រាពណ៍ក៏សឹងរ៉ឺស្រែកទួញញូរយំ ស្រែកយំហើយក៏សឹងរ៉ឺយកអគ្គមហេសីទាំងបីអង្គា គឺនាងមណោតិរី មន្ទោតិរី អគ្គីនាគ ថាអូនអើយអូន បងក្សិណក្ស័យប្រល័យជីវិតពិតហើយ នៅតែប្រាំពីរថ្ងៃទៀតទេ បងនឹងលាមាសមេក្ស័យព្រះជន្ម ក្សត្រិយ៍បីអង្គាថ្វាយបង្គំ ក្សត្រាព្រះស្វាមី ក្សត្រិយ៍នាងក៏សូន្យសោកសន្លប់លង់ ឱព្រះចោមចៅចក្រពង្ស បើព្រះអង្គ



ក្សិណក្ស័យជីវិតចោលប្អូនហើយ ក្រុងលង្កាបូរីនេះក៏សូន្យហើយ ។ ឈប់ស្ទេះត្រង់នេះសិនបិនចរចា

និយាយពីព្រះនារាយណ៍រាមាទៅដល់នគរហើយ ប្រាប់ថាពិភេកអសុរា ពិភេកអសុរាប្អូនអើយ អូនឯងទៅមើលបងឯងផង បងឯងអស់ហើយក្ស័យព្រះជន្មហើយ នៅតែសត្តទិវាសប្តាហ៍ទិវា ចុះសត្តទិវានោះប៉ុន្មានថ្ងៃ ថាប្រាំពីរថ្ងៃ ក៏នឹងក្សិណក្ស័យព្រះជន្ម ពិភេកអសុរាកាលណោបើបាន ស្តាប់ព្រះនារាយណ៍រាមា ប្រាប់ការខុសត្រូវដូច្នោះហើយ ព្រះអង្គក៏លីលា បានដល់មកក្រុងលង្កាបូរី ឃើញក្រុងរាពណ៍អង្គុយលើបល្ល័ង្កទីនាំងខ្ពស់ ឃើញពិភេកមកដូច្នោះ ក៏ចុះពីរត្នបល្ល័ង្កថា ឱអូនអើយអូនៗ មកសោយរាជ្យចុះ បងអស់ប៉ុណ្ណោះហើយ បងក្ស័យព្រះជន្មហើយ បងនៅតែប្រាំពីរថ្ងៃទេ បងនឹងក្សិណក្ស័យមរណា ពិភេកអសុរាអូន បើអូនសោយរាជ្យហើយ មើលអគ្គមហេសីតូចអគ្គមហេសីធំស្រីស្នំក្រមការចែកបងផងឱ្យត្រួតត្រាមើល ពិភេកនោះ ព្រះនារាយណ៍ឱ្យទៅសោយរាជ្យ នៅនគរក្រុងលង្កាបូរី ក្រុងរាពណ៍អសុរី កាលដើមនឹងនឹងពិភេកសា ដល់បៀតនឹងក្ស័យជន្មា ទៅកាលណោមកកៀកកប្អូនយំ លុះគ្រប់សត្តទេវ៉ាកាលណោ សហានុម៉ានស្វាសសុទ្ធបុត្រព្រះពាយ

សេនារង្គព្រះនារាយណ៍ ក៏យកដួងកែវក្រុងរាពណាសូរ មកញីនឹងពាត ដៃក្រុងរាពណ៍ក្សិណក្ស័យសូន្យរូបសោះសូន្យ ។

៦៧-ម្លោះហើយព្រះនារាយណ៍រាមា ក៏ឱ្យរាមាត្រទៅហែរក្ខរាជ-សិតា រំពីររសោករុងពុំរួយកមកហើយ យកនាងស្រីសុជាតា បកផ្ញើ នឹងពិភេកសា នាងសិតាកែវកល្យាណ ព្រះរង្គក៏ឱ្យពាវពលសកល យោធាដង្ហែទៅរភិសេកនៅនគរស្រីរអយុធ្យា ។

៦៨-និយាយពីសហស្សន័យន៍ សហស្សន័យន៍កាលណាបើដឹងថា ក្រុងរាពណាសូរក្សិណក្ស័យដូច្នោះហើយ សហស្សន័យន៍ក៏ហោះទៅឋាន ព្រហ្មលោកឋានព្រហ្ម ធ្វើជាព្រះព្រហ្ម សហស្សន័យន៍ហោះទៅកើតឯឋានសួគ៌ ផ្ដើលទេវបុត្រទេវតា សហស្សន័យន៍មិនដែលបានឈប់បានឈរ ឯសហ-ស្សន័យន៍នោះដំណើរយ៉ាងដូចម្ដេច នឹងក្រុងរាពណាសូរ ថាបងរាពណ៍ ដឹងថាប្អូនវាក្ស័យកាលណាវាស្រែកយំ ។ និយាយពីរេហ៍ពល សកល យោធា នៅនគរលង្កាភជបូរី កាលណោះកូនរាពណ៍ឈ្មោះវិយរេត ។ វិយរេតនៅតូចដើរលេង កំពុងតែដើរលេងហើយវាយកូនគេយំ មេនុំ មេនាង ទាំងអស់ថា យើអាកូនឥតឪ អាកូនឥតឪនេះកាចណាស់ កុំឱ្យ ទៅដើរលេងនឹងវា នេះអាកូនឥតឪនោះ វិយរេតកាលណាបើបានមក



ជួបមុខមាតាកាលណោក៏សួរថា មាតានាងមណោគិរី ព្រះបិតាខ្ញុំឈ្មោះអ្វី ខ្ញុំថាពិភេកអសុរានេះហើយព្រះបិតារបស់ខ្ញុំ មិនមែនទេៗ កូនមិនមែនទេ ឪពុកមាទេៗ មកពីពិភេកសានេះឯង បានជាយើងក្សិណក្ស័យអស់ពូជ ពង្សវង្សាអស់ទាំងប្រាំពីរសន្តាន ពិភេកអសុរាចូលទៅខាងទ័ពមនុស្សា មកបំផ្លាញយើងពូជពង្សយក្សយង់ ក៏ក្សិណក្ស័យអស់ប្រាំពីរសន្តាន វិយរេត ក៏ទូលព្រះកន្សែង ឱព្រះវររាជបិតា សព្វថ្ងៃខ្ញុំស្មានថាពិភេកអសុរានេះ ឯងជាបិតា មិនមែនទេកូន មិនមែនបិតាអ្នកទេ ឱព្រះមាតាបើចុះពូជពង្ស វង្សាយើងនៅឯណោខ្លះ ឱកូនអើយកូន នៅនគរមាលីវ័ន ពូជពង្សវង្សានោះ ឈ្មោះថាវ៉ចក្រក្រវាត់ថាវ៉ចក្រក្រវាត់នោះនៅនគរ មាលីវ័ននោះកូនទៅមិន បានទេ បើកូនទៅបាននោះ និមិត្តជាអង្គព្រះបិតាទើបកូនទៅបាន ម្លោះ ហើយវិយរេត ក៏និមិត្តខ្លួនជាព្រះបិតាយ៉ាងដូចម្ដេច ខ្ញុំមិនដែលឃើញព្រះ បិតាសោះ ឃើញតែព្រះមាតា កូនអើយកូនព្រះបិតារបស់អ្នកមុខដប់ដៃម្ភៃ មានគុជដីរ៍.........................................................................................

ទេវបុត្រទេវតាសូគ៌ា ក៏រាបដប់ប្រាំមួយជាន់ គ្មាននរណាទើសមុខបាន ទេ បើដូច្នោះខ្ញុំនិម្មិតប្លែងកាយាឱ្យដូចជាអង្គព្រះបិតារបស់ខ្ញុំ និម្មិតទៅ មុខដប់ដៃម្ភៃ មានគជដីរ៍ដុះកណ្ដាលដើមទ្រូង យីព្រះមាតា ខ្ញុំនិម្មិតនេះ

សុទ្ធព្រះបិតាទេ កូនអើយកូន កូននិម្មិតនេះវាសុទ្ធណាស់ៗ បើដូច្នោះកូនហោះទៅនគរមាលីវ៉ន់ចុះ ។ វ៉ាយវេតក៏ហោះទៅនគរមាលីវ៉ន់ ហោះទៅដល់ ថាវចក្រវ៉ាត់ឃើញ យីឥន្ទជិតអសុរាឬអ្វី ឬក្រុងរាពណាសូរថាខ្ញុំមិនមែនក្រុងរាពណាសូរទេ បើដូច្នោះឥន្ទជិតអសុរាឬអ្វី ថាទេខ្ញុំមិនបានឥន្ទជិតអសុរាទេ ខ្ញុំនេះពេញោះហៅថាវ៉ាយវេត អើវ៉ាយវេត អាឯងកូនអ្នកណោ ថាកូនក្រុងទសមុខការ រាពណោសូរ អាឯងនេះមុខដប់ដៃម្ភៃ ដូចជាពិពាររបស់អាឯង យ៉ាងដូចម្តេចទៅក្រុងមហេសក្រ្ត ហើយបង្ក្រាបព្រះរាមព្រះលក្សណ៍ហើយយ៉ាងដូចម្តេចទៅ ម្ចាស់អើយក្រាស់ ក្ស័យអរណោ ពោកទព្វមហាសមុទ្រអស់ សុទ្ធតែក្បាលយក្ស សុទ្ធតែក្បាលរាជសីហ៍ សុទ្ធតែក្បាលដំរី ក្បាលរមាសទាំងអស់ ក្ស័យទាំងអស់ហើយ ចុះឥន្ទជិតអសុរានោះក៏ក្សិណក្ស័យ ក្រុងទសមុខមារនោះក៏ក្សិណក្ស័យ វិរុលមេឃវិរុលចំបាំងក្សិណក្ស័យ យីត្រីមុខមហាត្រីកាយក្សិណក្ស័យអស់ហើយគ្មានអ្នកណានៅទេ សព្វថ្ងៃគឺយកពិភេកអសុរាមកឱ្យសោយរាជ្យ ឱ ទៅអញទៅជួយ បើដូច្នោះទៅវ៉ាយវេត រួចក៏ហោះឆ្លងស្ទឹងអូ ឆ្លងវាលស្មៅឆ្លងកាត់សំដៅបីខែដល់ ម្ល៉ោះហើយក្រុងយក្សយង់ ក្រុងអសុរាក៏ហោះមកដល់ក្រុងលង្កាបូរី ក្រុងអសុរាថាវចក្រវ៉ាត់ យកសរនាគបាសបាញ់



ពិភេក ឱអានេះអាពិភេក អាថ្លើមខ្មៅ អាឯងអាក្បត់ អាចូលខាងទ័ពមនុស្សា ឥឡូវនេះអាឯងមកសោយរាជ្យក្រុងលង្កា ខាស់ខឹមបូរី ក្រុងអសុរីបាញ់សរភ្លែត បាញ់សរនាគបាស កើតជានាគរុំពិភេក ពីជើងទាល់តែដល់ករ សុទ្ធតែនាគរុំទាំងអស់ ក៏ផ្អើលលាន់តែម្តង ថាវចក្រវ៉ាត់ក៏វិលទៅវិញ ផ្អើលរស់សេនារេហ៍ពលសកលយោធា មិនមានអ្នកណានៅបៀតឡើយ នៅតែនិលផាត់ ឱនិលផាត់ហោះទៅរកសហនុមាន ហោះទៅប្រាប់កេសរជម្ពូពាន ហោះទូលព្រះនារាយណ៍រាមាឯមេឃាត់ហោះមកដល់នគរស្រីអយុធ្យា ដូច្នោះហើយ ក៏ឡើងទៅម៉ឺបហោរាថ្វាយប្រផ្នូល ព្រះនារាយណ៍រាមា ថាបានយក្សមួយធំណាស់មួយចំហៀងមេឃា ឈ្មោះថាវចក្រវ៉ាត់ នៅនគរមាលីវ៉ន់ មកបាញ់មាពិភេក កើតជានាគរុំពីជើង ទាល់តែដល់កសុទ្ធតែនាគរុំ មិនដឹងជាយ៉ាងណាទេ ព្រះនារាយណ៍រាមាក៏បរពល បរពលស្វាប៉ែតសិបអក្ខោជិនុំអស់ពួកកងសេនាទាំងពីរដណ្តប់អង្គប្រាណដល់មកហើយ ឃើញពិភេកអសុរាត្រូវសរនាគបាសរុំអំពីជើងទៅដល់ក ព្រះនារាយណ៍រាមាសរសេរអក្ខរា បិតនឹងចុងសរថ្លែងសរបាញ់ទៅឋានសួគ៌ាល័យ ឱ្យបានដល់ទៅព្រះបាទឡីសតីដូចសេចក្តីប្រាថ្នា បាញ់សរអារិទ្ធិចាន់ផ្លាញផ្លា បាញ់ភ្លែតទៅព្រះបាទឡីស-

ពីចាប់ជាប់ ចាប់សរជាប់ថាព្រះរាមព្រះលក្សណ៍មនុស្សាមានក្រហ៊ៃយ១ ថាវិចក្រវ៉ាត់បាញ់សរនាគបាស រុំអំពីជើងទើសតែដល់ក ព្រះបាទឡ៉ូសតីស្តេចគ្រុឌ ថានែព្ភាយើងរ៉ុន្ធានររក្ខោចុះទៅឱ្យឆាប់ជាប្រញាប់ ឮពរិពិភេក ត្រូវសរនាគបាសហើយ សុទ្ធតែគ្រុឌ គ្រុឌហោះមកពេញកណ្តាប់ហ៊ៃយោ ថាតែគ្រុឌបោះបកនាគវាលោត គ្រុឌខ្លះចាប់បាននាគយកមកខាំ គ្រុឌខ្លះចាប់ទាញនាគ ម៉្លោះហើយនាគខ្លះក៏សើងរត់ចូលមហាសាគរ នាគខ្លះជ្រែកព្រៃហេមពាន្ត នាគខ្លះជ្រែកដោយនៅរូងភ្នំ សឹងដ៏ខ្លាចគ្រុឌ ពិភេកអសុរាក្រោកឡើងដឹងខ្លួនប្រាណដូច្នោះហើយ ថាអើរឿងនេះតើហេតុមកអំពីអ្វី ថាហេតុមកអំពីវីយវេត ទៅយកថាវិចក្រវ៉ាត់ ពេចាប់វីយវេត ចាប់វីយវេតបានយកទៅសម្លាប់ សម្លាប់ក្សិណក្ស័យប្រល័យជីវិត ទៅដូច្នោះហើយ ទើបលើកទ័ពទៅនគរមាលីវ័ន ទៅនគរថាវិ-ចក្រវ៉ាត់ ដែលលើកទៅច្បាំងនោះ ទ័ពស្វាច្រើនសល់ ទៅដល់កក្រើកនគរថាវិចក្រវ៉ាត់ ឯនគរថាវិចក្រវ៉ាត់នោះ មានខ្សាច់ហូរនៅខាងក្រោម នរណាចូលទៅរួចទេនគរនោះ ម៉្លោះហើយក៏លើកទ័ពទៅវាយលើកទៅវាយនគរថាវិចក្រវ៉ាត់ ថាវិចក្រវ៉ាត់តម្លើងអង្គប់ភ្នំ ពលស្វាដើរចូលទៅក្នុងអង្គប់ភ្នំ វាថ្លោះអង្គប់ភ្នំមក ធ្លាក់ទៅលើពលស្វា ងាប់



ពលស្វាប៉ែតសិបអក្ខោ ព្រះនារាយណ៍រាមាក៏ឆ្ងល់ណាស់ ថាអើពលពានរស្វាស ហេតុអ្វីក៏មកក្ស័យយ៉ាងនេះ យក្សវាតម្លើងអង្គប់ភ្នំ អង្គប់នោះធំ១ អង្គត់ហនុមានបាសុគ្រីព ថាព្រះអវតានកុំព្រួយព្រះទ័យ តាំងលើកភ្នំ លើកទៅឃើញពានរក្ស័យច្រើនក្រៃ ឱ្យអង្គត់ហោះទៅឋានព្រហ្ម ឱ្យទៅយកទឹកអម្រឹតព្រះឥន្ទ្រាមកស្រោចឱ្យពានរ ពានរក៏រស់ទាំងអស់ ស្រោចត្រូវមួយរត់មួយត្រូវពីររត់ពីរ ក៏រស់អស់ ពីដើមស្លាប់គំនរគរគរដូចភ្នំ នេះរស់អស់គ្មានសល់ ថាតែរស់អស់គ្មានសល់ហើយ កាលណោះថ្ងៃរសៀលជ្រៀលជ្រេទេរព្រះសុរិយា ដើរនោះគឺសុគ្រីព អង្គត់បាហនុមានចូលទៅ ក្នុងនគរថាវិចក្រវ៉ាត់ ហើយនិយាយពីបាវពលសកលយោធារបស់វា កាលបើឃើញស្វាធំ១ ប៉ុនភ្នំស្ពឹមស្ពៃ សង្ស័យណាស់ ស្វាមកពីណាក៏ធំ១ ខ្លាំងម្ល៉េះ រលាយប់នោះវាយាមនគរវា ចុះនរណាអ្នកយាមនគរ ថាយក្សជីវ្ហា អាយក្សជីវ្ហានោះ វាលេបនអណ្តាតគ្របនគរអង្គរបូរីទាំងអស់ យក្សជីវ្ហាវលេបនអណ្តាត លេបនបានគ្របនគរវាទាំងអស់ ។ ថាតែលេបនអណ្តាតគ្របអង្គរទាំងអស់យ៉ាងនេះទៅ និយាយពីសោបនក្លាមកពីលេងព្រៃ យីអ្វីក្រហាមម្ល៉េះ ភ្លើងឆេះនគរឬអ្វី ភ្លើងឆេះនគរឬអ្វី ភ្លើងឆេះនគរឬសឹកឈាមសង្គ្រាមជ័យ ទ័ពភ័យសារមកពីណាបាន

ជាក្របាបពេញនគរយ៉ាងនេះ ស្រាប់តែវាទាញកងចក្រមកចោល ចោលមកត្រូវអណ្តាតគ្នាវា ត្រូវអណ្តាតដែលល្បឿនគ្របនគរ នោះអោយក្សជីវ្ហាស្លាប់ពេលនោះ ដែលស្លាប់ពេលនោះទៅ ថាវចក្រវាត់ក៏បានដឹង ដឹងថា យក្សជីវ្ហាស្លាប់ដូច្នោះហើយ ថាវចក្រវាត់ដែលនៅក្នុងនគរហាលីវិននោះ ពេលនោះមារអង្គត់ ហនុមាន ពាសុគ្រីពឧត្តម តាំងសណ្តំយប់ឡើងសណ្តំ សណ្តំយក្សទាំងអស់ ដេកលក់ស្ងប់ស្ងាត់បាត់វិញ្ញាណដូច្នោះហើយ ដល់ពេលព្រឹកឡើងក៏ស្លូតទៅ ស្លូតទៅលែងស្គាល់ស្តីក្រោក បណ្តារយក្សដែលអ្នកដេកនៅខាងក្រៅប្រាសាទ · អ្នកយាមល្បាតក៏សឹងដំត្រូវសណ្តំ ពានរស្វាសទាំងអស់ ម្ល៉ោះហើយហនុមានថា ធ្វើដូចម្តេចបាអង្គត់ ឥឡូវយក្សវាដេកលក់អស់ហើយ គិតដូចម្តេចយើងគិតកោរក្បាលវាទៅ កោរក្បាលវាទៅខ្លែងជើងក្អែកខ្លះទៅ តាំងកោរក្បាល កោរក្បាលមិនថាពលថានាយ មិនថាបាវមិនថាព្រាវអ្វីទេ សូម្បីតែស្តេចយក្សឯណាក៏កោរក្បាលវាទាំងអស់ ដល់ព្រឹកព្រាងស្វាងព្រះបរមីតា មានស្រីស្នំក្រមការ ឡើងទៅគង់គាល់មហាយក្សថាវចក្រវាត់ ថាវចក្រវាត់ថាឃីនាង ពីដើមមិញរូបនាងល្អ ឥឡូវនេះនរណាមកកោរក្បាលនាងនោះ ស្ទាបទៅឃើញគេកោរក្បាល ខ្ញែងជើងក្អែក ឃីយល់ជាចម្លែក



ប្លែកណាស់មើលទៅថាឃីសិរិសាម្ចាស់ តើគេកោរ ស្ទាបទៅក្បាលឃើញគេកោរទាំងអស់ អ្នកណាក៏កោរ ១ កោរតែទាំងអស់គ្នា ក៏ថា ឱព្ធានពីណោទេ ច្បាស់ជាអាស្វាធំ កាលពីថ្ងៃល្ងាចនោះឯងវាមកកោរ ។ ក្រុងថាវចក្រវាត់ កាលណាបើដឹងថា គេកោរក្បាលអាត្មា នឹងស្រីស្នំក្រមការដូច្នោះហើយ ក៏ក្រេវក្រោធពិរោធសោះសា យក្សវាយស្គរទ័ពភ្ជុំកងសេនា ចាប់ពួកអាស្វាសយក្សឱ្យបាន គឺអង្គត់បាហនុមាន បាសុគ្រីពក្រុងថាវចក្រវាត់ក៏កេណ្ឌកងពួកយក្សយង់ក្រុងអសុរា ពួកពលបានដឹងពានព្ទកាលណោ ក៏ហោះមកអំពីព្រៃហេមពាន្តច្រើនត្រៀបត្រា ក្រុងថាវ-ចក្រវាត់ក៏មានព្រះឱង្ការទៅកាន់ពួកកងសេនាយក្សទាំងអស់ យើងទៅឡោមចោមចាប់ពានរស្វា ម្ល៉ោះហើយ លើកទ័ពគគ្រឹកគគ្រេកព្រៃសព្ទសត្វដទៃក៏តក្កមា រមាំងរមាសខ្លោងខ្លាក៏រត់ចោលកូនពីកន្លែង ក្រុងថាវចក្រវាត់ក៏លើកទ័ពមកឮសូរស័ព្ទ ដូចព្យុះឮដូចផ្គររន្ទះគគ្រាំងអា ពេលនោះពិភេកសា ក៏ថ្វាយបង្គំព្រះរាមាទូលថាក្រុងអសុរាលើកទ័ពមកហើយ ព្រះនារាយណ៍រាមាបានស្តាប់ពិភេកសាដូច្នោះហើយ ពុំយូរឡើយព្រះអង្គក៏ភ្ជុំពួកសេនាទាំងពីរដល្ហេប់អង្គប្រាណ , សុគ្រីពហនុមាន កេសរជម្ពូ-ពាន និលឯកនិលខាន់ និលផាត់ រួចបានហើយទើបលើកទ័ពទៅទល់មុខ

គ្នា ពលយក្សនឹងពលស្វាក៏ចូលចំបាប់ ចាក់កាប់សម្លាប់គ្នាច្រើនសល់ ថាវចក្រវាត់ក៏បានថ្លែងសរ មកចំព្រះនារាយណ៍រាមា សរយក្សាហួស ជ្រួសទៅព្រៃហេមពាន្ត ក្រុងយក្សាក្រេវក្រោធខ្លាំងក្រៃ យក្សបាញ់សរ ជ័យរេះកើតភ្លើង អង្គព្រះនារាយណ៍រាមាកាលណាបើឃើញដូច្នោះហើយ ព្រះអង្គក៏ទាញធ្នូសរថ្លា អារិទ្ធិចាន់ថ្លាញថ្លា បាញ់កើតភ្លៀងរំលត់ភ្លើង អសុរបារ ភ្លើងកងរត្តិរលត់ រម្លាប់អស់គ្មានសល់ ម្ល៉ោះហើយថាវចក្រ-វាត់ ក៏ថ្លែងសរនាគបាសមកថែមទៀត កើតជានាគពេញកណ្តាប់មេឃា អង្គព្រះនារាយណ៍រាមាឃើញហើយ ក៏ចាប់សរបាញ់ទៅទៀត ក៏កើតជា គ្រុឌចាប់នាគស៊ី សត្វនាគក៏ភ័យភិតរត់ជ្រកក្នុងរូងភ្នំ នាគខ្លះក៏ជ្រែកជ្រៀត ឆ្មៀតទៅនៅច្រករូងភ្នំ ខ្លះទៅនៅក្នុងមហាសមុទ្រធំ ក្រុងថាវចក្រវាត់ ក្រេវក្រោធខ្លាំងណាស់ដូចជាភ្លើង ម្ល៉ោះហើយបាញ់សរឱ្យកើតជាអាវុធ គ្រឿបគ្រា អង្គព្រះនារាយណ៍រាមាព្រះអង្គក៏ចោលចក្រ ចក្រមានឫទ្ធិ ខ្លាំងអស្ចារ្យ ដេញអាវុធយក្សាធ្លាក់ទៅក្នុងមហាសមុទ្រ ក្រុងថាវចក្រវាត់ ខ្ញាល់ណាស់ទាញដំបងពេជ្រគ្រីសុទ្ធតែភ្លើង ប្រុងមកវាយវាត់សំពង ព្រះ នារាយណ៍រាមាយកធ្នូសរ អារិទ្ធិចាន់រងវាយវាត់សំពងសងក្រុងអសុរាវិញ ថាវចក្រវាត់ តនឹងអង្គព្រះនារាយណ៍ក៏ចាញ់ដៃ ព្រះនារាយណ៍ក្សត្រ



ថ្លៃវាយចំអង្គអសុរា ហោះទៅកណ្តាលអាកាសាស្រទាប់មេឃា ពេលនោះ ថ្លែងពេលពេលសកលយោធា យក្សស្លាប់មរណាពេញមហាសមុទ្រធំពួកពានរ ស្វាសអានជ័យរំពោចគ្មានស្លាប់មួយ ហនុមានបារង្គត់បាសុគ្រីពកេសរ ជម្ពូពាន កាត់កកាត់ខ្លួនយក្សាបោះទៅកណ្តាលមហាសាគរ ឃុនល់ ឃុនមិល និលឯក និលខាន់ និលផាត់ កាន់ដំបងពេជ្រវាយបំបែកពលយក្សា យក្សស្លាប់មរណាអស់គ្មានសល់ កាលណោះ អង្គព្រះនារាយណ៍រាមា ស្តេចក៏ឆ្ងល់សួរពិភេកអសុរាថាប្អូនអើយ យក្សច្បាំងម៉ិញម៉ិញវាទៅណា ពិភេកអសុរាពន់ពួរឃើញហើយក៏ទូលថា យក្សាទៅបំបាំងខ្លួននឹងពពក ព្រាលយក្សានឹងលួចបាញ់សរមកឥឡូវ កុំព្រះអង្គមកបង្អង់យូរឡើយ ឱ្យ ឆាប់ថ្លែងសរអារិទ្ធិចាន់ឆាប់ៗទៅព្រះនារាយណ៍រាមាបានស្តាប់ពាក្យពិ-ភេកថាដូច្នោះហើយ ពុំយូរឡើយព្រះអង្គបាញ់សរអារិទ្ធិចាន់ត្រូវត្រង់ដើម ទ្រូងយក្សយង់អសុរា យក្សាក៏ធ្លាក់មកលើផែនដី ឮដូចភ្នំធំរណ្តំគ្នា ក៏ ផ្អៀងផែនដី ព្រះអង្គហូតព្រះខាន់ថ្លា អារផ្តាច់ស៊ុរ៉ងក្រុងអសុរី ក្រុងយក្ស អប្រិយក្ស័យមរណា ស្លាប់បាវពលទាំងអស់ក៏សោះសូន្យ ឥតមានយក្ស យង់ក្រុងអសុរា ពលទ័ពឯណាមកតនឹងព្រះអង្គទៀតឡើយ ព្រះអង្គក៏ លើកកងទ័ពវិលមកវិញ ពួកទ័ពសារក៏បានវិលចូលមកបុរី ។

៦៩-និយាយពីកូនឥន្ទជិតអសុរានាមឈ្មោះថា អាផៃណាសូរីវង្ស កើតមកថ្ងៃណាស្មានថាពិភេកអសុរាជាបិតា ចេញទៅលេងកាលណាមានស្រីស្នំប្រាំពាន់ឆ្វេងប្រាំពាន់ស្តាំ អាផៃណាសូរីវង្សស្រែកថា សប្បាយណាស់ ធម្មតាជាស្តេចចក្រ គ្មាននរណាសប្បាយប្រហែលយើង កាលនោះមានតាមាលីសូន នឹងនាងភីល្បៀងទាំងបួន ថ្វាយព្រះបង្គំសុំក្រាបទូល សប្បាយអ្វីប៉ុណ្ណេះ មិនថាសប្បាយទេ កាលព្រះបិតាម្ចាស់នៅសប្បាយជាងនេះ ព្រះបិតាម្ចាស់មានរិទ្ធណាស់ បើចេញទៅត្រង់ណាមានទេវតាហោះហែរ បើចេញទៅត្រង់ណាមានទេពអប្សរហោះហែរ អាផៃណាសូរីវង្សក៏បានស្តាប់តាមាលីសូននឹងសេនាទាំងបួន ថាដូច្នោះហើយមានព្រះឱង្ការថាតាអើយ ខ្ញុំមានបិតាឯណាទៀត ពិភេកអសុរានេះហើយបិតារបស់ខ្ញុំ មិនមែនទេម្ចាស់ នេះគឺពិភេកអសុរាទេ បិតាម្ចាស់គឺឥន្ទជិតអសុរា មកអំពីពិភេកអសុរានេះឯងសម្លាប់ព្រះបិតារបស់ម្ចាស់ សម្លាប់ជីតាម្ចាស់ ចូលទ័ពជាមួយទ័ពមនុស្សា សម្លាប់អស់ទាំងវង្សាវតារប្រាំពីរសណ្តានរបស់ម្ចាស់ យក្សស្លាប់គំនរគោករស់ទព្វមហាសមុទ្រ អាផៃណាសូរីវង្ស កាលណាបើបានស្តាប់ភីល្បៀងទាំងបួននឹងតាមាលីសូនទូលដូច្នោះហើយ ក៏ទ្រង់ព្រះកន្សែងសោយសោកា ឱ ព្រះបិតា



កាលណាខ្ញុំកើតមក ខ្ញុំមិនបានឃើញព្រះភក្ត្រ សោយសោកវិយោគខ្លាំង ក៏ឡើងគាល់ព្រះវររាជមាតាទូលថា ព្រះបិតារបស់ខ្ញុំ ពិភេកអសុរាឬមិនមែនទេ មាតាប្រាប់ថាកូនអើយមិនមែននេះទេ នេះជាពិភេកអសុរាជាឪពុកធំបាឯង អាផៃណាសូរីវង្ស សួរថាបិតារបស់ខ្ញុំឈ្មោះអ្វី ម្តាយប្រាប់ថា បិតាបាឯងឈ្មោះឥន្ទជិតអសុរា មកអំពីពិភេកអសុរានេះឯង នាំព្រះរាមព្រះលក្សណ៍មនុស្សាមកសម្លាប់បិតារបស់បា សម្លាប់ទាំងព្រះជីតាឈ្មោះក្រុងរាពណាសូរ សម្លាប់ទាំងពូជពង្សអំបូរប្រាំពីរសន្តានអាផៃណាសូរីវង្សក៏បានស្តាប់ព្រះមាតាថាដូច្នោះហើយ អ្នកក៏ឆេះឆួលក្តៅក្នុងឱរា សួរព្រះមាតាបន្ថែមទៀតថា យើងមានពូជពង្សវង្សានៅឯណាខ្លះ ម្តាយប្រាប់ថាកូនអើយ ពូជពង្សយក្សានៅតែស្តេចយក្សមួយទេ ស្តេចយក្សនោះធំណាស់ ធំលើសយក្សក្នុងផែនដី ពូកែលើបិតារបស់អ្នក ពូកែលើជីតារបស់អ្នក ក្នុងពិភពលោកនេះគ្មាននរណាពូកែលើយក្សនោះទេ ស្តេចយក្សនោះពូកែមួរផែនដីបាន ធម្មតាជាយក្សក្នុងពិភពលោក នឹងរកយក្សឯណាធំប៉ុនគ្មាន យក្សនោះធំបាំងមួយចំហៀងមេឃ ស្ទើរតែនឹងលេបផែនដីបាន នាមឈ្មោះហៅថា មហាស្រកាចិន្តារាពណ៍ កូនអើយនៅនគរនោះហៅមហាឆ្ងាយ បើគ្រាន់តែហោះយ៉ាង

លឿន បីខែទើបបានដល់ អាផៃណាសូរីវង្សបានស្ដាប់មាតាថាដូច្នោះ ហើយព្រៃកអរក្នុងចិត្តមិនមានស្បើយ ខ្ញុំសូមក្រាបបង្គំលាព្រះមាតា ខ្ញុំ សុំហោះទៅនគរមហាស្រកាចិន្តាភាពណ៍ ព្រោះបើថាទេ កូនទៅពិតបាន គេមិនទទួលស្គាល់យើងទេ អាផៃណាសូរីវង្សទូលមាតា ធ្វើភេទយ៉ាង ណាទើបទៅបាន ម្ដាយថាកូនវើយ បើចង់ទៅឱ្យកូនហោសហោតាការ្យា ប្រាណឱ្យកើតដូចរូបបិតាទើបទៅបាន អាផៃណាសូរីវង្សទូលមាតា ថា បិតារូបយ៉ាងដូចម្ដេច កាលណោះបានគូររូបនៅនឹងថតកញ្ចក់ ម្ដាយយក ពំនូរមកឱ្យមើល អាផៃណាសូរីវង្ស មើលឃើញរូបព្រះបិតាហើយសូធ្យ មន្តព្រះគាថា ប្រែកាឡាឱ្យបានសុទ្ធដូចរូបព្រះបិតា រួចថ្វាយបង្គំលា ហើយ ក៏ហោះទៅនគរកែវចក្រវាឡនាយ ក៏ចូលទៅថ្វាយបង្គំមហាស្រ-កាចិន្តាភាពណ៍ មហាស្រកាចិន្តាភាពណ៍ក្រឡេកឃើញសួរថា អាណា មកពីណាឥន្ទជិតអសុរាឬអ្វី ? អាផៃណាសូរីវង្សក៏ក្រាបទូលថា ខ្លួនខ្ញុំនេះ មិនមែនឥន្ទជិតអសុរាទេ មហាស្រកាចិន្តាភាពណ៍ថា បើអាឯងមិនមែន ឥន្ទជិតអសុរា ម្ដេចក៏សុទ្ធម្ល៉េះ អាផៃណាសូរីវង្សថា ខ្ញុំនេះកូនឥន្ទជិត ចុះ អាឯងហេតុដូចម្ដេច ទើបអាមកមានការអ្វី អាផៃណាសូរីវង្សទូលថា ព្រះញាតិទាំងប្រាំពីរសន្តានក៏ក្ស័យអស់ ឥន្ទជិតអសុរាក៏ក្សិណក្ស័យព្រះ



ជីតាក៏ក្សិណក្ស័យ ពូជពង្សយក្សាទាំងប៉ុន្មានក្ស័យទាំងអស់ មហាស្រកា ចិន្តាភាពណ៍សួរថា ហេតុអ្វីក៏ក្ស័យ អាផៃណាសូរីវង្សទូលថា ពិភេកអសុរា រត់ចូលទ័ពជ័យព្រះរាមព្រះលក្សណ៍មនុស្សាមកសម្លាប់បិតារបស់ខ្ញុំ សម្លាប់ ជីតារបស់ខ្ញុំ សម្លាប់ពូជពង្សវង្សាប្រាំពីរសន្តាន មហាស្រកាចិន្តាភាពណ៍ បានស្ដាប់ហើយគ្រាន់តែយកដៃគក់ដើមទ្រូង ផ្ទៀងផែនដី ភ្នំដូចគេរលំ រលើងលើព្រៃ ក្រុងអសុរីត្រាស់ថា ឯងទៅមុនចុះ អញលើកទ័ពទៅ ក្រោយ ទៅសម្លាប់អាមនុស្សាឱ្យបាន ថាហើយកេណ្ឌកងទ័ពពេញ កល្បោប៉ចក្រវាឡ ព្រៃហេមពាន្ត ទ័ពយក្សាទាំងអស់គ្មានសល់ចន្លោះត្រង់ ណាឡើយ តាមកោងសមុទ្រសុទ្ធតែយក្ស យក្សខ្លះកំពស់មួយរយ យោជន៍ យក្សខ្លះជើងវាទល់ដី ក្បាលទល់ស្រទាប់មេឃា ពួកពលយោធា អស់អស្ចារ្យក្រៃ ពួកពលទាំងអស់សុទ្ធតែឫទ្ធិ បាំងសែងព្រះអាទិត្យអាប់ រស្មីខ្លះហើរ ខ្លះហោះ ខ្លះដើរដី មហាស្រកាចិន្តាភាពណ៍ ក៏នៅលើបុស្បក នឹកទៅត្រង់ណា អណ្តែតទៅត្រង់ណោះ ម្ល៉ោះហើយសូរស័ព្ទសន្ធឹក ផ្ទៀងផែនដី សូរស័ព្ទក្រើករបើកព្រៃ បានលើកបៀតមកដល់ក្រុងលង្កា បូរី ញាប់ញ័រអស់ទាំងផ្ទៃ ភ័យរាល់គ្នា , ពិភេកអសុរាប្រើកងសេនាទៅ ទូលព្រះនារាយណ៍រាមា អាមាត្រទៅដល់ម៉បម៉ាយថ្វាយបង្គំ ពិភេក

អសុរាប្រើអញខ្ញុំមកទូល ព្រះអង្គយាងទៅឱ្យឆាប់ ដ្បិតអីមានពួកសង្គ្រាមជ័យទ័ពភ័យសារ ឱ្យព្រះអង្គយាងទៅឱ្យឆាប់ ព្រះនារាយណ៍រាមាស្ដាប់ហើយ ភ្ញុំកងពលពានរចល់ចេញប្រញាប់ ភ្ញុំពួកសេនាដប់ពីរអង្គប្រាណេទើបព្រះអង្គចរថ្កានបានមកដល់ក្រុងលង្ការាជបូរី ពិភេកសារចូលថ្វាយបង្គំ ទូលអង្គព្រះនារាយណ៍រាមាក្សត្រាធិបតី ទ័ពនេះទ័ពធំលើសទ័ពណោៗ គឺមហាស្រកាចិន្ដាភាពណ៍ បានតែព្រះអង្គស្ដេចលីលាបរពលទាំងអស់គ្នាកុំឱ្យសល់ ម្ល៉ោះហើយព្រះនារាយណ៍រាមា ភ្ញុំកងយោធាទៅទាំងអស់ បាសុគ្រីព កេសរជម្ពូរពាន និលផាត់ ពិភេក ហនុមាន បារអង្គត់ ស្ដេចលើកចតុរង្គយោធា បានទៅជួបមុខទ័ពគ្នា ក្នុងពេលនោះនៃ ស្មាទីងយក្សកាប់ចាក់ប្រឡូកប្រឡាក់ជួបមុខគ្នា ព្រះនារាយណ៍រាមាថ្លែងសរជ័យ សរអារិទ្ធីចាន់ក៏ផ្ការញផ្កាស្លាំពលយក្សរាដប់ពីរសមុទ្រ កាលណោះមហាស្រកាចិន្ដាភាពណ៍យល់ជាពលក្សិណក្ស័យប្រល័យជន្ម ស្លាប់អស់មិនមានសល់ យក្សស្លាប់គោកសមុទ្រអស់ប្រាំពីរខ័ណ្ឌឈាមយក្សឈាមសត្វប្រឡាក់គ្នា ស្អុយក្នុងគង្គាមហាសមុទ្រ កាលណោះមហាស្រកា-ចិន្ដាភាពណ៍ហោះមកជិតជុំចងហ៊ុំចាប់ឱ្យបាន អង្គព្រះមហាក្សត្រក្សាន្តក៏បាញ់សល់ មហាស្រកាចិន្ដាភាពណ៍ ស្រកាវ៉ាប៉ុនភ្នំ សុទ្ធតែពេជ្រដុះជុំខ្លួន





អសុរា បាញ់សរត្រូវហើយមិនមុតខ្លាំងសោះសា បាញ់ខ្លាំងព្រាយកើតភ្លើងភ្លឺសូត្រា សុគ្រីព អង្គត់ ហនុមាន កេសរជម្ពូរពាន នាំគ្នាឱបភ្នំយំសោះសា មើលទៅខ្លួនឯងមិនបានប៉ុនម្រាមជើងវា ព្រះរាមបាញ់សរប្រាំពីរយប់ប្រាំពីរថ្ងៃ ត្រូវហើយមិនមុតបន្ដិចឡើយ បាញ់ឡើងជិតឡើងៗ ព្រះនារាយណ៍រាមា អស្ចារ្យក្រៃ ព្រះឥន្ទ្រាយកគ្រៃមាស ពីសូត្រាមកឱ្យស្ដេចពង់ បាញ់ខ្លាំងណាស់ប្រាំពីរយប់ប្រាំពីរថ្ងៃ ដាច់ចន្លោះសរជ័យរិលផែនដីកក្រុងនោះហោះកេជាជិតព្រៃ បបាក្សត្រថ្លៃទ្រង់ព្រះកន្សែង ឱស្រីលក្សណ៍អនុជាពុំងាប្អូន ជីវិតយើងសោះសូន្យថ្ងៃនេះហើយ ថាហើយស្ដេចបីអង្គា ស្រីលក្សណ៍អនុជា ពិភេកអសុរា ព្រះនារាយណ៍រាមាកៀកកក្ដាយំ ព្រះនារាយណ៍រាមាទ្រង់ព្រះកន្សែងថា ពិភេកអសុរាមាសបងអើយ យើងបីអង្គាក្សិណក្ស័យពេលនេះហើយ ។ សុគ្រីពអង្គត់កេសរជម្ពូរពាន បាហនុមាន និលផាត់ និលឯក នាំគ្នាឱបភ្នំយំខ្លាំងក្រៃ បើម្ចាស់យើងក្សិណក្ស័យយើងក្ស័យទាំងអស់គ្នា និយាយពីពលស្វាប៉ែតសិបអក្ខោខ្លះរត់ខ្លះយំ រត់ចូលព្រៃ ពេលនោះពិភេកអសុរា គន់គូរហោរាដោយទិព្វ-ចក្ខុជា ម្ចាស់អវតានកុំព្រួយព្រះទ័យ កុំសោយសោកាយំ យើងទាំងអស់គ្នា នៅតែមួយនាទីទៀតមានអង្គទេវបុត្រ វិស្សុកម្មទេវបុត្រចុះមកឥឡូវ

មកតបន្ទោះសរជ័យបានដូចចិត្ត ពេលនោះវិស្សុកម្មអង្គទេវបុត្រ មកតបន្ទោះសរជ័យកើតជាថ្មី សុំព្រះនរបតីបាញ់សរទៀត កាលណោះពិភេកអសុរាទូលអង្គក្សត្រាព្រះនរបតី ក្រុងអសុរីក្ស័យថ្ងៃនេះហើយ ចាំឱ្យមកជិតសិនកុំទាន់ថ្លែង កាលណោះមហាស្រកាយក្សយង់អសុរា មកឱ្យជិតនឹងចាប់អង្គក្សត្រា ពិភេកទូលថា ឱ្យព្រះអង្គថ្លែងសរទៅ អធិដ្ឋានថា ឱ្យអរិទ្ធិចាន់សរថ្លា កើតជាអង្គព្រះព្រហ្ម មហាស្រកាចិន្តាភាពហើកាលណោះបើឃើញអង្គព្រះព្រហ្មលើកដៃថ្វាយបង្គំថា លោកត្រូចុះមកជួយ ពិភេកចង្អុលត្រង់រន្ធក្លៀក មានតែប្រហោងត្រង់ណោះឯងចុះសរអរិទ្ធិចាន់ព្រះនារាយណ៍រាមាស្តាប់ពាក្យពិភេកអសុរាទូលថាហើយ ស្តេចចាប់សរជ័យបាញ់ចំរន្ធក្លៀកអសុរិ សរត្រូវខ្លាំងក្រៃ ក្រុងអសុរីក៏ធ្លាក់មកកណ្តាលភីនផែនពសុធា ផ្ទៀងទាំងផែនដី ក្រុងអសុរីក្សិណក្ស័យមរណា ។ ព្រះរាមព្រះលក្សណ៍មនុស្សាក៏បរពលស្វា មកដល់ក្រុងលង្ការាជបូរី ផ្តាំពិភេកអសុរា ថាព្រះអនុជអូន សោយរាជ្យនឹងនេះចុះ សហនុមានបាននាងបុញ្ញកាយ ទៅសោយរាជនៅសហកោះក្រៃព្រះជ័យលង្កា សហនុមានក៏បាននាងបុញ្ញកាយ បាននាងមច្ឆានព្វ ។



៧០-ថ្លែងពីព្រះនារាយណ៍រាមា លើកពលសកលយោធាចូលក្នុងនគរស្រីអយុធ្យា ព្រះបាទទសរថរាជា ឱ្យភិរុតសមុទ្រទ្រុត ដកឃ្លាទៅសោយរាជ្យនគរកែយកេតបូរី ព្រះអង្គក៏សោយរាជ្យនគរស្រីអយុធ្យាបានសុខសាន្ត ព្រះអង្គបញ្ជូនសរទៅឋានសូគ៌ាទាំងអស់ ឥតមានទ័ពភ័យសារអរពីណោទៀតឡើយ ព្រះអង្គគង់នៅជាសុខសាន្ត ។

៧១-មានកាលមួយថ្ងៃព្រះនារាយណ៍រាមា ក្សត្រថ្លៃព្រះអង្គអផ្សុកក្នុងព្រះរាជហឫទ័យ ហៅសហនុមានស្រីលក្សណ៍អនុជា ហែប្អូនពុំងាជូនបងទៅលេងព្រៃ សហនុមានស្រីលក្សណ៍អនុជា ឮព្រះនារាយណ៍រាពោព្រះអង្គមានព្រះឱង្ការដូច្នេះហើយពុំយូរឡើយ ក្រាបថ្វាយបង្គំព្រះនារាយណ៍រាមាត្រាស់ថាអអូនអើយ យើងគិតទៅលេងព្រៃ ម្ល៉ោះហើយស្តេចទាំងបីអង្គាស្តេចចរចូលទៅលេងព្រៃ ព្រះនេត្ររំពៃមើលសត្វបក្សាសត្វដើរសព្វបើរច្រើនក្រាសក្រៃ ព្រះមហាក្សត្រថ្លៃបានទៅដល់ដើមពោធិជ្រៃមួយណាដើមនោះធំមានមែកសាខាមានស្រះមួយណាទឹកថ្លាយល់ដីព្រះអង្គទ្រង់ផ្ទំក្រោមដើមព្រះជ្រៃ ព្រះលក្សណ៍ក៏ផ្ទំបៀតបង សហនុមានប្រែប្រាណកាឡា កើតជាកូនស្វាច្របាច់ជើងក្សត្រក្សាន្ត ទីឋានត្រង់ណោះសុទ្ធតែទីឋានយក្សាស្តេចយក្សឈ្មោះកុម្ភណ្ឌបុរណារាត ប្រើកុម្ភណ្ឌទាំងបួនឱ្យរក្សា

ស្រះ ស្រះនោះល្អណាស់មានឈូករំចង់ ឈូកសឈូកសែតឧត្បលខៀវ ស មានផ្កាមហាហង្សរំចង់មាលតី មានផ្កានូនស្រីប្របឆ្នេរស្រះស្រង់ កាលណោះពួកយក្សកុម្ភណ្ឌទាំងបួន យាមល្បាតជិតជុំ ដល់ដើមពោធិជ្រៃសាខា ឃើញព្រះនារាយណ៍រាមា និង ស្រីលក្សណ៍អនុជា ថាអង្គព្រះឥន្ទ្រានឹងទេវបុត្រ បោតុរ្សីមានកូនស្វាច្របាច់ជើង មកវើយគ្នាយើងមកចោបចាប់ឱ្យបាន យកទៅថ្វាយអង្គម្ចាស់លើត្បូងសិរសា ចាប់ទាំងព្រះឥន្ទ្រា ចាប់ទាំងព្រហ្ម ចាប់ទាំងទេវតាទាំងពីរអង្គ ថាហើយយក្សបងកុម្ភណ្ឌទាំងប្អូន វាទៅចោមជុំហ៊ុំចាប់ឱ្យបាន កាលណោះឯកអង្គស្វាសហនុមាន និមិត្តប្រែប្រាណប៉ុនភ្នំបព្វតា ទៅចាប់កុម្ភណ្ឌបានបី វាយបំបែកសិរសា យក្សក្ស័យមរណា កាលពេលថ្ងៃនោះហោង រត់រួចយក្សមួយ ទៅទូលកុម្ភណ្ឌបុរណោភាត ថាអង្គម្ចាស់សិរសា ក្សិណនោះមានស្វាសកាចក្រៃ ធាត់ធំស្ដឹមស្ដៃ មនោមានៈសោះសា ចាប់បានយក្សាទាំងបីអង្គា ចាប់បោកក្សិណក្ស័យប្រល័យជន្មា កុម្ភណ្ឌបុរណោភាត ក៏បានស្ដាប់ពាក្យកុម្ភណ្ឌដូច្នោះហើយ ក្រុងយក្សក៏ខឹងក្រេវក្រោធពិរោធសោះសា ស្រែកហៅ



— ... Il (INDOHJIT) transforme son corps, nait en braḥ INDR, emmène les filles du paradis offrir des dances. Devaputr, Devatā, jouent de la musique céleste, vraiment très belle, propre à émerveiller ... (§. 43)



— ... L'UN MUNG plane, se dirige au milieu de l'atmosphère ... (§. 43)



ពួកពលក្នុងព្រៃហៅថា ធ្លាយើងទាំងរស់ធ្លាមកជួយចោមចាប់ អាមនុស្សា ហានទាំងស្តេចស្វា ធាត់ធំស្គមស្តែ ពលយក្សាប្រាំម៉ឺនប្រាំពាន់សោតសល់ ចរចូលមកដល់ ដំបងពេជ្រគ្រប់ដៃ ស្តេចយក្សប្រាប់ថា យើងចូលទៅ វាយរាបនុស្សា ព្រះឥន្ទ្រាទេវតានៅក្រោមព្រះជ្រៃ ស្តេចយក្សបរពល ចូលដល់ពេញ្ញលទីងដើមព្រះជ្រៃ យក្សហ៊ុំជុំជិត ខ្ទួលខ្ទោងមឹតបាក់ឈើ កាក់ព្រៃ ស្រីលក្សណ៍អនុជា ប្អូនភ្ញាក្សត្រថ្លៃ ដាស់ព្រះរៀមបង យក្សា មកច្រើនក្រៃ សុំព្រះរៀមជៀសជ័យ ស្តេចតើនឱ្យឆាប់ ស្វាស សហ-នុមាន ស្តេចតើនឱ្យឆាប់ យកព្រះខាន់ជ័យកាប់សម្លាប់យក្សា ព្រះនា-រាយណ៍រោយាស្តេចក៏តើនឡើង ស្តេចរាព្រះហស្ត ហៃបាហនុមានកុំទាន់ ធ្វើការ ចាំអញពិចរាកុំទាន់ធ្វើវា ព្រះអង្គដកដើមកក់កែវមកអធិស្ឋានថា ឱ្យកើតជាសរថ្លាព្រហ្មមាសរឿងឫទ្ធី កក់កែវកើតជាសរសិល្ប ព្រះអង្គ យិតកៅទណ្ឌសរថ្លា ។ រាជក្របីស្រីពានរស្វាសសុទ្ធបុត្រព្រះពាយ សេនាអង្គព្រះនារាយណ៍បំផ្លាញអស់ពលយក្សា ស្លាប់យក្សប្រាំម៉ឺនប្រាំ ពាន់គ្រៀបត្រា ក្រុងអសុរាគ្មានសល់ដល់មួយ ស្តេចយក្សកុម្ភណ្ឌបូរណា-រាតយក្សា ក្រុងអសុរាស្រែកថ្ងូរខ្លាំងក្រៃ ដួលទៅកើតជាភ្នំធាធំស្គមស្តៃ

កាលណោះសរព្រហ្មាសក្សត្រថ្លៃ ចាក់ឫសក្នុងដី ប្រាំរយយោជន៍យល់សរបែកជាមែកសំចេកខ្ពស់ក្រៃ បាំងសែងរស្មីសុរិយាព្រះអាទិត្យ សររកដូងកែវយក្សពុំឃើញ បានជាយក្សនោះពុំស្លាប់ ស្រែកប្រាប់ហនុមានឱ្យយកអន្ទូងវាយសរទៀតទៅ យក្សស្លាប់កើតជាភ្នំ ដកដង្ហើមធំក្នុងដីប្រេះផែនដី កើតជាស្ទឹង បើសត្វរមាំងរមាស ធ្លាក់ទៅកាលណោក្រុងអសុរាក៍បឺតយកទៅស៊ី សព្វថ្ងៃគេសន្មត់នាមថាភាពហ៍ធី ។ ស្លេះត្រង់នេះសិនមិនចរចា និយាយពីព្រះនារាយណ៍រាមា ស្រីលក្សណ៍អនុជា សហនុមាន ព្រះអង្គពនេចរវិលថ្កាន ។ រឿងត្រង់ណោះស្លេះទុកនៅ ។

៧២-យើងនឹងថ្លែងទៅរាជសីតា ដែលនៅក្នុងនគរស្រីអយុធ្យា កាលណោះនាងអផ្សុកនៅពុំបាននាំរស់ស្រីស្នំបិរពារ បរចេញមកលេងទឹកស្រះស្រង់ អស់ពួកស្នំស្និទ្ធិស្រីង្គារហែរនាង សីតាមកច្រើនក្រៃ មកដល់ស្រះស្រង់វង្សបោក្ខរណី អស់ពួកស្រី១ហែលលេងសប្បាយ ខ្លះបេះបានផ្កាឈូករំចង់នូវស្បង្គ័ជ ឈូកសែតឈូកស នូវឈូកច្រាលបេះបានបង្អួតបង្អរភ្ញា ខ្លះមុជពានពារក្នុងស្រះស្រី ថ្លែងពីរត្នរាជសីតាកែវកល្យាណេ ស្រង់ទឹកកំសាន្តក្នុងព្រះទ័យ អស់ពួកសាវស្រីយកផ្កាំមកថ្វាយ លង់លុះសុរិយាបែរត្រជាក់ អស់ពួកនាងអ្នកឡើងប្រញាយ យើង





នឹងថ្លែងអំពីខ្មោចអាកុលកាឡកណ្ណីយក្ស វាកើតនឹងថ្មដាស្រះស្រង់វាស្គាល់រត្នរាជសីតាទៅស្រង់ទឹក វាខឹងណាស់គ្រេវក្រោធថា ព្រះនារាយណ៍រាមា សម្លាប់ពូជវាអស់ប្រាំពីរសន្តាន ក្នុងពេលនេះវាធ្វើឱ្យនាងសេតាព្រាត់ព្រះរាម កុំឱ្យជួបគ្នាវិញបាន ថាហើយប្រែប្រាណជាស្រីស្នំរបស់នាង លុះព្រះសុរិយាបែរទាបទៅ នាងនាំអស់សាវស្រីវិលវឹងថ្កាន ខ្មោចអាកុលកាឡកណ្ណីយក្ស ដើរតាមពីក្រោយ បានដល់រាជបូរីស្រីអយុធ្យា នាងសីតាឡើងទៅលើទែនក្រឡា ទូលនាងសីតាថា ម្ចាស់ក្សត្រីយ៍ដែលរាពណ៍លួចយកទៅបានដប់បួនឆ្នាំ ក្រុងរាពណ៍នោះដែលប៉ះក្សត្រីយ៍ឬទេ នាងសេតាប្រាប់ថា នាងស្រីស្នំកុំព្រួយបារម្ភនឹងអង្គអញ កាលក្រុងរាពណ៍លួចទៅបាន មិនដែលជិតប្រាណអង្គអញទេ បើមកជិតហើយក្តៅដូចភ្លើងឆេះ ខ្មោចអាកុលកាឡកណ្ណីយក្សបានស្តាប់ហើយ ទូលថាម្ចាស់អើយខ្ញុំមិនដែលឃើញទេ រូបរាពណ៍ទេតើ មុខមាត់វាយ៉ាងដូចម្តេចនាងប្រាប់ថា ស្នំអើយវាអាក្រក់ណាស់ រូបវាគ្មានល្អដូចអស់គេ សម្បើមអាក្រក់គួរឱ្យខ្លាច មុខវាដប់ដៃវាម្ភៃ ចង្កូមស្រួចគួរសម្បើម ខ្មោចអាកុលកាឡកណ្ណីយក្សទូលថា អង្គម្ចាស់ប្រាប់ខ្ញុំ ខ្ញុំមិនឃើញទេ សុំឱ្យម្ចាស់គូរឱ្យខ្ញុំឃើញ ទើបនាងយកក្តារឈ្នួនព្រះរាមា មកគូរឱ្យសុទ្ធក្រុង

ភាពហោសូរ មុខដប់ដៃម្ភៃ មានគុជដីរដុះកណ្ដាលដើមទ្រូង ម្ល៉ោះហើយខ្មោចអាកុលកាឡាកណ្ណិយក្សលោតចូលក្នុងគំនូរ ឃើញខ្លួនមួយកំពោតបាត់សិរសា ព្រឺក្បាលព្រប់គ្នា ថាខ្មោចលេង យូរបន្តិចក៏បាត់ទៅ នាងសីតាលុបហើយវាក៏កើតឡើងវិញ លុះថ្ងៃទន់ទាបព្រះរស្មី ព្រះនា-រាយណ៍នរបតីស្ដេចយាងដល់ នាងយកក្ដារឈ្នួនលាក់ក្រោមគ្រែ ដែលព្រះរាមាស្ដេចតែងផ្ទំ ស្ដេចយាងមកដល់ហើយស្ដេចថ្វាយបង្គំ ស្នំស្និទ្ធជិតជុំអង្គព្រះក្សត្រា ស្នំខ្លះកង់គាល់ ស្នំខ្លះលើកក្រយាស្ងោយថ្វាយក្សត្រាស្ដេចសោយរួចហើយហោព្រះអង្គផ្ទំ អស់ស្នំមេនំក៏ចូលផ្ទំគ្រប់គ្រាហោព្រះនារាយណ៍រាមាពេលនោះផ្ទំពុំបាន ព្រាយវាលោតលោបអង្គព្រះក្សត្រាវាឱបពីលើវាចាក់ពីក្រោមព្រះអង្គភ័យភិតតក្កមា ជូនកាលទទូរ ទៅឱបអង្គក្សត្រា ពេលនោះព្រះអង្គផ្ទំពុំបាន ព្រះអង្គស្រែកហៅព្រះលក្សណ៍ប្អូនភ្ងា ប្អូនអើយពេលនេះបងនិទ្រាពុំបានយល់ដូចខ្មោចព្រាយទទូរសំពត់មកហើយឱនឱបក្រសោបបង លុះលង់ព្រឹកព្រាងមកកាលណា នាំព្រះប្អូនភ្ងា មករើក្រឡាព្រះបន្ទំ រើទៅឃើញរូបរាពណ៍នៅនឹងក្ដារ ក្រេវក្រោធពោស់សាទប់ពុំបាន ស្រែកហៅថា យើស្នំរាល់គ្នា មានមីណាចិត្តក្លាហាន មកគូររូបរាពណ៍ដាក់ក្នុងឋាន បើកាលណាដឹងឈ្មោះវាសម្លាប់



ឱ្យមរណោទុកពុំបាន ថាហើយអង្គក្សត្រក្សាន្តក្រេវក្រោធក្រៃ ព្រះនេត្រទុំទែងដូចអគ្គី កាលណោះរត្នរាជសីតាកែវកល្យាណ ចូលទៅឱបបាទាអង្គក្សត្រក្សាន្តថាខ្ញុំព្រាស់នេះឯងគូររូបរាពណ៍ ព្រះអង្គថាយើមីជូជាតិចោរអប្រិយវាស្រឡាញ់អារាពណ៍ប្ដីវាជូសាមន្យវាគូររូប ទុកមើលលេងកំសាន្តមីនេះទុកមិនបានក្នុងបុរី នែមីសីតាអញលំបាកខ្លាំងណាស់ អញចងក្រង ប្រាំពីរឆ្នាំ ស្នាក់ដោយសារតែរូបនាងឯង អញទៅច្បាំងនឹងក្រុងយក្សាអស់ដប់បួនឆ្នាំ ដោយសារតែរូបនាង ឥឡូវនាងមិនគួរមកក្បត់អញ នាងយំហើយទូលថា សូមទ្រង់មេត្តាអត់ទោសទៅ ដ្បិតអីស្រីស្នំប្រើខ្ញុំគូរក្បិតនាងចង់មើល ព្រោះពុំដែលឃើញ ព្រះរាមឆ្លើយថា វើយមីសាមាន្យអញទុកមិនបានក្នុងបុរី ថាហើយហៅទៅកាន់ស្រីលក្សណ៍អនុជា យកខ្សែមកចាប់ចងយកទៅព្រៃ សម្លាប់វាឱ្យក្ស័យជីពជន្មា ព្រះលក្សណ៍ឮបងប្រើដូច្នោះហើយមិនហ៊ានបង្អង់ឡើយឱ្យយូរយារ យកខ្សែមកចាប់ចងជាចំណងបីជាន់ជាក់ចងក ចងជើងចងចង្កេះ ហើយដឹកបណ្ដើរព្រះនាងទៅនាងទួញភ្លាមយាងភ្លាមតាមកម្មកាយ អោមឆាយកន្សែងថ្លែងសោកា ថាឱកូនស្ងួនអ្នកមាសម្ដាយ កូនអើយអ្នកនៅក្នុងផ្ទៃព្រះមាតា មិនដឹងជាស្រីឬប្រុសទេ មាតាម្ដាយក្ស័យព្រះជន្មថ្ងៃនេះហើយ លុះដឹកទៅដល់ក្នុងព្រៃជ្រៅ

ប្រាប់ព្រះលក្សណ៍ថា ប្អូនពៅ ប្អូនសម្លាប់បងទៅកុំនៅយូរ នាងនិ-យាយនឹងកូនក្នុងព្រះឧទរថា កូនអើយអ្នកកុំអន់ចិត្ត ម្ដាយក្ស័យជីវិតថ្ងៃនេះហើយ ព្រះលក្សណ៍ប្អូនអើយសម្លាប់បងទៅ ស្រីលក្សណ៍អនុជាបានស្ដាប់សុវណ្ណីនៃនាងថាដូច្នោះហើយ មើលមុខព្រះខ័នថ្លា មើលទៅនាងសិតាដូចវង់ខែ ព្រះលក្សណ៍ឱបព្រះបាទាយំសន្ធប់បាត់ដង្ហើមក្នុងក្នុងសមសាន ថ្លែងពីនាងសីតាកែវកល្យាណោ ថាឱប្អូនអើយស្រឡាញ់បងអ្វីដល់ម្ល៉េះ ប្អូនបងសោយសោកបាត់ស្មារតី យើងដើរក្នុងព្រៃតែពីរនាក់ ប្អូនដាច់ដង្ហើមហើយឬនៅឡើយ ប្អូនមិនសារសងនឹងបងវ៉ា នាងសីតាពិតក្នុងយោបល់ ចាំមើលបើព្រះលក្សណ៍ភ្ញាក់ព្រះកាយា អញថាចំអន់កុំឱ្យឆ្ងល់ លុះលង់ព្រះលក្សណ៍ បានដឹងខ្លួនកាលណោ នាងសីតាក៏ថា យើស្រីលក្សណ៍អនុជា អញដឹងចិត្តបាងហើយ បានជាមិនកាប់អញទេទុកធ្វើប្រពន្ធ ថ្លែងពីព្រះលក្សណ៍បានស្ដាប់ព្រះនាងមានព្រះបន្ទូលដូច្នោះណា ក្រេវក្រោធសោះសាមិនមានស្បើយ ហូតព្រះខ័នហើយកាប់ព្រះនាង ព្រះខ័នក្លាយទៅកើតជាកម្រងផ្កាបាន ៣ ហើយហៅពាក់ឱ្យនាង ទតមើលព្រះខ័នរលាយបាត់ យូរបន្តិច ក្លាយជាព្រះខ័នវិញ ព្រះលក្សណ៍ខឹងណាស់ទាញព្រះខ័នកាប់ពីរដង ព្រះខ័នកើតជាកម្រងផ្កាដូចពីមុន ព្រះលក្សណ៍មើលទៅបាត់ព្រះខ័នថ្លា ឃើញផ្កាកម្រង



នៅនឹងសុវណ្ណនាង ព្រះលក្សណ៍ក៏បួងសួងគ្រប់ ៣ ដង បើនាងពោលពាក្យមែនពិតហើយ ខ្ញុំកាប់នេះឱ្យកើតជាផ្កាកម្រងដូចពីមុន អធិដ្ឋានរួចហើយ ក៏ចាប់ព្រះខ័នថ្លាកាប់ទៀតណោ ក៏ដូចពីដើម ស្រីលក្សណ៍អនុជាប្អូនភ្ញា ឃើញដូច្នោះហើយក៏ក្រាបបង្គំថា ព្រះបងពនេចរទៅទៀតចុះក្នុងសមសាន ឱ្យបានសេចក្ដីសុខ កុំកើតទុក្ខ នាងសីតាក៏លាស្រីលក្សណ៍អនុជាពនេចរក្នុងសមសាន នាងលួងលោមទារិកាក្នុងផ្ទៃមាតាណោកូនអើយ មិនដឹងជាស្រីឬប្រុស បើយើងកើតក្នុងនគរស្រីអយុធ្យាមានស្រីស្នំក្រមការរំពេរំពៃ បើកូនកើតក្នុងព្រៃ កុំសង្ឃឹមថានឹងបានរស់ ។ ថ្លែងពីព្រះលក្សណ៍ ចេញចរយាត្រាវិលមកវិញមកដល់ដើមពោធិជ្រៃមែកសាខា មានអារុក្ខទេវតារក្សាដើមពោធិជ្រៃ មុខគួរអាសូរព្រះលក្សណ៍ណាស់ ទៅដល់នគរបូរីហើយ គ្មានភស្តុតាងទៅជូនបង អារុក្ខទេវតាកាឡាខ្លួនជារូបទ្រាយស្លាប់នៅក្រោយម្លប់ព្រះជ្រៃ ព្រះលក្សណ៍ទៅដល់ហើយ វះវៀលឆ្មៀលយកថ្លើម យកទៅជូនបងកុំសង្ការ ឱ្យស្ដេចស្មានថា ថ្លើមព្រះនាង ទៅដល់ហើយថ្វាយបង្គំជូនថ្លើមទ្រាយ ព្រះនារាយណ៍ឃើញហើយត្រាស់ទៅថា អូនអើយនេះហើយថ្លើមមីសីតា ថ្លើមធំខ្មៅអ្វីម្ល៉េះ វាក្បត់ប្ដីអូនអើយកុំស្ដាយវា ណាអូនអើយ ថាតែប៉ុណ្ណោះហើយស្ដេចគង់ជាសុខសាន្ត ។ រឿងត្រង់នេះស្ទេះទុកនៅ ។

វេលា-យើងនឹងថ្លែងទៅសីលាកល្យាណ នាងព្រាច់ដើរក្នុងព្រៃសបឋាន ព្រះរង់ព្រមោចតែម្នាក់ឯង ទ្រង់ព្រះកន្សែងសោយសោកា ទឹកព្រះនេត្រាហូរស្រោកស្រាំរកៀសរកាំក្នុងកាយា នឹងថ្លែងទៅពីរអង្គព្រះឥន្ទ្រាផ្ទំលើក្រឡាទែនពុំបាន ក្តៅក្រហាយគ្មានស្រាកស្រាន្ត ទតមើលមកឋានព្រៃព្រឹក្សា ឃើញនាងសីលាយាងតែម្នាក់ឯង ព្រះឥន្ទ្រានិម្មិតជាស្តេចក្របីមួយឈ្មោះបបិរេង្សា ដើរព្រាច់ក្នុងព្រៃ តែឯកោ ទៅឃើញព្រះនាងយាងតែឯង ក្របីព្រះឥន្ទ្រនិយាយទៅកាន់នាង និយាយថា នាងអើយ មកពីណាតែឯងឯកាក្នុងសមសាន កុំយាងទៅណាដើរតាមយើងព្រាន់ពាននិយាយត្បាជាកំសោន្ត ក្របីនាំនាងក្សត្រីយ៍វត្តរាជកល្យាណ ព្រះឥន្ទ្រប្រើញផែនដី បាន ៣ ទិវា ក៏ដល់ឋានព្រះមុនីឥសី សន្ទតពៅផាមហាមេឃរាជព្រហ្មឥសីនោះរឿងឫទ្ធិ ឥតនរណាស្មើបាន ទោះយក្សយង់ក្រុងអសុរា ទេវតាសព្វឋាន ខ្លាចអំណាចឥសីមហាមេឃរាជព្រហ្ម ដើរក្នុងរាត្រី ៣ ទិវា អរុណរាងរះ បៀតព្រឹកព្រាងព្រះឥន្ទ្រក្លែងភេទរត់ចោលនាងទៅគង់សុខសាន្តដូចពីដើម ថ្លែងពីព្រះមុនី ចេញមកសោយព្រះស្ងួនពេលព្រឹក លុះឃើញនាងហើយក៏សួរថា ឧបាសិកឬឧបាសិកាមករកអ្វីនាងថា ព្រះពរថ្វាយបង្គំ ឥសីរាជឫត្តបព្រះមុនី ខ្ញុំនេះជាវត្តបបោសើព្រះ



រាប តេយកបកកាប់សម្លាប់ក្នុងព្រឹក្សា មិនក្បៀយជីវាបំបរបង់ចោល ឥសីស្តាប់ហើយ ទ្រង់ញាណដឹងទាំងអស់គ្មានសល់ចន្លោះនឹងនេត្រា ចៅតាកុំទៅណា នៅនឹងនេះហើយ នាងបានស្តាប់ព្រះមុនីឥសីថាដូច្នោះហើយត្រេកអរក្រៃ ស្រីថ្លៃតែងយកវត្តប្រណិប័តន៍ បើព្រឹកព្រាង ស្វាងព្រះសុរិយា នាងតែងទៅបោសរាស្រម បេះផលាប្រគេនឱ្យលោកតាឆាន់លុះលេងគភ៌នាងគប្រប់គ្រប់ ១០ខែ នាងនឹងប្រសូតរាជកុមារ ពេលយប់នោះនោះទូលព្រះជីតាថា ឃើព្រះបុមរខ្ញុំណាស់ នាងនឹងប្រសូតកូន ឥសីមានពុទ្ធដីកាថា ចៅអើយទៅសាលាក្រៅ កុំប្រសូតក្នុងព្រះអាស្រម កាលណោះនាងសីតានាងចរយាត្រាទៅសាលាក្រៅ ឥសីមិនបានចំរើនមេត្តាភាវនាទេ ទៅរក្សាព្រះនាងខំដើរឆ្វៀល ពេលនោះក្តៅក្រហាយដល់អណើសព្រហ្ម ប្រើស្រីសូតិាទាំង ៧ មកឱ្យជួយនាងផង កាន់ទឹកសុរាម្រិត ព្រះឥន្ទ្រាស្រោចអង្គានៃព្រះនាង ស្រីសូតិាក៏លាចុះ បានដល់នាងហើយ ចូលព្យាបាល នាងខ្លះទ្រជើងទ្រដៃ ស្រីខ្លះទ្រឧទរនឹងប្រសូតរាជកុមារក៏បានរួច កើតព្រះរាជបុត្រាប្រាណប្រុសប្រាកដ សម្បុរដូចមាសកាលពេលនោះស្រីសូតិាទាំង ៧ ហោះទៅសូតិាវិញ លុះលង់ព្រឹកព្រាងស្វាងព្រះសុរិយា ឥសីមានពុទ្ធដីកាសួរព្រះនាង នាងអើយអម្បាញ់យប់

មិញ តើនរណាមាត់ច្រើនកុះករត្រង់ព្រះនាង នាងទូលពុទ្ធដីកាថា ស្រីស្ងួតិចុះមកជួយខ្ញុំ ឥសីថា នាងអើយកូននាងប្រុសឬស្រី នាងទូលពុទ្ធដីកាព្រះមុនីឥសី ថាកូនខ្ញុំប្រុសទេលោកតា ឥសីថាហើយ ពកូនចូលព្រះអាស្រមនាងកុំទៅក្រៅព្រះសាលា ព្រោះវីក្នុងព្រៃមានខ្មែងកំណាចព្រៃរវាឆាបឆក់យកកុមារ នាងពព្រះរាជបុត្រហើយលួងលោមថា កូនអើយបើកូនកើតក្នុងនគរស្រីរអយុធ្យានាងស្រីស្នំព្រាបការ ពៀងពរំពៃ ឥឡូវបាបុត្រមកប្រសូតនៅក្នុងព្រៃ មានតែមាតា តាឥសី ថាហើយនាងក៏បីបុត្រចូលអាស្រមចងអង្រឹងផ្ដេកផ្ដៃ យោលរំពៃ កាលមានថ្ងៃមួយក៏នាងចូលទៅស្រង់ទឹកស្រះផ្ដាំនឹងលោកតាឱ្យមើលព្រះរាជបុត្រា នាងទៅស្រង់ទឹកស្រះហើយមានពានរស្វា ស្វាវីរមានស្វាឪ ស្វាព្រះស្រមូវក្នុងព្រឹក្សា វាបីកូនវាមកផ្ទួតទឹកផង សីតាទតយល់ឃើញដូច្នោះហើយថា បងពានរអើយហេតុអ្វីបីកូនមកផង ស្វាថា កូនខ្ញុំទុកនៅឯណាបាន មានសត្វខ្លែងធំៗ នៅក្នុងព្រៃ សត្វតូកវាយោភ័ក្យ យក្ស ឥន្ទ្រីយ វាឃើញកូនខ្ញុំបីទៅស៊ី នាងក៏បានស្ដាប់ពួកស្វាថាដូច្នោះហើយ ភិតភ័យណាស់រហោសរហៅងឡើងពីស្រះមកបីរាជបុត្រក្នុងព្រះអាស្រម កាលនោះព្រះឥសីចូលទៅចំរើនឈាន នាងបីព្រះរាជបុត្រមកផ្ទួតទឹក លុះព្រះមុនីឥសីចេញមកវិញ



មើលក្នុងអង្រឹងបាត់កូននាង ឥសីលាន់មាត់ថា ឱបង់គំនិតហើយមានសត្វអ្វីមកឆាបឆក់កូននាងទៅស៊ី បើវត្តរាជសីតាមកពីស្រង់ទឹកកាលណាសួរកកូន បើមិនឃើញកូនឡើយ សោយសោកាយំរង្ហូររងំក្នុងព្រឹក្សា ថាហើយកោលក្ដែលអង្រឹងកងរត្តី ដុតភ្លើងយកព្រះម្សិត(ក្របួន)ជប់សូនធ្វើជារូបកុមារ បើកូននាងរូបរាងយ៉ាងណា សុំឱ្យសិល្បកកើតដូចកូននាង ម្លោះហើយឥសីបោះទៅក្នុងភ្លើង កើតជាកុមារល្អដូចមាស រស្មីល្អណាស់ភ្លឺព្រោងព្រាយកើតជាកុមារដូច្នោះហើយ ឥសីរត់ឆ្វែលភ្លើងអគ្គី ថ្លែងពីវត្តរាជសីតាកែវកល្យាណ នាងពរព្រះរាជបុត្រា កុមារតូចចរចូលព្រះអាស្រម ឥសីឃើញថា ឱ នាងពកូនទៅផង តាភិតភ័យណាស់ ក្រែងសត្វអ្វីយកកូននាងទៅស៊ី តាជប់តាសូនរូបកុមារកើតឡើងកាលណាឲ្យតាឥសី បើដូច្នោះតារំលាយទៅវិញ នាងសេតាភ័យណាស់បង្គំទូល ខ្ញុំសុំតាកុំរំលាយ ខ្ញុំសុំយកមកជាកូនបានជាពីរ នាងក៏យកមកបំបៅទាំងពីរពង្សឆោមឆើតទ្រង់ទ្រាយល្អប្រពៃ កូនឥសីនឹងកូននាង មើលរូបរមើលរាងកូនឥសីសុទ្ធដូចគ្នា មានថ្ងៃមួយតាឥសីព្រះមុនី ហៅកុមារទាំងពីរមកជិតក្រែឥសីមានពុទ្ធដីកាថាហៃចៅថ្ងៃនេះមានឫកពារពិលាជោគជ័យ ឥសីថ្វាយព្រះពរដាក់ព្រះនាមបងថ្វាយនាមឱ្យហៅថារាមព្រះលក្សណ៍ ព្រះអនុជប្អូន

ថ្វាយបង្គំលាឲ្យទៅជប់ព្រះលក្ស្មណ៍ ទៅចាំឲ្យជាក់ណាកចៅពា ។

៧៤– កណ្ដាលនេះនិយាយពីឥសីតាកែវកៀណេ ឯសាំងក្សា បុត្រទាំងពីរភ្រាណ ចូនធីគោរពគម្រប់ ៧ ឆ្នាំ ឥសីបិតឫស្សី កោសធ្វើធ្នូ ដាក់ព្រួញឲ្យពីរប្រាក់ ចៅឯងយកធ្នូនេះទៅរៀនបាញ់ទងផ្កាសោត ឯ ពើងព្រះរាមព្រាហ្ម ឥសីហៅបាញ់ឲ្យត្រូវកុំឲ្យខុសឯគម្រប់គ្រប់ ៧ ថ្ងៃ កុមារ ទាំងពីរការណ្ដាក់ពាក្យបីតា ថ្វាយបង្គំក្រាបលាទៅបាញ់ក្រាលបើកពោរ ចំព្រលុំតាគា កុមារបេះផ្កាកគងជារំពោត ហើយក៏បាញ់បណ្ដាច់ផ្កា ផ្កា ឥសីថាចៅបាញ់ឲ្យត្រូវកុំឲ្យខុស ក្សិណនោះរាជកុមារបាញ់បណ្ដាច់ ទងផ្កា ជា ៧ថ្ងៃមិនដែលមានខុសសុទ្ធតែត្រូវ ឥសីហៅកុមារទាំងពីរពង្ស សួរថា ជប់ព្រះលក្សណ៍ រាមព្រះលក្សណ៍ចៅជីតា ចៅទៅរៀនបាញ់ ទងផ្កាខុសឬត្រូវ កុមារពីរពង្ស ពិតលោកតា ក្រាបទូលលោកតាត្រូវ ទាំងអស់ រៀនបាញ់៧ថ្ងៃមិនដែលខុស សុទ្ធតែត្រូវទាំងអស់ដូចប្រាថ្នា ថាហើយឥសីឲ្យកុមារទាំងពីររៀនមន្តព្រះគាថា ឲ្យខំសូធ្យទន្ទេញ ៣ យប់ ៣ថ្ងៃ នេះហើយមន្តបាញ់សរជ័យ ចប់អស់ហើយណា ចៅជីតាអ្នករៀន មន្តកាប់ព្រះខាន់ ៣ យប់ ៣ថ្ងៃ កុមារទាំងពីររៀនចប់អស់គ្មានសង្ស័យ ទើបព្រះឥសីបង្គាប់មន្ត ចំណេងឲ្យរៀនទន្ទេញ ៧ យប់ ៧ថ្ងៃ កុមារទាំងពីរ



រៀនចប់ទាំងអស់គ្មានសល់អ្វីសោះមន្តឥសី ឥសីប្រាប់ទៅថាបានដូចចិន្តា ចិត្តបំណង ឥសីយកព្រះម្សិតគីក្រមួនបោះទៅក្នុងភ្លក់ភ្លើងកងអគ្គីឥសីពត់ ព្រះភ្លែនពែនព្រះបាទបន្តសិល្បសាត ហោមព្រះពិធី សុំឲ្យកើតធ្នូសរជ័យ ក្នុងកងអគ្គី ពេលនោះក៏កើតជាសរសិល្បរឿងឫទ្ធិក្រៃកើតអង្គទេវបុត្រ យេរកណ្ដាលភ្លើងលើធ្នូសរជ័យ ឡើងហុចឥសីមានទាំងព្រួញឲ្យមកពា ឥសីឈោងបានឲ្យបករាមព្រះលក្សណ៍ ចៅអើយបើមានចម្បាំងនឹងយក្សា នឹងស្ដេចមហាចក្រ ឯណាក្ដី ចៅបាញ់តែសរពីរបានហើយកុំបាញ់សរពា ឥសីផ្ដាំថាបើបាញ់សរពា កាលណាកើតភ្លើងប្រល័យកល្ប ឆេះផែនដី ឆេះឋានសួគ៌ាល័យ ឆេះព្រៃហេមពាន្ត អន្តរធានសត្វគ្មានសល់ ឆេះទព ហាណាបុត្រ សរពាឆេះខ្លាំងណាស់ ចៅជីតាមិនបានរួកណាមើលមុខ ពាន ហើយជប់ព្រះខ័នថ្លា ព្រះខ័ននោះហៅមហារឿងឫទ្ធិក្រៃ យក្សយំក្រុងអសុរី កាប់ស្លាប់មិនមានសល់ ប្រាប់រួចស្រេច ព្រះ មុនីមហាឥសីយកធ្នូសរជ័យ ព្រះខ័នថ្លាឲ្យទៅរាមព្រះលក្ស៍កាន់កំដរ ដៃ ឥសីដុតភ្លើងកងអគ្គីម្តងទៀត ឥសីជប់ធ្នូសរព្រះខ័នជ័យរឿងឫទ្ធិ ខ្លាំងក្រៃកម្រាបផែនដីបាន ទោះក្រុងយក្សាម៉ឺនសែនសមុទ្រ យក្សគេច មិនផុតពីមុខសរចៅអញ សរជ័យសោតមានឫទ្ធី ហើយជប់ព្រះខ័នជ័យ

សរបងដាក់ឈ្មោះបៅសរ សបរំជ័យ សរប្អូនបៅឈ្មោះ ព្រហ្មាស សរថ្លាញ្ញាំ ឥសីប្រាប់ថា ទៅរើរកសរពីតាឮ្យបាញ់អស់បីរកាលហើយ កុំបាញ់សរ ៣ រឺនបានទេចៅតា ឥសីប្រាប់ថា ទៅរៀនក្បៀនសរ (បាញ់សរ) ៧ថ្ងៃទៅរៀនកាប់ព្រះខ័ន ៧ថ្ងៃ កុមារពីរពង្សកាលរៀនចេះចប់សព្វអស់ហើយ លាព្រះអាចារ្យនិងមាតាដើរលេងព្រៃ ថ្ងៃរសៀលជ្រេង ជ្រេទេវសុរិយា ស្តេចបើលាមាតាឥសី ធ្នូសរខ័នជ័យកាន់គ្រប់ដៃបេះបាន ផ្លែល្អពបង្សពសេដា ហាក់ប្រេងបាក់ក្រាងចូរមែនសេរហាង បានផ្លែប៉ោក បានលាំងសាត ចូរនេសេដាបង្សុពល្អពខ្ញុរណាំងយកបកថ្វាយមាតាព្រ អាចារ្យព្រឹកឡើងឆាន់ នាងសីតាសួរថា បាទាំងពីរពង្សកូនកុំដើរទៅ លេងឆ្ងាយក្រែងពានយក្សយង់ក្រុងរាសុរា គ្រុឌនាគបក្សាធាធំក្រៃ ព្រៃ នេះកូនអើយហៅព្រៃហេមពាន្ត សុទ្ធតែគេរុកហោះធ្យាន ទើបមកដល់ ខ្លាតូចខ្លាធំសត្វសិង្ហពោ សត្វគ្រុឌ វាយោភ័ក្សយក្សឥន្ទ្រីយ សុទ្ធតែធាធំប៉ុន ភ្នំបព្វតា អ្នកកុំទៅឆ្ងាយ កុមារទាំងពីរ លាព្រះមុនីនិងឥសីមុនីតែង ពនេចរទៅលេងជារាល់ថ្ងៃ ១ថ្ងៃទៅលេងឆ្ងាយបន្តិច នាំបងប្អូនព្រាច់លុះ បេចដល់ព្រៃឆ្ងាយ ទៅឃើញរាំងកល្ប ១ដើមធាធំក្រៃ ស្លឹកដល់អាជ ដាកាស បញ្ចូលបាំងសែងព្រះអាទិត្យរំពួរស្លឹ ឫសចាក់ក្នុងផែនដីប្រាំរយ



យោជន៏យល់ រាំងនោះទំហុំមួយសែនឱប កុមារទាំងពីរឆ្ងាយឆ្ងល់ណាស់ ទាំងប្អូនទាំងបង មិនដឹងថាដើមអ្វី លុះព្រះសុរិយាជ្រេត្រជាក់ ព្រះអង្គបេះ បានបូលផលាច្រើនពេកក្រៃ វិលមកអាស្រមព្រះមុនីឥសី ចូលទៅ ថ្វាយបង្គំមាតាលោកតាថ្លៃ ស្រេចហើយពិតពុទ្ធដីកា តាឥសី លោកតា ដើមអ្វីធំលើសគេ ស្លឹកវាបាំងសែងព្រះអាទិត្យ ឥសីថា ចៅជីតា ទៅធ្វើ អ្វីឆ្ងាយម្ល៉េះ អាអេឈ្មោះឈើនោះហៅរាំងកល្បឬសវាចាក់ប្រាំរយយោជន៏ យល់ ទៅក្នុងដី ស្លឹកបាំងបារមីសែងព្រះអាទិត្យ ចៅអើយ ស្តេចរាំង កល្បនោះធំណាស់ ទំហុំ ១សែនឱប ចៅអើយកាលគេទើបកផែនដី ឈើនោះនៅតូចណាស់ ប៉ុន្តែបែកជាច្រើនក្រៃ លុះដល់មកសព្វថ្ងៃធំលើស គេ កុមារនៅនឹងតាឥសី ៣ទិវា លុះវេលាព្រឹកព្រាងប្រគេនផលាលោក ព្រះអាចារ្យឆាន់ តាឥសីឆាន់រួចហើយ ស្តេច ៣ អង្គាទ្រង់សោយផលា អោក្តាបរិបូណ៌ក្រៃ សោយរួចលាមាតា តាឥសី ស្ពាយធ្នូសរកាន់ខ័ន ជ័យ យាងកាត់តម្រង់ត្រង់ដើមឈើធំ ទាំងប្អូនទាំងបងប៉ងប្រាថ្នាដល់ បកកាលហោពោលពិគ្រោះគ្នា អូនអើយសរសិល្បរបស់យើង ~មិនដែល បានបាញ់សោះ ម្តងនេះ ពេលនេះយើងល្បងសរថ្លា សរយើងនេះមាន ឫទ្ធិចេស្តា តាប្រាប់មកយើងថា កុំបាញ់សរ ៣ ថាហើយរាមព្រះលក្សណ៍

ចាប់សេរថ្លា បាញ់ដើមព្រឹក្សា កាលនោះនៃ បាក់បែករាំងពីរ ទៅដល់ក្រ កក្រើកផែនដី ពុំនោះសៀវ លប់ព្រះលក្សណ៍ទៅសេរគល់ឈើទៀត ពុំនោះ សៀវ -សរព្រួញកផែនដី ក្រាំងយោជន៍ក្រល់ ដាច់ស្រុតពេកីរតាំរិក សល់ឡើយ រាំងកល្បនៅមិនបានរលំ ខ្លាំងក្រៃកក្រើកផែនដី ៧ សត្តទិវា កក្រើកព្រះអាស្រមដូចគេរំលើងរលំជើងភ្នំបព្វតា កក្រើកឋានសួគ៌ាល័យ គម្រប់ជា ៧ថ្ងៃ កក្រើកនគរស្រីអយុធ្យា ព្រះនារាយណ៍រាមានៅពុំបាន កក្រើកនគរកៃយកេតបុរី ភិរុតសមុទ្រទ្រុត លើកទ័ពភ័យសារ មានទ័ពពី ណាមកវាយយកនគរបងវិញ ព្រះរាមព្រះលក្សណ៍អស្ចារ្យលើករស់ពល ហ្វា ថាមានទ័ពពីណាមកវាយយកនគរប្អូនវិញ បងលើកទ័ពទៅប្អូនលើក ទ័ពមកប្រជល់ទ័ពគ្នា នៅនាកណ្តាលផ្លូវ ព្រះរាមសួរទៅសមុទ្រទ្រុតប្អូនភ្ជា បងខំលើកទ័ពមក ក្រែងមានទ័ពពីណាមកវាយយកនគរប្អូន ភិរុតសមុទ្រ ទ្រុតទូលព្រះរាមបង ខ្ញុំគិតស្មានថាមានទ័ពពីណាមកវាយយកនគរបង ភិរុតសមុទ្រទ្រុតលើកទ័ពទៅវិញ ព្រះនារាយណ៍រាមាលើកទ័ពមកវិញ ។

៧៥-កក្រើកនេះសព្វឋានពិសេស ដូចកាលអង្គព្រះបិតាឱ្យយើងទាំង អស់គ្នាថ្លែងសរព្រហ្មជាប្តូង ថាហើយឱ្យរាមាត្រូវទៅរញ្ជួញពិភេកសោ បកគម្ពីរ លោកឱ្យជាក់ច្បាស់ រាមាត្រក៏ទៅរញ្ជួញពិភេកអសុរា ដល់



ហើយមកថ្វាយបង្គំព្រះអវតាន ព្រះនារាយណ៍រាមាត្រាស់ថា ហៃពិភេក ព្រះអនុជប្អូន កក្រើកទឹកកក្រើកដី សួរស័ព្ទអ្វីខ្លាំងក្រៃ ពិភេកក្រាបទូល ថា : គ្មានទ័ពនរណាដ៏ទៃ គឺទ័ពព្រះញាតិវង្សព្រះអង្គឯងនៃ កុមារនោះតូច ក្រៃអាយុ ៧ ឆ្នាំ មិនមានច្រើនទេពីរនាក់បងប្អូន បើតាមលេខសាស្ត្រស័យ ពោបដោយហោរថា : ព្រះអង្គត្រូវជាប្រដៅបាន កុមារតូចៗទាំងពីរអង្គ ព្រះពរឿងឫទ្ធិបៅបានឥតស្តេចឯណាបកផ្ចឹបផ្ចល់បាន ព្រះនារាយណ៍ រាមា សួរទៅពិភេកសោ បោតុភេទយ៉ាងនេះយើងរកដូចម្តេចឃើញ ពិភេក ទូលថា : បើចង់ឃើញអ្នកបុណ្យពីរពង្សអង្គ ឱ្យយកសេះមកចងគ្រឿង រចនាយកកន្ទោ (ស្លេចសេះមេះហោះ) ចងគ្រឿងរចនា ល្អល្អះបញ្ចង់ ឱ្យ ការបណ្តាញកាសពាសលើខ្នងរាជានេយ្យ (មាសពេញ) ឱ្យយកសុពណ៌ ផែនមាស (សុពណ៌ផែនមាស មាសពេញយកមកចងក្បាលសេះ) ជូតក្បាលអាជា-នេយ្យ ដាំត្បូងដាំពេជ្រលាយលេចរស្មី សរសេរអក្សរ ថាបើនរណា ប៉ាន់ប្រាំងនឹងព្រះរាមទ័ពប៉ានជិះសេះនេះបាន រួចយកទៅប្រសង បើអ្នក បុណ្យពីរពង្សនៅព្រៃណា ឱ្យយកសេះទៅព្រៃណោះ ព្រះនារាយណ៍ សួរថា : តើប្រើនរណាក្លាបសេះបាន ពិភេកឆ្លើយថា ប្រើបាហនុមាន ព្រះនារាយណ៍រាមាត្រាស់ប្រើបាហនុមាន សហនុមានក៏ញព្រះអវតានលើ

ប្បែងសិរសា ត្រាស់ប្រើដូច្នោះហើយ ក៏យកគ្រឿងអលង្ការសង្វារពេជ្រមក ទ្រង់ម្កុដកែវរចនា យកព្រះខ័នថ្លាមកទ្រង់កាលណា ដើរតាមសេះទៅបើ សេះនោះហោះ ហនុមានហោះតាម បើសេះនោះស៊ីដើរទីងដី ហនុមាន ក៏ឡើងដើមឈើទើតមើលនៃសេះមង្គល និយាយពីកុមារទាំងពីរពង្សដល់ ព្រះរាស្រមឡើងថ្វាយបង្គំព្រះជីតា ពាគសីថាចៅអើយ ហេតុអ្វីបាន ទៅបាញ់រាំងកល្ប កុមារពិតពុទ្ធដីកាថា លោកតាខ្ញុំចង់ដឹងឫទ្ធិសរសិល្ប ទៅថ្វាយបង្គំព្រះពេតា ព្រោះថាចូលអើយ ហេតុអ្វីទៅបាញ់រាំងកល្ប កុមារ ទាំងពីរក្រាបទូលថា ចង់ដឹងឫទ្ធិសរសិល្បបានជាធ្វើ ការពីពោពែរ កល្បាណ កាលណោបានស្តាប់ កុមារទាំងពីរក្រាបទូលថាដូច្នោះហើយ អាល់ព្រួយព្រះទ័យ ទ្រង់ព្រះចិន្តាព្រែងដឹងដល់ទៅព្រះបិតា កើតហេតុ ភេទក្នុងវាំង កាលឮឮយកំវាទៀតកុមារថ្វាយបង្គំលោកតា ព្រះពេតា ស្តេច យាងយាត្រាចេញចាកវាំង រាស្រមព្រះមុនីហើយ ដើរលេងក៏សាន្តស្តេច នេះទៅដល់វាលទេសវាល កាលនោះសេះមង្គល ដើរឃ្លាសេះ សេះ នោះត្រាច់ត្រង់ក្រុងពេកដល់វាលកាលវាពដូច្នោះហើយ ភរព្រះលក្សណ៍ ក៏បានឃើញសេះ និយាយទៅកាន់ព្រះអនុជ ជបព្រះលក្សណ៍ប្អូនអើយ សត្វនេះបងមិនដែលស្គាល់ឡើយ ប្អូនអើយគេហៅថាសត្វអ្វី ជប់





លក្សណ៍ទូលថាព្រះរៀមបង ខ្ញុំប្អូនមិនដែលស្គាល់សោះតែម្តង ទូល ព្រះរៀមបងសត្វនេះ ប្រហែលគេធ្លាប់ជិះ មើលទៅមានគ្រឿងប្រដាប់នៅ លើខ្នង ទាំងខ្លួនទាំងក្បាលទាំងអស់ សុទ្ធតែគ្រឿងរចនា បងមើលទៅ ហើយយល់ការ ថាប្អូនអើយ សត្វនេះគេធ្លាប់ជិះ ប្អូនអើយមកយើងចោល ចាប់វាឱ្យបាន ថាហើយក្សត្រក្សាន្ត ស្តេចពម្រង់ កាលណោះមនោម័យ ស្តេចរាជកន្លស ឃើញស្តេចកាត់ត្រង់តម្រង់ទៅ សេះក៏ឈប់នៅរង់ចាំ ក្សត្រារាមព្រះលក្សណ៍ ជបព្រះលក្សណ៍ ដល់ហើយក៏ចាប់សក់សេះ ឃើញសុពណ៌ផែនមាសល្អអស្ចារ្យ ឃើញអក្ខរានៅទីងផែនមាស អក្ខរា ប្រាប់ថានេះសេះព្រះនារាយណ៍ បើនរណាបានចាប់សេះនេះជិះ អ្នកនោះ បានឡើងទឹងអង្គព្រះនារាយណ៍ ប្រាប់ជបព្រះលក្សណ៍ថា : នេះហើយ សត្វសេះ ប្អូនឯងមើលចុះសារអក្ខរា មិនមែនសេះឯណា សេះព្រះនា-រាយណ៍ រួមអើយព្រះនារាយណ៍ក៏ព្រះនារាយណ៍ចុះ យើងចង់ច្បាំងថ្លា ទីងព្រះនារាយណ៍ប្រុង ប្អូនរត់មុខសេះមុនទៅបងជិះដេញ ជបព្រះលក្សណ៍ រត់មុនមុខសេះលឿនដូចខ្យល់ រាមព្រះលក្សណ៍ជិះដេញលឿនសោះសា មិនជិតមិនឆ្ងាយគ្រាន់តែល្អ ថ្លែងពីរាជក្របីស្រីពានរ សហនុមានឃើញ ហើយក៏ក្រោករ អញ្ចឹមិនបង្ហាញខ្លួនទេ ពួនក្នុងព្រៃ ចាំវាសោស៊ន

ពាំចាប់យក កាលពេលនោះរាមព្រះលក្សណ៍ ជិះសេះដេញប្អូនមិនទាន់ឡើយ ដល់ភ្លូងវាលនោះទៅនៅខាងព្រៃ ជបព្រះលក្សណ៍ជិះសេះដេញបងម្តង បងឯងរត់ ប៉ុជិះម្តង រាមព្រះលក្សណ៍រត់លឿនដូចខ្យល់ ជបព្រះលក្សណ៍ជិះសេះដេញបងក៏ពុំទាន់ មិនប្រាកដឆ្ងាយទេឃ្លាតពេក រាមព្រះលក្សណ៍ថា : ប្អូនអើយជិះដូច្នេះមិនកើតទេ ហៃប្អូនកោសបង ត្រូវជិះទាំងរស់គ្នា រាមព្រះលក្សណ៍ជិះមុខ ប្អូនជិះក្រោយ ស្តេចឱបបងហើយ សេះលឿនព្រៃ ទៅដល់ព្រៃប្រាងហើយបកមកវិញ ផ្លូងពីសហនុមានត្រេកអរ សល់បំពារប្រាប់ព្រៃឱ្យជិតអង្គចិត្តចង់ ស្ទុះទៅក្រសោបឱបស្តេចទាំងពីរពង្ស ជិះទៅចំព្រង់ សហនុមាន ស្វាសក៏បានស្ទុះទៅក្រសោបឱបពុំទាន់ ជបព្រះលក្សណ៍វាយខ្លាំងក្រៃ ត្រូវនឹងចង្កូយធ្នូ ជបព្រះលក្សណ៍កណ្តាលចិញ្ចើម ស្លាប់ស្តូកស្លាប់ស្តឹងទាំងខ្លួនជបព្រះលក្សណ៍ទូលថា បងអើយស្វាស នេះធំណាស់ ស្វានេះមានម្ចាស់គេប្រើមកបានជាមានគ្រឿងអលង្ការក្រុង រាជ ណា សង្វារទិព្វ នាំបងប្អូនឈរមើលទាំងពីរពង្ស សេះក៏ឈររង់ចាំអង្គក្សត្រា លុះព្រះពាយបោកឡើងហនុមានរស់ក្រេវក្រោធខ្លាំង ណាស់នឹងក្សត្រា កេនុកេនពួតព្រះខ័នបីងអង្គក្សត្រា រាមព្រះលក្សណ៍ក្សត្រា វាយស្វាដួលសន្លប់បាត់ស្មារតីក្ស័យជន្មា ព្រះពាយបក់បកកាល





ណា ហនុមានក៏រស់ដឹងខ្លួនប្រាណនិមិត្តជាអង្គព្រះព្រហ្មធំមុខ ៤ កើតដៃ ៨ កាន់អាវុធថ្លាចូលច្បាំងនឹងកុមារទាំងពីរពង្ស រាមព្រះលក្សណ៍ទាញសរថ្លា វាយចំចិញ្ចើមហនុមានក៏ស្លាប់ទៀតស្លាប់ស្តូកស្លាប់ស្តឹង និមិត្តជាស្វាធំប៉ុនភ្នំស្ទើមស្មៃ ព្រះពាយបក់បោកមក រស់ឡើងរត់ចូលព្រៃស្ងួច បន្តព្រះគាថា ក្រឡាខ្លួនកើតជាកូនស្វាតូចកំព្រោយ ១ កាន់ឯងបោផ្លែ ឈើតូចពុំតែមុំ យកកកថ្វាយកុមារទាំងពីរពង្ស ជបព្រះលក្សណ៍ស្រែក ថាវាយទៀតទៅ កុំឱ្យរស់នៅ ឱ្យវាក្ស័យ គ្មានអាណាទេ នេះហើយ អាស្វាដូចប្រែ វាចង់តដៃមកនឹងយើង ថាតែប៉ុណ្ណោះយកចុងសរ វាយវាត់ទៅចំហនុមាន ហនុមានក៏ក្ស័យព្រះជន្មាគម្រប់ជាប្រាំពីរដងក្នុង មួយថ្ងៃ ក៏យកចុងសរចារចិញ្ចើមដាក់ចំណោងជើងពាក្យថា : អាឯងទៅ ប្រាប់ម្ចាស់អាឯងមកច្បាំងនឹងអញ ព្រោចវៀររំពោះប៉ុនខ្សែពាន ចាប់ ដៃក្រពាត់ចុងទៅក្រោយ ហនុមានក៏សន្លប់មិនដឹងខ្លួនឡើយ លុះព្រះពាយបក់មក ហើយក៏រស់វិញ ទាញបណ្តាច់ចំណង ខាំផងទាញផងមិន ដាច់សោះសា ទាញណាស់ រិតណាស់ ស្ទើរក្ស័យជីវា នឹកខ្មាសអាក្មេង តូចៗ កើតប្រាំពីរឆ្នាំ ឱអញនឹងហោះទៅនគរកែយកេតបូរី ឬ អញនឹង ហោះទៅនគរស្រីអយុធ្យាទៅក្រាបទូលអង្គព្រះនារាយណ៍រាមា ថាហើយ សហនុមានហោះទៅសូគាទៅដល់ឋានព្រហ្ម ធំសោតសល់ទៅថ្វាយ

បង្គំព្រះព្រហ្មសុំឱ្យព្រះអង្គស្រាយចំណងនេះរុះរោយចេញ ព្រះព្រហ្មថាយើ សហនុមានចំណងនេះស្រាយឯណាបាន ចំណងអង្គព្រះនារាយណ៍ បើស្រាយចំណងនេះក្នុងឋានព្រហ្ម នឹងឆេះឋានព្រហ្មដប់ពីរជាន់ ហនុមានហោះមកឋានព្រះឥន្ទ្រា មកថ្វាយបង្គំព្រះឥន្ទ្រាឱ្យព្រះឥន្ទ្រស្រាយចំណង ព្រះឥន្ទ្រាថាស្រាយឯណាបាន ចំណងនេះរបស់ព្រះនារាយណ៍រាមា បើស្រាយនឹងឋានព្រះឥន្ទ្រក៏ឆេះឋានព្រះឥន្ទ្រទាំងអស់ ហ៊ោះហើយក៏ហោះទៅឋានវិស្សុកម្មទេវបុត្រ សុំឱ្យវិស្សុកម្មទេវបុត្រស្រាយចំណង វិស្សុ-កម្មថា ស្រាយឯណាបាន ចំណងអង្គព្រះនារាយណ៍ទំនាយទាយថា បើស្រាយឋានណាឆេះឋាននោះ ហ៊ោះហើយវិស្សុកម្មទេវបុត្រគ្រាន់តែលដៃ ចំណងវិលជាប្រាំពីរជាន់ អង្គទេវបុត្រជាសហនុមានឱ្យហោះទៅរក អង្គព្រះនារាយណ៍រាមា ហនុមានថា ឱ អញនឹងហោះលើអាកាសានឹងខ្ទាសអស់ស្រីក្នុងនគរស្រីអយុធ្យា ឬ អញនឹងជ្រែកផែនដីទៅផុះត្រង់អង្គព្រះនារាយណ៍រាមា កុំឱ្យអ្នកណាដឹងការដល់មួយសោះ ថាហើយទៅជ្រែកផែនដីទៅផុះចំអង្គព្រះនារាយណ៍រាមា ព្រះនារាយណ៍រាមាព្រះអង្គក៏បាន ទតឃើញដូច្នេះហើយ ថាយីអាវានរណាហើយក៏យកចំណងមកចងសហនុមាន អញ ពួកត្រីត្រីឡោកពួកទេវតាទាំងអស់ទេវតា ហើយក្រុកាកជាប់ចំណង



សហនុមានក៏ខ្ទាសអស់ពួកកងសេនាទូវស្រីផង លើកម្ទូវផែនដីបានលើកភ្នំបាន វល្លិចំណងប៉ុនខ្សែពានទាញពុំដាច់ អួតថាឯងមេទ័ពធំ កាន់សុទ្ធតែភ្នំចោលយក្សា យក្សស្លាប់គោកនព្វមហាសមុទ្រ អំបោះប៉ុនខ្សែពានទាញមិនដាច់ កាលណោះអង្គព្រះនារាយណ៍ថា យើ នរណារៀនគ្រូជាប្អូនអើងអញ យកចំណងមកចងស្តេចស្វាស ចំណងនេះចងហើយស្រាយមិនបានទេ បើស្រាយឋានណាឆេះឋាននោះ ព្រះអង្គសូធ្យមន្តព្រះពុទ្ធាប្ដូរម្ហាប់បានហើយ ព្រះអង្គស្រាយ ស្រាយរួចរាជក្របីស្រីពានរស្វាសសុទ្ធ សេនាអង្គព្រះនារាយណ៍ក៏ក្រាបទូលថា សុំទានក្រាបទូលព្រះអង្គលើត្បូងសិរសា អ្នកបុណ្យនោះតូច ១ រូបដូចទេវតារឿងឫទ្ធិអស្ចារ្យខ្លាំងក្រៃ ទោះយក្ស ឬ មនុស្សក្នុងផែនដី យកមកផ្ទឹមផ្ទេរយល់ពុំបាន ខ្ញុំក៏បានពេញចាំងប៉ុន្មានដងប៉ុន្មានគ្រា អ្នកបុណ្យវាយខ្ញុំមរណាស្លាប់រាប់រយដង គ្មាននរណាតតាំងទៅច្បាំងផងមិនបានទេ មានទាំងធ្នូសរព្រះខ័នជ័យ កូនក្មេងតូច ១ អាយុប្រាំពីរឆ្នាំ ។

៧៦-ព្រះនារាយណ៍រាមាក៏បានស្ដាប់ដូច្នោះហើយ ពុំយូរឡើយ ព្រះអង្គកោនព្រះឱង្ការ ត្រើនិលផាត់ឱ្យទៅអញ្ជើញប្អូនអញដែលនៅនគរកៃយកេតបុរី ឱ្យលើកទ័ពធំកងយោធា ចូលមកស្រីអយុធ្យា និលផាត់បានស្ដាប់ដូច្នោះហើយ ក៏វិលទៅនគរកៃយកេតបុរី ទៅអញ្ជើញភិរុត

សមុតទ្រុតឱ្យលើកទ័ពសារចូលមកក្នុងនគរស្រីអយុធ្យា ព្រះនារាយណ៍រាមាក៏ប្រើព្រះលក្សណ៍អនុជាប្អូនរូនរើយកេណ្ឌកងទ័ពយោធាទៅចាប់រុកបុណ្យក្មេងតូច ១ ព្រះលក្សណ៍ព្វហើយកេណ្ឌកងពួកពលសកលយោធា កាលពេលនោះភិរុតសមុតទ្រុត ក៏លើកពលសកលយោធាឡើងទៅថ្វាយបង្គំព្រះនារាយណ៍រាមាព្រះរៀមបង ដល់ហើយប៉ប៉ាយឱនកាយថ្វាយបង្គំ ព្រះនារាយណ៍រាមាមានព្រះឱង្ការត្រាស់ប្រើប្អូនថា ឱភិរុតសមុតទ្រុតអនុជប្អូន អញប្រើប្អូនឯងទៅច្បាំងនឹងក្មេងតូច ១ អាយុប្រាំពីរឆ្នាំ ទ័ពនោះរឹងល្បីងខ្លាំងក្រៃគ្មានទ័ពណាដ៏ទៃខ្លាំងស្មើបាន ភិរុតសមុតទ្រុតបានស្តាប់ហើយ ពុំបានបង្អង់ឡើយបរទ័ពចរចាកឋាន ពោធិសត្វបីអង្គាស្រីលក្សណ៍អនុជា ភិរុតសមុតទ្រុត ស្តេចបរពលមកក្រើនក្រៃ កក្រើកគគ្រឹកភ្លុកផែនដី សូរស័ព្ទខ្លាំងក្រៃដូចព្យុះព្យោមា រាមព្រះលក្សណ៍ឮហើយគិតប្លាបងប្អូន រូនរើយសូរស័ព្ទអ្វីខ្លាំងក្រៃ ជបព្រះលក្សណ៍ទូលថា នោះហើយស្តេចស្វា ទៅទូលម្ចាស់វា យើងកុំព្រួយព្រះទ័យ បងកុំភិតភ័យច្បាំងឱ្យរស់កល រាមព្រះលក្សណ៍ឆ្លើយថារូនកុំសង្កាបកព្រង់អញបង យើងនឹងប្រឡងឱ្យដឹងសិល្បសរថ្លា ម្ល៉ោះហើយកុមារទាំងពីរពង្សមកឈរត្រង់មុខទ័ពសារ ថ្លែងពីភិរុតសមុតទ្រុតនឹងស្រីលក្សណ៍





អនុជា ស្តេចលើកទ័ពសារចរចូលមកដល់ កាលណោះទ័ពស្រូចពានរច្រើនសល់ កុមារឃើញស្វាសកង្ហល់ ស្តេចមិនបានថ្លែងសរថ្លា គ្រាន់តែផ្ទាត់បន្ទោះសរថ្លា ពួកស្វាក៏រាវអាចម័ប៉ះឈើព្រៃ ស្វាខ្លះដូចគេនឹងហែកផ្លើរមើថែ ស្វារត់ចូលព្រៃញ្ញានរៅបួយឡើយ កាលណោះស្តេចបីអង្គាដល់មកជួបគ្នាហើយទៃ ថាអាក្មេងចង្រៃជៀសពីមុខសរអញ បើមិនជៀសទេអញនឹងបាញ់ កុមារឆ្លើយថា ស្តេចបីអង្គាជៀសពីមុខសរអញបើពុំបក្បេណក្ស័យជីវិត ស្រីលក្សណ៍អនុជា ភិរុតសមុតទ្រុតរឿងរិទ្ធិថ្លែងសរព្រមគ្នាឱ្យក្ស័យជន្មា កុមារទាំងពីរពង្ស សរនោះមិនហ៊ានចំព្រះអង្គសរកាត់ពម្រង់ទៅព្រៃហេមពាន្ត កុមារលើកដៃអធិស្ឋាន ជបព្រះលក្សណ៍ចាប់សរព្រហ្មាសបាន បាញ់អង្គក្សត្រក្សាន្តឱ្យក្ស័យជន្មាចាប់សរភ្លេតបាញ់ភ្ជាប់ត្រូវដើមទ្រូងភិរុតត្រាំ ដួលកណ្តាលភឺនផែនដែនពសុធា ស្រីលក្សណ៍អនុជា នាំសមុតទ្រុតដកទ័ពរត់ចេញ ហនុមានឃើញអង្គក្សត្រក្សាន្ត ស្តេចដួលកណ្តាលពសុធា ស្ទុះទៅក្បៀកឱបក្រសោបរាជា ខ្ទាក់ក្បៀសពីមាត់វាដុះលាបសរព្រហ្មាសផ្លាញផ្លាក៏ដាច់ឬសញ្ញានសរសេឈ្មោក របស់ស្តេចបីអង្គា ចាញ់រាជកុមារលើកទ័ពថយក្រោយពរទ័ពមកដល់ស្រីអយុធ្យា ឡើងទៅក្រាបទូលអង្គព្រះនារាយណ៍រាមា

ក្មេងតូច ១ អាយុប្រាំពីរឆ្នាំ ក្មេងនោះរបឹងរឹងរូសសោតសល់ អ្នកបុណ្យនោះរិទ្ធិណាស់ក្លាហាន នឹងរកទ័ពណាទៅតតាំងពុំបាន ។

៧៧-កាលណោះអង្គព្រះនារាយណ៍រាមាក្តៅក្តួលឱរា ព្រះនេត្រទុំទែង ម្តេចវារបឹងរឹងរូសសោតសល់ ថាដូច្នោះហើយព្រះនារាយណ៍រាមាបរពល ព្រះរាមព្រះលក្សណ៍ ភិរុតសមុតទ្រុត ពោធិសត្វបួនអង្គាលើកទ័ពព្រួញចំអង្គកុមារដល់ហើយទល់មុខគ្នា ព្រះរាមមានព្រះឱង្ការ ថាវើយអាក្មេងតូច ១ ជៀសពីមុខសរអញ បើមិនជៀសទៅក្ស័យជីវា ជីវិតមរណាថ្ងៃនេះហើយ ឯងនេះរឹងរូសប្រឫសហៅហាន មកចង់តារពានលើយើងវិញណា កុមារឆ្លើយថាព្រះមហាក្សត្របួនព្រះអង្គ បើស្តាយជន្មជីវិតលើកម៉ពថយ បើមិនថយទៅក្ស័យជន្មា ព្រមទាំងរស់គ្នាគ្មានសល់ឡើយ ព្រះនារាយណ៍រាមាស្តេចក្រេវក្រោធ ដូចភ្លើងព្រៃឆេះឆួលឱរា ថាយើអាក្មេងតូច ១ រូតចេស្តា អាឯងនេះដូចសំរាបចូលើមកហើយរួតរិទ្ធិនឹងព្រះភ្លើងកងអគ្គី ក្បិណក្ស័យមរណាជាពុំខាន កុមារឆ្លើយថាខ្លួនយើងតូចពិតដូចពេជ្រឆ្អែ មិនខ្លាចរំពោចព្រះចេស្តា ហើរអ្នកណាកោធរិទ្ធិត្រូវតែពេរគ្នាច្បាំងឱ្យអស់ការក្នុងថ្ងៃនេះ ព្រះរាមស្តេចខ្ញាល់ណាស់សោះសាចាប់ទាញសរថ្លាបាញ់ពម្រង់ ប្រាប់ថាឱ្យសរថ្លាត្រូវកុមារទាំងពីរពង្ស បាញ់សរ



— ... HANUMĀN ouvre la paume de sa main pour que Nān monte ... (§. 81)

— HANUMĀN propose à RĀM de feindre une cérémonie mortuaire — RĀM prend dans ses bras SETĀ évanouie — SETĀ s'enfuit. (§. 81)



រត្តីវាផ្កាញផ្កា ឮខ្លាំងក្រៃសំរេចកើតលើមេឃា សរព្រះនារាយណ៍រាមា បួសទៅព្រៃហេមពាន្តពីរពេលរឿតរង្គកុមារហើយ កុមារចាប់សរសិល្ប បានហើយបាញ់សងតទៅវិញ សរនោះមិនហ៊ានត្រូវព្រះនារាយណ៍រាមា សរហួសទៅព្រៃហេមពាន្តញ៉ូររញ្ចួយ ព្រះនារាយណ៍ខឹងណាស់ បាញ់ឱ្យឆេះកើតជាភ្លើងប្រល័យពេញមេឃផែនដីព្រៃព្រឹក្សា កុមារបាញ់សងតទៅវិញ កើតជាភ្លៀងមកពេញកណ្ដាលអាកាសាលត់ភ្លើងក្សព្រារលត់អស់គ្មានសល់ឡើយ ព្រះនារាយណ៍រាមាក៏បានដឹងដូច្នោះហើយ ក្ដៅក្លួលញ្ញានស្បើយក្នុងឱរា ស្ដេចបាញ់សរមកកើតជាអន្ទាក់ពេញត្រៀបត្រាឱ្យមករិតរុំរង្គកុមារា កុមារបាញ់សរសែងថ្លែងទៅកើតជាព្រះខ័នមកកាត់អន្ទាក់ដាច់រុះរោយ ស្ដែងស្ដេចអធិស្ឋានបាញ់ទៅកើតជានាគពេញមេឃាមករិតរុំរាជកុមារ កុមារបាញ់សរថ្លាបាញ់ទៅកើតជាគ្រុឌបក្សាចាប់នាគរោក្ដាគ្មានសល់មួយ កាលនោះកើតអស្ចារ្យទេវបុត្រទេវតាក៏ភ្ញាក់ផ្អើលឋានព្រហ្មញាប់ញ័រ រំជួលឋានសួគ៌ាក៏ភ្លូកភ្លឹកស្ងួរស័ព្ទសទ្ទឹកអស្ចារ្យក្រៃសមុទ្រជលាស័យ ក៏ពុះពោរជោរជន់រលកលើសលើនឹងមាត់ច្រាំង ត្រីផងហែរហែលរវង្វេលរវង្វេរអណ្ដើកត្រសែបុជទឹកមិនលិច ព្រៃហេមពាន្តញាប់ញ័ររញ្ជួយកម្រើករារស្របព្រះបុរីវេស៊ើ ផេសើបានពុទ្ធដីកាប្រាប់រាងសីតា

កែវកល្យាណស័ព្ទសូរសរអញ្ញសែនខ្លាំងក្រៃ ប្រាំពីរយប់ប្រាំពីរថ្ងៃឮ គ្មានស្រាកស្រាន្ត នាងសីតាភ័យភិតអង្វរលោកតា សូមព្រះករុណាទៅឃាត់ម័ពជ័យ ឥសីឆ្លើយថានាងកុំភ័យ បើសង្គ្រាមជ័យធំយ៉ាងណា ចៅតាពីរពង្សមិនមរណាទេ កាលណោះអង្គព្រះនារាយណ៍រាមាស្តេចអស្ចារ្យ មិនដែលម័ពនរណាវែងខ្លាំងម្លេះ ម័ពក្មេងតូច ១ រឹងរិទ្ធិក្រៃ ថាហើយព្រះអង្គត្រាស់ហៅពិភេកអសុរា ចប្បាំងប្រាំយប់ប្រាំពីរថ្ងៃគ្មានបានការ ពិភេកអសុរាថាម៉េច អាកុមារទាំងពីរពង្ស ពិភេកក៏ដោះក្តារឈ្នួនមកបូក ហើយភ្ញុំមើលដួងជតាឆ្លុះយល់គ្មានកំបាំងនឹងពិភេកអសុរា បើព្រះអង្គចង់ចាប់អ្នកប្រុសនេះឱ្យបាន ត្រូវតែប្រើសហនុមានទៅយកសរថ្នានៅឋានព្រហ្មលើសូគា ឋាននោះមានសរកេរ្តិ៍ពីជីតាព្រះរាមា សរនោះនាមឈ្មោះហៅថាព្រះពាយវាសផ្លាញផ្លាប្រាបផែនដី កាលនោះអង្គព្រះនារាយណ៍រាមា ព្រះអង្គត្រាស់ប្រើរាជក្របីឱ្យសហនុមានទៅយកសរព្រះពាយវាសពីឋានព្រហ្ម សហនុមានក៏បានឮអង្គព្រះនារាយណ៍ត្រាស់ប្រើអាត្មាដូច្នោះហើយ ពុំហ៊ានបង្អង់ឡើយហោះទៅឋានព្រហ្ម ទៅដល់ហើយម៉ឺបម៉ាយថ្វាយបង្គំថាសុំសរព្រះពាយវាសផ្លាញផ្លា ព្រះព្រហ្មបានស្តាប់សហនុមានក៏បានយកសរជ័យឱ្យស្វាស ហនុមានបានសរហើយ ក្រេកអរណាស់



ហោះបករប៉ះសេថ្វាយព្រះរាមា ព្រះនារាយណ៍រាមាបានសរព្រះពាយវាសលើកដៃសំពះគោរពពិធី ហើយបាញ់ទៅកាលណោះ សុំព្យុះកួចកើតខ្យល់ផ្សេងរ័ព្ទអព្ភូលសព្វទិសទី លើកឡើងតម្រង់បាញ់កុមារទាំងពីរ ត្រូវត្រង់រាព្រះលក្សណ៍ដួលលើភឺនផែនដែនពសុធា ងងឹតកើតផ្សេងរ័ព្ទទិសទី មនុស្សម្នាមើលគ្នាពុំឃើញឡើយ សព្វផងក៏រត់ប៉ះទៅព្រៃ កិន្នរាកិន្នរីរករម្ងពុំឃើញ ថ្លែងពីសហនុមានក៏បានឃើញដូច្នោះហើយស្ទុះទៅចាប់ចងចំណងបីជាន់ ចងដៃចងជើងចងចង្កេះ រាបព្រះលក្សណ៍ក្សត្រាពុំដឹងខ្លួនសន្លប់សូន្យសុងបាត់ដង្ហើម ថ្លែងពីជប់ព្រះលក្សណ៍ឃើញបងដួលស្ទុះទៅចាប់សរជ័យ នឹងព្រះខ័នថ្លា ព្រះអនុជប្អូនភ្ញារត់ចូលព្រៃ ចាប់រាមព្រះលក្សណ៍ការពុំនាក់លើខ្នងដំរី ពលស្វាច្រើនក្រៃហែរក្សត្រា ពេលនោះពេវាយពេធាក់ឥតឧបមា អង្គកុមារពុំដឹងខ្លួនឡើយ គេយកមកដល់ពាក់កណ្តាលផ្លូវ ព្រះពាយបក់ផាត់ដឹងខ្លួនហើ ស្តេចទតមើលប្អូនភ្ញាមិនឃើញឡើយ ម្ល៉ោះហើយទ្រង់ព្រះកន្សែងថ្លែងសោកា ថាឱប្អូនអើយថ្ងៃនេះបងពិនបានឃើញមុខព្រះមាតា មិនបានឃើញមុខព្រះមុនីឥសីថា អូនអើយអូនក្ស័យជីវាចោលបងហើយ ឬមួយនៅឡើយចោលប្អូនពៅ រឿងនេះយើងឈប់ត្រង់នេះស្លេះទុកសិន ។

៧៨-និយាយពីជប់ព្រះលក្សណ៍ ដែលរត់ចូលព្រៃព្រឹក្សា ស្តេចសោះសោកាពុំមានស្បើយ មកដល់រាំងកល្បធំ ឃើញគន្លងបាទា ព្រះរៀម ហើយអ្នកសោយសោកាយំបាត់ស្មារតី ថាឱ ព្រះជេដ្ឋាព្រះរៀម បងបើព្រះអង្គក្ស័យជីវិតទៅថ្ងៃណា ប្អូនសុំក្ស័យជីវាទៅជាមួយបង ថាហើយស្តេច លីគ្រឿងបងនិងគ្រឿងកាយ ឆោមឆាយកន្សែងថ្លែងសោកា បានដើរមកដល់ដើមសោតធំព្រសុំសាខា កន្លែងដែលបងបាញ់សរពិ-សោធការ ស្តេចសោយសោកាសន្លប់លង់ កាលពេរោះព្រះពាយបក់បក ពពកផាត់ខ្ចាយខ្ចាត់ក្លិនផ្កាដូងដកម៉ៃ ក្លិនក្លែបក្រវែរបក្ររូបព្រៃ ក្បព្រៃផ្ទៃ ក៏ភ្ញាក់ព្រះស្មារតី ស្តេចក៏លីគ្រឿងបងនិងគ្រឿងកាយ ពីធ្នូសរព្រះខ័នជ័យ ចរចូលអាស្រមព្រះជីតា ឃើញព្រះមាតាហើយទៅឱបបាទា ឱបហើយអ្នកយំសោយសោកាទូលថា គេចាប់បងខ្ញុំទៅហើយ នាងសីតាកាលណាបើបានស្តាប់ព្រះអនុជអូន ម្ល៉េះហើយស័ព្ទសូន្យក្ស័យជីវា ថាឱ កូនអើយកូនមាសព្រះមាតា បើអ្នកក្ស័យទៅកាលណា ម្តាយក្ស័យផង ថាឱជប់ព្រះលក្សណ៍កូនមាសព្រះមាតា នៅចុះកូនណាម្តាយក្ស័យហើយ ថាហើយឱបអង្គព្រះកុមារ នាងសោយសោកាសន្លប់លង់ ភ្ញាក់ខ្លួនកាលណាទៅទូលពុទ្ធដីកាពាឥសី ដល់ហើយនាងសោយសោកាយំ ថាគេចាប់



ព្រះលក្សណ៍កូនខ្ញុំយកទៅហើយ ឥសីឆ្លើយថានាងកុំភ័យ យំសោកធ្វើអ្វីណាណាងអើយ តែប្រាំពីរថ្ងៃទៀតហោង រាមព្រះលក្សណ៍មកហើយ ចូរនាងសោកស្បើយកុំកើតទុក្ខ នាងសីតាទូលថា ខ្ញុំមិនជឿលោកតាទេ ម្ល៉េះហើយសបតេសម្លាប់បង់ ឥសីថា យើ៎ នាងចាំតាចូលទៅអភិញ្ញាណ្ណ ឥសីក៏ចូលទៅក្នុងព្រះអាស្រមពេញព្រះវិញ្ញាណព្រះកាយ ស្តេចរាមព្រាត់ ហើយលាញព្រះរក់ ឃើញរុក្ខទេវតាស្រីរក្សាព្រៃទាំងប្រុសទាំងស្រី រាស្ត្រនារីរន ឃើញគេយកថ្វាយបង្គំរាមព្រះលក្សណ៍ចៅអញ ឃើញរាមព្រះលក្សណ៍គង់លើបល្ល័ង្កទីទាំងខ្ពស់ រុក្ខទេវទាំងអស់ថ្វាយបង្គំ រាស្ត្រផងទាំងឡាយមកជួបជុំ ព្រះមុនីឥសីចេញមកវិញប្រាប់នាងសីតាថា ចូរនាងកុំភ័យភិតពិតបារម្ភ កូននាងបានជាធំ សោយរាជ្យនគរស្រីអយុធ្យា តែប្រាំពីរថ្ងៃសព្វទិវាបានសោយរាជ្យហើយ នាងសីតាថាមិនជឿទេ នាងសោយសោកយំក្រំឥតស្បើយ ឥសីលួងលោមនាងមិនបាត់ឡើយ ថាជប់ព្រះលក្សណ៍ចៅអើយ ទៅតាមបងឯងមក ជប់ព្រះលក្សណ៍ឮហើយថ្វាយបង្គំ ក្រោកហើយព្រះអង្គទៅយកគ្រឿងអលង្ការម្កុដកែវរចនាសង្វារទិព្វ ធ្នូសរព្រះខ័នជ័យរបស់បង នឹងគ្រឿងខ្លួនឯងយកទាំងអស់ វត្ថរាជសីតាកែវកល្យាណ កូនអើយយកព្រះទម្រង់ពីម្តាយទៅព្រះទម្រង់នេះបើ

បងទ្រង់ទៅកាលណាឃ្នាងខ្នោះ ពាងវាងជ្រួលច្រវ៉ាក់ សឹងតែធ្លាក់ចាក បែកខ្ចាត់ខ្ចាយ ទោះទ្រុងដែកដាយ៉ាងណាក្តី បើយកព្រះទម្រង់នេះទៅ ទ្រង់ហើយ ទ្រង់ដែកបាក់បែករស់គ្មានសេសសល់ ជបព្រះលក្សណ៍បាន ទទួលយកព្រះទម្រង់រត្ន បានលីធ្នូសរព្រះខ័នជ័យ ចរព្រាច់ក្នុងព្រៃព្នាន រូសវាន ។ រឿងព្រង់ណោះស្ងេះទុកសិន ថ្លែងទៅរាមព្រះលក្សណ៍ដែល គេចាប់បានដាក់លើខ្នងដីរសល្អបរិសុទ្ធ បរទ័ពចេញទៅនគរស្រីអយុធ្យា ព្រះនារាយណ៍រាមាអោយដាក់ទ្រុង ដាក់ទ្រុងដែកជាមហាវេទនា អោយពួក ពេជ្ឈឃាដទាំង ៤ យាមទ្រុងដែក បើជួប ៣ ថ្ងៃកាលណា ឯកអង្គក្សត្រា អោយបណ្តើរអាក្រោស ស្តេចបើកអោយវាយអោយធាក់កុំប្រណី អាចោរ ក្បត់ផែនដី កុំទុកវា ។ រឿងព្រង់ណោះស្ងេះទុកទៀត យើងថ្លែងទៅព្រះ ព្រហ្ម បើកទិព្វចក្ខុឃើញសុះសាយ ថាឃើព្រះនារាយណ៍រាមាយកក្មួនអេក ដាក់ទ្រុងដែក ជាមហាវេទនាបាន ៣ ទិវាអោយសម្លាប់ ថាហើយអង្គព្រះ ព្រហ្ម ប្រើទេពអប្សរ នាងនោះល្អឈ្មោះទេពធីតា អោយហោះមកជួយ ដោះទោសា នាងទេពធីតាកាលណាបើបានស្តាប់អង្គព្រះព្រហ្មមានព្រះឱង្ការ ព្រាស់ប្រើអាញ្ញាដូច្នោះហើយ នាងទៅយកគ្រឿងអលង្ការមកុដកែវរចនា នូវស្បៀប *(ស្បៃព្រួបស្បៃព្រះភូសា)* គ្រឿងទិព្វស្រីសួគ៌ា អារាបកន្ទាប



ព្រះសែងសព្វ គ្រប់ហើយ យកទឹកអប់ត្រឡប់រស់គន្ធានាងលាបព្រះកាយា ក្រអូបឈ្ងុយឈ្ងប់គ្រប់ទិសា នាងហោះត្រាមកនគរស្រីអយុធ្យា ពេលនោះ ជបព្រះលក្សណ៍ប្អូន យាត្រាដល់ក្រោមដើមពោធិជ្រៃ ប្របខឿននគរ ស្រីអយុធ្យា បើអែងបង្ហាញរូបកាយខ្លួនក្រែងគេសំលាប់បង ចូលពួនក្នុងរូង ព្រះជ្រៃ កាលណោះនាងស្រីទេពធីតា ចរចុះត្រង់ដើមជ្រៃជ្រែកមែកសាខា ក៏បានឃើញជបព្រះលក្សណ៍អង្គក្សត្រាអង្គុយយំ សួរថា អ្នកប្អូនអើយ ហេចឡើយអ្នកយំ ជបព្រះលក្សណ៍ទូលថា គេចាប់បានបងខ្ញុំ គេនឹង សម្លាប់ថ្ងៃស្អែកហើយ ទេពធីតាថា ប្អូនអើយកុំភិតភ័យបងមកដល់ហើយ ជួយអាសាអោយរួចជីវិតរាជកុមារ មិនអោយក្សត្រាសម្លាប់បាន នៃផ្តិល មាសនេះពីឋានសួគ៌ា អោយប្អូនទៅដងគង្គាមកអោយបង បងនឹងយកទៅ អោយរាមព្រះលក្សណ៍សោយ បានលាបបានលាងបានសោយហើយក៏បាន រួចកាលណោះជបព្រះលក្សណ៍ថា បើដូច្នោះខ្ញុំអរក្រៃកន្លង សុំផ្ញើព្រះ ទម្រង់រត្នទៅអោយបង ថាហើយអ្នកដងទឹកមកអោយនាង ដងបានហើយ អោយអង ទេពធីតា បានទទួលយកផ្តិលមាសមកហើយ ត្រាំព្រះទម្រង់ រត្ន នាងដើរព្រទេសព្រទន់ស៊ន់ភ្លន់ ប្រពៃល្អលើសទាំងស្រីផែនដីរកផ្ទឹម ពុំបាន នាងព្រាច់ចរសំដៅទៅត្រង់អ្នកទោសដែលនៅ យើងនឹងថ្លែងទៅ

ពេជ្ឈឃាតដែលចាំទ្រុង ឃើញនាងហើយក៏ភ្លូកមាត់បាត់ស្មារតី ទាំង ៤រន្ធា ញាណវិញ្ញាណ ខ្លះថា អញរើយកុំច្រើនភ្នា នេះសមបងវាល្អក្រៃ នេះហើយ ល្អលុបលើសផែនដី ទីងរករស់ស្រីផ្ទឹមពុំបាន នាងនិយាយទៅកាន់នាយ គុកថា ខ្ញុំសុំយកទៅអោយប្អូន ខ្ញុំសោយបានឬទេ ? អ្នកនាយទាំង ៤ថានាង អើយ យកទឹកទៅអោយចុះ គ្រានោះនាងក៏ចូលទៅ រាបព្រះលក្សណ៍ ឃើញហើយក្រាបថ្វាយបង្គំ នេះហើយម្តាយថៃររបស់ខ្ញុំ ចុះមកជួយដោះ ទុក្ខសារ នាងថា កូនអើយអ្នកសោយទឹកនេះទៅ បានតែ ៣ត្រឹកបុត្រមាតា នាងក៏ល្ងូកទឹកលាងកាយា ឃើញចិញ្ចៀនពោពរអ្នកក៏ទ្រង់ ថ្លែងពីធំពេក ដែលចង់រីតរឹងតឹងកាយា រលាយទាំងរស់មិនមានសល់ ទ្រុងដែកបាក់បែក រលាយទាំងរស់គ្មានសល់ចន្លោះសល់ត្រង់ណា នាងថា កូនអើយអ្នក ដើរតាមមាតា នាងនាំកុមារចេញមកដល់ដើមពោធិ៍ជ្រៃជ្រែកមែកសាខា ជបព្រះលក្សណ៍ឃើញបងហើយក្រាបថ្វាយបង្គំ យកធ្នូសរខ័នជ័យថ្វាថ្វាយ ព្រះបង នាងទេពធីតាឃើញជុំប្អូនបងដូច្នោះហើយថា កូនមាតាទាំងពីរ ពង្ស ម្តាយលាសិនហើយអ្នកប្រុសថ្លៃ នាងហោះជ្រៀតច្រែលើអាកាសា ភ្លឺផ្លេកពេញមេឃចរយាត្រាទៅគង់ដូចដើមជាសុខសាន្ត ជបព្រះលក្សណ៍ ក៏បានសួរបងថា បងនេះមកពីណាល្អក្រៃ រាមព្រះលក្សណ៍ថា នេះហើយ



ក្រោយយើងពីដើម យល់ថាយើងមានក្រហើយចុះមកជួយ ថាហើយ នាំប្អូនត្រាច់ត្រសង យើងឈប់ស្ងេះត្រង់ណោះទុកសិន ។

៧៩- និយាយពីរានាយគុក ទើបភ្ញាក់ខ្លួន មើលទៅទ្រុងដែក ជារលាយរស់ មើលទៅចំណងដាច់រុះរាយ ក៏រត់ទៅថ្វាយបង្គំព្រះនា-រាយណ៍រាមាថា កុមារអ្នកទោសរត់បាត់ហើយ ព្រះនារាយណ៍រាមា ក្រេវក្រោធខ្លាំង អោយយកនាយគុកទាំង ៤ទៅសំលាប់ នាយប្រឌិតស្តាប់ហើយ ចរចូលទៅទូលព្រះនារាយណ៍នរបតី ហេតុអ្វីមនុស្សឥតបុណ្យអោយទៅ រក្សា អ្នកមានបុណ្យមិនដែលបាន គេអ្នកមានសិល្បរិទ្ធីអំណាចប្រាប់សត្រូវ ខ្ទបខ្ទាចទាំងផែនដី នាយគុកទាំង ៤ មានបុណ្យអ្វីបានជាព្រះអង្គប្រើទៅ រក្សា អ្នកបុណ្យរត់រួចទៅកាលណា អោយយកអ្នករក្សាទៅសម្លាប់ សម្លាប់ ភ្នាមិនបានទេ ភ្នាខំការពារមិនឈ្នះ គេមានបុណ្យធំណាស់ទប់មិនបាន បើសម្លាប់ហើយកើតកម្មពៀរវេរា ទុកវាអោយរស់នៅអង្គក្សត្រក្សាន្ត ព្រះ នារាយណ៍រាមាបានស្តាប់ហើយ ក៏អត់ទោសទុកវាទៅចុះ អោយរស់នៅបាន វាត្រឹមត្រូវច្បាប់បុរាណ ថាហើយក្សត្រក្សាន្តកេណ្ឌយោធា ព្រះរាមព្រះ លក្សណ៍ ភិរុតសមុទ្រទ្រត បួនអង្គារ លើកទ័ពតាមកុមារ ពលតឹកកងបាន ដល់ទៅវាលេកាលវាត កុមារទាំងពីរនាំបងប្អូនឈប់រង់ ថាយើងកុំទាន់

ចូលក្នុងទីព្រះអាស្រម យើងចាំច្បាំងនឹងស្តេច ៤អង្គ ប្រឡងពេញ ឲ្យប្រាកដអោយដឹងរិទ្ធិ បំណាច់បានរៀនពីគ្រូអាចារ្យ ស្តេចមកពីណាយើងត្រូវតែច្បាំង ថាហើយនាំគ្នាត្រៀមព្រួញ ព្រះនារាយណ៍រាមាតបឆ្លើយថា ឆ្លើយៗហើយថាយើ អាក្មេងតូចជៀសពីសរអញ បើមិនជៀសទេ អញនឹងបាញ់អោយក្ស័យ ជន្មាទាំងពីរពង្ស កុមារឆ្លើយថា ស្តេច ៤អង្គអោយលើកម៉ពទៅកុំនៅវង់ ខំតែមកច្បាំងក្ស័យជន្មា ព្រះនារាយណ៍រាមាបាញ់សរថ្លារារិទ្ធិចាន់ផ្កាញផ្លាហោះទៅជួសសូគានាយ សរនោះមិនបានបៀតបៀនអង្គកុមារ ហួសទៅព្រៃព្រឹក្សាហេមពាន្ត ពោធិសត្វទាំង ៤ព្រះអង្គ បាញ់សរទាំងអស់សរ មិនមកចំសោះ ហោះតែវាង ធ្លាក់ដល់ទៅនព្វមហាសមុទ្រ ញាប់ញ័រ រន្ធត់អោយអស្ចារ្យ កុមារពីរពង្សថ្លែងសរសងព្រះបិតា មិនបានបៀតព្រះអង្គឡើយណោ ហួសទៅឋានស្តេចត្រុឌ ច្បាំង ៣ទិវាជាគម្រប់ ទាំងថ្ងៃទាំងយប់គ្មានឈប់ឈរ ព្រះនារាយណ៍អស្ចារ្យខ្លាំងណាស់ ចោលចក្ររហ័សឮខ្ទរខ្ទរ កុមារគ្រវីព្រះខ័នចោលមកតនឹងចក្រ ព្រះនា-រាយណ៍ព្រះបិតា ចាក់ និងព្រះខ័ន កាប់ចាក់គ្នាលើអាកាសាមេឃា កើតភ្លើងភ្លឺច្រាល ព្រះនារាយណ៍ចូលទៅ កុមារចូលមកហូតព្រះខ័នកាប់គ្នាឮសូរខ្លាំងក្រៃ ផ្អើលសត្វហេមពាន្តនិព្វនៅពុំបាន រត់ចូលក្នុងរូងភ្នំ



កក្រើករំពើកដល់ឋានអាស្រម ឥសីថានាង នោះច្បាំងគ្នាទៀតហើយនាងរត្នរាជសីតា ពិតពុទ្ធដីកាឥសី ពេលនេះភិតភ័យមិនមានស្បើយ ឥសីថានាងកុំភ័យអ្វីឡើយ កូននាងនឹងបានសោយរាជ្យហើយណាចៅពារឿងព្រង់ណោះស្លេះទុកសិន ថ្លែងពីពោធិសត្វ ៤ព្រះអង្គ ចាប់សរតម្រង់បាញ់កុមារ លើកសរបាញ់កាលណោហើយកើតជាពុមាស ពុប្រាក់ ដាក់ល៉ែងអាហារមានឱជារស ដាក់បាយ ដាក់សុប្ប មានទាំងខូរខ មានទាំងញាំភ្លាកើតជាអាហារទិព្វរសឱជា កើតនំចំណើសព្វប្រការ មកថ្វាយកុមារអោយស្តេចសោយ កុមារមិនទាន់សោយទេបាញ់សរសិន បាញ់តម្រង់ចំក្បព្រាសរបែកជាផ្កាឈូកទៅថ្វាយ សរខ្លះក៏ក្លាយកើតជាផ្កាឈូករត្នទាំងគួរទៅថ្វាយព្រះនារាយណ៍រាមា កាលណោះកុមារពីរពង្សពត់ព្រះភ្នែនពែនព្រះបាទ ព្រះអង្គទ្រង់សោយអាហារ មានបាយ មានត្រី ចំណើសព្វប្រការ ព្រះបិតាខ្ញាល់ណោស់ ថ្លែងសរទៀត អោយសរផ្តាច់ជន្មជាតិកុមារ សរក្លាយជាឆ័ត្រមកបាំងអោយ សរខ្លះក្លាយជាសប្បធន់ *(ឡង់)* ច្រើនជាន់ត្រៀបត្រា សរខ្លះកើតជាផ្លិតបក់អោយកុមារ កាលណោះជបព្រះលក្សណ៍រាមព្រះលក្សណ៍សោយរួចហើយ លង់លុះថ្ងៃរសៀលជ្រៀលព្រះសុរិយាពោធិសត្វ ៤ ព្រះអង្គអស់កម្លាំងខ្លាំងណាស់ក៏ឈប់ច្បាំង កុមារពីរពង្សក៏

នោះទេ ព្រះនាងភាគ័រភាមាសួរទៅ វាជាកុមារដូចគេបិតព្រះបិតា កានជួបបានជុលទល់មុខគ្នា ព្រះនារាយណ៍រាមាសួរទៅថា កុមារឯង រូបល្អដូចទេវតា កូនស្តេចឯណាប្រាប់យើងមក កុមារមិនសុខចិត្តត្រូវតែ យើងសួរស្តេច ៤ព្រះអង្គ ប្រាប់នាមឈ្មោះមកយើងមុន ចាំយើងប្រាប់ ក្រោយ ព្រះនារាយណ៍រាមាប្រាប់ទៅថា អង្គអញនេះណាឈ្មោះព្រះរាម ប្អូនអញឈ្មោះព្រះលក្សណ៍ ប្អូនមួយទៀតឈ្មោះភិរុត មានប្អូនមួយទៀត ឈ្មោះសុមុទ្រទ្រុត យើងប្រាប់ឈ្មោះមុនរួចរស់ហើយ ត្រូវកុមារឆ្លើយ ប្រាប់យើងក្រោយ រាមព្រះលក្សណ៍ប្រាប់ទៅថា ខ្លួនយើងនេះណា ឈ្មោះរាមព្រះលក្សណ៍ ព្រះអនុជប្អូនយើងឈ្មោះ ជបព្រះលក្សណ៍ មាតា ក្សត្រីឈ្មោះសីតា លោកមានព្រះបន្ទូលថា ប្រាប់មកយើង កូនអើយ ព្រះបិតារបស់អ្នកនៅនគរស្រីអយុធ្យា មានរឿងរិទ្ធីឥតផ្ទឹមបាន សម្លាប់ អស់យក្សយង់ក្រុងអសុរា ក៏ស្លាប់អស់ ៧សណ្តាន ព្រះនារាយណ៍រាមាមាន ព្រះឱង្ការ ហៅស្រីលក្សណ៍អនុជាប្អូនភ្ជាចូលមកឆាប់ ព្រះលក្សណ៍ដល់ ហើយថ្វាយបង្គំព្រះជេដ្ឋាព្រះនារាយណ៍រាមាសួរថា ហៃប្អូនបង កាលបង អោយយកពីតាទៅសម្លាប់ ប្អូនកាប់ស្លាប់ហើយឬរស់នៅ ព្រះលក្សណ៍ ក៏ក្រាបទូលនឹងការ ហើយក្រាបទាសស្លាប់ក្រែងនៅក្បែរ ហើយក្រាបទាមុក



អោយរស់នៅក្រែងមានទោសា ទូលព្រះឱង្ការតាមតែត្រង់ មិនបានកាប់ទេ ព្រះជេដ្ឋា ខ្ញុំកាប់នាងកាលណាកើតផ្កាកម្រង កាប់គ្រប់ ៣ដងកើតទាំង អស់ សម្លាប់ព្រះនាងមិនស្លាប់សោះ ខ្ញុំបណ្តោយអោយនាងរត់ ព្រះនារាយ-ណ៍រាមា ទ្រង់ជ្រាបដូច្នោះហើយ ស្ទុះទៅឱបកុមារទាំងពីរពង្ស កុមារគេច រួចស្តេចចាប់ផុត ស្តេចដួលសន្លប់ ពេលនោះណា ។

៨០- កុមាររត់ចូលព្រះអាស្រម ដល់ហើយទៅឱបព្រះបាទព្រះ មាតា ទៅថ្វាយបង្គំព្រះអាចារ្យ ឥសីសួរថា អម្បាញ់ថ្ងៃមិញ ចៅច្បាំងនឹង អ្នកណា សួរស័ព្ទសរផ្លាឮខ្លាំងក្រៃ កុមារចាច្បាំងនឹងសម្តេចព្រះរាម ស្តេច ស្ទុះមកឱបខ្ញុំចាប់មិនបាន ខ្ញុំរត់មកថ្វាយបង្គំព្រះមាតា ឥសីប្រាប់ថា ព្រះបិតាឯងមែនហើយ ។ រឿងត្រង់ណោះយើងស្លេះនៅ យើងនឹងថ្លែង ទៅព្រះរាមាភ្ញាក់ដឹងខ្លួនឡើងកាលណា ឯអង្គក្សត្រាទាំង ៤ព្រះអង្គ ស្តេច លើកទ័ពតាមកុមារ ដល់ហើយស្តេចហ៊ុំជុំអាស្រម កាលណោះនាង សេតាភ័យណាស់ សោយសោកយំ ទៅពិតបុទ្ធដីកាតាឥសី លោកតាអើយ ទ័ពសង្គ្រាមជ័យមកច្រើនណាស់ ខ្ញុំភិតភ័យណាស់ណាលោកតា តា ឥសីខំងនោស់ ថាទ័ពមកពីណោ គ្នាច្បាំងចាញ់រត់ចូលអាស្រមហើយ ម្តេច ឡើយលើកទ័ពមកហ៊ុំទៀត ឥសីចេញមកពីអាស្រម ចូលទៅក្នុងកងទ័ព

ច្រើនជៀវជុំ ស្តេច ៤ព្រះអង្គឃើញឥសីព្រះមនី ចូលមកថ្វាយបង្គំអង្វរ ថា សុំលោកតាចូលទៅនិយាយរថរាជសេតា អោយចូលទៅសោយរាជ្យក្នុង នគរស្រីអយុធ្យា ព្រះនារាយណ៍រាមា ពិតពុទ្ធដីកាសុំអោយលោកតាជួយ អោយបាន ឥសីមានពុទ្ធដីកាថាកុំភ័យ អាចក្តីធានារ៉ាប់អោយបាន ឥសីមក ដល់ រត្នរាជសេតា ចៅតាពេលនេះនាងសេពសុខមេត្រី ព្រះនារាយណ៍រាមា បើកម៉ែពមក មកសុំយកនាងធ្វើអគ្គមហេសី នាងសេតាខឹងណាស់ថា កុំនិយាយ កាលដើមយកខ្ញុំមកសម្លាប់ បើខ្ញុំស្លាប់ទៅធានអោយលោកធ្វើ អាកេតិ៍ លោកតាវិលត្រឡប់ទៅប្រាប់ព្រះនារាយណ៍រាមាវិញ រឿងត្រង់នោះ ខ្ញុំសុំផ្តាច់ក្តីស្នេហា កុំអោយលោកតាមកនិយាយខ្ញុំទៀតឡើយ ឥសីឮ ហើយទៅប្រាប់ព្រះនារាយណ៍រាមា ឥសីប្រាប់ថាមហារាជអាចក្តីធានា រឿងនេះមិនបាន នាងខំប្រកែកមិននៅទេក្សត្រក្សាន្ត កាលដែលមហា រាជយកនាងទៅសម្លាប់ បើនាងស្លាប់ទៅធានអោយលោកធ្វើមហេសី ព្រះ នារាយណ៍ប្រាប់ថា អាណិតខ្ញុំទៅព្រះមុនី សុំអោយលោកតាទៅនិយាយ ទីងនាងតាម ៣ដង ស្តេចប្រើទៅនាងប្រើមក មិនបានតបប៉ះពាល់នោះ ជា ម្តង ឥសីលាន់មាត់ថា យើប្រើអង្កត់ ( អង្កោក - ដើរអង្គុក ) ដូចទូកល្បូល ខ្លះជូន ខ្លះជូលបណ្តើរគ្នា ឥសីទៅមកជាច្រើនដង ទៅប្រាប់ព្រះនារាយណ៍



រាមា នាងដាច់ចិត្តយាពីមហារាជ អាត្មាភាពជួយពុំបាន កាលណោះក្សត្រ ទាំង ៤ព្រះអង្គ វារទៅចូលថ្វាយបង្គំព្រះមុនី បើនាងមិនទៅ ខ្ញុំសុំកូនទាំងពីរ ទៅសោយរាជាក្នុងបូរី ឥសីដឹងហើយ ហៅរាមព្រះលក្សណ៍ ចៅតាបិតា លួងលោមសុំអ្នកយកទៅសោយរាជ្យរម្យ តើចៅតាថាដូចម្តេច អ្នកប្រាប់ កុមារទាំងពីរបានដឹង រាមព្រះលក្សណ៍ ជាព្រះលក្សណ៍ ស្តាប់ពុទ្ធដីកា អាណិតបិតាពេកពេក ខ្ញុំសុំនាំគ្នាទៅប្អូនមិនបង ទៅសោយរាជរម្យក្រុង សីមា ឥសីស្តាប់ជាក់ហើយ ហៅរថរាជសីតា ថានាងអើយ ព្រះនារាយណ៍ រាមាសុំបុត្រទ្វេហាទាំងពីរពង្ស ចូលទៅសោយរាជ្យរម្យក្នុងបូរី នាងសេតា ថាមិនអីទេលោកតា បើកូនចង់ទៅនៅនឹងឪពុកបា ម្តាយឥតបើថា ណាកូនអើយ ឯត្រង់ខ្លួនម្តាយស៊ូស្លាប់មិនទៅឡើយ បើទៅហើយខ្មាស់ រាស្ត្រក្នុងបូរីគេថាឯង ស្រីក្បត់យកសាហាយ ក្បត់ប្តី ទៅធ្វើអ្វីនាំខ្មាស់គេ ។

៨១- កាលណោះអង្គព្រះនារាយណ៍រាមា នាំពលយោធា ហែរ កុមារលើកដាក់លើខ្នងដំរីសសុទ្ធ ហែររាជបុត្រទាំងពីរពង្ស ក្រាបលាឥសី ទាំង ៤អង្គ បរទ័ពកាត់ពម្រង់ កាត់ទៅនគរស្រីអយុធ្យា មកដល់ហើយ ទក្សិណបាន ៣ជុំ ទើបអង្គព្រះនារាយណ៍រាមា អោយរាមព្រះលក្សណ៍ ជាព្រះលក្សណ៍កូនពុំងា ចូលទៅគង់នៅក្រោមស្វេតឆ័ត្រ ចាត់អស់ស្នំ

៨០០០ឆ្នាំ ៨០០០ឆ្នាំ អោយបំរើ កាលណោះសុរិយាទោរទន់អាប់ទៅ រកាំងភ្នំ ព្រះអង្គសោយសោកឃំពុំកានស្បើយ ទ្រង់ព្រះកន្សែងទូញថា ឱ ! សីតា មាសបងអើយ បងបានឃើញតែមុខកូន ឯអង្គព្រះប្អូនពុំឃើញឡើយ ថាហើយត្រាស់ហៅស្រីលក្សណ៍អនុជា ថាអ្នកមាសពុំងាប្អូនបងអើយ អូនទៅនិយាយនាងសីតាអោយបងហើយ បងទុក្ខពេកស្បើយណាប្អូនណា ព្រះលក្សណ៍អនុជា បានស្តាប់ព្រះអង្គ បានប្រើប្រាណ ស្តេចថ្វាយបង្គំ ក្រាបលុតលាយកគ្រឿងអលង្ការមកទ្រង់ហើយ ស្តេចយកសេះសល្អ បរិសុទ្ធ ព្រះអង្គផាយផែនលើមនោម័យ ស្តេចហោះលើអាកាសខ្វាំង ចំបុត បានដល់មកអាស្រមព្រះមុនីពាឥសី ថ្វាយបង្គំលោកតា និងព្រះនាង ទូលថា អោយព្រះបងទៅសេពសុខបេត្រី សោយរាជ្យនៅក្រុងនគរ ស្រីអយុធ្យារាជបុរី នឹងព្រះរាជជេដ្ឋាព្រះរាមបង នាងសីតាស្តាប់ហើយក៏ ឆ្លើយវឹង ថាអូនអើយ អូនពៅអ្នកមាសបង បងនេះមិនទៅទេកុំសាសង ប្អូន ឯងមើលស្លឹកឈើណាដែលទុំហើយជ្រុះពីទង បើវាទៅជាប់នឹងទងវា នោះ វិញទៅ អង្គអញនេះទៅនៅនឹងបងឯងវិញបាន កាលណោះអង្គព្រះ លក្សណ៍អង្វរស្តេចម្តានាងមិនព្រម ក៏ថ្វាយបង្គំពាឥសី បើកបរមនោម័យ ហោះជ្រៀវព្រៃ បានដល់នគរស្រីអយុធ្យារាជក្រុងព្រៃ ទៅទូលអង្គ



ព្រះរាមា ព្រះរៀមបង ព្រះរាមាសោយសោកយំពេកកន្លង ប្រើព្រះ លក្សណ៍អនុជាទៅមិនបានការ ទើបអង្គក្សត្រាហៅភិរុត ភិរុតឮហើយ ចូលថ្វាយព្រះបង្គំ ព្រះអង្គត្រាស់ថា ភិរុតអូនបងនឹងប្រើប្អូនទៅនិយាយ នឹងរាជសេតា ភិរុតឮហើយថ្វាយបង្គំអង្គក្សត្រា ស្តេចយកអស្សពាហ៍សេះ ល្អព្រៃក្សត្រថ្លៃឡើងគង់លើខ្នង ស្តេចហោះជ្រៀវព្រៃដល់អាស្រមចរចុះ ថ្វាយបង្គំដល់ឥសី ទៅថ្វាយបង្គំរថរាជសេតា ថាខ្ញុំកាន់អាជ្ញាព្រះរៀម ច្បង អោយយកព្រះនាងត្រាច់ទៅផង ទៅអោយសោយរាជ្យរម្យក្មេងបុរី នាងឮ ភិរុតទូលដូច្នោះហើយ ថាភិរុតអើយកុំនិយាយ អញមិនទៅទេ កុំអង់ ចិត្ត ឧបមាប័ដូចកន្សែកសណ្តោះ ( *កំបាក ស្តោះ* ) បុគ្គលគេស្តោះទៅ នឹង ដី មិនដែលនរណាលេបមកវិញបាន ចិត្តសេតាដាច់ប៉ុណ្ណោះឯង កុំអ្នកថ្លា ថ្លែងទៅទៀតឡើយ ភិរុតស្តាប់ហើយផាយផែនរាជមនោម័យ បើកបរ វិលមកក្រុងព្រៃ ស្រីអយុធ្យារាជបុរី ព្រះនារាយណ៍រាមាចាំមើលផ្លូវមិន ឃើញបាននាងទៅទេ សោយសោកសន្ធប់ ពេលនោះក្រោយមួយទៀត ប្រើសមុទ្រទ្រុត ប្អូនអើយឡើងមកអញប្រើបា ឱ្យហោះទៅព្រះអាស្រម ព្រះមុនីទៅនិយាយសីតាអោយបងទៀត សមុទ្រទ្រុតស្តាប់ហើយ ថ្វាយ បង្គំ មកចាប់សេះ ១ ធំស្លាំងហៅហាន ជិះសេះកាត់តម្រង់ត្រង់អាស្រម

ដល់ហើយថ្វាយបង្គំព្រះឥសី ទៅនិយាយរាជសេតា រាជក្សត្រី ព្រះនារាយណ៍ប្រើខ្ញុំមកអោយនិយាយសុំម្ចាស់ក្សត្រី ទៅសោយរាជ្យរម្យ នាងសេតា មានវាចាថា ភិរុតអើយអញមិនទៅទេណា ហើយបាងមើលថ្ងដា ឯណាធំ បើបែកផែនធរា ហើយមិនជាប់វិញបាន ចិត្តសេតានេះកាត់រាល័យពីបងឯងហើយ ចាកុំមកទៀតឡើយអោយរំខាន ភិរុតក៏ឡើងផាយហោះឆ្ពុងរាជបនោប័យ បើកបរិពៃវិលវ៉ង់ថ្កាន ព្រះនារាយណ៍រាមាតែងមើលផ្លូវ រនុជទៅក្រាបទូលមិនបាន ពេលនោះក្សត្រក្សាន្តសោយសោកសម្លប់សេង ស្តេចស្មាងក្រោកហើយ ត្រាស់ប្រើសហនុមាន ថា រាជក្រប៊ីក្រពៃរស្នាតគុទ្ធ អញប្រើកាធំកុត ទៅនិរាសពិរោកធូរាណ នាងទៅក្នុងរាត្រីរឥសីព្រះមុនី កន្ទុកទុកពួរហើយថ្វាយបង្គំវិសម ហើយលេកគ្រឿងអលង្ការមកទ្រង់ ក៏កាន់ព្រះខ័ន សៀតសឹកព្រះកាយា ហៀវហោះយាត្រាលឿនដូចខ្យល់ ដល់ហើយចូលទៅថ្វាយបង្គំនាងសេតា ព្រះបបាតស័ថាសុំព្រះនាងសេពសុខមេត្រី ព្រះរាមម្ចាស់ខ្ញុំ ប្រើខ្ញុំមកអោយនិយាយថាក្សត្រីទៅសោយរាជ្យ នាងមានព្រះសុវណ្ណីថា សហនុមាន អញមិនបានទៅទេបាបុត្រព្រះពាយ សហនុមានពទូលថា មិនទៅឯណាក៏បាន ព្រះអវតានលើត្បូងសិរសា អោយខ្ញុំមកយកក្សត្រីទៅអោយបាន



ព្រះនាងអាក់ខានមិនបានទៅ ព្រះនារាយណ៍រាមាលោកក្សិណក្ស័យ កាលខ្ញុំមកមានបណ្តាំ បាបុត្រហនុមានយកនាងអោយបានកុំខានឡើយ បើមិនឃើញហើយ អញក្សិណក្ស័យ ព្រះនាងមិនបានយាងទៅទេ ព្រះនារាយណ៍រាមាចូលទិវង្គត នាងសីតាថា អើសហនុមាន បើភស្តាព្រះស្វាមីលោកចូលទិវង្គត ទៅពេលណា ត្រូវឯងអោយអោកអញទៅ សោកាចួញអឹងចុងជើង ពេលនេះបាវិលទៅវិញចុះ សហនុមាន កាលណាបើបានស្តាប់ព្រះសុវណ្ណីដូច្នោះហើយ ក៏ថ្វាយបង្គំលុតលាហៀវហោះផ្លេកផ្លោះសំដៅមកដល់នគរស្រីអយុធ្យា ឡើងទៅថ្វាយបង្គំព្រះនារាយណ៍រាមាព្រះអង្គក៏មេតបើមេទៅមិនឃើញ វត្តរាជសេតាមកផង ដូច្នោះហើយ ព្រះអង្គក៏លោកសោកាសូញ្ញតរាវ ពញ្ញូវតង់ ពាំងពីថ្ងៃនោះតទៅ ព្រះរាកាយ៍សោក ១ថ្ងៃ ៧ ដង ។

៨២- សហនុមានដឹងថាម្ចាស់លើត្បូងសោកាសៅហ្មង មើលទៅព្រាននរណោចូលទៅបន្ទូរព្រះអង្គ អោយបានធូព្រះសោក ហនុមានបានតែអញទៅបន្ទូរ ព្រះអង្គកុំអោយសោយសោកាឡើយ ថាហើយ ក៏ចូលទៅក្រាប់ថ្វាយបង្គំ ព្រះនារាយណ៍រាមា សុំព្រះរាជាលើត្បូងសិរសា កុំសោយសោកាតែរាល់ថ្ងៃ រឿងទុកងារអោយខ្ញុំឯង កុំសោយសោកទ្រង់ព្រះ

កន្សែងអោយសប្បាយទៅ ចេញទៅកក់ស្រង់ហើយ សោយក្រយាអោយសប្បាយ ព្រះចិន្តាព្រះអង្គឯង ទ្រង់ព្រះកន្សែងធ្វើអ្វីរឿងប៉ុណ្ណេះៗ ព្រះនា-រាយណ៍រាមា កាលណាបានឮ សេនាស្វាសសុទ្ធបុត្រព្រះពាយថាដូច្នោះហើយ មួយទិវាទៀតហនុមានក៏បានចូលទៅថ្វាយព្រះបង្គំ អោយព្រះអង្គតាមយោបល់របស់ខ្ញុំ ថ្វាយព្រះបង្គំគិតធ្វើបុណ្យ ធ្វើមេនបញ្ចប បន្ទប់អោយសព្វគ្រប់ អោយមានដងទង់ហង្សបក្សី អោយរាស្ត្រប្រុសស្រីកោរទាំងអស់គ្នា អោយស្លៀកសុទ្ធពែសទាំងអស់គ្នា គិតធ្វើមេនមាស ឱកាសពណ្ណ៌រាយ រូបភាពទាំងឡាយគួរសព្វសព្វ ហើយអោយមានភ្លេងយាបខ្មោចគួរអាណោចអាធ៌ត អោយមានលោកសង្ឃសូត្របង្សុកូល អោយធ្វើកោរមាស ( *ភ្ញារខ្មោច* ) ឱភាសពណ្ណ៌រាយ អោយអ្នកយំយាមកំដរខ្មោច ខ្ញុំនឹងទៅយកនាងសីតា អោយព្រះអង្គចូលទៅផ្ទំក្នុងហោបមាស ព្រះនារាយណ៍រាមាឮដូច្នោះហើយ ថាអើបាហនុមានអើយ ត្រូវដូចជាឯងថា កាលណោះអង្គព្រះនារាយណ៍រាមា ចូលទៅក្នុងហោបមាស អោយរាស្ត្រស្រីប្រុសកោរទាំងអស់គ្នា កោរពុំអោយសល់ កម្លោះក្រមុំកោរទាំងអស់គ្នា ហនុមានឯងកោរមួយចំហៀង ទុកមួយចំហៀង សំពត់សស្លៀកមួយចំហៀង សំពត់ខ្មៅមួយចំហៀង ហើយក៏ហោះ ទៅអាស្រមព្រះឥសី ដល់ទៅមុខនាងសេតាកែវកល្យាណដល់ហើយ ប្រាសប្រាណធ្វើសន្លប់ នាងសីតាឃើញ



ហើរហៅគួរកោតកោរ ហៃកាបុត្រព្រះពាយ ក្តាយឃើញអ្នកយំបោកខ្លួនសន្លប់បាត់ស្មារតី ក្រែក្រយ៉ាងណាបុត្រព្រះពាយ ចូរអ្នកប្រាប់ម្តាយអោយដឹងក្តី ហនុមានលើកដៃថ្វាយបង្គំ ហើយយំផងថា កាលថ្ងៃម្សិលមិញម្ចាស់ប្រើខ្ញុំមកមិនឃើញព្រះនាងយាងទៅឡើយ ម្ល៉ោះហើយព្រះអង្គក៏អត់ដង្ហើបចូលទិវង្គត រាជសេតាកែវកល្យាណ កាលណាបើបានស្តាប់បាហនុ-មាន ថាព្រះនារាយណ៍រាមា ព្រះអង្គចូលទិវង្គតដូច្នោះហើយ ទប់មិនបានព្រះនាងសោយសោកា អោយដល់ចក្រា ( *ព្រះអ្នកមានបុណ្យធំ* ) ប្អូនគ្មានឃើញដល់រូបព្រះអង្គ ព្រះអង្គក៏ចូលទិវង្គតផុតបាត់ស្មារតី បាហនុមានអើយនាំអញទៅអោយឆាប់ប្រញាប់ ឆាប់ដល់សពព្រះអង្គ ហនុមានក៏លាតបាតដៃអោយនាងឡើងគង់ហើយ ក៏ស្ទុយទៅកណ្តាលអាកាសា នឹកឡើងការបរោក៏ចង់សើច នាងថាហនុមានហេតុអ្វី ហនុមានទូលថា ខ្ញុំយំព្រលឹត អាណិតព្រះអង្គចូលទិវង្គត លុះហោះមកដល់នគរស្រីអយុធ្យាឃើញរាស្ត្រស្រីប្រុសទាំងអស់គ្នា កោរសក់ស្លៀកស នាងក៏ស្ងួនស្បសព្វ សន្លប់លង់ ភ្ញាក់ឡើងកាលណា ថាឱព្រះជេដ្ឋាព្រះស្វាមីលោកចូលទីវង្គតមែនហើយ ទៅអំពីនោះទៅ ក៏ឃើញមេនមាសឱភាសពណ្ណ៌រាយ ជឿនថាហនុមាន កូនអើយអ្នកទន់ទាបដាក់ម្តាយអោយទៅថ្វាយបង្គំព្រះអង្គ ហើយទៅឃើញសង្ឃសូត្របង្សុកូល ឮសូរស័ព្ទភ្លេងយាបខ្មោច

ព្រះរាមណោចតួរអាណិត ហនុមានដាក់អង្គព្រះនាងបៀតហោមមាស ព្រះនាងក៏ចុះចាករំពីបាតដៃហនុមាន ឱនឱបសពសន្លប់លង់ ព្រះនារាយណ៍រាមាក៏បានដឹង ថានាងសន្លប់ដូច្នោះហើយ ក៏ចេញរំពីកោដ្ឋមាស ឱបអង្គព្រះនាងសេតាកែវកញ្ញាណ ក្រើតទៅក៏ញ៉ាំងកាត់ក្សាវពី នាងសេតាបានបើកព្រះនេត្រា ឃើញព្រះកាយាឃើញព្រះបង ស្ដែងស្ដេចបីព្រះនាងព្រះនាងដាក់លើភ្លៅ នាងសេតាពិតថា ឱព្រះនារាយណ៍រាមា លោកបំរក្សៀយជម្នាងណេក ពិតដូច្នោះហើយ នាងស្ទុះចុះពីភ្លៅ ព្រះនារាយណ៍រាមារត់ចេញ ស្ដេចក៏លាន់មាត់ថា ណាពេក្ខុកោងជួយ ព្រោះហើយរាងថា នាងគង្គឹងជួយ នាងសេតាពេលនោះក៏ធ្លាក់ទៅនៅលើឋានពិភពនាគនាយ នាគក៏ឃើញព្រះនាងដូច្នោះហើយ ក៏ចាត់ស្រីស្នំក្រមការ ៥០០០ ឆ្វេង ៥០០០ស្ដាំ អោយរក្សានៃព្រះនាង ។

៨៣– និយាយពីព្រះនារាយណ៍រាមា កាលណាបានឃើញនាងគង្ហឹងជួយនាងដូច្នោះហើយ ក៏ទ្រង់សោយសោកពុំមានស្បើយ យំសន្លប់មួយថ្ងៃ ៧ ដង ព្រះព្រហ្មបើកទិព្វចក្ខុថា ឱព្រះនារាយណ៍រាមាមានទុក្ខសោយសោការកនាងខ្លាំងណាស់ បើអញមិនទៅជ្រែកផែនដីនព្វមហាសមុទ្រទៅយកនាង ព្រះរាមនឹងចូលទីវង្គត ថាតែដូច្នោះហើយ អង្គព្រះព្រហ្មជ្រែកនព្វមហាសមុទ្រ ដល់ទៅឋានពិភពនាគនាយ រត្នរាជសីតា បើបានឃើញ



ហើយចូលមកថ្វាយបង្គំ ព្រះព្រហ្មសួរថា ម៉េចព្រះនាង នាងដាច់អាល័យពីព្រះរាមហើយឬនៅឡើយ អញមកដល់ហើយ អញយកនាងទាល់តែបាន នាងថា បើលោកគ្រូម្ចាស់ យកខ្ញុំទៅអភិសេក ខ្ញុំក៏សុខចិត្តទៅតាមដោយនូវប្រាថ្នា ព្រះព្រហ្មពរនាងជ្រែកនព្វមហាសមុទ្រ ហោះទៅឋានសួគ៌ា ដល់ហើយប្រើអង្គព្រះឥន្ទ្រា អោយមកពរព្រះនារាយណ៍រាមានៅនគរស្រីអយុធ្យា យកទៅអភិសេកនឹងនាងសីតាឋានសួគ៌ា ទេពអប្សរបរិវកញ្ញា ទេវបុត្រ ទេវតាច្រើនសល់ ព្រះព្រហ្មអោយស្រីទេពអប្សរអោយតែងរត្នរាជសីតា អោយមានទាំងគ្រឿងក្រអូបទាំង ៧ ប្រការ អង្គព្រះឥន្ទ្រតែងព្រះនារាយណ៍រាមា យកទៅអភិសេកនឹងនាងសីតា ពាចិនមិវាជាគប្រប់ហើយហោះហែរព្រះរាមា នឹងសីតា មកអោយសោយរាជ្យរម្យក្នុងនគរស្រីអយុធ្យា ឥន្ទ្រ ព្រហ្ម ទេវបុត្រ ទេវតា សូធ្យជ័យស្ដុតិចំរើនសុខតាំងពីថ្ងៃនេះតទៅ កុំព្រាត់ប្រាស អោយបានសេចក្ដីសុខ សេចក្ដីចំរើនអាយុៈ អាយុសវែងយ៉ឺនឆ្នាយ សត្រូវទាំងឡាយក៏ខ្លបខ្លាច ជាសួររេចចប់ប៉ុណ្ណេះហើយហោង ។

**ចប់**

